# ព្រះ

# ត្រៃបិដកបាលី

និង

## សេចក្ដីប្រែជាភាសាខ្មែរ

# អភិធម្មបិដក

## វិភង្គ បឋមភាគ

# ៨០

បោះពុម្ពលើកទី ១



ពុទ្ធសាសនបណ្ឌិត្យ ភ្នំពេញ

ព.ស ២៥០៧

# វិភង្គស្ស បឋមោ ភាគោ

នមោ តស្ស ភគវតោ អរហតោ សម្មាសម្ពុទ្ធស្ស ។

## ខន្ធវិភង្គោ

(១) បញ្ចក្ខន្ធា រូបក្ខន្ធោ វេទនាក្ខន្ធោ សញ្ញាក្ខន្ធោ សង្ខារក្ខន្ធោ វិញ្ញាណក្ខន្ធោ ។

(២) តត្ថ កតមោ រូបក្ខន្ធោ ។ យំកិញ្ចិ រូបំ អតីតានាគតបច្ចុប្បន្នំ អជ្ឈត្តំ វា ពហិទ្ធា វា ឱឡារិកំ វា សុខុមំ វា ហីនំ វា បណីតំ វា យំ ទូរេ សន្តិកេ វា តទេកជ្ឈំ អភិសញ្ញូហិត្វា អភិសង្ខិបិត្វា អយំ វុច្ចតិ រូបក្ខន្ធោ ។

(៣) តត្ថ កតមំ រូបំ អតីតំ ។ យំ រូបំ អតីតំ និរុទ្ធំ វិគតំ វិបរិណតំ អត្ថង្គតំ អព្ភត្ថង្គតំ ឧប្បជ្ជិត្វា វិគតំ អតីតំ អតីតំសេន សង្គហិតំ ចត្តារោ ច មហាភូតា ចតុន្នញ្ច មហាភូតានំ ឧបាទាយ រូបំ ឥទំ វុច្ចតិ រូបំ អតីតំ ។ តត្ថ កតមំ រូបំ អនាគតំ ។ យំ រូបំ អជាតំ អភូតំ អសញ្ជាតំ អនិព្វត្តំ អនភិនិព្វត្តំ អបាតុភូតំ អនុប្បន្នំ អសមុប្បន្នំ អនុដ្ឋិតំ



# វិភង្គ បឋមភាគ

សូមនមស្ការចំពោះព្រះមានព្រះភាគ អរហន្ត សម្មាសម្ពុទ្ធអង្គនោះ ។

## ខន្ធវិភង្គ

(១) ខន្ធ ៥ គឺ រូបក្ខន្ធ វេទនាក្ខន្ធ សញ្ញាក្ខន្ធ សង្ខារក្ខន្ធ វិញ្ញាណក្ខន្ធ ។

(២) បណ្ដាខន្ធទាំង ៥ នោះ រូបក្ខន្ធ តើដូចម្ដេច ។ រូបណាមួយ ជាអតីត អនាគត បច្ចុប្បន្ន ដែលជាអជ្ឈត្តរូប (រូបខាងក្នុង) ក្ដី ពហិទ្ធារូប (រូបខាងក្រៅ) ក្ដី ឱឡារិករូប (រូបគ្រោតគ្រាត) ក្ដី សុខុមរូប (រូបល្អិត) ក្ដី ហីនរូប (រូបថោកទាប) ក្ដី បណីតរូប (រូបថ្លៃថ្លា) ក្ដី ទូររូប (រូបក្នុងទីឆ្ងាយ) ក្ដី សន្តិករូប (រូបក្នុងទីជិត) ក្ដី នេះហៅថា រូបក្ខន្ធ ព្រោះប្រមូលបញ្ចូលនូវរូបទាំងអស់នោះ ក្នុងទីជាមួយគ្នា ។

(៣) បណ្ដារូបទាំងនោះ រូបជាអតីត តើដូចម្ដេច ។ រូបណា កន្លងទៅ រលត់ទៅ ប្រាសទៅ ប្រែប្រួលទៅ អស់ទៅ ដាច់បង់ទៅ កើតហើយប្រាសទៅវិញ ជាអតីត សង្គ្រោះដោយចំណែកជាអតីត បានដល់ មហាភូតរូប ៤ ផង ឧបាទាយរូបនៃមហាភូតរូប ៤ ផង នេះហៅថា រូបជាអតីត ។ បណ្ដារូបទាំងនោះ រូបជាអនាគត តើដូចម្ដេច ។ រូបណាមិនទាន់កើត មិនទាន់មាន មិនទាន់ដុះដាល មិនទាន់វិលមក មិនទាន់ត្រឡប់មក មិនទាន់ប្រាកដ មិនទាន់លេចឡើង មិនទាន់ដុះឡើង មិនទាន់តាំងឡើង

អសមុដ្ឋិតំ អនាគតំ អនាគតំសេន សង្គហិតំ ចត្តារោ ច មហាភូតា ចតុន្នញ្ច មហាភូតានំ ឧបាទាយ រូបំ ឥទំ វុច្ចតិ រូបំ អនាគតំ ។ តត្ថ កតមំ រូបំ បច្ចុប្បន្នំ ។ យំ រូបំ ជាតំ ភូតំ សញ្ជាតំ និព្វត្តំ អភិនិព្វត្តំ បាតុភូតំ ឧប្បន្នំ សមុប្បន្នំ ឧដ្ឋិតំ សមុដ្ឋិតំ បច្ចុប្បន្នំ បច្ចុប្បន្នំសេន សង្គហិតំ ចត្តារោ ច មហាភូតា ចតុន្នញ្ច មហាភូតានំ ឧបាទាយ រូបំ ឥទំ វុច្ចតិ រូបំ បច្ចុប្បន្នំ ។

(២) តត្ថ កតមំ រូបំ អជ្ឈត្តំ ។ យំ រូបំ តេសំ តេសំ សត្តានំ អជ្ឈត្តំ បច្ចត្តំ និយកំ បាដិបុគ្គលិកំ ឧបាទិន្នំ ចត្តារោ ច មហាភូតា ចតុន្នញ្ច មហាភូតានំ ឧបាទាយ រូបំ ឥទំ វុច្ចតិ រូបំ អជ្ឈត្តំ ។ តត្ថ កតមំ រូបំ ពហិទ្ធា ។ យំ រូបំ តេសំ តេសំ បរសត្តានំ បរបុគ្គលានំ អជ្ឈត្តំ បច្ចត្តំ និយកំ បាដិបុគ្គលិកំ ឧបាទិន្នំ ចត្តារោ ច មហាភូតា ចតុន្នញ្ច មហាភូតានំ ឧបាទាយ រូបំ ឥទំ វុច្ចតិ រូបំ ពហិទ្ធា ។

(៣) តត្ថ កតមំ រូបំ ឱឡារិកំ ។ ចក្ខាយតនំ ។ បេ ។ ផោដ្ឋព្វាយតនំ ឥទំ វុច្ចតិ រូបំ ឱឡារិកំ ។ តត្ថ កតមំ រូបំ សុខុមំ ។



មិនទាន់ស្ទុះឡើង ជាអនាគត សង្គ្រោះដោយចំណែកជាអនាគត បានដល់មហាភូតរូបទាំង ៤ ផង ឧបាទាយរូប នៃមហាភូតរូប ៤ ផង នេះហៅថា រូបជាអនាគត ។ បណ្ដារូបទាំងនោះ រូបជាបច្ចុប្បន្ន តើដូចម្ដេច ។ រូបណា កំពុងកើត កំពុងមាន កំពុងដុះដាល កំពុងវិលមក កំពុងត្រឡប់មក កំពុងប្រាកដ កំពុងលេចឡើង កំពុងដុះឡើង កំពុងតាំងឡើង កំពុងស្ទុះឡើង ជាបច្ចុប្បន្ន សង្គ្រោះដោយចំណែកជាបច្ចុប្បន្ន បានដល់មហាភូតរូបទាំង ៤ ផង ឧបាទាយរូបនៃមហាភូតរូប ៤ ផង នេះហៅថា រូបជាបច្ចុប្បន្ន ។

(២) បណ្ដារូបទាំងនោះ អជ្ឈត្តរូប តើដូចម្ដេច ។ រូបណា ជាខាងក្នុង អាស្រ័យខ្លួន កើតចំពោះខ្លួន ជារូបរបស់បុគ្គលម្នាក់ៗ ដែលឧបាទានក្ដោបកាន់មាំ របស់សត្វទាំងឡាយនោះៗ បានដល់មហាភូតរូបទាំង៤ផង ឧបាទាយរូប នៃមហាភូតរូប៤ផង នេះហៅថា អជ្ឈត្តរូប ។ បណ្ដារូបទាំងនោះ ពហិទ្ធារូប តើដូចម្ដេច ។ រូបណាជាខាងក្នុង អាស្រ័យខ្លួន កើតចំពោះខ្លួន ជារូបរបស់បុគ្គលម្នាក់ៗ ដែលឧបាទានក្ដោបកាន់មាំ របស់ពួកសត្វដទៃ របស់ពួកបុគ្គលដទៃនោះៗ បានដល់មហាភូតរូបទាំង៤ផង ឧបាទាយរូប នៃមហាភូតរូប៤ផង នេះហៅថា ពហិទ្ធារូប ។

(៣) បណ្ដារូបទាំងនោះ ឱឡារិករូប តើដូចម្ដេច ។ ចក្ខាយតនៈ (អាយតនៈគឺចក្ខុ) ។ បេ ។ ផោដ្ឋព្វាយតនៈ (អាយតនៈគឺផ្សព្វ) នេះហៅថា ឱឡារិករូប ។ បណ្ដារូបទាំងនោះ សុខុមរូប តើដូចម្ដេច ។

ឥត្ថិន្ទ្រិយំ ។ បេ ។ កពឡីការោ អាហារោ ឥទំ វុច្ចតិ រូបំ សុខុមំ ។

(៦) តត្ថ កតមំ រូបំ ហីនំ ។ យំ រូបំ តេសំ តេសំ សត្តានំ ឧញ្ញាតំ អវញ្ញាតំ ហីឡិតំ បរិភូតំ អចិត្តីកតំ ហីនំ ហីនមតំ ហីនសម្មតំ អនិដ្ឋំ អកន្តំ អមនាបំ រូបា សទ្ទា គន្ធា រសា ផោដ្ឋព្វា ឥទំ វុច្ចតិ រូបំ ហីនំ ។ តត្ថ កតមំ រូបំ បណីតំ ។ យំ រូបំ តេសំ តេសំ សត្តានំ អនុញ្ញាតំ អនវញ្ញាតំ អហីឡិតំ អបរិភូតំ ចិត្តីកតំ បណីតំ បណីតមតំ បណីតសម្មតំ ឥដ្ឋំ កន្តំ មនាបំ រូបា សទ្ទា គន្ធា រសា ផោដ្ឋព្វា ឥទំ វុច្ចតិ រូបំ បណីតំ ។ តំ តំ វា បន រូបំ ឧបាទាយ ឧបាទាយ រូបំ ហីនំ បណីតំ ទដ្ឋព្វំ ។



ឥត្ថិន្ទ្រិយ (ឥន្ទ្រិយនៃស្ត្រី) ។ បេ ។ កពឡីការាហារ (អាហារដែលជាពំនូត) នេះហៅថា សុខុមរូប ។

(៦) បណ្ដារូបទាំងនោះ ហីនរូប តើដូចម្ដេច ។ រូបណារបស់សត្វទាំងឡាយនោះៗ ជារូបដែលគេមើលងាយ គេបៀតបៀន គេគ្របសង្កត់ គេមិនធ្វើសេចក្ដីគោរព ជារូបថោកថយ ដែលគេដឹងថាថោកថយ ដែលគេសន្មតថាថោកថយ ជារូបមិនគួរប្រាថ្នា មិនគួរត្រេកអរ មិនជាទីពេញចិត្ត បានដល់ រូប សំឡេង ក្លិន រស ផោដ្ឋព្វ នេះហៅថា ហីនរូប ។ បណ្ដារូបទាំងនោះ បណីតរូប តើដូចម្ដេច ។ រូបណា របស់សត្វទាំងឡាយនោះ ៗ ជារូបដែលគេមិនមើលងាយ គេមិនបៀតបៀន គេមិនគ្របសង្កត់ គេធ្វើសេចក្ដីគោរព ជារូបថ្លៃថ្លា ដែលគេដឹងថាថ្លៃថ្លា ដែលគេសន្មតថាថ្លៃថ្លា ជារូបគួរប្រាថ្នា គួរត្រេកអរ គួរពេញចិត្ត បានដល់ រូប សំឡេង ក្លិន រស ផោដ្ឋព្វៈ នេះហៅថា បណីតរូប ។ មួយទៀត ហីនរូប បើប្រៀបផ្ទឹមនឹងរូប[១]នោះ ៗ បណ្ឌិតគប្បីប្រាប់ថា ជាបណីតរូបដែរ ។

---

១ រូបរបស់ពួកសត្វនាគគ្រុឌថោកថយទេ តែបើប្រៀបផ្ទឹមនឹងរូបរបស់ពួកសត្វនរក ទើបជារូបឧត្តមវិញ៖ រូបរបស់ពួកប្រេតថោកថយទេ តែបើប្រៀបផ្ទឹមនឹងរូបរបស់ពួកនាគ គ្រុឌ ទើបជារូបឧត្តមវិញ ។ ល ។ រូបរបស់ពួកអកនិដ្ឋទេវតា ឧត្តមជាងរូបរបស់ពួកមនុស្សទេវតា ។ អដ្ឋកថា ។

(៧) តត្ថ កតមំ រូបំ ទូរេ ។ ឥត្ថិន្ទ្រិយំ ។ បេ ។ កពឡីការោ អាហារោ យំ វា បនញ្ញម្បិ អត្ថិ រូបំ អនាសន្នេ អនុបកដ្ឋេ ទូរេ អសន្តិកេ ឥទំ វុច្ចតិ រូបំ ទូរេ ។ តត្ថ កតមំ រូបំ សន្តិកេ ។ ចក្ខាយតនំ ។ បេ ។ ផោដ្ឋព្វាយតនំ យំ វា បនញ្ញម្បិ អត្ថិ រូបំ អាសន្នេ ឧបកដ្ឋេ អវិទូរេ សន្តិកេ ឥទំ វុច្ចតិ រូបំ សន្តិកេ ។ តំ តំ វា បន រូបំ ឧបាទាយុបាទាយ រូបំ ទូរេ សន្តិកេ ទដ្ឋព្វំ ។

(៨) តត្ថ កតមោ វេទនាក្ខន្ធោ ។ យា កាចិ វេទនា អតីតានាគតបច្ចុប្បន្នា អជ្ឈត្តា វា ពហិទ្ធា វា ឱឡារិកា វា សុខុមា វា ហីនា វា បណីតា វា យា ទូរេ សន្តិកេ វា តទេកជ្ឈំ អភិសញ្ញូហិត្វា អភិសង្ខិបិត្វា អយំ វុច្ចតិ វេទនាក្ខន្ធោ ។

(៩) តត្ថ កតមា វេទនា អតីតា ។ យា វេទនា អតីតា និរុទ្ធា វិគតា វិបរិណតា អត្ថង្គតា អព្ភត្ថង្គតា ឧប្បជ្ជិត្វា វិគតា អតីតា អតីតំសេន សង្គហិតា សុខា វេទនា ទុក្ខា វេទនា អទុក្ខមសុខា វេទនា អយំ វុច្ចតិ វេទនា អតីតា ។ តត្ថ កតមា វេទនា អនាគតា ។ យា វេទនា អជាតា អភូតា អសញ្ជាតា អនិព្វត្តា



(៧) បណ្ដារូបទាំងនោះ ទូររូប តើដូចម្ដេច ។ ឥត្ថិន្ទ្រិយ ។ បេ ។ កពឡិង្ការាហារ ឬក៏រូបដទៃណា តែងមានក្នុងទីមិនជិត ក្នុងទីមិនប្រាកដ ក្នុងទីឆ្ងាយ ក្នុងទីមិនបង្កើយ នេះហៅថា ទូររូប ។ បណ្ដារូបទាំងនោះ សន្តិករូប តើដូចម្ដេច ។ ចក្ខាយតនៈ ។ បេ ។ ផោដ្ឋព្វាយតនៈ ឬក៏រូបដទៃណា មានក្នុងទីជិត ក្នុងទីប្រាកដ ក្នុងទីមិនឆ្ងាយ ក្នុងទីបង្កើយ នេះហៅថា សន្តិករូប ។ មួយទៀត ទូររូប បើប្រៀបផ្ទឹមនឹងរូបនោះៗ បណ្ឌិតគប្បីជ្រាបថា ជាសន្តិករូបដែរ ។

(៨) បណ្ដាខន្ធទាំងនោះ វេទនាខន្ធ តើដូចម្ដេច ។ វេទនាណាមួយ ជាអតីត អនាគត បច្ចុប្បន្ន ដែលជាអជ្ឈត្តវេទនាក្ដី ពហិទ្ធាវេទនាក្ដី ឱឡារិកវេទនាក្ដី សុខុមវេទនាក្ដី ហីនវេទនាក្ដី បណីតវេទនាក្ដី ទូរវេទនាក្ដី សន្តិកវេទនាក្ដី នេះហៅថា វេទនាខន្ធ ព្រោះប្រមូលរួមវេទនាទាំងអស់នោះ ក្នុងទីជាមួយគ្នា ។

(៩) បណ្ដាវេទនាទាំងនោះ វេទនាជាអតីត តើដូចម្ដេច ។ វេទនាណា កន្លងទៅ រលត់ទៅ ប្រាសទៅ ប្រែប្រួលទៅ អស់ទៅ ដាច់បង់ទៅ កើតហើយប្រាសទៅវិញ ជាអតីត សង្គ្រោះដោយចំណែកជាអតីត បានដល់សុខវេទនា ទុក្ខវេទនា អទុក្ខមសុខវេទនា នេះហៅថា វេទនាជាអតីត ។ បណ្ដាវេទនាទាំងនោះ វេទនាជាអនាគត តើដូចម្ដេច ។ វេទនាណា មិនទាន់កើត មិនទាន់មាន មិនទាន់ផុះដាល មិនទាន់លេចមក

អនភិនិព្វត្តា អបាតុភូតា អនុប្បន្នា អសមុប្បន្នា អនុដ្ឋិតា អសមុដ្ឋិតា អនាគតា អនាគតំសេន សង្គហិតា សុខា វេទនា ទុក្ខា វេទនា អទុក្ខមសុខា វេទនា អយំ វុច្ចតិ វេទនា អនាគតា ។ តត្ថ កតមា វេទនា បច្ចុប្បន្នា ។ យា វេទនា ជាតា ភូតា សញ្ជាតា និព្វត្តា អភិនិព្វត្តា បាតុភូតា ឧប្បន្នា សមុប្បន្នា ឧដ្ឋិតា សមុដ្ឋិតា បច្ចុប្បន្នា បច្ចុប្បន្នំសេន សង្គហិតា សុខា វេទនា ទុក្ខា វេទនា អទុក្ខមសុខា វេទនា អយំ វុច្ចតិ វេទនា បច្ចុប្បន្នា ។

[១០] តត្ថ កតមា វេទនា អជ្ឈត្តា ។ យា វេទនា តេសំ តេសំ សត្តានំ អជ្ឈត្តំ បច្ចត្តំ និយកា បាដិបុគ្គលិកា ឧបាទិន្នា សុខា វេទនា ទុក្ខា វេទនា អទុក្ខមសុខា វេទនា អយំ វុច្ចតិ វេទនា អជ្ឈត្តា ។ តត្ថ កតមា វេទនា ពហិទ្ធា ។ យា វេទនា តេសំ តេសំ បរសត្តានំ បរបុគ្គលានំ អជ្ឈត្តំ បច្ចត្តំ និយកា បាដិបុគ្គលិកា ឧបាទិន្នា សុខា វេទនា ទុក្ខា វេទនា អទុក្ខមសុខា វេទនា អយំ វុច្ចតិ វេទនា ពហិទ្ធា ។



មិនទាន់ត្រឡប់មក មិនទាន់ប្រាកដ មិនទាន់លេចឡើង មិនទាន់ផុះឡើង មិនទាន់តាំងឡើង មិនទាន់ស្ទុះឡើង ជាអនាគត សង្គ្រោះដោយចំណែកជាអនាគត បានដល់សុខវេទនា ទុក្ខវេទនា អទុក្ខមសុខវេទនា នេះហៅថា វេទនាជាអនាគត ។ បណ្ដាវេទនាទាំងនោះ វេទនាជាបច្ចុប្បន្ន តើដូចម្ដេច ។ វេទនាណា កំពុងកើត កំពុងមាន កំពុងផុះផាល កំពុងវិលមក កំពុងត្រឡប់មក កំពុងប្រាកដ កំពុងលេចឡើង កំពុងផុះឡើង កំពុងតាំងឡើង កំពុងស្ទុះឡើង ជាបច្ចុប្បន្ន សង្គ្រោះដោយចំណែកជាបច្ចុប្បន្ន បានដល់សុខវេទនា ទុក្ខវេទនា អទុក្ខមសុខវេទនា នេះហៅថា វេទនាជាបច្ចុប្បន្ន ។

[១១] បណ្ដាវេទនាទាំងនោះ អជ្ឈត្តវេទនា តើដូចម្ដេច ។ វេទនាណា ប្រព្រឹត្តទៅខាងក្នុង អាស្រ័យខ្លួន កើតចំពោះខ្លួន ជាវេទនារបស់បុគ្គលម្នាក់ៗ ដែលឧបាទានក្ដួបកាន់មាំ របស់សត្វទាំងឡាយនោះៗ បានដល់សុខវេទនា ទុក្ខវេទនា អទុក្ខមសុខវេទនា នេះហៅថា អជ្ឈត្តវេទនា ។ បណ្ដាវេទនាទាំងនោះ ពហិទ្ធាវេទនា តើដូចម្ដេច ។ វេទនាណា ប្រព្រឹត្តទៅខាងក្នុង អាស្រ័យខ្លួន កើតចំពោះខ្លួន ជាវេទនារបស់បុគ្គលម្នាក់ៗ ដែលឧបាទានក្ដួបកាន់មាំ របស់ពួកសត្វដទៃ របស់ពួកបុគ្គលដទៃនោះៗ បានដល់សុខវេទនា ទុក្ខវេទនា អទុក្ខមសុខវេទនា នេះហៅថា ពហិទ្ធាវេទនា ។

(១១) តត្ថ កតមា វេទនា ឱឡារិកា សុខុមា ។ អកុសលា វេទនា ឱឡារិកា កុសលាព្យាកតា វេទនា សុខុមា កុសលាកុសលា វេទនា ឱឡារិកា អព្យាកតា វេទនា សុខុមា ទុក្ខា វេទនា ឱឡារិកា សុខា ច អទុក្ខមសុខា ច វេទនា សុខុមា សុខទុក្ខា វេទនា ឱឡារិកា អទុក្ខមសុខា វេទនា សុខុមា អសមាបន្នស្ស វេទនា ឱឡារិកា សមាបន្នស្ស វេទនា សុខុមា សាសវា វេទនា ឱឡារិកា អនាសវា វេទនា សុខុមា តំ តំ វា បន វេទនំ ឧបាទាយ ឧបាទាយ វេទនា ឱឡារិកា សុខុមា ទដ្ឋព្វា ។

(១២) តត្ថ កតមា វេទនា ហីនា បណីតា ។ អកុសលា វេទនា ហីនា កុសលាព្យាកតា វេទនា បណីតា កុសលាកុសលា វេទនា ហីនា អព្យាកតា វេទនា បណីតា ទុក្ខា វេទនា ហីនា សុខា ច អទុក្ខមសុខា ច វេទនា បណីតា សុខទុក្ខា វេទនា ហីនា អទុក្ខមសុខា វេទនា បណីតា អសមាបន្នស្ស វេទនា ហីនា សមាបន្នស្ស វេទនា បណីតា



(១១) បណ្ដាវេទនាទាំងនោះ ឱឡារិកវេទនានិងសុខុមវេទនា តើដូចម្ដេច ។ វេទនាជាអកុសល ហៅថាឱឡារិកវេទនា វេទនាជាកុសលនិងអព្យាក្រឹត ហៅថាសុខុមវេទនា វេទនាជាកុសលនិងអកុសល ហៅថាឱឡារិកវេទនា វេទនាជាអព្យាក្រឹត ហៅថាសុខុមវេទនា វេទនាជាទុក្ខ ហៅថាឱឡារិកវេទនា វេទនាជាសុខផង មិនមែនទុក្ខមិនមែនសុខផង ហៅថាសុខុមវេទនា វេទនាជាសុខនិងទុក្ខ ហៅថាឱឡារិកវេទនា វេទនាជាអទុក្ខមសុខ ហៅថាសុខុមវេទនា វេទនារបស់បុគ្គលអ្នកមិនមានសមាបត្តិ ហៅថាឱឡារិកវេទនា វេទនារបស់បុគ្គលអ្នកមានសមាបត្តិ ហៅថាសុខុមវេទនា វេទនាប្រកបដោយអាសវៈ ហៅថាឱឡារិកវេទនា វេទនាមិនមានអាសវៈ ហៅថាសុខុមវេទនា មួយទៀត ឱឡារិកវេទនា បើប្រៀបផ្ទឹមនឹងវេទនានោះៗ បណ្ឌិតគប្បីជ្រាបថា ជាសុខុមវេទនាដែរ ។

(១២) បណ្ដាវេទនាទាំងនោះ ហីនវេទនានិងបណីតវេទនា តើដូចម្ដេច ។ វេទនាជាអកុសល ហៅថាហីនវេទនា វេទនាជាកុសលនិងអព្យាក្រឹត ហៅថាបណីតវេទនា វេទនាជាកុសលនិងអកុសល ហៅថាហីនវេទនា វេទនាជាអព្យាក្រឹត ហៅថាបណីតវេទនា វេទនាជាទុក្ខ ហៅថាហីនវេទនា វេទនាជាសុខផង ជាអទុក្ខមសុខផង ហៅថាបណីតវេទនា វេទនាជាសុខនិងទុក្ខ ហៅថាហីនវេទនា វេទនាជាអទុក្ខមសុខ ហៅថាបណីតវេទនា វេទនារបស់បុគ្គលអ្នកមិនមានសមាបត្តិ ហៅថាហីនវេទនា វេទនារបស់បុគ្គលអ្នកមានសមាបត្តិ ហៅថាបណីតវេទនា

សាសវា វេទនា ហីនា អនាសវា វេទនា បណីតា តំ តំ វា បន វេទនំ ឧបាទាយុបាទាយ វេទនា ហីនា បណីតា ទដ្ឋព្វា ។

(១៣) តត្ថ កតមា វេទនា ទូរេ ។ អកុសលា វេទនា កុសលាព្យាកតាហិ វេទនាហិ ទូរេ កុសលាព្យាកតា វេទនា អកុសលាយ វេទនាយ ទូរេ កុសលា វេទនា អកុសលាព្យាកតាហិ វេទនាហិ ទូរេ អកុសលាព្យាកតា វេទនា កុសលាយ វេទនាយ ទូរេ អព្យាកតា វេទនា កុសលាកុសលាហិ វេទនាហិ ទូរេ កុសលាកុសលា វេទនា អព្យាកតាយ វេទនាយ ទូរេ ទុក្ខា វេទនា សុខាយ ច អទុក្ខមសុខាយ ច វេទនាហិ ទូរេ សុខា ច អទុក្ខមសុខា ច វេទនា ទុក្ខាយ វេទនាយ ទូរេ សុខា វេទនា ទុក្ខាយ ច អទុក្ខមសុខាយ ច វេទនាហិ ទូរេ ទុក្ខា ច អទុក្ខមសុខា ច វេទនា សុខាយ វេទនាយ ទូរេ អទុក្ខមសុខា វេទនា សុខទុក្ខាហិ វេទនាហិ ទូរេ សុខទុក្ខា វេទនា អទុក្ខមសុខាយ វេទនាយ ទូរេ អសមាបន្នស្ស វេទនា សមាបន្នស្ស វេទនាយ ទូរេ សមាបន្នស្ស វេទនា





វេទនាប្រកបដោយអាសវៈ ហៅថាហីនវេទនា វេទនាមិនមានអាសវៈ ហៅថាបណីតវេទនា ម្យ៉ាងទៀត ហីនវេទនា បើប្រៀបផ្ទឹមនឹងវេទនានោះៗ បណ្ឌិតគប្បីជ្រាបថា ជាបណីតវេទនាដែរ ។

(១៣) បណ្ដាវេទនាទាំងនោះ ទូរវេទនា តើដូចម្ដេច ។ វេទនាជាអកុសល ឆ្ងាយអំពីវេទនាជាកុសលនិងអព្យាក្រឹត វេទនាជាកុសលនិងអព្យាក្រឹត ឆ្ងាយអំពីវេទនាជាអកុសល វេទនាជាកុសល ឆ្ងាយអំពីវេទនាជាអកុសលនិងអព្យាក្រឹត វេទនាជាអកុសលនិងអព្យាក្រឹត ឆ្ងាយអំពីវេទនាជាកុសល វេទនាជាអព្យាក្រឹត ឆ្ងាយអំពីវេទនាជាកុសលនិងអកុសល វេទនាជាកុសលនិងអកុសល ឆ្ងាយអំពីវេទនាជាអព្យាក្រឹត វេទនាជាទុក្ខ ឆ្ងាយអំពីវេទនាជាសុខនិងអទុក្ខមសុខ វេទនាជាសុខនិងអទុក្ខមសុខ ឆ្ងាយអំពីវេទនាជាទុក្ខ វេទនាជាសុខ ឆ្ងាយអំពីវេទនាជាទុក្ខនិងអទុក្ខមសុខ វេទនាជាទុក្ខនិងអទុក្ខមសុខ ឆ្ងាយអំពីវេទនាជាសុខ វេទនាជាអទុក្ខមសុខ ឆ្ងាយអំពីវេទនាជាសុខនិងទុក្ខ វេទនាជាសុខនិងទុក្ខ ឆ្ងាយអំពីវេទនាជាអទុក្ខមសុខ វេទនារបស់បុគ្គលអ្នកមិនមានសមាបត្តិ ឆ្ងាយអំពីវេទនារបស់បុគ្គលអ្នកមានសមាបត្តិ វេទនារបស់បុគ្គលអ្នកមានសមាបត្តិ

អសមាបន្នស្ស វេទនាយ ទូរេ សាសវា វេទនា អនាសវាយ វេទនាយ ទូរេ អនាសវា វេទនា សាសវាយ វេទនាយ ទូរេ អយំ វុច្ចតិ វេទនា ទូរេ ។ តត្ថ កតមា វេទនា សន្តិកេ ។ អកុសលា វេទនា អកុសលាយ វេទនាយ សន្តិកេ កុសលា វេទនា កុសលាយ វេទនាយ សន្តិកេ អព្យាកតា វេទនា អព្យាកតាយ វេទនាយ សន្តិកេ ទុក្ខា វេទនា ទុក្ខាយ វេទនាយ សន្តិកេ សុខា វេទនា សុខាយ វេទនាយ សន្តិកេ អទុក្ខមសុខា វេទនា អទុក្ខមសុខាយ វេទនាយ សន្តិកេ អសមាបន្នស្ស វេទនា អសមាបន្នស្ស វេទនាយ សន្តិកេ សមាបន្នស្ស វេទនា សមាបន្នស្ស វេទនាយ សន្តិកេ សាសវា វេទនា សាសវាយ វេទនាយ សន្តិកេ អនាសវា វេទនា អនាសវាយ វេទនាយ សន្តិកេ អយំ វុច្ចតិ វេទនា សន្តិកេ ។ តំ តំ វា បន វេទនំ ឧបាទាយុបាទាយ វេទនា ទូរេ សន្តិកេ ទដ្ឋព្វា ។

(១៤) តត្ថ កតមោ សញ្ញាក្ខន្ធោ ។ យា កាចិ សញ្ញា អតីតានាគតបច្ចុប្បន្នា អជ្ឈត្តា វា ពហិទ្ធា វា ឱឡារិកា វា សុខុមា វា ហីនា វា បណីតា វា



ឆ្ងាយអំពីវេទនា របស់បុគ្គលអ្នកមិនចូលសមាបត្តិ វេទនាប្រកបដោយអាសវៈ ឆ្ងាយអំពីវេទនាមិនមានអាសវៈ វេទនាមិនមានអាសវៈ ឆ្ងាយអំពីវេទនាប្រកបដោយអាសវៈ នេះហៅថា ទូរវេទនា ។ បណ្ដាវេទនាទាំងនោះ សន្តិកវេទនា តើដូចម្ដេច ។ វេទនាជាអកុសល តាំងនៅក្នុងទីជិតនៃវេទនាជាអកុសល វេទនាជាកុសល តាំងនៅក្នុងទីជិត នៃវេទនាជាកុសល វេទនាជាអព្យាក្រឹត តាំងនៅក្នុងទីជិត នៃវេទនាជាអព្យាក្រឹត វេទនាជាទុក្ខ តាំងនៅក្នុងទីជិតនៃវេទនាជាទុក្ខ វេទនាជាសុខ តាំងនៅក្នុងទីជិតនៃវេទនាជាសុខ វេទនាជាអទុក្ខមសុខ តាំងនៅក្នុងទីជិតនៃវេទនាជាអទុក្ខមសុខ វេទនារបស់បុគ្គលមិនមានសមាបត្តិ តាំងនៅក្នុងទីជិតនៃវេទនារបស់បុគ្គលមិនមានសមាបត្តិ វេទនារបស់បុគ្គលមានសមាបត្តិ តាំងនៅក្នុងទីជិតនៃវេទនារបស់បុគ្គលមានសមាបត្តិ វេទនាប្រកបដោយអាសវៈ តាំងនៅក្នុងទីជិតនៃវេទនាប្រកបដោយអាសវៈ វេទនាមិនមានអាសវៈ តាំងនៅក្នុងទីជិតនៃវេទនាមិនមានអាសវៈ នេះហៅថា សន្តិកវេទនា ។ មួយទៀត ទូរវេទនា បើប្រៀបផ្ទឹមនឹងវេទនានោះៗ បណ្ឌិតគប្បីឃើញថា ដូចសន្តិកវេទនាដែរ ។

(១៤) បណ្ដាខន្ធទាំងនោះ សញ្ញាខន្ធ តើដូចម្ដេច ។ សញ្ញាណាមួយ ជាអតីត អនាគត បច្ចុប្បន្ន ដែលជាអជ្ឈត្តសញ្ញាក្ដី ពហិទ្ធសញ្ញាក្ដី ឱឡារិកសញ្ញាក្ដី សុខុមសញ្ញាក្ដី ហីនសញ្ញាក្ដី បណីតសញ្ញាក្ដី

យា ទូរេ សន្តិកេ វា តទេកជ្ឈំ អភិសញ្ញូហិត្វា អភិសង្ខិបិត្វា អយំ វុច្ចតិ សញ្ញាក្ខន្ធោ ។

(១៨) តត្ថ កតមា សញ្ញា អតីតា ។ យា សញ្ញា អតីតា និរុទ្ធា វិគតា វិបរិណតា អត្ថង្គតា អព្ភត្ថង្គតា ឧប្បជ្ជិត្វា វិគតា អតីតា អតីតំសេន សង្គហិតា ចក្ខុសម្ផស្សជា សញ្ញា សោតសម្ផស្សជា សញ្ញា ឃានសម្ផស្សជា សញ្ញា ជិវ្ហាសម្ផស្សជា សញ្ញា កាយសម្ផស្សជា សញ្ញា មនោសម្ផស្សជា សញ្ញា អយំ វុច្ចតិ សញ្ញា អតីតា ។ តត្ថ កតមា សញ្ញា អនាគតា ។ យា សញ្ញា អជាតា អភូតា អសញ្ជាតា អនិព្វត្តា អនភិនិព្វត្តា អបាតុភូតា អនុប្បន្នា អសមុប្បន្នា អនុដ្ឋិតា អសមុដ្ឋិតា អនាគតា អនាគតំសេន សង្គហិតា ចក្ខុសម្ផស្សជា សញ្ញា ។បេ។ មនោសម្ផស្សជា សញ្ញា អយំ វុច្ចតិ សញ្ញា អនាគតា ។ តត្ថ កតមា សញ្ញា បច្ចុប្បន្នា ។ យា សញ្ញា ជាតា ភូតា សញ្ជាតា និព្វត្តា អភិនិព្វត្តា បាតុភូតា ឧប្បន្នា សមុប្បន្នា ឧដ្ឋិតា សមុដ្ឋិតា បច្ចុប្បន្នា បច្ចុប្បន្នំសេន សង្គហិតា ចក្ខុសម្ផស្សជា សញ្ញា ។បេ។ មនោសម្ផស្សជា សញ្ញា អយំ វុច្ចតិ សញ្ញា បច្ចុប្បន្នា ។



ឆ្ងាយក្តី ជិតក្តី [illegible] ប្រមូលប្រមួល រួបរួមនូវសញ្ញានោះ ហៅថាសញ្ញាក្ខន្ធ ។

(១៨) បណ្តាសញ្ញាទាំងនោះ សញ្ញាជាអតីត តើដូចម្តេច ។ សញ្ញាណា កន្លងទៅ រលត់ទៅ ប្រាសទៅ ប្រែប្រួលទៅ អស់ទៅ បាត់បង់ទៅ កើតហើយប្រាសទៅវិញ ជាអតីត សង្គ្រោះដោយចំណែកជាអតីត បានដល់សញ្ញាកើតអំពីចក្ខុសម្ផ័ស្ស សញ្ញាកើតអំពីសោតសម្ផ័ស្ស សញ្ញាកើតអំពីឃានសម្ផ័ស្ស សញ្ញាកើតអំពីជិវ្ហាសម្ផ័ស្ស សញ្ញាកើតអំពីកាយសម្ផ័ស្ស សញ្ញាកើតអំពីមនោសម្ផ័ស្ស នេះហៅថា សញ្ញាជាអតីត ។ បណ្តាសញ្ញាទាំងនោះ សញ្ញាជាអនាគត តើដូចម្តេច ។ សញ្ញាណា មិនទាន់កើត មិនទាន់មាន មិនទាន់ដុះដាល មិនទាន់វិលមក មិនទាន់ត្រឡប់មក មិនទាន់ប្រាកដ មិនទាន់លេចឡើង មិនទាន់ដុះឡើង មិនទាន់តាំងឡើង មិនទាន់ស្ទុះឡើង ជាអនាគត សង្គ្រោះដោយចំណែកជាអនាគត បានដល់សញ្ញាកើតអំពីចក្ខុសម្ផ័ស្ស ។បេ។ សញ្ញាកើតអំពីមនោសម្ផ័ស្ស នេះហៅថា សញ្ញាជាអនាគត ។ បណ្តាសញ្ញាទាំងនោះ សញ្ញាជាបច្ចុប្បន្ន តើដូចម្តេច ។ សញ្ញាណា កំពុងកើត កំពុងមាន កំពុងដុះដាល កំពុងវិលមក កំពុងត្រឡប់មក កំពុងប្រាកដ កំពុងលេចឡើង កំពុងដុះឡើង កំពុងតាំងឡើង កំពុងស្ទុះឡើង ជាបច្ចុប្បន្ន សង្គ្រោះដោយចំណែកជាបច្ចុប្បន្ន បានដល់សញ្ញាកើអំពីចក្ខុសម្ផ័ស្ស ។បេ។ សញ្ញាកើតអំពីមនោសម្ផ័ស្ស នេះហៅថា សញ្ញាជាបច្ចុប្បន្ន ។

[១៦] តត្ថ កតមា សញ្ញា អជ្ឈត្តា ។ យា សញ្ញា តេសំ តេសំ សត្តានំ អជ្ឈត្តំ បច្ចត្តំ និយកា បាដិបុគ្គលិកា ឧបាទិន្នា ចក្ខុសម្ផស្សជា សញ្ញា ។ បេ ។ មនោសម្ផស្សជា សញ្ញា អយំ វុច្ចតិ សញ្ញា អជ្ឈត្តា ។ តត្ថ កតមា សញ្ញា ពហិទ្ធា ។ យា សញ្ញា តេសំ តេសំ បរសត្តានំ បរបុគ្គលានំ អជ្ឈត្តំ បច្ចត្តំ និយកា បាដិបុគ្គលិកា ឧបាទិន្នា ចក្ខុសម្ផ-ស្សជា សញ្ញា ។ បេ ។ មនោសម្ផស្សជា សញ្ញា អយំ វុច្ចតិ សញ្ញា ពហិទ្ធា ។

[១៧] តត្ថ កតមា សញ្ញា ឱឡារិកា សុខុមា ។ បដិឃសម្ផស្សជា សញ្ញា ឱឡារិកា អធិវចនសម្ផ-ស្សជា សញ្ញា សុខុមា អកុសលា សញ្ញា ឱឡារិកា កុសលាព្យាកតា សញ្ញា សុខុមា កុសលាកុសលា សញ្ញា ឱឡារិកា អព្យាកតា សញ្ញា សុខុមា ទុក្ខា-យ វេទនាយ សម្បយុត្តា សញ្ញា ឱឡារិកា សុខាយ ច អទុក្ខមសុខាយ ច វេទនាហិ សម្បយុត្តា សញ្ញា សុខុមា សុខទុក្ខាហិ វេទនាហិ សម្បយុត្តា សញ្ញា ឱឡារិកា អទុក្ខមសុខាយ វេទនាយ សម្បយុត្តា សញ្ញា សុខុមា អសមាបន្នស្ស សញ្ញា ឱឡារិកា



[១៦] បណ្ដាសញ្ញាទាំងនោះ អជ្ឈត្តសញ្ញា តើដូចម្ដេច ។ សញ្ញាណា ជាខាងក្នុង អាស្រ័យខ្លួន កើតចំពោះខ្លួន ជាសញ្ញារបស់បុគ្គលម្នាក់ ៗ ដែលគួបកាន់មាំ របស់សត្វទាំងឡាយនោះ ៗ បានដល់សញ្ញាដែលកើតអំពីចក្ខុសម្ផស្ស ។ បេ ។ សញ្ញាដែលកើតអំពីមនោ-សម្ផស្ស នេះហៅថា អជ្ឈត្តសញ្ញា ។ បណ្ដាសញ្ញាទាំងនោះ ពហិទ្ធា-សញ្ញា តើដូចម្ដេច ។ សញ្ញាណា ជាខាងក្នុង អាស្រ័យខ្លួន កើតចំពោះខ្លួន ជាសញ្ញារបស់បុគ្គលម្នាក់ ៗ ដែលគួបកាន់មាំ របស់សត្វដទៃ របស់បុគ្គលដទៃនោះ ៗ បានដល់សញ្ញា ដែលកើតអំពីចក្ខុសម្ផស្ស ។បេ។ សញ្ញាដែលកើតអំពីមនោសម្ផស្ស នេះហៅថា ពហិទ្ធាសញ្ញា ។

(១៧) បណ្ដាសញ្ញាទាំងនោះ ឱឡារិកសញ្ញា និងសុខុមសញ្ញា តើដូចម្ដេច ។ សញ្ញាដែលកើតអំពីបដិឃសម្ផស្ស ហៅថាឱឡារិកសញ្ញា សញ្ញាដែលកើតអំពីអធិវចនសម្ផស្ស ហៅថាសុខុមសញ្ញា សញ្ញាជាអកុសល ហៅថាឱឡារិកសញ្ញា សញ្ញាជាកុសលនិងអព្យាក្រឹត ហៅថាសុខុមសញ្ញា សញ្ញាជាកុសលនិងអកុសល ហៅថាឱឡារិកសញ្ញា សញ្ញាជាអព្យាក្រឹត ហៅថាសុខុមសញ្ញា សញ្ញាដែលសម្បយុត្តដោយវេទនាជាទុក្ខ ហៅថាឱឡារិកសញ្ញា សញ្ញាសម្បយុត្តដោយវេទនាជាសុខនិងអទុក្ខមសុខ ហៅថាសុខុមសញ្ញា សញ្ញាសម្បយុត្តដោយវេទនាជាសុខនិងទុក្ខ ហៅថាឱឡារិកសញ្ញា សញ្ញាសម្បយុត្តដោយវេទនាជាអទុក្ខមសុខ ហៅថាសុខុមសញ្ញា សញ្ញារបស់បុគ្គលមិនមានសមាបត្តិ ហៅថាឱឡារិកសញ្ញា

សមាបន្នស្ស សញ្ញា សុខុមា សាសវា សញ្ញា ឱឡារិកា អនាសវា សញ្ញា សុខុមា តំ តំ វា បន សញ្ញំ ឧបាទាយ ឧបាទាយ សញ្ញា ឱឡារិកា សុខុមា ទដ្ឋព្វា ។

(១៨) តត្ថ កតមា សញ្ញា ហីនា បណីតា ។ អកុសលា សញ្ញា ហីនា កុសលាព្យាកតា សញ្ញា បណីតា កុសលាកុសលា សញ្ញា ហីនា អព្យាកតា សញ្ញា បណីតា ទុក្ខាយ វេទនាយ សម្បយុត្តា សញ្ញា ហីនា សុខាយ ច អទុក្ខមសុខាយ ច វេទនាយ សម្បយុត្តា សញ្ញា បណីតា សុខទុក្ខាហិ វេទនាហិ សម្បយុត្តា សញ្ញា ហីនា អទុក្ខមសុខាយ វេទនាយ សម្បយុត្តា សញ្ញា បណីតា អសមាបន្នស្ស សញ្ញា ហីនា សមាបន្នស្ស សញ្ញា បណីតា សាសវា សញ្ញា ហីនា អនាសវា សញ្ញា បណីតា តំ តំ វា បន សញ្ញំ ឧបាទាយ ឧបាទាយ សញ្ញា ហីនា បណីតា ទដ្ឋព្វា ។

(១៩) តត្ថ កតមា សញ្ញា ទូរេ ។ អកុសលា សញ្ញា កុសលាព្យាកតាហិ សញ្ញាហិ ទូរេ កុសលាព្យាកតា សញ្ញា អកុសលាយ សញ្ញាយ ទូរេ កុសលា សញ្ញា





សញ្ញារបស់បុគ្គលមានសមាបត្តិ ហៅថាសុខុមសញ្ញា សញ្ញាប្រកបដោយអាសវៈ ហៅថាឱឡារិកសញ្ញា សញ្ញាមិនមានអាសវៈ ហៅថាសុខុមសញ្ញា មួយទៀត ឱឡារិកសញ្ញា បើប្រៀបផ្ទឹមនឹងសញ្ញានោះៗ បណ្ឌិតគប្បីឃើញថា ដូចសុខុមសញ្ញាដែរ ។

(១៨) បណ្ដាសញ្ញាទាំងនោះ ហីនសញ្ញា និងបណីតសញ្ញា តើដូចម្ដេច ។ សញ្ញាជាអកុសល ហៅថាហីនសញ្ញា សញ្ញាជាកុសលនិងអព្យាក្រឹត ហៅថាបណីតសញ្ញា សញ្ញាជាកុសលនិងអកុសល ហៅថាហីនសញ្ញា សញ្ញាជាអព្យាក្រឹត ហៅថាបណីតសញ្ញា សញ្ញាដែលសម្បយុត្តដោយវេទនាជាទុក្ខ ហៅថាហីនសញ្ញា សញ្ញាសម្បយុត្តដោយវេទនាជាសុខផងជាអទុក្ខមសុខផង ហៅថាបណីតសញ្ញា សញ្ញាសម្បយុត្តដោយវេទនាជាសុខនិងទុក្ខ ហៅថាហីនសញ្ញា សញ្ញាសម្បយុត្តដោយវេទនាជាអទុក្ខមសុខ ហៅថាបណីតសញ្ញា សញ្ញារបស់បុគ្គលមិនមានសមាបត្តិ ហៅថាហីនសញ្ញា សញ្ញារបស់បុគ្គលមានសមាបត្តិ ហៅថាបណីតសញ្ញា សញ្ញាប្រកបដោយអាសវៈ ហៅថាហីនសញ្ញា សញ្ញាមិនប្រកបដោយអាសវៈ ហៅថាបណីតសញ្ញា មួយទៀត ហីនសញ្ញា បើប្រៀបផ្ទឹមនឹងសញ្ញានោះៗ បណ្ឌិតគប្បីឃើញថា ដូចបណីតសញ្ញាដែរ ។

(១៩) បណ្ដាសញ្ញាទាំងនោះ ទូរេសញ្ញា តើដូចម្ដេច ។ សញ្ញាជាអកុសល ឆ្ងាយអំពីសញ្ញាជាកុសលនិងអព្យាក្រឹត សញ្ញាជាកុសលនិងអព្យាក្រឹត ឆ្ងាយអំពីសញ្ញាជាអកុសល សញ្ញាជាកុសល

អកុសលាព្យាកតាហិ សញ្ញាហិ ទ្វេ អកុសលា-
ព្យាកតា សញ្ញា កុសលាយ សញ្ញាយ ទ្វេ អព្យា-
កតា សញ្ញា កុសលាកុសលាហិ សញ្ញាហិ ទ្វេ
កុសលាកុសលា សញ្ញា អព្យាកតាយ សញ្ញាយ
ទ្វេ ទុក្ខាយ វេទនាយ សម្បយុត្តា សញ្ញា សុខាយ
ច អទុក្ខមសុខាយ ច វេទនាហិ សម្បយុត្តាហិ
សញ្ញាហិ ទ្វេ សុខាយ ច អទុក្ខមសុខាយ ច វេទ-
នាហិ សម្បយុត្តា សញ្ញា ទុក្ខាយ វេទនាយ សម្បយុ-
ត្តាយ សញ្ញាយ ទ្វេ សុខាយ វេទនាយ សម្បយុត្តា
សញ្ញា ទុក្ខាយ ច អទុក្ខមសុខាយ ច វេទនាហិ
សម្បយុត្តាហិ សញ្ញាហិ ទ្វេ ទុក្ខាយ ច អទុក្ខម-
សុខាយ ច វេទនាហិ សម្បយុត្តា សញ្ញា សុខាយ
វេទនាយ សម្បយុត្តាយ សញ្ញាយ ទ្វេ អទុក្ខមសុ-
ខាយ វេទនាយ សម្បយុត្តា សញ្ញា សុខទុក្ខាហិ
វេទនាហិ សម្បយុត្តាហិ សញ្ញាហិ ទ្វេ សុខទុក្ខាហិ
វេទនាហិ សម្បយុត្តា សញ្ញា អទុក្ខមសុខាយ វេទ-
នាយ សម្បយុត្តាយ សញ្ញាយ ទ្វេ អសមាបន្នស្ស
សញ្ញា សមាបន្នស្ស សញ្ញាយ ទ្វេ សមាបន្នស្ស
សញ្ញា អសមាបន្នស្ស សញ្ញាយ ទ្វេ សាសវា សញ្ញា



ឆ្ងាយអំពីសញ្ញាជាអកុសលនិងអព្យាក្រឹត សញ្ញាជាអកុសលនិងអព្យាក្រឹត
ឆ្ងាយអំពីសញ្ញាជាកុសល សញ្ញាជាអព្យាក្រឹត ឆ្ងាយអំពីសញ្ញាជាកុសល
និងអកុសល សញ្ញាជាកុសលនិងអកុសល ឆ្ងាយអំពីសញ្ញាជាអព្យាក្រឹត
សញ្ញាដែលសម្បយុត្តដោយវេទនាជាទុក្ខ ឆ្ងាយអំពីសញ្ញាដែលសម្បយុត្ត
ដោយវេទនាជាសុខផង ជាអទុក្ខមសុខផង សញ្ញាដែលសម្បយុត្តដោយ
វេទនាជាសុខផង ជាអទុក្ខមសុខផង ឆ្ងាយអំពីសញ្ញាដែលសម្បយុត្ត
ដោយវេទនាជាទុក្ខ សញ្ញាសម្បយុត្តដោយវេទនាជាសុខ ឆ្ងាយអំពីសញ្ញា
ដែលសម្បយុត្តដោយវេទនាជាទុក្ខផង ជាអទុក្ខមសុខផង សញ្ញាដែល
សម្បយុត្តដោយវេទនាជាទុក្ខផង ជាអទុក្ខមសុខផង ឆ្ងាយអំពីសញ្ញា
ដែលសម្បយុត្តដោយវេទនាជាសុខ សញ្ញាដែលសម្បយុត្តដោយវេទនា
ជាអទុក្ខមសុខ ឆ្ងាយអំពីសញ្ញាដែលសម្បយុត្តដោយវេទនាជាសុខនិងទុក្ខ
សញ្ញាដែលសម្បយុត្តដោយវេទនាជាសុខនិងទុក្ខ ឆ្ងាយអំពីសញ្ញាដែល
សម្បយុត្តដោយវេទនាជាអទុក្ខមសុខ សញ្ញារបស់បុគ្គលមិនមានសមាបត្តិ
ឆ្ងាយអំពីសញ្ញារបស់បុគ្គលមានសមាបត្តិ សញ្ញារបស់បុគ្គលមានសមាបត្តិ
ឆ្ងាយអំពីសញ្ញារបស់បុគ្គលមិនមានសមាបត្តិ សញ្ញាប្រកបដោយអាសវៈ

អនាសវាយ សញ្ញាយ ទូរេ អនាសវា សញ្ញា សាសវាយ សញ្ញាយ ទូរេ អយំ វុច្ចតិ សញ្ញា ទូរេ ។ តត្ថ កតមា សញ្ញា សន្តិកេ ។ អកុសលា សញ្ញា អកុសលាយ សញ្ញាយ សន្តិកេ កុសលា សញ្ញា កុសលាយ សញ្ញាយ សន្តិកេ អព្យាកតា សញ្ញា អព្យាកតាយ សញ្ញាយ សន្តិកេ ទុក្ខាយ វេទនាយ សម្បយុត្តា សញ្ញា ទុក្ខាយ វេទនាយ សម្បយុត្តាយ សញ្ញាយ សន្តិកេ សុខាយ វេទនាយ សម្បយុត្តា សញ្ញា សុខាយ វេទនាយ សម្បយុត្តាយ សញ្ញាយ សន្តិកេ អទុក្ខមសុខាយ វេទនាយ សម្បយុត្តា សញ្ញា អទុក្ខមសុខាយ វេទនាយ សម្បយុត្តាយ សញ្ញាយ សន្តិកេ អសមាបន្នស្ស សញ្ញា អសមាបន្នស្ស សញ្ញាយ សន្តិកេ សមាបន្នស្ស សញ្ញា សមាបន្នស្ស សញ្ញាយ សន្តិកេ សាសវា សញ្ញា សាសវាយ សញ្ញាយ សន្តិកេ អនាសវា សញ្ញា អនាសវាយ សញ្ញាយ សន្តិកេ អយំ វុច្ចតិ សញ្ញា សន្តិកេ ។ តំ តំ វា បន សញ្ញំ ឧបាទាយ ឧបាទាយ សញ្ញា ទូរេ សន្តិកេ ទដ្ឋព្វា ។



ឆ្ងាយអំពីសញ្ញាមិនមានអាសវៈ សញ្ញាមិនមានអាសវៈ ឆ្ងាយអំពីសញ្ញាប្រកបដោយអាសវៈ នេះហៅថា ទូរេសញ្ញា ។ បណ្តាសញ្ញាទាំងនោះ សន្តិកេសញ្ញា តើដូចម្តេច ។ សញ្ញាជាអកុសល តាំងនៅក្នុងទីជិតនៃសញ្ញាជាអកុសល សញ្ញាជាកុសល តាំងនៅក្នុងទីជិតនៃសញ្ញាជាកុសល សញ្ញាជាអព្យាក្រឹត តាំងនៅក្នុងទីជិត នៃសញ្ញាជាអព្យាក្រឹត សញ្ញាសម្បយុត្តដោយវេទនាជាទុក្ខ តាំងនៅក្នុងទីជិតនៃសញ្ញាសម្បយុត្តដោយវេទនាជាទុក្ខ សញ្ញាសម្បយុត្តដោយវេទនាជាសុខ តាំងនៅក្នុងទីជិតនៃសញ្ញាសម្បយុត្តដោយវេទនាជាសុខ សញ្ញាសម្បយុត្តដោយវេទនាជាអទុក្ខមសុខ តាំងនៅក្នុងទីជិត នៃសញ្ញាសម្បយុត្តដោយវេទនាជាអទុក្ខមសុខ សញ្ញារបស់បុគ្គលមិនមានសមាបត្តិ តាំងនៅក្នុងទីជិតនៃសញ្ញារបស់បុគ្គលមិនមានសមាបត្តិ សញ្ញារបស់បុគ្គលមានសមាបត្តិ តាំងនៅក្នុងទីជិតនៃសញ្ញារបស់បុគ្គលមានសមាបត្តិ សញ្ញាប្រកបដោយអាសវៈ តាំងនៅក្នុងទីជិតនៃសញ្ញាប្រកបដោយអាសវៈ សញ្ញាមិនមានអាសវៈ តាំងនៅក្នុងទីជិតនៃសញ្ញាមិនមានអាសវៈ នេះហៅថា សន្តិកេសញ្ញា ។ មួយទៀត ទូរេសញ្ញា បើប្រៀបធៀបនឹងសញ្ញានោះៗ បណ្ឌិតគប្បីឃើញថា ដូចសន្តិកេសញ្ញាដែរ ។

[២០] តត្ថ កតមោ សង្ខារក្ខន្ធោ ។ យោ កោចិ សង្ខារោ អតីតានាគតប្បច្ចុប្បន្នោ អជ្ឈត្តោ វា ពហិទ្ធា វា ឱឡារិកោ វា សុខុមោ វា ហីនោ វា បណីតោ វា យោ ទូរេ សន្តិកេ វា តទេកជ្ឈំ អភិសញ្ញូហិត្វា អភិសង្ខិបិត្វា អយំ វុច្ចតិ សង្ខារក្ខន្ធោ ។

[២១] តត្ថ កតមេ សង្ខារា អតីតា ។ យេ សង្ខារា អតីតា និរុទ្ធា វិគតា វិបរិណតា អត្ថង្គតា អព្ភត្ថង្គតា ឧប្បជ្ជិត្វា វិគតា អតីតា អតីតំសេន សង្គហិតា ចក្ខុសម្ផស្សជា ចេតនា សោតសម្ផស្សជា ចេតនា ឃានសម្ផស្សជា ចេតនា ជិវ្ហាសម្ផស្សជា ចេតនា កាយសម្ផស្សជា ចេតនា មនោសម្ផស្សជា ចេតនា ឥមេ វុច្ចន្តិ សង្ខារា អតីតា ។ តត្ថ កតមេ សង្ខារា អនាគតា ។ យេ សង្ខារា អជាតា អភូតា អសញ្ជាតា អនិព្វត្តា អនភិនិព្វត្តា អបាតុភូតា អនុប្បន្នា អសមុប្បន្នា អនុដ្ឋិតា អសមុដ្ឋិតា អនាគតា អនាគតំសេន សង្គហិតា ចក្ខុសម្ផស្សជា ចេតនា ។បេ។ មនោសម្ផស្សជា ចេតនា ឥមេ វុច្ចន្តិ សង្ខារា អនាគតា ។ តត្ថ កតមេ សង្ខារា បច្ចុប្បន្នា ។ យេ សង្ខារា ជាតា ភូតា សញ្ជាតា និព្វត្តា



[២០] បណ្ដាខន្ធទាំងនោះ សង្ខារក្ខន្ធ តើដូចម្ដេច ។ សង្ខារទាំងឡាយណាមួយ ជាអតីត អនាគត បច្ចុប្បន្ន ដែលជាអជ្ឈត្តសង្ខារក្ដី ពហិទ្ធសង្ខារក្ដី ឱឡារិកសង្ខារក្ដី សុខុមសង្ខារក្ដី ហីនសង្ខារក្ដី បណីតសង្ខារក្ដី ទូរេសង្ខារក្ដី សន្តិកសង្ខារក្ដី នេះហៅថា សង្ខារក្ខន្ធ ព្រោះប្រមូលប្រមូទូលសង្ខារក្ខន្ធនោះ ក្នុងទីជាមួយគ្នា ។

[២១] បណ្ដាសង្ខារទាំងនោះ សង្ខារជាអតីត តើដូចម្ដេច ។ សង្ខារទាំងឡាយណា កន្លងទៅ រលត់ទៅ ប្រាសទៅ ប្រែប្រួលទៅ អស់ទៅ ផុតចន់ទៅ កើតហើយប្រាសទៅវិញ ជាអតីត សង្គ្រោះដោយចំណែកជាអតីត បានដល់ចេតនាកើតអំពីចក្ខុសម្ផស្ស ចេតនាកើតអំពីសោតសម្ផស្ស ចេតនាកើតអំពីឃានសម្ផស្ស ចេតនាកើតអំពីជិវ្ហាសម្ផស្ស ចេតនាកើតអំពីកាយសម្ផស្ស ចេតនាកើតអំពីមនោសម្ផស្ស នេះហៅថា សង្ខារជាអតីត ។ បណ្ដាសង្ខារទាំងនោះ សង្ខារជាអនាគត តើដូចម្ដេច ។ សង្ខារទាំងឡាយណា មិនទាន់កើត មិនទាន់មាន មិនទាន់ផុះដាល មិនទាន់វិលមក មិនទាន់ត្រឡប់មក មិនទាន់ប្រាកដ មិនទាន់លេចឡើង មិនទាន់ផុះឡើង មិនទាន់តាំងឡើង មិនទាន់ស្ទុះឡើង ជាអនាគត សង្គ្រោះដោយចំណែកជាអនាគត បានដល់ចេតនាកើតអំពីចក្ខុសម្ផស្ស ។បេ។ ចេតនាកើតអំពីមនោសម្ផស្ស នេះហៅថា សង្ខារជាអនាគត ។ បណ្ដាសង្ខារទាំងនោះ សង្ខារជាបច្ចុប្បន្ន តើដូចម្ដេច ។ សង្ខារទាំងឡាយណា កំពុងកើត កំពុងមាន កំពុងផុះដាល កំពុងវិលមក

អភិនិព្វត្តា បាតុភូតា ឧប្បន្នា សមុប្បន្នា ឧដ្ឋិតា សមុដ្ឋិតា បច្ចុប្បន្នា បច្ចុប្បន្នំសេន សង្គហិតា ចក្ខុសម្ផស្សជា ចេតនា ។បេ។ មនោសម្ផស្សជា ចេតនា អយំ វុច្ចតិ សង្ខារា បច្ចុប្បន្នា ។

(៦២) តត្ថ កតមេ សង្ខារា អជ្ឈត្តា ។ យេ សង្ខារា តេសំ តេសំ សត្តានំ អជ្ឈត្តំ បច្ចត្តំ និយកា បាដិបុគ្គលិកា ឧបាទិន្នា ចក្ខុសម្ផស្សជា ចេតនា ។បេ។ មនោសម្ផស្សជា ចេតនា អយំ វុច្ចតិ សង្ខារា អជ្ឈត្តា ។ តត្ថ កតមេ សង្ខារា ពហិទ្ធា ។ យេ សង្ខារា តេសំ តេសំ បរសត្តានំ បរបុគ្គលានំ អជ្ឈត្តំ បច្ចត្តំ និយកា បាដិបុគ្គលិកា ឧបាទិន្នា ចក្ខុសម្ផស្សជា ចេតនា ។បេ។ មនោសម្ផស្សជា ចេតនា អយំ វុច្ចតិ សង្ខារា ពហិទ្ធា ។

(៦៣) តត្ថ កតមេ សង្ខារា ឱឡារិកា សុខុមា ។ អកុសលា សង្ខារា ឱឡារិកា កុសលាព្យាកតា សង្ខារា សុខុមា កុសលាកុសលា សង្ខារា ឱឡារិកា អព្យាកតា សង្ខារា សុខុមា ទុក្ខាយ វេទនាយ សម្បយុត្តា សង្ខារា ឱឡារិកា សុខាយ ច អទុក្ខមសុខាយ ច វេទនាយ សម្បយុត្តា សង្ខារា សុខុមា



កំពុងត្រឡប់មក កំពុងប្រាកដ កំពុងលេចឡើង កំពុងផុសឡើង កំពុងតាំងឡើង កំពុងស្ទុះឡើង ជាបច្ចុប្បន្ន សង្គ្រោះដោយចំណែកជាបច្ចុប្បន្ន បានដល់ចេតនាកើតអំពីចក្ខុសម្ផ័ស្ស ។បេ។ ចេតនាកើតអំពីមនោសម្ផ័ស្ស នេះហៅថា សង្ខារជាបច្ចុប្បន្ន ។

(៦២) បណ្តាសង្ខារទាំងនោះ អជ្ឈត្តសង្ខារ តើដូចម្តេច ។ សង្ខារទាំងឡាយណា ជាខាងក្នុង អាស្រ័យខ្លួន កើតចំពោះខ្លួន ជាសង្ខាររបស់បុគ្គលម្នាក់ៗ ដែលគួរកាន់មាំ នៃសត្វទាំងឡាយនោះៗ បានដល់ចេតនាកើតអំពីចក្ខុសម្ផ័ស្ស ។បេ។ ចេតនាកើតអំពីមនោសម្ផ័ស្ស នេះហៅថា អជ្ឈត្តសង្ខារ ។ បណ្តាសង្ខារទាំងនោះ ពហិទ្ធាសង្ខារ តើដូចម្តេច ។ សង្ខារទាំងឡាយណា ជាខាងក្នុង អាស្រ័យខ្លួន កើតចំពោះខ្លួន ជាសង្ខាររបស់បុគ្គលម្នាក់ៗ ដែលគួរកាន់មាំ នៃសត្វដទៃ នៃបុគ្គលដទៃនោះៗ បានដល់ចេតនាកើតអំពីចក្ខុសម្ផ័ស្ស ។បេ។ ចេតនាកើតអំពីមនោសម្ផ័ស្ស នេះហៅថា ពហិទ្ធាសង្ខារ ។

(៦៣) បណ្តាសង្ខារទាំងនោះ ឱឡារិកសង្ខារនិងសុខុមសង្ខារ តើដូចម្តេច ។ សង្ខារជាអកុសល ហៅថាឱឡារិកសង្ខារ សង្ខារជាកុសលនិងអព្យាក្រឹត ហៅថាសុខុមសង្ខារ សង្ខារជាកុសលនិងអកុសល ហៅថាឱឡារិកសង្ខារ សង្ខារជាអព្យាក្រឹត ហៅថាសុខុមសង្ខារ សង្ខារដែលសម្បយុត្តដោយវេទនាជាទុក្ខ ហៅថាឱឡារិកសង្ខារ សង្ខារដែលសម្បយុត្តដោយវេទនាជាសុខផង ជាអទុក្ខមសុខផង ហៅថាសុខុមសង្ខារ

សុខទុក្ខាហិ វេទនាហិ សម្បយុត្តា សង្ខារា ឱឡារិកា អទុក្ខមសុខាយ វេទនាយ សម្បយុត្តា សង្ខារា សុខុមា អសមាបន្នស្ស សង្ខារា ឱឡារិកា សមាបន្នស្ស សង្ខារា សុខុមា សាសវា សង្ខារា ឱឡារិកា អនាសវា សង្ខារា សុខុមា តេ តេ វា បន សង្ខារេ ឧបាទាយ ឧបាទាយ សង្ខារា ឱឡារិកា សុខុមា ទដ្ឋព្វា ។

(៤៤) តត្ថ កតមេ សង្ខារា ហីនា បណីតា ។ អកុសលា សង្ខារា ហីនា កុសលាព្យាកតា សង្ខារា បណីតា កុសលាកុសលា សង្ខារា ហីនា អព្យាកតា សង្ខារា បណីតា ទុក្ខាយ វេទនាយ សម្បយុត្តា សង្ខារា ហីនា សុខាយ ច អទុក្ខមសុខាយ ច វេទនាហិ សម្បយុត្តា សង្ខារា បណីតា សុខទុក្ខាហិ វេទនាហិ សម្បយុត្តា សង្ខារា ហីនា អទុក្ខមសុខាយ វេទនាយ សម្បយុត្តា សង្ខារា បណីតា អសមាបន្នស្ស សង្ខារា ហីនា សមាបន្នស្ស សង្ខារា បណីតា សាសវា សង្ខារា ហីនា អនាសវា សង្ខារា បណីតា



សង្ខារដែលសម្បយុត្ត ដោយវេទនាជាសុខនិងទុក្ខ ហៅថាឱឡារិកសង្ខារ សង្ខារដែលសម្បយុត្ត ដោយវេទនាជាអទុក្ខមសុខ ហៅថាសុខុមសង្ខារ សង្ខាររបស់បុគ្គលមិនមានសមាបត្តិ ហៅថាឱឡារិកសង្ខារ សង្ខាររបស់បុគ្គលមានសមាបត្តិ ហៅថាសុខុមសង្ខារ សង្ខារប្រកបដោយអាសវៈ ហៅថាឱឡារិកសង្ខារ សង្ខារមិនមានអាសវៈ ហៅថាសុខុមសង្ខារ មួយទៀត ឱឡារិកសង្ខារ ហើយប្រៀបផ្ទឹមនឹងសង្ខារនោះៗ បណ្ឌិតគប្បីឃើញថា ដូចសុខុមសង្ខារដែរ ។

(៤៤) បណ្ដាសង្ខារទាំងនោះ ហីនសង្ខារ និងបណីតសង្ខារ តើដូចម្ដេច ។ សង្ខារជាអកុសល ហៅថាហីនសង្ខារ សង្ខារជាកុសលនិងអព្យាក្រឹត ហៅថាបណីតសង្ខារ សង្ខារជាកុសលនិងអកុសល ហៅថាហីនសង្ខារ សង្ខារជាអព្យាក្រឹត ហៅថាបណីតសង្ខារ សង្ខារដែលសម្បយុត្តដោយវេទនាជាទុក្ខ ហៅថាហីនសង្ខារ សង្ខារដែលសម្បយុត្តដោយវេទនា ជាសុខផង ជាអទុក្ខមសុខផង ហៅថា បណីតសង្ខារ សង្ខារដែលសម្បយុត្ត ដោយវេទនាជាសុខនិងទុក្ខ ហៅថាហីនសង្ខារ សង្ខារដែលសម្បយុត្ត ដោយវេទនាជាអទុក្ខមសុខ ហៅថាបណីតសង្ខារ សង្ខាររបស់បុគ្គលមិនមានសមាបត្តិ ហៅថាហីនសង្ខារ សង្ខាររបស់បុគ្គលមានសមាបត្តិ ហៅថាបណីតសង្ខារ សង្ខារប្រកបដោយអាសវៈ ហៅថាហីនសង្ខារ សង្ខារមិនមានអាសវៈ ហៅថាបណីតសង្ខារ

តេ តេ វា បន សង្ខារេ ឧបាទាយុបាទាយ សង្ខារា
ហីនា បណីតា ទដ្ឋព្វា ។

(២៨) តត្ថ កតមេ សង្ខារា ទូរេ ។ អកុសលា
សង្ខារា កុសលាព្យាកតេហិ សង្ខារេហិ ទូរេ កុស-
លាព្យាកតា សង្ខារា អកុសលេហិ សង្ខារេហិ ទូរេ
កុសលា សង្ខារា អកុសលាព្យាកតេហិ សង្ខារេហិ
ទូរេ អកុសលាព្យាកតា សង្ខារា កុសលេហិ សង្ខា-
រេហិ ទូរេ អព្យាកតា សង្ខារា កុសលាកុសលេហិ
សង្ខារេហិ ទូរេ កុសលាកុសលា សង្ខារា អព្យាក-
តេហិ សង្ខារេហិ ទូរេ ទុក្ខាយ វេទនាយ សម្បយុត្តា
សង្ខារា សុខាយ ច អទុក្ខមសុខាយ ច វេទនាយ
សម្បយុត្តេហិ សង្ខារេហិ ទូរេ សុខាយ ច អទុក្ខម-
សុខាយ ច វេទនាយ សម្បយុត្តា សង្ខារា ទុក្ខាយ
វេទនាយ សម្បយុត្តេហិ សង្ខារេហិ ទូរេ សុខាយ
វេទនាយ សម្បយុត្តា សង្ខារា ទុក្ខាយ ច អទុក្ខម-
សុខាយ ច វេទនាយ សម្បយុត្តេហិ សង្ខារេហិ ទូរេ
ទុក្ខាយ ច អទុក្ខមសុខាយ ច វេទនាយ សម្បយុត្តា
សង្ខារា សុខាយ វេទនាយ សម្បយុត្តេហិ សង្ខារេហិ
ទូរេ អទុក្ខមសុខាយ វេទនាយ សម្បយុត្តា សង្ខារា



មួយទៀត ពួកសង្ខារ ប៉ះប្រៀបផ្ទឹមនឹងសង្ខារនោះៗ បណ្ឌិតគប្បី
ឃើញថា ដូចបណីតសង្ខារដែរ ។

(២៨) បណ្ដាសង្ខារទាំងនោះ ទូរសង្ខារ តើដូចម្ដេច ។ សង្ខារ
ជាអកុសល ឆ្ងាយអំពីសង្ខារ ជាកុសលនិងអព្យាក្រឹត សង្ខារជាកុសល
និងអព្យាក្រឹត ឆ្ងាយអំពីសង្ខារជាអកុសល សង្ខារជាកុសល ឆ្ងាយអំពី
សង្ខារជាអកុសលនិងអព្យាក្រឹត សង្ខារជាអកុសលនិងអព្យាក្រឹត ឆ្ងាយ
អំពីសង្ខារជាកុសល សង្ខារ ជាអព្យាក្រឹត ឆ្ងាយអំពីសង្ខារ ជាកុសល
និងអកុសល សង្ខារជាកុសលនិងអកុសល ឆ្ងាយអំពីសង្ខារជាអព្យាក្រឹត
សង្ខារដែលសម្បយុត្ត ដោយវេទនាជាទុក្ខ ឆ្ងាយអំពីសង្ខារដ៏សម្បយុត្ត
ដោយវេទនាជាសុខផង ជាអទុក្ខមសុខផង សង្ខារដែលសម្បយុត្តដោយ
វេទនាជាសុខផង ជាអទុក្ខមសុខផង ឆ្ងាយអំពីសង្ខារដ៏សម្បយុត្តដោយ
វេទនាជាទុក្ខ សង្ខារដែលសម្បយុត្តដោយវេទនាជាសុខ ឆ្ងាយអំពីសង្ខារដ៏
សម្បយុត្តដោយវេទនាជាទុក្ខផង ជាអទុក្ខមសុខផង សង្ខារដែលសម្បយុ-
ត្តដោយវេទនាជាទុក្ខផង ជាអទុក្ខមសុខផង ឆ្ងាយអំពីសង្ខារដ៏សម្បយុត្ត
ដោយវេទនាជាសុខ សង្ខារដែលសម្បយុត្ត ដោយវេទនាជាអទុក្ខមសុខ

សុខទុក្ខាហិ វេទនាហិ សម្បយុត្តេហិ សង្ខារេហិ ទូរេ សុខទុក្ខាហិ វេទនាហិ សម្បយុត្តា សង្ខារា អទុក្ខមសុខាយ វេទនាយ សម្បយុត្តេហិ សង្ខារេហិ ទូរេ អសមាបន្នស្ស សង្ខារា សមាបន្នស្ស សង្ខារេហិ ទូរេ សមាបន្នស្ស សង្ខារា អសមាបន្នស្ស សង្ខារេហិ ទូរេ សាសវា សង្ខារា អនាសវេហិ សង្ខារេហិ ទូរេ អនាសវា សង្ខារា សាសវេហិ សង្ខារេហិ ទូរេ ឥមេ វុច្ចន្តិ សង្ខារា ទូរេ ។ តត្ថ កតមេ សង្ខារា សន្តិកេ ។ អកុសលា សង្ខារា អកុសលានំ សង្ខារានំ សន្តិកេ កុសលា សង្ខារា កុសលានំ សង្ខារានំ សន្តិកេ អព្យាកតា សង្ខារា អព្យាកតានំ សង្ខារានំ សន្តិកេ ទុក្ខាយ វេទនាយ សម្បយុត្តា សង្ខារា ទុក្ខាយ វេទនាយ សម្បយុត្តានំ សង្ខារានំ សន្តិកេ សុខាយ វេទនាយ សម្បយុត្តា សង្ខារា សុខាយ វេទនាយ សម្បយុត្តានំ សង្ខារានំ សន្តិកេ អទុក្ខមសុខាយ វេទនាយ សម្បយុត្តា សង្ខារា អទុក្ខមសុខាយ វេទនាយ សម្បយុត្តានំ សង្ខារានំ សន្តិកេ អសមាបន្នស្ស សង្ខារា អសមាបន្នស្ស សង្ខារានំ សន្តិកេ សមាបន្នស្ស សង្ខារា សមាបន្នស្ស សង្ខារានំ សន្តិកេ សាសវា សង្ខារា





ឆ្ងាយអំពីសង្ខារដែលសម្បយុត្តដោយវេទនាជាសុខនិងទុក្ខ សង្ខារដែលសម្បយុត្តដោយវេទនាជាសុខនិងទុក្ខ ឆ្ងាយអំពីសង្ខារដែលសម្បយុត្តដោយវេទនាជាអទុក្ខមសុខ សង្ខាររបស់បុគ្គលមិនមានសមាបត្តិ ឆ្ងាយអំពីសង្ខាររបស់បុគ្គលមានសមាបត្តិ សង្ខាររបស់បុគ្គលមានសមាបត្តិ ឆ្ងាយអំពីសង្ខាររបស់បុគ្គលមិនមានសមាបត្តិ សង្ខារប្រកបដោយអាសវៈ ឆ្ងាយអំពីសង្ខារមិនមានអាសវៈ សង្ខារមិនមានអាសវៈ ឆ្ងាយអំពីសង្ខារដ៏ប្រកបដោយអាសវៈ នេះហៅថា ទូរសង្ខារ ។ បណ្តាសង្ខារទាំងនោះ សន្តិកសង្ខារ តើដូចម្តេច ។ សង្ខារជាអកុសល តាំងនៅក្នុងទីជិតនៃសង្ខារជាអកុសល សង្ខារជាកុសល តាំងនៅក្នុងទីជិតនៃសង្ខារជាកុសល សង្ខារជាអព្យាក្រឹត តាំងនៅក្នុងទីជិតនៃសង្ខារជាអព្យាក្រឹត សង្ខារដែលសម្បយុត្តដោយវេទនាជាទុក្ខ តាំងនៅក្នុងទីជិតនៃសង្ខារដ៏សម្បយុត្ត ដោយវេទនាជាទុក្ខ សង្ខារដែលសម្បយុត្តដោយវេទនាជាសុខ តាំងនៅក្នុងទីជិតនៃសង្ខារដ៏សម្បយុត្តដោយវេទនាជាសុខ សង្ខារដែលសម្បយុត្តដោយវេទនាជាអទុក្ខមសុខ តាំងនៅក្នុងទីជិតនៃសង្ខារដ៏សម្បយុត្តដោយវេទនាជាអទុក្ខមសុខ សង្ខាររបស់បុគ្គលមិនមានសមាបត្តិ តាំងនៅក្នុងទីជិតនៃសង្ខាររបស់បុគ្គលមិនមានសមាបត្តិ សង្ខាររបស់បុគ្គលមានសមាបត្តិ តាំងនៅក្នុងទីជិតនៃសង្ខារ របស់បុគ្គលមានសមាបត្តិ សង្ខារប្រកបដោយអាសវៈ

សាសវានំ សង្ខារានំ សន្តិកេ អនាសវា សង្ខារា អនាសវានំ សង្ខារានំ សន្តិកេ ឥមេ វុច្ចន្តិ សង្ខារា សន្តិកេ ។ តេ តេ វា បន សង្ខារេ ឧបាទាយុបាទាយ សង្ខារា ទូរេ សន្តិកេ ទដ្ឋព្វា ។

(៦៦) តត្ថ កតមោ វិញ្ញាណក្ខន្ធោ ។ យំកិញ្ចិ វិញ្ញាណំ អតីតានាគតបច្ចុប្បន្នំ អជ្ឈត្តំ វា ពហិទ្ធា វា ឱឡារិកំ វា សុខុមំ វា ហីនំ វា បណីតំ វា យំ ទូរេ សន្តិកេ វា តទេកជ្ឈំ អភិសញ្ញូហិត្វា អភិសង្ខិបិត្វា អយំ វុច្ចតិ វិញ្ញាណក្ខន្ធោ ។

(៦៧) តត្ថ កតមំ វិញ្ញាណំ អតីតំ ។ យំ វិញ្ញាណំ អតីតំ និរុទ្ធំ វិគតំ វិបរិណតំ អត្ថង្គតំ អព្ភត្ថង្គតំ ឧប្បជ្ជិត្វា វិគតំ អតីតំ អតីតំសេន សង្គហិតំ ចក្ខុវិញ្ញាណំ សោតវិញ្ញាណំ ឃានវិញ្ញាណំ ជិវ្ហាវិញ្ញាណំ កាយវិញ្ញាណំ មនោវិញ្ញាណំ ឥទំ វុច្ចតិ វិញ្ញាណំ អតីតំ ។ តត្ថ កតមំ វិញ្ញាណំ អនាគតំ ។ យំ វិញ្ញាណំ អជាតំ អភូតំ អសញ្ជាតំ អនិព្វត្តំ អនភិនិព្វត្តំ អបាតុភូតំ អនុប្បន្នំ អសមុប្បន្នំ អនុដ្ឋិតំ អសមុដ្ឋិតំ អនាគតំ អនាគតំសេន សង្គហិតំ ចក្ខុវិញ្ញាណំ ។បេ។ មនោវិញ្ញាណំ ឥទំ វុច្ចតិ វិញ្ញាណំ អនាគតំ ។





តាំងនៅក្នុងទីជិត នៃសង្ខារប្រកបដោយអាសវៈ សង្ខារមិនមានអាសវៈ តាំងនៅក្នុងទីជិតនៃសង្ខារមិនមានអាសវៈ នេះហៅថា សន្តិកេសង្ខារ ។ មួយទៀត ទូរេសង្ខារ បើប្រៀបផ្ទឹមនឹងសង្ខារនោះៗ បណ្ឌិតគប្បីឃើញថា ដូចសន្តិកេសង្ខារដែរ ។

(៦៦) បណ្ដាខន្ធទាំងនោះ វិញ្ញាណក្ខន្ធ តើដូចម្ដេច ។ វិញ្ញាណណាមួយ ជាអតីត អនាគត បច្ចុប្បន្ន ដែលជាអជ្ឈត្តវិញ្ញាណក្ដី ពហិទ្ធាវិញ្ញាណក្ដី ឱឡារិកវិញ្ញាណក្ដី សុខុមវិញ្ញាណក្ដី ហីនវិញ្ញាណក្ដី បណីតវិញ្ញាណក្ដី ទូរេវិញ្ញាណក្ដី សន្តិកេវិញ្ញាណក្ដី នេះហៅថា វិញ្ញាណក្ខន្ធ ព្រោះប្រមូលប្រួមនូវវិញ្ញាណនោះ ក្នុងទីជាមួយគ្នា ។

(៦៧) បណ្ដាវិញ្ញាណទាំងនោះ វិញ្ញាណជាអតីត តើដូចម្ដេច ។ វិញ្ញាណណា កន្លងទៅ រលត់ទៅ ប្រាសទៅ ប្រែប្រួលទៅ អស់ទៅ ផុតបង់ទៅ កើតហើយប្រាសទៅវិញ ជាអតីត សង្គ្រោះដោយចំណែកជាអតីត បានដល់ចក្ខុវិញ្ញាណ សោតវិញ្ញាណ ឃានវិញ្ញាណ ជិវ្ហាវិញ្ញាណ កាយវិញ្ញាណ មនោវិញ្ញាណ នេះហៅថា វិញ្ញាណជាអតីត ។ បណ្ដាវិញ្ញាណទាំងនោះ វិញ្ញាណជាអនាគត តើដូចម្ដេច ។ វិញ្ញាណណា មិនទាន់កើត មិនទាន់មាន មិនទាន់ផុសផុល មិនទាន់វិលមក មិនទាន់ត្រឡប់មក មិនទាន់ប្រាកដ មិនទាន់លេចឡើង មិនទាន់ផុសឡើង មិនទាន់តាំងឡើង មិនទាន់ស្ទុះឡើង ជាអនាគត សង្គ្រោះដោយចំណែកជាអនាគត បានដល់ចក្ខុវិញ្ញាណ ។បេ។ មនោវិញ្ញាណ នេះហៅថា វិញ្ញាណជាអនាគត ។

តត្ថ កតមំ វិញ្ញាណំ បច្ចុប្បន្នំ ។ យំ វិញ្ញាណំ ជាតំ ភូតំ សញ្ជាតំ និព្វត្តំ អភិនិព្វត្តំ បាតុភូតំ ឧប្បន្នំ សមុប្បន្នំ ឧដ្ឋិតំ សមុដ្ឋិតំ បច្ចុប្បន្នំ បច្ចុប្បន្នំសេន សង្គហិតំ ចក្ខុវិញ្ញាណំ ។ បេ ។ មនោវិញ្ញាណំ ឥទំ វុច្ចតិ វិញ្ញាណំ បច្ចុប្បន្នំ ។

(៦៣) តត្ថ កតមំ វិញ្ញាណំ អជ្ឈត្តំ ។ យំ វិញ្ញាណំ តេសំ តេសំ សត្តានំ អជ្ឈត្តំ បច្ចត្តំ និយកំ បាដិបុគ្គលិកំ ឧបាទិន្នំ ចក្ខុវិញ្ញាណំ ។ បេ ។ មនោវិញ្ញាណំ ឥទំ វុច្ចតិ វិញ្ញាណំ អជ្ឈត្តំ ។ តត្ថ កតមំ វិញ្ញាណំ ពហិទ្ធា ។ យំ វិញ្ញាណំ តេសំ តេសំ បរសត្តានំ បរបុគ្គលានំ អជ្ឈត្តំ បច្ចត្តំ និយកំ បាដិបុគ្គលិកំ ឧបាទិន្នំ ចក្ខុវិញ្ញាណំ ។ បេ ។ មនោវិញ្ញាណំ ឥទំ វុច្ចតិ វិញ្ញាណំ ពហិទ្ធា ។

(៦៤) តត្ថ កតមំ វិញ្ញាណំ ឱឡារិកំ សុខុមំ ។ អកុសលំ វិញ្ញាណំ ឱឡារិកំ កុសលាព្យាកតា វិញ្ញាណា សុខុមា កុសលាកុសលា វិញ្ញាណា ឱឡារិកា អព្យាកតំ វិញ្ញាណំ សុខុមំ ទុក្ខាយ វេទនាយ សម្បយុត្តំ វិញ្ញាណំ ឱឡារិកំ





បណ្តាវិញ្ញាណទាំងនោះ វិញ្ញាណជាបច្ចុប្បន្ន តើដូចម្តេច ។ វិញ្ញាណណា កំពុងកើត កំពុងមាន កំពុងដុះដាល កំពុងវិលមក កំពុងត្រឡប់មក កំពុងប្រាកដ កំពុងលេចឡើង កំពុងដុះឡើង កំពុងតាំងឡើង កំពុងស្ទុះឡើង ជាបច្ចុប្បន្ន សង្គ្រោះដោយចំណែកជាបច្ចុប្បន្ន បានដល់ចក្ខុវិញ្ញាណ ។ បេ ។ មនោវិញ្ញាណ នេះហៅថា វិញ្ញាណជាបច្ចុប្បន្ន ។

(៦៣) បណ្តាវិញ្ញាណទាំងនោះ អជ្ឈត្តវិញ្ញាណ តើដូចម្តេច ។ វិញ្ញាណណា ជាខាងក្នុង អាស្រ័យខ្លួន កើតចំពោះខ្លួន ជាវិញ្ញាណរបស់បុគ្គលម្នាក់ៗ ដែលក្តោបកាន់មាំ របស់សត្វទាំងឡាយនោះៗ បានដល់ចក្ខុវិញ្ញាណ ។ បេ ។ មនោវិញ្ញាណ នេះហៅថា អជ្ឈត្តវិញ្ញាណ ។ បណ្តាវិញ្ញាណទាំងនោះ ពហិទ្ធាវិញ្ញាណ តើដូចម្តេច ។ វិញ្ញាណណា ជាខាងក្នុង អាស្រ័យខ្លួន កើតចំពោះខ្លួន ជាវិញ្ញាណរបស់បុគ្គលម្នាក់ៗ ដែលក្តោបកាន់មាំ របស់សត្វដទៃ របស់បុគ្គលដទៃនោះៗ បានដល់ចក្ខុវិញ្ញាណ ។ បេ ។ មនោវិញ្ញាណ នេះហៅថា ពហិទ្ធាវិញ្ញាណ ។

(៦៤) បណ្តាវិញ្ញាណទាំងនោះ ឱឡារិកវិញ្ញាណនិងសុខុមវិញ្ញាណ តើដូចម្តេច ។ វិញ្ញាណជាអកុសល ហៅថាឱឡារិកវិញ្ញាណ វិញ្ញាណជាកុសលនិងអព្យាក្រឹត ហៅថាសុខុមវិញ្ញាណ វិញ្ញាណជាកុសលនិងអកុសល ហៅថាឱឡារិកវិញ្ញាណ វិញ្ញាណជាអព្យាក្រឹត ហៅថាសុខុមវិញ្ញាណ វិញ្ញាណដែលសម្បយុត្ត ដោយវេទនាជាទុក្ខ ហៅថាឱឡារិកវិញ្ញាណ

សុខាយ ច អទុក្ខមសុខាយ ច វេទនាយ សម្បយុត្តា វិញ្ញាណា សុខុមា សុខទុក្ខាហិ វេទនាហិ សម្បយុត្តា វិញ្ញាណា ឱឡារិកា អទុក្ខមសុខាយ វេទនាយ សម្បយុត្តំ វិញ្ញាណំ សុខុមំ អសមាបន្នស្ស វិញ្ញាណំ ឱឡារិកំ សមាបន្នស្ស វិញ្ញាណំ សុខុមំ សាសវំ វិញ្ញាណំ ឱឡារិកំ អនាសវំ វិញ្ញាណំ សុខុមំ តំ តំ វា បន វិញ្ញាណំ ឧបាទាយ ឧបាទាយ វិញ្ញាណំ ឱឡារិកំ សុខុមំ ទដ្ឋព្វំ ។

(៣០) តត្ថ កតមំ វិញ្ញាណំ ហីនំ បណីតំ ។ អកុសលំ វិញ្ញាណំ ហីនំ កុសលាព្យាកតា វិញ្ញាណា បណីតា កុសលាកុសលា វិញ្ញាណា ហីនា អព្យាកតំ វិញ្ញាណំ បណីតំ ទុក្ខាយ វេទនាយ សម្បយុត្តំ វិញ្ញាណំ ហីនំ សុខាយ ច អទុក្ខមសុខាយ ច វេទនាយ សម្បយុត្តា វិញ្ញាណា បណីតា សុខទុក្ខាហិ វេទនាហិ សម្បយុត្តា វិញ្ញាណា ហីនា អទុក្ខមសុខាយ វេទនាយ សម្បយុត្តំ វិញ្ញាណំ បណីតំ អសមាបន្នស្ស វិញ្ញាណំ ហីនំ សមាបន្នស្ស វិញ្ញាណំ បណីតំ



វិញ្ញាណដែលសម្បយុត្តដោយវេទនាជាសុខផង ជាអទុក្ខមសុខផង ហៅជាសុខុមវិញ្ញាណ វិញ្ញាណដែលសម្បយុត្ត ដោយវេទនាជាសុខនិងទុក្ខ ហៅជាឱឡារិកវិញ្ញាណ វិញ្ញាណដែលសម្បយុត្តដោយវេទនាជាអទុក្ខមសុខ ហៅជាសុខុមវិញ្ញាណ វិញ្ញាណរបស់បុគ្គលមិនមានសមាបត្តិ ហៅជាឱឡារិកវិញ្ញាណ វិញ្ញាណរបស់បុគ្គលមានសមាបត្តិ ហៅជាសុខុមវិញ្ញាណ វិញ្ញាណប្រកបដោយអាសវៈ ហៅជាឱឡារិកវិញ្ញាណ វិញ្ញាណមិនមានអាសវៈ ហៅជាសុខុមវិញ្ញាណ មួយទៀត ឱឡារិកវិញ្ញាណ បើប្រៀបផ្ទឹមនឹងវិញ្ញាណនោះ ៗ បណ្ឌិតគប្បីឃើញថា ដូចសុខុមវិញ្ញាណដែរ ។

(៣០) បណ្ដាវិញ្ញាណទាំងនោះ ហីនវិញ្ញាណ និងបណីតវិញ្ញាណ តើដូចម្ដេច ។ វិញ្ញាណជាអកុសល ហៅជាហីនវិញ្ញាណ វិញ្ញាណជាកុសលនិងអព្យាក្រឹត ហៅជាបណីតវិញ្ញាណ វិញ្ញាណជាកុសលនិងអកុសល ហៅជាហីនវិញ្ញាណ វិញ្ញាណជាអព្យាក្រឹត ហៅជាបណីតវិញ្ញាណ វិញ្ញាណដែលសម្បយុត្តដោយវេទនាជាទុក្ខ ហៅជាហីនវិញ្ញាណ វិញ្ញាណដែលសម្បយុត្តដោយវេទនាជាសុខផងជាអទុក្ខមសុខផង ហៅជាបណីតវិញ្ញាណ វិញ្ញាណដែលសម្បយុត្តដោយវេទនាជាសុខនិងទុក្ខ ហៅជាហីនវិញ្ញាណ វិញ្ញាណដែលសម្បយុត្តដោយវេទនា ជាអទុក្ខមសុខ ហៅជាបណីតវិញ្ញាណ វិញ្ញាណរបស់បុគ្គលមិនមានសមាបត្តិ ហៅជាហីនវិញ្ញាណ វិញ្ញាណរបស់បុគ្គលមានសមាបត្តិ ហៅជាបណីតវិញ្ញាណ

សាសវំ វិញ្ញាណំ ហីនំ អនាសវំ វិញ្ញាណំ បណីតំ តំ តំ វា បន វិញ្ញាណំ ឧបាទាយុបាទាយ វិញ្ញាណំ ហីនំ បណីតំ ទដ្ឋព្វំ ។

( ៣១ ) តត្ថ កតមំ វិញ្ញាណំ ទូរេ ។ អកុសលំ វិញ្ញាណំ កុសលាព្យាកតេហិ វិញ្ញាណេហិ ទូរេ កុសលាព្យាកតា វិញ្ញាណា អកុសលា វិញ្ញាណា ទូរេ កុសលំ វិញ្ញាណំ អកុសលាព្យាកតេហិ វិញ្ញាណេហិ ទូរេ អកុសលាព្យាកតា វិញ្ញាណា កុសលា វិញ្ញាណា ទូរេ អព្យាកតំ វិញ្ញាណំ កុសលាកុសលេហិ វិញ្ញាណេហិ ទូរេ កុសលាកុសលា វិញ្ញាណា អព្យាកតា វិញ្ញាណា ទូរេ ទុក្ខាយ វេទនាយ សម្បយុត្តំ វិញ្ញាណំ សុខាយ ច អទុក្ខមសុខាយ ច វេទនាយ សម្បយុត្តេហិ វិញ្ញាណេហិ ទូរេ សុខាយ ច អទុក្ខមសុខាយ ច វេទនាយ សម្បយុត្តា វិញ្ញាណា ទុក្ខាយ វេទនាយ សម្បយុត្តា វិញ្ញាណា ទូរេ សុខាយ វេទនាយ សម្បយុត្តំ វិញ្ញាណំ ទុក្ខាយ ច អទុក្ខមសុខាយ ច វេទនាយ សម្បយុត្តេហិ វិញ្ញាណេហិ ទូរេ ទុក្ខាយ ច អទុក្ខមសុខាយ ច វេទនាយ សម្បយុត្តា វិញ្ញាណា សុខាយ វេទនាយ សម្បយុត្តា វិញ្ញាណា ទូរេ



វិញ្ញាណដែលប្រកបដោយអាសវៈ ហៅថាហីនវិញ្ញាណ វិញ្ញាណមិនមានអាសវៈ ហៅថាបណីតវិញ្ញាណ មួយទៀត ហីនវិញ្ញាណ ហើយប្រៀបផ្ទឹមនឹងវិញ្ញាណនោះៗ បណ្ឌិតគប្បីឃើញថា ដូចបណីតវិញ្ញាណដែរ ។

( ៣១ ) បណ្ដាវិញ្ញាណទាំងនោះ ទូរេវិញ្ញាណ តើដូចម្ដេច ។ វិញ្ញាណជាអកុសល ឆ្ងាយអំពីវិញ្ញាណជាកុសលនិងអព្យាក្រឹត វិញ្ញាណជាកុសលនិងអព្យាក្រឹត ឆ្ងាយអំពីវិញ្ញាណជាអកុសល វិញ្ញាណជាកុសល ឆ្ងាយអំពីវិញ្ញាណជាអកុសលនិងអព្យាក្រឹត វិញ្ញាណជាអកុសលនិងអព្យាក្រឹត ឆ្ងាយអំពីវិញ្ញាណជាកុសល វិញ្ញាណជាអព្យាក្រឹត ឆ្ងាយអំពីវិញ្ញាណជាកុសលនិងអកុសល វិញ្ញាណជាកុសលនិងអកុសល ឆ្ងាយអំពីវិញ្ញាណជាអព្យាក្រឹត វិញ្ញាណដែលសម្បយុត្តដោយវេទនាជាទុក្ខ ឆ្ងាយអំពីវិញ្ញាណដ៏សម្បយុត្តដោយវេទនាជាសុខផង ជាអទុក្ខមសុខផង វិញ្ញាណដែលសម្បយុត្តដោយវេទនាជាសុខផង ជាអទុក្ខមសុខផង ឆ្ងាយអំពីវិញ្ញាណដ៏សម្បយុត្តដោយវេទនាជាទុក្ខ វិញ្ញាណដែលសម្បយុត្តដោយវេទនាជាសុខ ឆ្ងាយអំពីវិញ្ញាណដ៏សម្បយុត្តដោយវេទនាជាទុក្ខផង ជាអទុក្ខមសុខផង វិញ្ញាណដែលសម្បយុត្តដោយវេទនាជាទុក្ខផង ជាអទុក្ខមសុខផង ឆ្ងាយអំពីវិញ្ញាណដ៏សម្បយុត្តដោយវេទនាជាសុខ

អទុក្ខមសុខាយ វេទនាយ សម្បយុត្តំ វិញ្ញាណំ សុខទុក្ខាហិ វេទនាហិ សម្បយុត្តេហិ វិញ្ញាណេហិ ទ្វេ សុខទុក្ខាហិ វេទនាហិ សម្បយុត្តា វិញ្ញាណា អទុក្ខមសុខាយ វេទនាយ សម្បយុត្តា វិញ្ញាណា ទ្វេ អសមាបន្នស្ស វិញ្ញាណំ សមាបន្នស្ស វិញ្ញាណា ទ្វេ សមាបន្នស្ស វិញ្ញាណំ អសមាបន្នស្ស វិញ្ញាណា ទ្វេ សាសវំ វិញ្ញាណំ អនាសវា វិញ្ញាណា ទ្វេ អនាសវំ វិញ្ញាណំ សាសវា វិញ្ញាណា ទ្វេ ឥធំ វុត្តិ វិញ្ញាណំ ទ្វេ ។ តត្ថ កតមំ វិញ្ញាណំ សន្តិកេ ។ អកុសលំ វិញ្ញាណំ អកុសលស្ស វិញ្ញាណស្ស សន្តិកេ កុសលំ វិញ្ញាណំ កុសលស្ស វិញ្ញាណស្ស សន្តិកេ អព្យាកតំ វិញ្ញាណំ អព្យាកតស្ស វិញ្ញាណស្ស សន្តិកេ ទុក្ខាយ វេទនាយ សម្បយុត្តំ វិញ្ញាណំ ទុក្ខាយ វេទនាយ សម្បយុត្តស្ស វិញ្ញាណស្ស សន្តិកេ សុខាយ វេទនាយ សម្បយុត្តំ វិញ្ញាណំ សុខាយ វេទនាយ សម្បយុត្តស្ស វិញ្ញាណស្ស សន្តិកេ អទុក្ខមសុខាយ វេទនាយ សម្បយុត្តំ វិញ្ញាណំ អទុក្ខមសុខាយ វេទនាយ សម្បយុត្តស្ស វិញ្ញាណស្ស សន្តិកេ អសមាបន្នស្ស វិញ្ញាណំ



វិញ្ញាណដែលសម្បយុត្តដោយវេទនា ជាទុក្ខឬសុខ គួរតែវិញ្ញាណពីរ សម្បយុត្តដោយវេទនាជាសុខនិងទុក្ខ វិញ្ញាណដែលសម្បយុត្តដោយវេទនាជាសុខនិងទុក្ខ ឆ្ងាយអំពីវិញ្ញាណដ៏សម្បយុត្តដោយវេទនា ជាអទុក្ខមសុខ វិញ្ញាណរបស់បុគ្គលមិនមានសមាបត្តិ ឆ្ងាយអំពីវិញ្ញាណរបស់បុគ្គលមានសមាបត្តិ វិញ្ញាណរបស់បុគ្គលមានសមាបត្តិ ឆ្ងាយអំពីវិញ្ញាណរបស់បុគ្គលមិនមានសមាបត្តិ វិញ្ញាណប្រកបដោយអាសវៈ ឆ្ងាយអំពីវិញ្ញាណមិនមានអាសវៈ វិញ្ញាណមិនមានអាសវៈ ឆ្ងាយអំពីវិញ្ញាណប្រកបដោយអាសវៈ នេះហៅថា ទូរេវិញ្ញាណ ។ បណ្តាវិញ្ញាណទាំងនោះ សន្តិកេវិញ្ញាណ តើដូចម្តេច ។ វិញ្ញាណជាអកុសល តាំងនៅក្នុងទីជិតនៃវិញ្ញាណជាអកុសល វិញ្ញាណជាកុសល តាំងនៅក្នុងទីជិតនៃវិញ្ញាណជាកុសល វិញ្ញាណជាអព្យាក្រឹត តាំងនៅក្នុងទីជិតនៃវិញ្ញាណជាអព្យាក្រឹត វិញ្ញាណដែលសម្បយុត្តដោយវេទនាជាទុក្ខ តាំងនៅក្នុងទីជិតនៃវិញ្ញាណដ៏សម្បយុត្តដោយវេទនាជាទុក្ខ វិញ្ញាណដែលសម្បយុត្តដោយវេទនាជាសុខតាំងនៅក្នុងទីជិតនៃវិញ្ញាណដ៏សម្បយុត្តដោយវេទនាជាសុខ វិញ្ញាណដែលសម្បយុត្តដោយវេទនា ជាអទុក្ខមសុខ តាំងនៅក្នុងទីជិតនៃវិញ្ញាណដ៏សម្បយុត្តដោយវេទនា ជាអទុក្ខមសុខ វិញ្ញាណរបស់បុគ្គលមិនមានសមាបត្តិ

អសមាបន្នស្ស វិញ្ញាណស្ស សន្តិកេ សមាបន្នស្ស វិញ្ញាណំ សមាបន្នស្ស វិញ្ញាណស្ស សន្តិកេ សាសវំ វិញ្ញាណំ សាសវស្ស វិញ្ញាណស្ស សន្តិកេ អនាសវំ វិញ្ញាណំ អនាសវស្ស វិញ្ញាណស្ស សន្តិកេ ឥទំ វុច្ចតិ វិញ្ញាណំ សន្តិកេ ។ តំ តំ វា បន វិញ្ញាណំ ឧបាទាយ ឧបាទាយ វិញ្ញាណំ ទូរេ សន្តិកេ ទដ្ឋព្វំ ។

សុត្តន្តភាជនីយំ ។

(៣២) បញ្ចក្ខន្ធា រូបក្ខន្ធោ វេទនាក្ខន្ធោ សញ្ញាក្ខន្ធោ សង្ខារក្ខន្ធោ វិញ្ញាណក្ខន្ធោ ។

តត្ថ កតមោ រូបក្ខន្ធោ ។

(៣៣) ឯកវិធេន រូបក្ខន្ធោ សព្វំ រូបំ ន ហេតុ អហេតុកំ ហេតុវិប្បយុត្តំ សប្បច្ចយំ សង្ខតំ រូបំ លោកិយំ សាសវំ សញ្ញោជនិយំ គន្ថនិយំ ឱឃនិយំ យោគនិយំ នីវរណិយំ បរាមដ្ឋំ ឧបាទានិយំ សង្កិលេសិកំ អព្យាកតំ អនារម្មណំ អចេតសិកំ ចិត្តវិប្បយុត្តំ នេវវិបាកនវិបាកធម្មធម្មំ អសង្កិលិដ្ឋសង្កិលេសិកំ



តាំងនៅក្នុងទីជិត នៃវិញ្ញាណ របស់បុគ្គលមិនមានសមាបត្តិ វិញ្ញាណ របស់បុគ្គលមានសមាបត្តិ តាំងនៅក្នុងទីជិតនៃវិញ្ញាណ របស់បុគ្គលមានសមាបត្តិ វិញ្ញាណប្រកបដោយអាសវៈ តាំងនៅក្នុងទីជិត នៃវិញ្ញាណប្រកបដោយអាសវៈ វិញ្ញាណមិនមានអាសវៈ តាំងនៅក្នុងទីជិត នៃវិញ្ញាណមិនមានអាសវៈ នេះហៅថា សន្តិកេវិញ្ញាណ មួយទៀត ទូរេវិញ្ញាណ បើប្រៀបផ្ទឹមនឹងវិញ្ញាណនោះៗ បណ្ឌិតគប្បីឃើញថា ដូចសន្តិកេវិញ្ញាណដែរ ។

ចប់សុត្តន្តភាជនីយ ។

(៣២) ខន្ធ ៥ គឺ រូបក្ខន្ធ វេទនាខន្ធ សញ្ញាខន្ធ សង្ខារក្ខន្ធ និងវិញ្ញាណក្ខន្ធ ។

បណ្ដាខន្ធទាំងនោះ រូបក្ខន្ធ តើដូចម្ដេច ។

(៣៣) រូបក្ខន្ធមានប្រការ១ បានដល់រូបទាំងពួង មិនមែនហេតុ ឥតហេតុ ប្រាសចាកហេតុ ប្រកបដោយបច្ច័យ ត្រូវបច្ច័យតាក់តែង រូបជាលោកិយ ប្រកបដោយអាសវៈ ជាប្រយោជន៍ដល់សំយោជនៈ ដែលគន្ថៈគប្បីដោតក្រង ដែលឱឃៈគប្បីប្រព្រឹត្តកន្លង ដែលយោគៈគប្បីប្រព្រឹត្តកន្លង ជាប្រយោជន៍ដល់នីវរណៈ ដែលបរាមាសៈស្ទាបអង្អែល ជាប្រយោជន៍ដល់ឧបាទាន គួរដល់សេចក្ដីសៅហ្មង ជាអព្យាក្រឹត មិនមែនអារម្មណ៍ មិនមែនចេតសិក ប្រាសចាកចិត្ត ជាសភាវៈមិនមែនវិបាក មិនមែនមានវិបាកជាប្រក្រតី ជារូបមិនសៅហ្មង តែគួរដល់សេចក្ដីសៅហ្មង

នសវិតក្កសវិចារំ នអវិតក្កវិចារមត្តំ អវិតក្កអវិចារំ នបីតិសហគតំ នសុខសហគតំ នឧបេក្ខាសហគតំ នេវទស្សនេន ន ភាវនាយ បហាតព្វំ នេវទស្សនេន ន ភាវនាយ បហាតព្វហេតុកំ នេវអាចយគាមិនាបចយ-គាមិ នេវសេក្ខនាសេក្ខំ បរិត្តំ កាមាវចរំ នរូបាវចរំ នអរូបាវចរំ បរិយាបន្នំ នោអបរិយាបន្នំ អនិយតំ អនិយ្យានិកំ ឧប្បន្នំ ឆហិ វិញ្ញាណេហិ វិញ្ញេយ្យំ អនិច្ចំ ជរាភិភូតំ ឯវំ ឯកវិធេន រូបសង្គហោ ។

(៣៨) ទុវិធេន រូបសង្គហោ អត្ថិ រូបំ ឧបាទា អត្ថិ រូបំ នោ ឧបាទា(១) ។ អត្ថិ រូបំ ឧបាទិន្នំ អត្ថិ រូបំ អនុបាទិន្នំ ។ អត្ថិ រូបំ ឧបាទិន្នុបាទានិយំ អត្ថិ រូបំ អនុបាទិន្នុបាទានិយំ ។ អត្ថិ រូបំ សនិទស្សនំ អត្ថិ រូបំ អនិទស្សនំ ។ អត្ថិ រូបំ សប្បដិឃំ អត្ថិ រូបំ អប្បដិឃំ ។ អត្ថិ រូបំ ឥន្ទ្រិយំ អត្ថិ រូបំ ន ឥន្ទ្រិយំ ។ អត្ថិ រូបំ មហាភូតំ អត្ថិ រូបំ ន មហាភូតំ ។ អត្ថិ រូបំ វិញ្ញត្តិ អត្ថិ រូបំ ន វិញ្ញត្តិ ។ អត្ថិ រូបំ ចិត្តសមុដ្ឋានំ អត្ថិ រូបំ ន ចិត្តសមុដ្ឋានំ ។ អត្ថិ រូបំ ចិត្តសហភុ

១ ម. នុបាទា ។



ជារូបប្រកបដោយវិតក្កៈប្រកបដោយវិចារៈក៏មិនមែន មិនមានវិតក្កៈមានត្រឹមតែវិចារៈក៏មិនមែន មិនមានវិតក្កៈមិនមានវិចារៈ មិនប្រកបដោយបីតិ មិនប្រកបដោយសុខ មិនប្រកបដោយឧបេក្ខា ជារូបមិនត្រូវលះដោយទស្សនៈ ទាំងមិនត្រូវលះដោយភាវនា ជារូបមានហេតុមិនត្រូវលះដោយទស្សនៈ ទាំងមិនត្រូវលះដោយភាវនា មិនដល់នូវការសន្សំកពូនឡើង មិនដល់នូវការមិនសន្សំកពូនឡើង មិនមែនជារបស់សេក្ខបុគ្គល មិនមែនជារបស់អសេក្ខបុគ្គល ជារូបមានប្រមាណតូចឆ្មារ ជាកាមាវចរ មិនមែនរូបាវចរ មិនមែនអរូបាវចរ ជាបរិយាបន្នៈ មិនមែនអបរិយាបន្នៈ ជាអនិយតៈ ជាអនិយ្យានិកៈ ដែលកើតឡើងហើយ ដែលត្រូវដឹងដោយវិញ្ញាណ ៦ ជារូបមិនទៀង ត្រូវជរាគ្របសង្កត់ រូបក្ខន្ធមានប្រការមួយ យ៉ាងនេះឯង ។

(៣៨) រូបក្ខន្ធមានប្រការ ២ គឺរូបជាឧបាទាក៏មាន រូបមិនមែនជាឧបាទាក៏មាន ។ រូបជាឧបាទិន្នក៏មាន រូបជាអនុបាទិន្នក៏មាន ។ រូបជាឧបាទិន្នុបាទានិយៈក៏មាន រូបជាអនុបាទិន្នុបាទានិយៈក៏មាន ។ រូបជាសនិទស្សនៈក៏មាន រូបជាអនិទស្សនៈក៏មាន ។ រូបជាសប្បដិឃៈក៏មាន រូបជាអប្បដិឃៈក៏មាន ។ រូបជាឥន្ទ្រិយក៏មាន រូបមិនមែនជាឥន្ទ្រិយក៏មាន ។ រូបជាមហាភូតក៏មាន រូបមិនមែនជាមហាភូតក៏មាន ។ រូបជាវិញ្ញត្តិក៏មាន រូបមិនមែនជាវិញ្ញត្តិក៏មាន ។ រូបជាចិត្តសមុដ្ឋានក៏មាន រូបមិនមែនជាចិត្តសមុដ្ឋានក៏មាន ។ រូបជាចិត្តសហភូ ក៏មាន

អត្ថិ រូបំ នចិត្តសហភុ ។ អត្ថិ រូបំ ចិត្តានុបរិវត្តិ អត្ថិ រូបំ នចិត្តានុបរិវត្តិ ។ អត្ថិ រូបំ អជ្ឈត្តិកំ អត្ថិ រូបំ ពាហិរំ ។ អត្ថិ រូបំ ឱឡារិកំ អត្ថិ រូបំ សុខុមំ ។ អត្ថិ រូបំ ទូរេ អត្ថិ រូបំ សន្តិកេ ។បេ។ អត្ថិ រូបំ កពឡីការោ អាហារោ អត្ថិ រូបំ នកពឡីការោ អាហារោ ។ ឯវំ ទុវិធេន រូបក្ខន្ធោ (១) ។

(៣៧) តិវិធេន រូបក្ខន្ធោ យំ តំ រូបំ អជ្ឈត្តិកំ តំ ឧបាទា យំ តំ រូបំ ពាហិរំ តំ អត្ថិ ឧបាទា អត្ថិ អនុបាទា (២) ។ យំ តំ រូបំ អជ្ឈត្តិកំ តំ ឧបាទិន្នំ យំ តំ រូបំ ពាហិរំ តំ អត្ថិ ឧបាទិន្នំ អត្ថិ អនុបាទិន្នំ ។ យំ តំ រូបំ អជ្ឈត្តិកំ តំ ឧបាទិន្នុបាទានិយំ យំ តំ រូបំ ពាហិរំ តំ អត្ថិ ឧបាទិន្នុបាទានិយំ អត្ថិ អនុបាទិន្នុបាទានិយំ ។បេ។ យំ តំ រូបំ អជ្ឈត្តិកំ តំ នកពឡីការោ អាហារោ យំ តំ រូបំ ពាហិរំ តំ អត្ថិ កពឡីការោ អាហារោ អត្ថិ នកពឡីការោ អាហារោ ឯវំ តិវិធេន រូបក្ខន្ធោ ។

(៣៨) ចតុព្វិធេន រូបក្ខន្ធោ យំ តំ រូបំ ឧបាទា តំ អត្ថិ ឧបាទិន្នំ អត្ថិ អនុបាទិន្នំ យំ តំ រូបំ អនុបាទា តំ អត្ថិ

១ ម. ឥតោ បរំ យាវ រូបក្ខន្ធោ វិភង្គំ គតោ តាវ វិភជិតព្វន្តិ ឥមេ បាឋា ទិស្សន្តិ ។
២ ឱ. គោ ១ជ ក ។ ម. ឧបាទា ។



រូបមិនមែនជាចិត្តសហភូក៏មាន ។ រូបជាចិត្តានុបរិវត្តិក៏មាន រូបមិនមែនជាចិត្តានុបរិវត្តិក៏មាន ។ រូបជាខាងក្នុងក៏មាន រូបជាខាងក្រៅក៏មាន ។ រូបគ្រោតគ្រាតក៏មាន រូបល្អិតក៏មាន ។ រូបតាំងនៅក្នុងទីឆ្ងាយក៏មាន រូបតាំងនៅក្នុងទីជិតក៏មាន ។បេ។ រូបជាកពឡិង្ការាហារក៏មាន រូបមិនមែនជាកពឡិង្ការាហារក៏មាន ។ រូបក្ខន្ធមានប្រការ ២ យ៉ាងនេះឯង ។

(៣៧) រូបក្ខន្ធមានប្រការ ៣ គឺ រូបណាខាងក្នុង រូបនោះជាឧបាទា រូបណាខាងក្រៅ រូបនោះជាឧបាទាក៏មាន មិនមែនជាឧបាទាក៏មាន ។ រូបណាខាងក្នុង រូបនោះជាឧបាទិន្ន រូបណាខាងក្រៅ រូបនោះជាឧបាទិន្នក៏មាន ជាអនុបាទិន្នក៏មាន ។ រូបណាខាងក្នុង រូបនោះជាឧបាទិន្នុបាទានិយៈ រូបណាខាងក្រៅ រូបនោះជាឧបាទិន្នុបាទានិយៈក៏មាន ជាអនុបាទិន្នុបាទានិយៈក៏មាន ។បេ។ រូបណាខាងក្នុង រូបនោះមិនមែនជាកពឡិង្ការាហារ រូបណាខាងក្រៅ រូបនោះជាកពឡិង្ការាហារក៏មាន មិនមែនជាកពឡិង្ការាហារក៏មាន រូបក្ខន្ធមានប្រការៈ ៣ យ៉ាងនេះឯង ។

(៣៨) រូបក្ខន្ធមានប្រការៈ ៤ គឺ រូបណា ជាឧបាទា រូបនោះជាឧបាទិន្នក៏មាន ជាអនុបាទិន្នក៏មាន រូបណា ជាអនុបាទា រូបនោះ

ឧបាទិន្នំ អត្ថិ អនុបាទិន្នំ ។ យន្តំ រូបំ ឧបាទា តំ អត្ថិ ឧបាទិន្នុបាទានិយំ អត្ថិ អនុបាទិន្នុបាទានិយំ យន្តំ រូបំ អនុបាទា តំ អត្ថិ ឧបាទិន្នុបាទានិយំ អត្ថិ អនុបាទិន្នុបាទានិយំ ។ យន្តំ រូបំ ឧបាទា តំ អត្ថិ សប្បដិឃំ អត្ថិ អប្បដិឃំ យន្តំ រូបំ អនុបាទា តំ អត្ថិ សប្បដិឃំ អត្ថិ អប្បដិឃំ ។ យន្តំ រូបំ ឧបាទា តំ អត្ថិ ឱឡារិកំ អត្ថិ សុខុមំ យន្តំ រូបំ អនុបាទា តំ អត្ថិ ឱឡារិកំ អត្ថិ សុខុមំ ។ យន្តំ រូបំ ឧបាទា តំ អត្ថិ ទូរេ អត្ថិ សន្តិកេ យន្តំ រូបំ អនុបាទា តំ អត្ថិ ទូរេ អត្ថិ សន្តិកេ ។បេ។ ទិដ្ឋំ សុតំ មុតំ វិញ្ញាតំ(១) ឯវំ ចតុព្វិធេន រូបសង្គហោ ។

(៣៧) បញ្ចវិធេន រូបសង្គហោ បថវីធាតុ អាបោធាតុ តេជោធាតុ វាយោធាតុ យញ្ច រូបំ ឧបាទា ឯវំ បញ្ចវិធេន រូបសង្គហោ ។

(៣៨) ឆព្វិធេន រូបសង្គហោ ចក្ខុវិញ្ញេយ្យំ រូបំ សោតវិញ្ញេយ្យំ រូបំ ឃានវិញ្ញេយ្យំ រូបំ ជិវ្ហាវិញ្ញេយ្យំ រូបំ កាយវិញ្ញេយ្យំ រូបំ មនោវិញ្ញេយ្យំ រូបំ ឯវំ ឆព្វិធេន រូបសង្គហោ ។

១. ម. ឯត្តន្តរេ បេ ។



ជាឧបាទិន្នក៏មាន ជាអនុបាទិន្នក៏មាន ។ រូបណា ជាឧបាទា រូបនោះ ជាឧបាទិន្នុបាទានិយៈក៏មាន ជាអនុបាទិន្នុបាទានិយៈក៏មាន រូបណា ជាអនុបាទា រូបនោះ ជាឧបាទិន្នុបាទានិយៈក៏មាន ជាអនុបាទិន្នុបាទានិយៈក៏មាន ។ រូបណា ជាឧបាទា រូបនោះ ជាសប្បដិឃៈក៏មាន ជាអប្បដិឃៈក៏មាន រូបណា ជាអនុបាទា រូបនោះ ជាសប្បដិឃៈក៏មាន ជាអប្បដិឃៈក៏មាន ។ រូបណា ជាឧបាទា រូបនោះ ជាឱឡារិកៈក៏មាន ជាសុខុមៈក៏មាន រូបណា ជាអនុបាទា រូបនោះ ជាឱឡារិកៈក៏មាន ជាសុខុមៈក៏មាន ។ រូបណា ជាឧបាទា រូបនោះ ជាទូរេក៏មាន ជាសន្តិកេក៏មាន រូបណា ជាអនុបាទា រូបនោះ ជាទូរេក៏មាន ជាសន្តិកេក៏មាន ។បេ។ រូបដែលបុគ្គលឃើញ ឮ លិទ្ធភក្ស ដឹងច្បាស់ហើយ រូបក្ខន្ធមានប្រការ៤ យ៉ាងនេះឯង ។

(៣៧) រូបក្ខន្ធមានប្រការ ៥ គឺបឋវីធាតុ អាបោធាតុ តេជោធាតុ វាយោធាតុ និងឧបាទារូប រូបក្ខន្ធមានប្រការ ៥ យ៉ាងនេះឯង ។

(៣៨) រូបក្ខន្ធមានប្រការ ៦ គឺរូបដែលគប្បីដឹងដោយភ្នែក រូបដែលគប្បីដឹងដោយត្រចៀក រូបដែលគប្បីដឹងដោយច្រមុះ រូបដែលគប្បីដឹងដោយអណ្តាត រូបដែលគប្បីដឹងដោយកាយ រូបដែលគប្បីដឹងដោយចិត្ត រូបក្ខន្ធមានប្រការ ៦ យ៉ាងនេះឯង ។

ទុវិធេន សង្ខារក្ខន្ធោ អត្ថិ សញ្ញោជនសម្បយុត្តោ អត្ថិ សញ្ញោជនវិប្បយុត្តោ ។ តិវិធេន សង្ខារក្ខន្ធោ អត្ថិ ឧប្បន្នោ អត្ថិ អនុប្បន្នោ អត្ថិ ឧប្បាទី ។ បេ ។ ឯវំ ទសវិធេន សង្ខារក្ខន្ធោ ។ ឯកវិធេន សង្ខារក្ខន្ធោ ចិត្តសម្បយុត្តោ ។ ទុវិធេន សង្ខារក្ខន្ធោ អត្ថិ សញ្ញោជនញ្ចេវ សញ្ញោជនិយោ ច សញ្ញោជនិយោ ចេវ នោ ច សញ្ញោជនំ ។ តិវិធេន សង្ខារក្ខន្ធោ អត្ថិ អតីតោ អត្ថិ អនាគតោ អត្ថិ បច្ចុប្បន្នោ ។ បេ ។ ឯវំ ទសវិធេន សង្ខារក្ខន្ធោ ។ ឯកវិធេន សង្ខារក្ខន្ធោ ចិត្តសម្បយុត្តោ ។ ទុវិធេន សង្ខារក្ខន្ធោ អត្ថិ សញ្ញោជនញ្ចេវ សញ្ញោជនសម្បយុត្តោ ច អត្ថិ សញ្ញោជនសម្បយុត្តោ ចេវ នោ ច សញ្ញោជនំ ។ តិវិធេន សង្ខារក្ខន្ធោ អត្ថិ អតីតារម្មណោ អត្ថិ អនាគតារម្មណោ អត្ថិ បច្ចុប្បន្នារម្មណោ ។ បេ ។ ឯវំ ទសវិធេន សង្ខារក្ខន្ធោ ។ ឯកវិធេន សង្ខារក្ខន្ធោ ចិត្តសម្បយុត្តោ ។ ទុវិធេន សង្ខារក្ខន្ធោ អត្ថិ សញ្ញោជនវិប្បយុត្តសញ្ញោជនិយោ



សង្ខារក្ខន្ធ មានប្រការ ២ គឺ សង្ខារក្ខន្ធប្រកបដោយសញ្ញោជនៈក៏មាន ប្រាសចាកសញ្ញោជនៈក៏មាន ។ សង្ខារក្ខន្ធ មានប្រការ ៣ គឺ សង្ខារក្ខន្ធដែលកើតឡើងហើយក៏មាន ដែលមិនទាន់កើតឡើងក៏មាន ដែលប្រុងនឹងកើតឡើងក៏មាន ។ បេ ។ សង្ខារក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។ សង្ខារក្ខន្ធ មានប្រការមួយ បានដល់សង្ខារក្ខន្ធដ៏សម្បយុត្តដោយចិត្ត ។ សង្ខារក្ខន្ធ មានប្រការ ២ គឺ សង្ខារក្ខន្ធជាសញ្ញោជនៈ ផង ជាប្រយោជន៍ដល់សញ្ញោជនៈក៏មាន ជាប្រយោជន៍ដល់សញ្ញោជនៈ តែមិនមែនសញ្ញោជនៈក៏មាន ។ សង្ខារក្ខន្ធ មានប្រការ ៣ គឺ សង្ខារក្ខន្ធជាអតីតក៏មាន ជាអនាគតក៏មាន ជាបច្ចុប្បន្នក៏មាន ។ បេ ។ សង្ខារក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។ សង្ខារក្ខន្ធ មានប្រការមួយ បានដល់សង្ខារក្ខន្ធដ៏សម្បយុត្តដោយចិត្ត ។ សង្ខារក្ខន្ធ មានប្រការ ២ គឺ សង្ខារក្ខន្ធជាសញ្ញោជនៈ ផងប្រកបដោយសញ្ញោជនៈក៏មាន ប្រកបដោយសញ្ញោជនៈ តែមិនមែនសញ្ញោជនៈក៏មាន ។ សង្ខារក្ខន្ធ មានប្រការ ៣ គឺ សង្ខារក្ខន្ធ មានអារម្មណ៍ជាអតីតក៏មាន មានអារម្មណ៍ជាអនាគតក៏មាន មានអារម្មណ៍ជាបច្ចុប្បន្នក៏មាន ។ បេ ។ សង្ខារក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។ សង្ខារក្ខន្ធ មានប្រការមួយ បានដល់សង្ខារក្ខន្ធដ៏សម្បយុត្តដោយចិត្ត ។ សង្ខារក្ខន្ធ មានប្រការ ២ គឺ សង្ខារក្ខន្ធ ប្រាសចាកសញ្ញោជនៈ តែជាប្រយោជន៍ដល់សញ្ញោជនៈក៏មាន

អត្ថិ សញ្ញោជនវិប្បយុត្តអសញ្ញោជនិយោ ។ តិវិធេន សង្ខារក្ខន្ធោ អត្ថិ អជ្ឈត្តោ អត្ថិ ពហិទ្ធា អត្ថិ អជ្ឈត្តពហិទ្ធា ។ បេ ។ ឯវំ ទសវិធេន សង្ខារក្ខន្ធោ ។ ឯកវិធេន សង្ខារក្ខន្ធោ ចិត្តសម្បយុត្តោ ។ ទុវិធេន សង្ខារក្ខន្ធោ អត្ថិ ហេតុ អត្ថិ ន ហេតុ ។ តិវិធេន សង្ខារក្ខន្ធោ អត្ថិ អជ្ឈត្តារម្មណោ អត្ថិ ពហិទ្ធារម្មណោ អត្ថិ អជ្ឈត្តពហិទ្ធារម្មណោ ។ បេ ។ ឯវំ ទសវិធេន សង្ខារក្ខន្ធោ ។

ឧភតោវឌ្ឍកំ ។

(៧០) សត្តវិធេន សង្ខារក្ខន្ធោ អត្ថិ កុសលោ អត្ថិ អកុសលោ អត្ថិ អព្យាកតោ អត្ថិ កាមាវចរោ អត្ថិ រូបាវចរោ អត្ថិ អរូបាវចរោ អត្ថិ អបរិយាបន្នោ ឯវំ សត្តវិធេន សង្ខារក្ខន្ធោ ។ អបរោបិ សត្តវិធេន សង្ខារក្ខន្ធោ អត្ថិ សុខាយ វេទនាយ សម្បយុត្តោ អត្ថិ ទុក្ខាយ វេទនាយ សម្បយុត្តោ អត្ថិ អទុក្ខមសុខាយ វេទនាយ សម្បយុត្តោ ។ បេ ។ អត្ថិ អជ្ឈត្តារម្មណោ អត្ថិ ពហិទ្ធារម្មណោ អត្ថិ អជ្ឈត្តពហិទ្ធារម្មណោ អត្ថិ កាមាវចរោ អត្ថិ រូបាវចរោ អត្ថិ អរូបាវចរោ អត្ថិ អបរិយាបន្នោ ឯវំ សត្តវិធេន សង្ខារក្ខន្ធោ ។



ប្រាសចាកសញ្ញោជនៈ តាំងមិនជាប្រយោជន៍ដល់សញ្ញោជនៈក៏មាន ។ សង្ខារក្ខន្ធ មានប្រការ ៣ គឺ សង្ខារក្ខន្ធខាងក្នុងក៏មាន ខាងក្រៅក៏មាន ទាំងខាងក្នុងទាំងខាងក្រៅក៏មាន ។ បេ ។ សង្ខារក្ខន្ធមានប្រការ ១០ យ៉ាងនេះឯង ។ សង្ខារក្ខន្ធ មានប្រការមួយ បានដល់សង្ខារក្ខន្ធដ៏សម្បយុត្តដោយចិត្ត ។ សង្ខារក្ខន្ធ មានប្រការ ២ គឺ សង្ខារក្ខន្ធជាហេតុៈក៏មាន មិនមែនហេតុៈក៏មាន ។ សង្ខារក្ខន្ធមានប្រការ ៣ គឺ សង្ខារក្ខន្ធមានអារម្មណ៍ខាងក្នុងក៏មាន មានអារម្មណ៍ខាងក្រៅក៏មាន មានអារម្មណ៍ទាំងខាងក្នុងទាំងខាងក្រៅក៏មាន ។ បេ ។ សង្ខារក្ខន្ធមានប្រការ ១០ យ៉ាងនេះឯង ។

ចប់ ឧភតោវឌ្ឍកៈ ។

(៧០) សង្ខារក្ខន្ធ មានប្រការ ៧ គឺ សង្ខារក្ខន្ធជាកុសលក៏មាន ជាអកុសលក៏មាន ជាអព្យាក្រឹតក៏មាន ជាកាមាវចរក៏មាន ជារូបាវចរក៏មាន ជាអរូបាវចរក៏មាន ជាអបរិយាបន្នៈក៏មាន សង្ខារក្ខន្ធមានប្រការ ៧ យ៉ាងនេះឯង ។ សង្ខារក្ខន្ធមានប្រការ ៧ ដទៃទៀត គឺ សង្ខារក្ខន្ធប្រកបដោយសុខវេទនាក៏មាន ប្រកបដោយទុក្ខវេទនាក៏មាន ប្រកបដោយអទុក្ខមសុខវេទនា ក៏មាន ។ បេ ។ មានអារម្មណ៍ខាងក្នុងក៏មាន មានអារម្មណ៍ខាងក្រៅក៏មាន មានអារម្មណ៍ទាំងខាងក្នុង ទាំងខាងក្រៅក៏មាន ជាកាមាវចរក៏មាន ជារូបាវចរក៏មាន ជាអរូបាវចរក៏មាន ជាអបរិយាបន្នៈក៏មាន សង្ខារក្ខន្ធ មានប្រការ ៧ យ៉ាងនេះឯង ។

[៨១] ចតុព្វិធេន សង្ខារក្ខន្ធោ ចក្ខុសម្ផស្សប្បច្ចយា សង្ខារក្ខន្ធោ អត្ថិ កុសលោ អត្ថិ អកុសលោ អត្ថិ អព្យាកតោ សោតសម្ផស្សប្បច្ចយា ។បេ។ ឃានសម្ផស្សប្បច្ចយា ។បេ។ ជិវ្ហាសម្ផស្សប្បច្ចយា ។បេ។ កាយសម្ផស្សប្បច្ចយា ។បេ។ មនោសម្ផស្សប្បច្ចយា សង្ខារក្ខន្ធោ អត្ថិ កុសលោ អត្ថិ អកុសលោ អត្ថិ អព្យាកតោ ចក្ខុសម្ផស្សជា ចេតនា ។បេ។ មនោសម្ផស្សជា ចេតនា ឯវំ ចតុព្វិធេន សង្ខារក្ខន្ធោ ។ អបរោបិ ចតុព្វិធេន សង្ខារក្ខន្ធោ ចក្ខុសម្ផស្សប្បច្ចយា សង្ខារក្ខន្ធោ អត្ថិ សុខាយ វេទនាយ សម្បយុត្តោ អត្ថិ ទុក្ខាយ វេទនាយ សម្បយុត្តោ អត្ថិ អទុក្ខមសុខាយ វេទនាយ សម្បយុត្តោ ។បេ។ អត្ថិ អជ្ឈត្តារម្មណោ អត្ថិ ពហិទ្ធារម្មណោ អត្ថិ អជ្ឈត្តពហិទ្ធារម្មណោ សោតសម្ផស្សប្បច្ចយា ។បេ។ ឃានសម្ផស្សប្បច្ចយា ។បេ។ ជិវ្ហាសម្ផស្សប្បច្ចយា ។បេ។ កាយសម្ផស្សប្បច្ចយា ។បេ។ មនោសម្ផស្សប្បច្ចយា សង្ខារក្ខន្ធោ អត្ថិ អជ្ឈត្តារម្មណោ អត្ថិ ពហិទ្ធារម្មណោ អត្ថិ អជ្ឈត្តពហិទ្ធារម្មណោ





[៨១] សង្ខារក្ខន្ធមានប្រការ ៤ គឺ សង្ខារក្ខន្ធ ព្រោះចក្ខុសម្ផ័ស្សជាបច្ច័យ ជាកុសលក៏មាន ជាអកុសលក៏មាន ជាអព្យាក្រឹតក៏មាន សង្ខារក្ខន្ធ ព្រោះសោតសម្ផ័ស្សជាបច្ច័យ ។បេ។ ព្រោះឃានសម្ផ័ស្សជាបច្ច័យ ។បេ។ ព្រោះជិវ្ហាសម្ផ័ស្សជាបច្ច័យ ។បេ។ ព្រោះកាយសម្ផ័ស្សជាបច្ច័យ ។បេ។ ព្រោះមនោសម្ផ័ស្សជាបច្ច័យ ជាកុសលក៏មាន ជាអកុសលក៏មាន ជាអព្យាក្រឹតក៏មាន ចេតនាកើតអំពីចក្ខុសម្ផ័ស្ស ។បេ។ ចេតនា កើតអំពីមនោសម្ផ័ស្ស សង្ខារក្ខន្ធ មានប្រការ ៤ យ៉ាងនេះឯង ។ សង្ខារក្ខន្ធមានប្រការ ៤ ដទៃទៀត គឺ សង្ខារក្ខន្ធ ព្រោះចក្ខុសម្ផ័ស្សជាបច្ច័យ ប្រកបដោយសុខវេទនាក៏មាន ប្រកបដោយទុក្ខវេទនាក៏មាន ប្រកបដោយអទុក្ខមសុខវេទនាក៏មាន ។បេ។ មានអារម្មណ៍ខាងក្នុងក៏មាន មានអារម្មណ៍ខាងក្រៅក៏មាន មានអារម្មណ៍ទាំងខាងក្នុងទាំងខាងក្រៅក៏មាន សង្ខារក្ខន្ធ ព្រោះសោតសម្ផ័ស្សជាបច្ច័យ ។បេ។ ព្រោះឃានសម្ផ័ស្ស ជាបច្ច័យ ។បេ។ ព្រោះជិវ្ហាសម្ផ័ស្ស ជាបច្ច័យ ។បេ។ ព្រោះកាយសម្ផ័ស្សជាបច្ច័យ ។បេ។ ព្រោះមនោសម្ផ័ស្ស ជាបច្ច័យ មានអារម្មណ៍ខាងក្នុងក៏មាន មានអារម្មណ៍ខាងក្រៅក៏មាន មានអារម្មណ៍ទាំងខាងក្នុង ទាំងខាងក្រៅ ក៏មាន

ចក្ខុសម្ផស្សជា ចេតនា ។បេ។ មនោសម្ផស្សជា ចេតនា ឯវំ ចតុវីសតិវិធេន សង្ខារក្ខន្ធោ ។

(៧២) តឹសវិធេន សង្ខារក្ខន្ធោ ចក្ខុសម្ផស្សប្បច្ចយា សង្ខារក្ខន្ធោ អត្ថិ កាមាវចរោ អត្ថិ រូបាវចរោ អត្ថិ អរូបាវចរោ អត្ថិ អបរិយាបន្នោ សោតសម្ផស្សប្បច្ចយា ។បេ។ ឃានសម្ផស្សប្បច្ចយា ។បេ។ ជិវ្ហាសម្ផស្សប្បច្ចយា ។បេ។ កាយសម្ផស្សប្បច្ចយា ។បេ។ មនោសម្ផស្សប្បច្ចយា សង្ខារក្ខន្ធោ អត្ថិ កាមាវចរោ អត្ថិ រូបាវចរោ អត្ថិ អរូបាវចរោ អត្ថិ អបរិយាបន្នោ ចក្ខុសម្ផស្សជា ចេតនា ។បេ។ មនោសម្ផស្សជា ចេតនា ឯវំ តឹសវិធេន សង្ខារក្ខន្ធោ ។

(៧៣) ពហុវិធេន សង្ខារក្ខន្ធោ ចក្ខុសម្ផស្សប្បច្ចយា សង្ខារក្ខន្ធោ អត្ថិ កុសលោ អត្ថិ អកុសលោ អត្ថិ អព្យាកតោ អត្ថិ កាមាវចរោ អត្ថិ រូបាវចរោ អត្ថិ អរូបាវចរោ អត្ថិ អបរិយាបន្នោ សោតសម្ផស្សប្បច្ចយា ។បេ។ ឃានសម្ផស្សប្បច្ចយា ។បេ។ ជិវ្ហាសម្ផស្សប្បច្ចយា ។បេ។ កាយសម្ផស្សប្បច្ចយា ។បេ។ មនោសម្ផស្សប្បច្ចយា សង្ខារក្ខន្ធោ



ចេតនា កើតអំពីចក្ខុសម្ផ័ស្ស ។បេ។ ចេតនា កើតអំពីមនោសម្ផ័ស្ស សង្ខារក្ខន្ធ មានប្រការ ២៤ យ៉ាងនេះឯង ។

(៧២) សង្ខារក្ខន្ធមានប្រការ ៣០ គឺ សង្ខារក្ខន្ធ ព្រោះចក្ខុសម្ផ័ស្សជាបច្ច័យ ជាកាមាវចរក៏មាន ជារូបាវចរក៏មាន ជាអរូបាវចរក៏មាន ជាអបរិយាបន្នៈក៏មាន សង្ខារក្ខន្ធ ព្រោះសោតសម្ផ័ស្សជាបច្ច័យ ។បេ។ ព្រោះឃានសម្ផ័ស្សជាបច្ច័យ ។បេ។ ព្រោះជិវ្ហាសម្ផ័ស្សជាបច្ច័យ ។បេ។ ព្រោះកាយសម្ផ័ស្សជាបច្ច័យ ។បេ។ ព្រោះមនោសម្ផ័ស្សជាបច្ច័យ ជាកាមាវចរក៏មាន ជារូបាវចរក៏មាន ជាអរូបាវចរក៏មាន ជាអបរិយាបន្នៈក៏មាន ចេតនា កើតអំពីចក្ខុសម្ផ័ស្ស ។បេ។ ចេតនា កើតអំពីមនោសម្ផ័ស្ស សង្ខារក្ខន្ធ មានប្រការ ៣០ យ៉ាងនេះឯង ។

(៧៣) សង្ខារក្ខន្ធ មានច្រើនប្រការ គឺ សង្ខារក្ខន្ធព្រោះចក្ខុសម្ផ័ស្សជាបច្ច័យ ជាកុសលក៏មាន ជាអកុសលក៏មាន ជាអព្យាក្រឹតក៏មាន ជាកាមាវចរក៏មាន ជារូបាវចរក៏មាន ជាអរូបាវចរក៏មាន ជាអបរិយាបន្នៈក៏មាន សង្ខារក្ខន្ធ ព្រោះសោតសម្ផ័ស្សជាបច្ច័យ ។បេ។ ព្រោះឃានសម្ផ័ស្សជាបច្ច័យ ។បេ។ ព្រោះជិវ្ហាសម្ផ័ស្សជាបច្ច័យ ។បេ។ ព្រោះកាយសម្ផ័ស្សជាបច្ច័យ ។បេ។ ព្រោះមនោសម្ផ័ស្ស ជាបច្ច័យ

អត្ថិ កុសលោ អត្ថិ អកុសលោ អត្ថិ អព្យាកតោ អត្ថិ កាមាវចរោ អត្ថិ រូបាវចរោ អត្ថិ អរូបាវចរោ អត្ថិ អបរិយាបន្នោ ចក្ខុសម្ផស្សជា ចេតនា ។ បេ ។ មនោសម្ផស្សជា ចេតនា ឯវំ ពហុវិធេន សង្ខារក្ខន្ធោ ។ អបរោបិ ពហុវិធេន សង្ខារក្ខន្ធោ ចក្ខុសម្ផស្សប្បច្ចយា សង្ខារក្ខន្ធោ អត្ថិ សុខាយ វេទនាយ សម្បយុត្តោ អត្ថិ ទុក្ខាយ វេទនាយ សម្បយុត្តោ អត្ថិ អទុក្ខមសុខាយ វេទនាយ សម្បយុត្តោ ។ បេ ។ អត្ថិ អជ្ឈត្តារម្មណោ អត្ថិ ពហិទ្ធារម្មណោ អត្ថិ អជ្ឈត្តពហិទ្ធារម្មណោ អត្ថិ កាមាវចរោ អត្ថិ រូបាវចរោ អត្ថិ អរូបាវចរោ អត្ថិ អបរិយាបន្នោ សោតសម្ផស្សប្បច្ចយា ។ បេ ។ ឃានសម្ផស្សប្បច្ចយា ។ បេ ។ ជិវ្ហាសម្ផស្សប្បច្ចយា ។ បេ ។ កាយសម្ផស្សប្បច្ចយា ។ បេ ។ មនោសម្ផស្សប្បច្ចយា សង្ខារក្ខន្ធោ អត្ថិ អជ្ឈត្តារម្មណោ អត្ថិ ពហិទ្ធារម្មណោ អត្ថិ អជ្ឈត្តពហិទ្ធារម្មណោ អត្ថិ កាមាវចរោ អត្ថិ រូបាវចរោ អត្ថិ អរូបាវចរោ អត្ថិ អបរិយាបន្នោ ចក្ខុសម្ផស្សជា ចេតនា



ជាកុសលក៏មាន ជាអកុសលក៏មាន ជាអព្យាក្រឹតក៏មាន ជាកាមាវចរក៏មាន ជារូបាវចរក៏មាន ជាអរូបាវចរក៏មាន ជាអបរិយាបន្នៈក៏មាន ចេតនាកើតអំពីចក្ខុសម្ផ័ស្ស ។ បេ ។ ចេតនាកើតអំពីមនោសម្ផ័ស្ស សង្ខារក្ខន្ធមានច្រើនប្រការ យ៉ាងនេះឯង ។ សង្ខារក្ខន្ធ មានច្រើនប្រការ ដទៃទៀត គឺ សង្ខារក្ខន្ធ ព្រោះចក្ខុសម្ផ័ស្សជាបច្ច័យ ប្រកបដោយសុខវេទនាក៏មាន ប្រកបដោយទុក្ខវេទនាក៏មាន ប្រកបដោយអទុក្ខមសុខវេទនាក៏មាន ។ បេ ។ មានអារម្មណ៍ខាងក្នុងក៏មាន មានអារម្មណ៍ខាងក្រៅក៏មាន មានអារម្មណ៍ទាំងខាងក្នុង ទាំងខាងក្រៅក៏មាន ជាកាមាវចរក៏មាន ជារូបាវចរក៏មាន ជាអរូបាវចរក៏មាន ជាអបរិយាបន្នៈក៏មាន សង្ខារក្ខន្ធ ព្រោះសោតសម្ផ័ស្សជាបច្ច័យ ។ បេ ។ ព្រោះឃានសម្ផ័ស្សជាបច្ច័យ ។ បេ ។ ព្រោះជិវ្ហាសម្ផ័ស្សជាបច្ច័យ ។ បេ ។ ព្រោះកាយសម្ផ័ស្សជាបច្ច័យ ។ បេ ។ ព្រោះមនោសម្ផ័ស្សជាបច្ច័យ មានអារម្មណ៍ខាងក្នុងក៏មាន មានអារម្មណ៍ខាងក្រៅក៏មាន មានអារម្មណ៍ទាំងខាងក្នុង ទាំងខាងក្រៅក៏មាន ជាកាមាវចរក៏មាន ជារូបាវចរក៏មាន ជាអរូបាវចរក៏មាន ជាអបរិយាបន្នៈក៏មាន ចេតនា កើតអំពីចក្ខុសម្ផ័ស្ស

។បេ។ មនោសម្ផស្សជា ចេតនា ឯវំ ពហុវិធេន សង្ខារក្ខន្ធោ ។

អយំ វុច្ចតិ សង្ខារក្ខន្ធោ ។

តត្ថ កតមោ វិញ្ញាណក្ខន្ធោ ។

(៧៦) ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ សហេតុកោ អត្ថិ អហេតុកោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ កុសលោ អត្ថិ អកុសលោ អត្ថិ អព្យាកតោ ។ ចតុព្វិធេន វិញ្ញាណក្ខន្ធោ អត្ថិ កាមាវចរោ អត្ថិ រូបាវចរោ អត្ថិ អរូបាវចរោ អត្ថិ អបរិយាបន្នោ ។ បញ្ចវិធេន វិញ្ញាណក្ខន្ធោ អត្ថិ សុខិន្ទ្រិយសម្បយុត្តោ អត្ថិ ទុក្ខិន្ទ្រិយសម្បយុត្តោ អត្ថិ សោមនស្សិន្ទ្រិយសម្បយុត្តោ អត្ថិ ទោមនស្សិន្ទ្រិយសម្បយុត្តោ អត្ថិ ឧបេក្ខិន្ទ្រិយសម្បយុត្តោ ។ ឆព្វិធេន វិញ្ញាណក្ខន្ធោ ចក្ខុវិញ្ញាណំ សោតវិញ្ញាណំ ឃានវិញ្ញាណំ ជិវ្ហាវិញ្ញាណំ កាយវិញ្ញាណំ មនោវិញ្ញាណំ ឯវំ ឆព្វិធេន វិញ្ញាណក្ខន្ធោ ។ សត្តវិធេន វិញ្ញាណក្ខន្ធោ ចក្ខុវិញ្ញាណំ ។បេ។ កាយវិញ្ញាណំ មនោធាតុ មនោវិញ្ញាណធាតុ



។បេ។ ចេតនា កើតអំពីមនោសម្ផស្ស សង្ខារក្ខន្ធ មានច្រើនប្រការ យ៉ាងនេះឯង ។

នេះហៅថា សង្ខារក្ខន្ធ ។

បណ្ដាខន្ធទាំង ៥ នោះ វិញ្ញាណក្ខន្ធ តើដូចម្ដេច ។

(៧៦) វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណក្ខន្ធដ៏សម្បយុត្តដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ វិញ្ញាណក្ខន្ធ មានហេតុក៏មាន មិនមានហេតុក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធ ជាកុសលក៏មាន ជាអកុសលក៏មាន ជាអព្យាក្រឹតក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៤ គឺ វិញ្ញាណក្ខន្ធ ជាកាមាវចរក៏មាន ជារូបាវចរក៏មាន ជាអរូបាវចរក៏មាន ជាអបរិយាបន្នៈក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៥ គឺ វិញ្ញាណក្ខន្ធ ប្រកបដោយសុខិន្ទ្រិយក៏មាន ប្រកបដោយទុក្ខិន្ទ្រិយក៏មាន ប្រកបដោយសោមនស្សិន្ទ្រិយក៏មាន ប្រកបដោយទោមនស្សិន្ទ្រិយក៏មាន ប្រកបដោយឧបេក្ខិន្ទ្រិយក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៦ គឺ ចក្ខុវិញ្ញាណ សោតវិញ្ញាណ ឃានវិញ្ញាណ ជិវ្ហាវិញ្ញាណ កាយវិញ្ញាណ មនោវិញ្ញាណ វិញ្ញាណក្ខន្ធ មានប្រការ ៦ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការ ៧ គឺ ចក្ខុវិញ្ញាណ ។បេ។ កាយវិញ្ញាណ មនោធាតុ មនោវិញ្ញាណធាតុ

ឯវំ សត្តវិធេន វិញ្ញាណក្ខន្ធោ ។ អដ្ឋវិធេន វិញ្ញាណក្ខន្ធោ ចក្ខុវិញ្ញាណំ ។ បេ ។ កាយវិញ្ញាណំ អត្ថិ សុខសហគតំ អត្ថិ ទុក្ខសហគតំ មនោធាតុ មនោវិញ្ញាណធាតុ ឯវំ អដ្ឋវិធេន វិញ្ញាណក្ខន្ធោ ។ នវវិធេន វិញ្ញាណក្ខន្ធោ ចក្ខុវិញ្ញាណំ ។ បេ ។ កាយវិញ្ញាណំ មនោធាតុ មនោវិញ្ញាណធាតុ អត្ថិ កុសលា អត្ថិ អកុសលា អត្ថិ អព្យាកតា ឯវំ នវវិធេន វិញ្ញាណក្ខន្ធោ ។ ទសវិធេន វិញ្ញាណក្ខន្ធោ ចក្ខុវិញ្ញាណំ ។ បេ ។ កាយវិញ្ញាណំ អត្ថិ សុខសហគតំ អត្ថិ ទុក្ខសហគតំ មនោធាតុ មនោវិញ្ញាណធាតុ អត្ថិ កុសលា អត្ថិ អកុសលា អត្ថិ អព្យាកតា ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។

(៧៨) ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ សហេតុកោ អត្ថិ អហេតុកោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ សុខាយ វេទនាយ សម្បយុត្តោ អត្ថិ ទុក្ខាយ វេទនាយ សម្បយុត្តោ អត្ថិ អទុក្ខមសុខាយ វេទនាយ សម្បយុត្តោ



វិញ្ញាណក្ខន្ធ មានប្រការ ៧ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការ ៨ គឺ ចក្ខុវិញ្ញាណ ។ បេ ។ កាយវិញ្ញាណ កើតព្រមដោយសុខក៏មាន កើតព្រមដោយទុក្ខក៏មាន មនោធាតុ មនោវិញ្ញាណធាតុ វិញ្ញាណក្ខន្ធ មានប្រការ ៨ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការ ៩ គឺ ចក្ខុវិញ្ញាណ ។ បេ ។ កាយវិញ្ញាណ មនោធាតុ មនោវិញ្ញាណធាតុ ជាកុសលក៏មាន ជាអកុសលក៏មាន ជាអព្យាក្រឹតក៏មាន វិញ្ញាណក្ខន្ធ មានប្រការ ៩ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការ ១០ គឺ ចក្ខុវិញ្ញាណ ។ បេ ។ កាយវិញ្ញាណ កើតព្រមដោយសុខក៏មាន កើតព្រមដោយទុក្ខក៏មាន មនោធាតុ មនោវិញ្ញាណធាតុ ជាកុសលក៏មាន ជាអកុសលក៏មាន ជាអព្យាក្រឹតក៏មាន វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។

(៧៨) វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណក្ខន្ធដ៏សម្បយុត្ត ដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ វិញ្ញាណក្ខន្ធ មានហេតុក៏មាន មិនមានហេតុក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធ ប្រកបដោយសុខវេទនា ក៏មាន ប្រកបដោយទុក្ខវេទនាក៏មាន ប្រកបដោយអទុក្ខមសុខវេទនា ក៏មាន

អត្ថិ វិបាកោ អត្ថិ វិបាកធម្មធម្មោ អត្ថិ នេវ វិបាកនវិបាកធម្មធម្មោ អត្ថិ ឧបាទិន្នុបាទានិយោ អត្ថិ អនុបាទិន្នុបាទានិយោ អត្ថិ អនុបាទិន្នានុបាទានិយោ អត្ថិ សង្កិលិដ្ឋសង្កិលេសិកោ អត្ថិ អសង្កិលិដ្ឋសង្កិលេសិកោ អត្ថិ អសង្កិលិដ្ឋាសង្កិលេសិកោ អត្ថិ សវិតក្កសវិចារោ អត្ថិ អវិតក្កវិចារមត្តោ អត្ថិ អវិតក្កាវិចារោ អត្ថិ បីតិសហគតោ អត្ថិ សុខសហគតោ អត្ថិ ឧបេក្ខាសហគតោ អត្ថិ ទស្សនេន បហាតព្វោ អត្ថិ ភាវនាយ បហាតព្វោ អត្ថិ នេវ ទស្សនេន ន ភាវនាយ បហាតព្វោ អត្ថិ ទស្សនេន បហាតព្វហេតុកោ អត្ថិ ភាវនាយ បហាតព្វហេតុកោ អត្ថិ នេវ ទស្សនេន ន ភាវនាយ បហាតព្វហេតុកោ អត្ថិ អាចយគាមិ អត្ថិ អបចយគាមិ អត្ថិ នេវាចយគាមិ នាបចយគាមិ អត្ថិ សេក្ខោ អត្ថិ អសេក្ខោ





ជាវិបាកក៏មាន ជាធម៌មានវិបាកជាប្រក្រតីក៏មាន មិនមែនវិបាកផងមិនមែនជាធម៌មានវិបាកជាប្រក្រតីក៏មាន មានកម្មប្រកបដោយកិលេសមានតណ្ហាជាដើមកាន់យកហើយ ទាំងជាប្រយោជន៍ដល់ឧបាទានក៏មាន មិនមានកម្មប្រកបដោយកិលេសមានតណ្ហាជាដើមកាន់យកហើយ តែជាប្រយោជន៍ដល់ឧបាទានក៏មាន មិនមានកម្មប្រកបដោយកិលេសមានតណ្ហាជាដើមកាន់យកហើយ ទាំងមិនជាប្រយោជន៍ដល់ឧបាទានក៏មាន សៅហ្មងហើយ ទាំងគួរដល់សេចក្តីសៅហ្មងក៏មាន សៅហ្មងហើយ តែគួរដល់សេចក្តីសៅហ្មងក៏មាន សៅហ្មងហើយ ទាំងមិនគួរដល់សេចក្តីសៅហ្មងក៏មាន ប្រព្រឹត្តទៅជាមួយនឹងវិតក្កៈ ទាំងប្រព្រឹត្តទៅជាមួយនឹងវិចារៈក៏មាន មិនមានវិតក្កៈមានត្រឹមតែវិចារៈក៏មាន មិនមានវិតក្កៈទាំងមិនមានវិចារៈក៏មាន កើតព្រមដោយបីតិក៏មាន កើតព្រមដោយសុខៈក៏មាន កើតព្រមដោយឧបេក្ខាក៏មាន គួរលះដោយទស្សនៈក៏មាន គួរលះដោយភាវនាក៏មាន មិនគួរលះដោយទស្សនៈ ទាំងមិនគួរលះដោយភាវនាក៏មាន មានហេតុគួរលះដោយទស្សនៈក៏មាន មានហេតុគួរលះដោយភាវនាក៏មាន មានហេតុមិនគួរលះដោយទស្សនៈ ទាំងមិនគួរលះដោយភាវនាក៏មាន ដល់នូវការសន្សំកពូនឡើងក៏មាន ដល់នូវការមិនសន្សំកពូនឡើងក៏មាន មិនដល់នូវការសន្សំកពូនឡើង ទាំងមិនដល់នូវការមិនសន្សំកពូនឡើងក៏មាន ជារបស់សេក្ខបុគ្គលក៏មាន ជារបស់អសេក្ខបុគ្គលក៏មាន

អត្ថិ នេវសេក្ខោ នាសេក្ខោ អត្ថិ បរិត្តោ អត្ថិ មហគ្គតោ អត្ថិ អប្បមាណោ អត្ថិ បរិត្តារម្មណោ អត្ថិ មហគ្គតារម្មណោ អត្ថិ អប្បមាណារម្មណោ អត្ថិ ហីនោ អត្ថិ មជ្ឈិមោ អត្ថិ បណីតោ អត្ថិ មិច្ឆត្តនិយតោ អត្ថិ សម្មត្តនិយតោ អត្ថិ អនិយតោ អត្ថិ មគ្គារម្មណោ អត្ថិ មគ្គហេតុកោ អត្ថិ មគ្គាធិបតិ អត្ថិ ឧប្បន្នោ អត្ថិ អនុប្បន្នោ អត្ថិ ឧប្បាទី អត្ថិ អតីតោ អត្ថិ អនាគតោ អត្ថិ បច្ចុប្បន្នោ អត្ថិ អតីតារម្មណោ អត្ថិ អនាគតារម្មណោ អត្ថិ បច្ចុប្បន្នារម្មណោ អត្ថិ អជ្ឈត្តោ អត្ថិ ពហិទ្ធា អត្ថិ អជ្ឈត្តពហិទ្ធា អត្ថិ អជ្ឈត្តារម្មណោ អត្ថិ ពហិទ្ធារម្មណោ អត្ថិ អជ្ឈត្តពហិទ្ធារម្មណោ ។ បេ ។ ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។

(៧៦) ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ ហេតុសម្បយុត្តោ អត្ថិ ហេតុវិប្បយុត្តោ អត្ថិ ន ហេតុ សហេតុកោ អត្ថិ ន ហេតុ អហេតុកោ អត្ថិ លោកិយោ អត្ថិ លោកុត្តរោ អត្ថិ កេនចិ វិញ្ញេយ្យោ



មិនមែនជារបស់សេក្ខបុគ្គល ទាំងមិនមែនជារបស់អសេក្ខបុគ្គល ក៏មាន មានសភាពតូចឆ្មារក៏មាន ដល់នូវសភាពធំក៏មាន ប្រមាណមិនបានក៏មាន មានអារម្មណ៍តូចឆ្មារក៏មាន មានអារម្មណ៍ដល់នូវសភាពធំក៏មាន មានអារម្មណ៍ប្រមាណមិនបានក៏មាន ថោកទាបក៏មាន កណ្តាលក៏មាន ឧត្តមក៏មាន មានសភាពខុសទិសទៀងក៏មាន មានសភាពត្រូវទិសទៀងក៏មាន មានសភាពមិនទៀងក៏មាន មានមគ្គជាអារម្មណ៍ក៏មាន មានមគ្គជាហេតុក៏មាន មានមគ្គជាអធិបតី ក៏មាន កើតឡើងហើយក៏មាន មិនទាន់កើតឡើងក៏មាន ប្រុងនឹងកើតឡើងក៏មាន ជាអតីតក៏មាន ជាអនាគតក៏មាន ជាបច្ចុប្បន្នក៏មាន មានអារម្មណ៍ជាអតីតក៏មាន មានអារម្មណ៍ជាអនាគតក៏មាន មានអារម្មណ៍ជាបច្ចុប្បន្នក៏មាន ជាខាងក្នុងក៏មាន ជាខាងក្រៅក៏មាន ជាខាងក្នុងទាំងខាងក្រៅក៏មាន មានអារម្មណ៍ខាងក្នុងក៏មាន មានអារម្មណ៍ខាងក្រៅក៏មាន មានអារម្មណ៍ទាំងខាងក្នុងទាំងខាងក្រៅក៏មាន ។ បេ ។ វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។

(៧៦) វិញ្ញាណក្ខន្ធមានប្រការមួយ បានដល់វិញ្ញាណក្ខន្ធដ៏សម្បយុត្តដោយផស្សៈ ។ វិញ្ញាណក្ខន្ធមានប្រការ២ គឺ វិញ្ញាណក្ខន្ធប្រកបដោយហេតុក៏មាន ប្រាសចាកហេតុក៏មាន មិនមែនហេតុតែប្រព្រឹត្តទៅជាមួយនឹងហេតុក៏មាន មិនមែនហេតុទាំងមិនប្រកបដោយហេតុក៏មាន ជាលោកិយក៏មាន ជាលោកុត្តរក៏មាន ដែលគប្បីដឹងដោយវិញ្ញាណណាមួយក៏មាន

អត្ថិ កេនចិ ន វិញ្ញេយ្យោ អត្ថិ សាសវោ អត្ថិ អនា-
សវោ អត្ថិ អាសវសម្បយុត្តោ អត្ថិ អាសវវិប្បយុត្តោ
អត្ថិ អាសវវិប្បយុត្តសាសវោ អត្ថិ អាសវវិប្បយុត្តអនា-
សវោ អត្ថិ សញ្ញោជនិយោ អត្ថិ អសញ្ញោជនិយោ អត្ថិ
សញ្ញោជនសម្បយុត្តោ អត្ថិ សញ្ញោជនវិប្បយុត្តោ អត្ថិ
សញ្ញោជនវិប្បយុត្តសញ្ញោជនិយោ អត្ថិ សញ្ញោជន-
វិប្បយុត្តអសញ្ញោជនិយោ អត្ថិ គន្ថនិយោ អត្ថិ អគន្ថ-
និយោ អត្ថិ គន្ថសម្បយុត្តោ អត្ថិ គន្ថវិប្បយុត្តោ អត្ថិ
គន្ថវិប្បយុត្តគន្ថនិយោ អត្ថិ គន្ថវិប្បយុត្តអគន្ថនិយោ
អត្ថិ ឱឃនិយោ អត្ថិ អនោឃនិយោ អត្ថិ ឱឃសម្ប-
យុត្តោ អត្ថិ ឱឃវិប្បយុត្តោ អត្ថិ ឱឃវិប្បយុត្តឱឃនិ-
យោ អត្ថិ ឱឃវិប្បយុត្តអនោឃនិយោ អត្ថិ យោគនិ-
យោ អត្ថិ អយោគនិយោ អត្ថិ យោគសម្បយុត្តោ អត្ថិ
យោគវិប្បយុត្តោ អត្ថិ យោគវិប្បយុត្តយោគនិយោ



ដែលមិនគប្បីដឹងដោយវិញ្ញាណណាមួយក៏មាន ប្រព្រឹត្តទៅជាមួយនឹងអា-
សវៈក៏មាន មិនមានអាសវៈក៏មាន ប្រកបដោយអាសវៈក៏មាន ប្រាសចាក
អាសវៈក៏មាន ប្រាសចាកអាសវៈ តែប្រព្រឹត្តទៅជាមួយនឹងអាសវៈក៏មាន
ប្រាសចាកអាសវៈ ទាំងមិនមែនអាសវៈក៏មាន ជាប្រយោជន៍ដល់សញ្ញោ-
ជនៈក៏មាន មិនជាប្រយោជន៍ដល់សញ្ញោជនៈក៏មាន ប្រកបដោយសញ្ញោ-
ជនៈក៏មាន ប្រាសចាកសញ្ញោជនៈក៏មាន ប្រាសចាកសញ្ញោជនៈ តែជា
ប្រយោជន៍ដល់សញ្ញោជនៈក៏មាន ប្រាសចាកសញ្ញោជនៈ ទាំងមិនជាប្រ-
យោជន៍ដល់សញ្ញោជនៈក៏មាន ដែលគន្ថៈគប្បីដោតក្រងក៏មាន ដែលគន្ថៈ
មិនគប្បីដោតក្រងក៏មាន ប្រកបដោយគន្ថៈក៏មាន ប្រាសចាកគន្ថៈក៏មាន
ប្រាសចាកគន្ថៈ តែជាសភាពដែលគន្ថៈគប្បីដោតក្រងក៏មាន ប្រាសចាក
គន្ថៈ ទាំងជាសភាពដែលគន្ថៈមិនគប្បីដោតក្រងក៏មាន ដែលឱឃៈគប្បីប្រ-
ព្រឹត្តកន្លងក៏មាន ដែលឱឃៈមិនគប្បីប្រព្រឹត្តកន្លងក៏មាន ប្រកបដោយឱឃៈ
ក៏មាន ប្រាសចាកឱឃៈក៏មាន ប្រាសចាកឱឃៈ តែជាសភាពដែលឱឃៈ
គប្បីប្រព្រឹត្តកន្លងក៏មាន ប្រាសចាកឱឃៈទាំងជាសភាពដែលឱឃៈមិនគប្បី
ប្រព្រឹត្តកន្លងក៏មាន ដែលយោគៈគប្បីប្រព្រឹត្តកន្លងក៏មាន ដែលយោគៈមិន
គប្បីប្រព្រឹត្តកន្លងក៏មាន ប្រកបដោយយោគៈក៏មាន ប្រាសចាកយោគៈក៏
មាន ប្រាសចាកយោគៈ តែជាសភាពដែលយោគៈគប្បីប្រព្រឹត្តកន្លងក៏មាន

អត្ថិ យោគវិប្បយុត្តអយោគនិយោ អត្ថិ នីវរណិយោ អត្ថិ អនីវរណិយោ អត្ថិ នីវរណសម្បយុត្តោ អត្ថិ នីវរណវិប្បយុត្តោ អត្ថិ នីវរណវិប្បយុត្តនីវរណិយោ អត្ថិ នីវរណវិប្បយុត្តអនីវរណិយោ អត្ថិ បរាមដ្ឋោ អត្ថិ អបរាមដ្ឋោ អត្ថិ បរាមាសសម្បយុត្តោ អត្ថិ បរាមាសវិប្បយុត្តោ អត្ថិ បរាមាសវិប្បយុត្តបរាមដ្ឋោ អត្ថិ បរាមាសវិប្បយុត្តអបរាមដ្ឋោ អត្ថិ ឧបាទិន្នោ អត្ថិ អនុបាទិន្នោ អត្ថិ ឧបាទានិយោ អត្ថិ អនុបាទានិយោ អត្ថិ ឧបាទានសម្បយុត្តោ អត្ថិ ឧបាទានវិប្បយុត្តោ អត្ថិ ឧបាទានវិប្បយុត្តឧបាទានិយោ អត្ថិ ឧបាទានវិប្បយុត្តអនុបាទានិយោ អត្ថិ សង្កិលេសិកោ អត្ថិ អសង្កិលេសិកោ អត្ថិ សង្កិលិដ្ឋោ អត្ថិ អសង្កិលិដ្ឋោ អត្ថិ កិលេសសម្បយុត្តោ អត្ថិ កិលេសវិប្បយុត្តោ អត្ថិ កិលេសវិប្បយុត្តសង្កិលេសិកោ អត្ថិ កិលេសវិប្បយុត្តអសង្កិលេសិកោ



ប្រាសចាកយោគៈ តាំងជាសភាពដែលយោគៈមិនគប្បីប្រព្រឹត្តកន្ទងក៏មាន ជាប្រយោជន៍ដល់នីវរណៈក៏មាន មិនជាប្រយោជន៍ដល់នីវរណៈក៏មាន ប្រកបដោយនីវរណៈក៏មាន ប្រាសចាកនីវរណៈក៏មាន ប្រាសចាកនីវរណៈតែជាប្រយោជន៍ដល់នីវរណៈក៏មាន ប្រាសចាកនីវរណៈ តាំងមិនជាប្រយោជន៍ដល់នីវរណៈក៏មាន ដែលបរាមាសៈស្ទាបអង្អែលក៏មាន ដែលបរាមាសៈមិនស្ទាបអង្អែលក៏មាន ប្រកបដោយបរាមាសៈក៏មាន ប្រាសចាកបរាមាសៈក៏មាន ប្រាសចាកបរាមាសៈតែជាសភាពដែលបរាមាសៈស្ទាបអង្អែលក៏មាន ប្រាសចាកបរាមាសៈ តាំងជាសភាពដែលបរាមាសៈមិនស្ទាបអង្អែលក៏មាន មានកម្មប្រកបដោយកិលេស មានតណ្ហាជាដើមកាន់យកហើយក៏មាន មិនមានកម្មប្រកបដោយកិលេសមានតណ្ហាជាដើមកាន់យកហើយក៏មាន ជាប្រយោជន៍ដល់ឧបាទានក៏មាន មិនជាប្រយោជន៍ដល់ឧបាទានក៏មាន ប្រកបដោយឧបាទានក៏មាន ប្រាសចាកឧបាទានក៏មាន ប្រាសចាកឧបាទានតែជាប្រយោជន៍ដល់ឧបាទានក៏មាន ប្រាសចាកឧបាទានតាំងមិនជាប្រយោជន៍ដល់ឧបាទានក៏មាន គួរដល់សេចក្ដីសៅហ្មងក៏មាន មិនគួរដល់សេចក្ដីសៅហ្មងក៏មាន សៅហ្មងហើយក៏មាន មិនសៅហ្មងហើយក៏មាន ប្រកបដោយសេចក្ដីសៅហ្មងក៏មាន ប្រាសចាកសេចក្ដីសៅហ្មងក៏មាន ប្រាសចាកសេចក្ដីសៅហ្មងតែគួរដល់សេចក្ដីសៅហ្មងក៏មាន ប្រាសចាកសេចក្ដីសៅហ្មង តាំងមិនគួរដល់សេចក្ដីសៅហ្មងក៏មាន

អត្ថិ ទស្សនេន បហាតព្វោ អត្ថិ ន ទស្សនេន បហាតព្វោ អត្ថិ ភាវនាយ បហាតព្វោ អត្ថិ ន ភាវនាយ បហាតព្វោ អត្ថិ ទស្សនេន បហាតព្វហេតុកោ អត្ថិ ន ទស្សនេន បហាតព្វហេតុកោ អត្ថិ ភាវនាយ បហាតព្វហេតុកោ អត្ថិ ន ភាវនាយ បហាតព្វហេតុកោ អត្ថិ សវិតក្កោ អត្ថិ អវិតក្កោ អត្ថិ សវិចារោ អត្ថិ អវិចារោ អត្ថិ សប្បីតិកោ អត្ថិ អប្បីតិកោ អត្ថិ បីតិសហគតោ អត្ថិ ន បីតិសហគតោ អត្ថិ សុខសហគតោ អត្ថិ ន សុខសហគតោ អត្ថិ ឧបេក្ខាសហគតោ អត្ថិ ន ឧបេក្ខាសហគតោ អត្ថិ កាមាវចរោ អត្ថិ ន កាមាវចរោ អត្ថិ រូបាវចរោ អត្ថិ ន រូបាវចរោ អត្ថិ អរូបាវចរោ អត្ថិ ន អរូបាវចរោ អត្ថិ បរិយាបន្នោ អត្ថិ អបរិយាបន្នោ អត្ថិ និយ្យានិកោ អត្ថិ អនិយ្យានិកោ អត្ថិ និយតោ អត្ថិ អនិយតោ អត្ថិ សឧត្តរោ អត្ថិ អនុត្តរោ អត្ថិ សរណោ អត្ថិ អរណោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ កុសលោ អត្ថិ អកុសលោ អត្ថិ អព្យាកតោ ។ បេ ។ ទសវិធេន វិញ្ញាណក្ខន្ធោ ។



គួរលះដោយទស្សៈក៏មាន មិនគួរលះដោយទស្សនៈក៏មាន គួរលះដោយភាវនាក៏មាន មិនគួរលះដោយភាវនាក៏មាន មានហេតុគួរលះដោយទស្សនៈក៏មាន មានហេតុមិនគួរលះដោយទស្សនៈក៏មាន មានហេតុគួរលះដោយភាវនាក៏មាន មានហេតុមិនគួរលះដោយភាវនាក៏មាន ប្រព្រឹត្តទៅជាមួយនឹងវិតក្កៈក៏មាន មិនមានវិតក្កៈក៏មាន ប្រព្រឹត្តទៅជាមួយនឹងវិចារៈក៏មាន មិនមានវិចារៈក៏មាន កើតព្រមដោយបីតិក៏មាន មិនមានបីតិក៏មាន កើតព្រមដោយបីតិក៏មាន មិនកើតព្រមដោយបីតិក៏មាន កើតព្រមដោយសុខៈក៏មាន មិនកើតព្រមដោយសុខៈក៏មាន កើតព្រមដោយឧបេក្ខាក៏មាន មិនកើតព្រមដោយឧបេក្ខាក៏មាន ជាកាមាវចរក៏មាន មិនមែនកាមាវចរក៏មាន ជារូបាវចរក៏មាន មិនមែនរូបាវចរក៏មាន ជាអរូបាវចរក៏មាន មិនមែនអរូបាវចរក៏មាន ជាបរិយាបន្នៈក៏មាន ជាអបរិយាបន្នៈក៏មាន ជានិយ្យានិកៈក៏មាន ជាអនិយ្យានិកៈក៏មាន ជានិយតៈក៏មាន ជាអនិយតៈក៏មាន ជាឧត្តរៈក៏មាន ជាអនុត្តរៈក៏មាន ប្រកបដោយរណៈក៏មាន ជាអរណៈក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធជាកុសលក៏មាន ជាអកុសលក៏មាន ជាអព្យាក្រឹតក៏មាន ។ បេ ។ វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។

( ៧៧ ) ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ សរណោ អត្ថិ អរណោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ សុខាយ វេទនាយ សម្បយុត្តោ អត្ថិ ទុក្ខាយ វេទនាយ សម្បយុត្តោ អត្ថិ អទុក្ខមសុខាយ វេទនាយ សម្បយុត្តោ ។ បេ ។ អត្ថិ អជ្ឈត្តារម្មណោ អត្ថិ ពហិទ្ធារម្មណោ អត្ថិ អជ្ឈត្តពហិទ្ធារម្មណោ ។ បេ ។ ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។

ទុកមូលកំ ។

( ៧៨ ) ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ សហេតុកោ អត្ថិ អហេតុកោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ កុសលោ អត្ថិ អកុសលោ អត្ថិ អព្យាកតោ ។ បេ ។ ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។ ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ សរណោ អត្ថិ អរណោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ កុសលោ អត្ថិ អកុសលោ អត្ថិ អព្យាកតោ ។ បេ ។ ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។





( ៧៧ ) វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណក្ខន្ធដ៏សម្បយុត្តដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រ ២ គឺ វិញ្ញាណក្ខន្ធប្រកបដោយរណៈក៏មាន ជាអរណៈក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធ ប្រកបដោយសុខវេទនាក៏មាន ប្រកបដោយទុក្ខវេទនាក៏មាន ប្រកបដោយអទុក្ខមសុខវេទនាក៏មាន ។ បេ ។ មានអារម្មណ៍ខាងក្នុងក៏មាន មានអារម្មណ៍ខាងក្រៅក៏មាន មានអារម្មណ៍ទាំងខាងក្នុងទាំងខាងក្រៅក៏មាន ។ បេ ។ វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។

ចប់ ទុកមូលកៈ ។

( ៧៨ ) វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណក្ខន្ធដ៏សម្បយុត្តដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ វិញ្ញាណក្ខន្ធ មានហេតុក៏មាន មិនមានហេតុក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធ ជាកុសលក៏មាន ជាអកុសលក៏មាន ជាអព្យាក្រឹតក៏មាន ។ បេ ។ វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណក្ខន្ធដ៏សម្បយុត្តដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ វិញ្ញាណក្ខន្ធ ប្រកបដោយរណៈក៏មាន ជាអរណៈក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធ ជាកុសលក៏មាន ជាអកុសលក៏មាន ជាអព្យាក្រឹតក៏មាន ។ បេ ។ វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។

ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ សហេតុកោ អត្ថិ អហេតុកោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ សុខាយ វេទនាយ សម្បយុត្តោ អត្ថិ ទុក្ខាយ វេទនាយ សម្បយុត្តោ អត្ថិ អទុក្ខមសុខាយ វេទនាយ សម្បយុត្តោ ។ បេ ។ អត្ថិ អជ្ឈត្តារម្មណោ អត្ថិ ពហិទ្ធារម្មណោ អត្ថិ អជ្ឈត្តពហិទ្ធារម្មណោ ។ បេ ។ ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។ ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ សរណោ អត្ថិ អរណោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ សុខាយ វេទនាយ សម្បយុត្តោ អត្ថិ ទុក្ខាយ វេទនាយ សម្បយុត្តោ អត្ថិ អទុក្ខមសុខាយ វេទនាយ សម្បយុត្តោ ។ បេ ។ អត្ថិ អជ្ឈត្តារម្មណោ អត្ថិ ពហិទ្ធារម្មណោ អត្ថិ អជ្ឈត្តពហិទ្ធារម្មណោ ។ បេ ។ ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។

តិកមូលកំ ។



វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណក្ខន្ធដ៏សម្បយុត្តដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ វិញ្ញាណក្ខន្ធ មានហេតុក៏មាន មិនមានហេតុក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធ ប្រកបដោយសុខវេទនាក៏មាន ប្រកបដោយទុក្ខវេទនាក៏មាន ប្រកបដោយអទុក្ខមសុខវេទនាក៏មាន ។ បេ ។ មានអារម្មណ៍ខាងក្នុងក៏មាន មានអារម្មណ៍ខាងក្រៅក៏មាន មានអារម្មណ៍ទាំងខាងក្នុងទាំងខាងក្រៅក៏មាន ។ បេ ។ វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណក្ខន្ធដ៏សម្បយុត្តដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ វិញ្ញាណក្ខន្ធប្រកបដោយរណៈក៏មាន ជាអរណៈក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធប្រកបដោយសុខវេទនាក៏មាន ប្រកបដោយទុក្ខវេទនាក៏មាន ប្រកបដោយអទុក្ខមសុខវេទនាក៏មាន ។ បេ ។ មានអារម្មណ៍ខាងក្នុង ក៏មាន មានអារម្មណ៍ខាងក្រៅក៏មាន មានអារម្មណ៍ទាំងខាងក្នុងទាំងខាងក្រៅក៏មាន ។ បេ ។ វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។

ចប់ តិកមូលកៈ ។

( ៧៤ ) ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ សហេតុកោ អត្ថិ អហេតុកោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ កុសលោ អត្ថិ អកុសលោ អត្ថិ អព្យាកតោ ។បេ។ ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។ ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ ហេតុសម្បយុត្តោ អត្ថិ ហេតុវិប្បយុត្តោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ សុខាយ វេទនាយ សម្បយុត្តោ អត្ថិ ទុក្ខាយ វេទនាយ សម្បយុត្តោ អត្ថិ អទុក្ខមសុខាយ វេទនាយ សម្បយុត្តោ ។បេ។ ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។ ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ ន ហេតុ សហេតុកោ អត្ថិ ន ហេតុ អហេតុកោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ វិបាកោ អត្ថិ វិបាកធម្មធម្មោ អត្ថិ នេវវិបាកនវិបាកធម្មធម្មោ ។បេ។ ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។ ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ



( ៧៤ ) វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណក្ខន្ធ ប្រកបដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ វិញ្ញាណក្ខន្ធ ប្រព្រឹត្តទៅជាមួយនឹងហេតុក៏មាន មិនមានហេតុក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធ ជាកុសលក៏មាន ជាអកុសលក៏មាន ជាអព្យាក្រឹតក៏មាន ។បេ។ វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណក្ខន្ធ ប្រកបដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ វិញ្ញាណក្ខន្ធ ប្រកបដោយហេតុក៏មាន ប្រាសចាកហេតុក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធ ប្រកបដោយសុខវេទនាក៏មាន ប្រកបដោយទុក្ខវេទនាក៏មាន ប្រកបដោយអទុក្ខមសុខវេទនាក៏មាន ។បេ។ វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណក្ខន្ធ ប្រកបដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ វិញ្ញាណក្ខន្ធ មិនមានហេតុ តែប្រព្រឹត្តទៅជាមួយនឹងហេតុក៏មាន មិនមែនជាហេតុ ទាំងមិនប្រកបដោយហេតុក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធជាវិបាកក៏មាន ជាធម៌មានវិបាកជាប្រក្រតីក៏មាន មិនមែនជាវិបាកទាំងមិនមែនជាធម៌មានវិបាកជាប្រក្រតីក៏មាន ។បេ។ វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណក្ខន្ធ ប្រកបដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ

អត្ថិ លោកិយោ អត្ថិ លោកុត្តរោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ ឧបាទិន្នុបាទានិយោ អត្ថិ អនុបាទិន្នុបាទានិយោ អត្ថិ អនុបាទិន្នានុបាទានិយោ ។ បេ ។ ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។ ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ កោចិ វិញ្ញេយ្យោ អត្ថិ កោចិ ន វិញ្ញេយ្យោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ សង្កិលិដ្ឋសង្កិលេសិកោ អត្ថិ អសង្កិលិដ្ឋសង្កិលេសិកោ អត្ថិ អសង្កិលិដ្ឋាសង្កិលេសិកោ ។ បេ ។ ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។ ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ សាសវោ អត្ថិ អនាសវោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ សវិតក្កសវិចារោ



វិញ្ញាណក្ខន្ធ ជាលោកិយក៏មាន ជាលោកុត្តរក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធដែលប្រកបដោយកិលេស មានតណ្ហាជាដើមកាន់យកហើយ តាំងជាប្រយោជន៍ដល់ឧបាទានក៏មាន ដែលមិនមានកម្មប្រកបដោយកិលេស មានតណ្ហាជាដើមកាន់យកហើយ តែជាប្រយោជន៍ដល់ឧបាទានក៏មាន ដែលមិនមានកម្មប្រកបដោយកិលេស មានតណ្ហាជាដើមកាន់យកហើយ តាំងមិនជាប្រយោជន៍ដល់ឧបាទានក៏មាន ។ បេ ។ វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណក្ខន្ធ ដែលប្រកបដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ វិញ្ញាណក្ខន្ធដែលគប្បីដឹងដោយវិញ្ញាណណាមួយក៏មាន មិនគប្បីដឹងដោយវិញ្ញាណណាមួយក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធដែលសៅហ្មងហើយ តាំងគួរដល់សេចក្តីសៅហ្មងក៏មាន សៅហ្មងហើយ តែគួរដល់សេចក្តីសៅហ្មងក៏មាន មិនសៅហ្មងហើយ តាំងមិនគួរដល់សេចក្តីសៅហ្មងក៏មាន ។ បេ ។ វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណក្ខន្ធ ប្រកបដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ វិញ្ញាណក្ខន្ធ ប្រព្រឹត្តទៅជាមួយនឹងអាសវៈក៏មាន មិនមានអាសវៈក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធ ប្រព្រឹត្តទៅជាមួយនឹងវិតក្កៈ តាំងប្រព្រឹត្តទៅជាមួយនឹងវិចារៈក៏មាន

អត្ថិ អវិតក្កវិចារមត្តោ អត្ថិ អវិតក្កាវិចារោ ។ បេ ។ ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។ ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ សាសវសម្បយុត្តោ អត្ថិ អាសវវិប្បយុត្តោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ បីតិសហគតោ អត្ថិ សុខសហគតោ អត្ថិ ឧបេក្ខាសហគតោ ។ បេ ។ ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។ ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ អាសវវិប្បយុត្តសាសវោ អត្ថិ អាសវវិប្បយុត្តអនាសវោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ ទស្សនេន បហាតព្វោ អត្ថិ ភាវនាយ បហាតព្វោ អត្ថិ នេវ ទស្សនេន ន ភាវនាយ បហាតព្វោ ។ បេ ។ ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។ ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ សញ្ញោជនិយោ អត្ថិ អសញ្ញោជនិយោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ ទស្សនេន បហាតព្វហេតុកោ



មិនមានវិតក្កៈមានត្រឹមតែវិចារៈក៏មាន មិនមានវិតក្កៈ ទាំងមិនមានវិចារៈក៏មាន ។ បេ ។ វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណក្ខន្ធ ប្រកបដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ វិញ្ញាណក្ខន្ធ ប្រកបដោយអាសវៈក៏មាន ប្រាសចាកអាសវៈក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធ កើតព្រមដោយបីតិក៏មាន កើតព្រមដោយសុខៈក៏មាន កើតព្រមដោយឧបេក្ខាក៏មាន ។ បេ ។ វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណក្ខន្ធ ប្រកបដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ វិញ្ញាណក្ខន្ធ ប្រាសចាកអាសវៈ តែប្រព្រឹត្តទៅជាមួយនឹងអាសវៈក៏មាន ប្រាសចាកអាសវៈ ទាំងមិនមានអាសវៈក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធ ដែលគួរលះដោយទស្សនៈក៏មាន គួរលះដោយភាវនាក៏មាន គួរលះដោយទស្សនៈ ទាំងមិនគួរលះដោយភាវនាក៏មាន ។ បេ ។ វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណក្ខន្ធ ប្រកបដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ វិញ្ញាណក្ខន្ធ ជាប្រយោជន៍ដល់សញ្ញោជនៈក៏មាន មិនជាប្រយោជន៍ដល់សញ្ញោជនៈក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធ មានហេតុគួរលះដោយទស្សនៈក៏មាន

អត្ថិ ភាវនាយ បហាតព្វហេតុកោ អត្ថិ នេវ ទស្ស-
នេន ន ភាវនាយ បហាតព្វហេតុកោ ។ បេ ។ ឯវំ
ទសវិធេន វិញ្ញាណក្ខន្ធោ ។ ឯកវិធេន វិញ្ញា-
ណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណ-
ក្ខន្ធោ អត្ថិ សញ្ញោជនសម្បយុត្តោ អត្ថិ សញ្ញោ-
ជនវិប្បយុត្តោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ អា-
ចយគាមិ អត្ថិ អបចយគាមិ អត្ថិ នេវាចយគាមិ
នាបចយគាមិ ។ បេ ។ ឯវំ ទសវិធេន វិញ្ញាណក្ខ-
ន្ធោ ។ ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុ-
ត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ សញ្ញោជនវិប្ប-
យុត្តសញ្ញោជនិយោ អត្ថិ សញ្ញោជនវិប្បយុត្តអស-
ញ្ញោជនិយោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ សេ-
ក្ខោ អត្ថិ អសេក្ខោ អត្ថិ នេវ សេក្ខោ នាសេក្ខោ
។ បេ ។ ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។ ឯកវិ-
ធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន
វិញ្ញាណក្ខន្ធោ អត្ថិ គន្ថនិយោ អត្ថិ អគន្ថនិយោ ។



មានហេតុគួរលះដោយភាវនាក៏មាន មានហេតុមិនគួរលះដោយទស្សនៈ
តាំងមិនគួរលះដោយភាវនាក៏មាន ។ បេ ។ វិញ្ញាណក្ខន្ធ មានប្រការ
១០ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណ-
ក្ខន្ធ ប្រកបដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ វិញ្ញាណ-
ក្ខន្ធ ប្រកបដោយសញ្ញោជនៈក៏មាន ប្រាសចាកសញ្ញោជនៈក៏មាន ។
វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធ ដល់នូវការសន្សំកក្ដូន
ឡើងក៏មាន ដល់នូវការមិនសន្សំកក្ដូនឡើងក៏មាន ដល់នូវការសន្សំកក្ដូន
ឡើង តាំងមិនដល់នូវការមិនសន្សំកក្ដូនឡើងក៏មាន ។ បេ ។ វិញ្ញាណ-
ក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការមួយ
បានដល់វិញ្ញាណក្ខន្ធ ប្រកបដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២
គឺ វិញ្ញាណក្ខន្ធ ប្រាសចាកសញ្ញោជនៈ តែជាប្រយោជន៍ដល់សញ្ញោជនៈ
ក៏មាន ប្រាសចាកសញ្ញោជនៈ តាំងមិនជាប្រយោជន៍ដល់សញ្ញោជនៈក៏
មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធ ជារបស់សេក្ខ-
បុគ្គលក៏មាន ជារបស់អសេក្ខបុគ្គលក៏មាន មិនមែនជារបស់សេក្ខបុគ្គល
តាំងមិនមែនជារបស់អសេក្ខបុគ្គលក៏មាន ។ បេ ។ វិញ្ញាណក្ខន្ធ មានប្រ-
ការ ១០ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណ-
ក្ខន្ធប្រកបដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ វិញ្ញាណក្ខន្ធ
ដែលគន្ថៈគប្បីដោតក្រងក៏មាន ដែលគន្ថៈមិនគប្បីដោតក្រងក៏មាន ។

តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ បរិត្តោ អត្ថិ មហគ្គតោ អត្ថិ អប្បមាណោ ។ បេ ។ ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។ ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ គន្ថសម្បយុត្តោ អត្ថិ គន្ថវិប្បយុត្តោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ បរិត្តារម្មណោ អត្ថិ មហគ្គតារម្មណោ អត្ថិ អប្បមាណារម្មណោ ។ បេ ។ ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។ ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ គន្ថវិប្បយុត្តគន្ថនិយោ អត្ថិ គន្ថវិប្បយុត្តអគន្ថនិយោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ ហីនោ អត្ថិ មជ្ឈិមោ អត្ថិ បណីតោ ។ បេ ។ ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។ ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ និយ្យានិយោ អត្ថិ អនិយ្យានិយោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ មិច្ឆត្តនិយតោ អត្ថិ សម្មត្តនិយតោ អត្ថិ អនិយតោ ។ បេ ។



វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធ មានសភាពតូចឆ្មារក៏មាន ដល់នូវសភាពធំក៏មាន ប្រមាណមិនបានក៏មាន ។ បេ ។ វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណក្ខន្ធ ប្រកបដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ វិញ្ញាណក្ខន្ធ ប្រកបដោយគន្ថៈក៏មាន ប្រាសចាកគន្ថៈក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធ មានអារម្មណ៍តូចឆ្មារក៏មាន មានអារម្មណ៍ដល់នូវសភាពធំក៏មាន មានអារម្មណ៍ប្រមាណមិនបានក៏មាន ។ បេ ។ វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធមានប្រការមួយ បានដល់វិញ្ញាណក្ខន្ធ ប្រកបដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ វិញ្ញាណក្ខន្ធ ដែលប្រាសចាកគន្ថៈ តែគន្ថៈគប្បីដោតក្រងក៏មាន ប្រាសចាកគន្ថៈ ទាំងគន្ថៈមិនគប្បីដោតក្រងក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធ ថោកទាបក៏មាន កណ្ដាលក៏មាន ឧត្តមក៏មាន ។ បេ ។ វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណក្ខន្ធ ប្រកបដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ វិញ្ញាណក្ខន្ធ ដែលនិយ្យានៈគប្បីប្រព្រឹត្តទៅក៏មាន និយ្យានៈមិនគប្បីប្រព្រឹត្តទៅក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធ មានសភាពខុសដ៏ទៀងក៏មាន មានសភាពត្រូវដ៏ទៀងក៏មាន មិនទៀងក៏មាន ។ បេ ។

ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។ ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ ឱឃសម្បយុត្តោ អត្ថិ ឱឃវិប្បយុត្តោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ មគ្គារម្មណោ អត្ថិ មគ្គហេតុកោ អត្ថិ មគ្គាធិបតិ ។ បេ ។ ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។ ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ ឱឃវិប្បយុត្តឱឃនិយោ អត្ថិ ឱឃវិប្បយុត្តអនោឃនិយោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ ឧប្បន្នោ អត្ថិ អនុប្បន្នោ អត្ថិ ឧប្បាទី ។ បេ ។ ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។ ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ យោគនិយោ អត្ថិ អយោគនិយោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ អតីតោ អត្ថិ អនាគតោ អត្ថិ បច្ចុប្បន្នោ ។ បេ ។ ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។ ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ យោគសម្បយុត្តោ



វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណក្ខន្ធ ប្រកបដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ វិញ្ញាណក្ខន្ធ ប្រកបដោយឱឃៈក៏មាន ប្រាសចាកឱឃៈក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធ មានមគ្គជាអារម្មណ៍ក៏មាន មានមគ្គជាហេតុក៏មាន មានមគ្គជាអធិបតីក៏មាន ។ បេ ។ វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណក្ខន្ធ ប្រកបដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ វិញ្ញាណក្ខន្ធ ប្រាសចាកឱឃៈ តែឱឃៈគប្បីប្រព្រឹត្តកន្លងក៏មាន ប្រាសចាកឱឃៈ ទាំងឱឃៈមិនគប្បីប្រព្រឹត្តកន្លងក៏មាន ។ វិញ្ញាណក្ខន្ធមានប្រការ ៣ គឺ វិញ្ញាណក្ខន្ធកើតឡើងហើយក៏មាន មិនទាន់កើតឡើងហើយក៏មាន ប្រុងនឹងកើតឡើងក៏មាន ។ បេ ។ វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណក្ខន្ធប្រកបដោយផស្សៈ ។ វិញ្ញាណក្ខន្ធមានប្រការ ២ គឺ វិញ្ញាណក្ខន្ធដែលយោគៈគប្បីប្រព្រឹត្តកន្លងក៏មាន យោគៈមិនគប្បីប្រព្រឹត្តកន្លងក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធជាអតីតក៏មាន ជាអនាគតក៏មាន ជាបច្ចុប្បន្នក៏មាន ។ បេ ។ វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណក្ខន្ធប្រកបដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ វិញ្ញាណក្ខន្ធ ប្រកបដោយយោគៈក៏មាន

អត្ថិ លោកុត្តរោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ អតីតារម្មណោ អត្ថិ អនាគតារម្មណោ អត្ថិ បច្ចុប្បន្នារម្មណោ ។ បេ ។ ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។ ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ ហេតុវិប្បយុត្តសហេតុកោ អត្ថិ ហេតុវិប្បយុត្តអហេតុកោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ អជ្ឈត្តោ អត្ថិ ពហិទ្ធោ អត្ថិ អជ្ឈត្តពហិទ្ធោ ។ បេ ។ ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។ ឯកវិធេន វិញ្ញាណក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វិញ្ញាណក្ខន្ធោ អត្ថិ នីវរណិយោ អត្ថិ អនីវរណិយោ ។ តិវិធេន វិញ្ញាណក្ខន្ធោ អត្ថិ អជ្ឈត្តារម្មណោ អត្ថិ ពហិទ្ធារម្មណោ អត្ថិ អជ្ឈត្តពហិទ្ធារម្មណោ ។ បេ ។ ឯវំ ទសវិធេន វិញ្ញាណក្ខន្ធោ ។

ឧភតោវឌ្ឍកំ ។

( ៨០ ) សត្តវិធេន វិញ្ញាណក្ខន្ធោ អត្ថិ កុសលោ អត្ថិ អកុសលោ អត្ថិ អព្យាកតោ អត្ថិ កាមាវចរោ



ប្រាសចាកលោកៈក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធ មានអារម្មណ៍ជាអតីតក៏មាន មានអារម្មណ៍ជាអនាគតក៏មាន មានអារម្មណ៍ជាបច្ចុប្បន្នក៏មាន ។ បេ ។ វិញ្ញាណក្ខន្ធមានប្រការ ១០ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការមួយ បានដល់វិញ្ញាណក្ខន្ធប្រកបដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ វិញ្ញាណក្ខន្ធប្រាសចាកហេតុៈតែហេតុៈគប្បីប្រព្រឹត្តកន្លងក៏មាន ប្រាសចាកហេតុៈ ទាំងហេតុៈមិនគប្បីប្រព្រឹត្តកន្លងក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធខាងក្នុងក៏មាន ខាងក្រៅក៏មាន ខាងក្នុងនិងខាងក្រៅក៏មាន ។ បេ ។ វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធមានប្រការមួយ បានដល់វិញ្ញាណក្ខន្ធប្រកបដោយផស្សៈ ។ វិញ្ញាណក្ខន្ធ មានប្រការ ២ គឺ វិញ្ញាណក្ខន្ធជាប្រយោជន៍ដល់នីវរណៈក៏មាន មិនជាប្រយោជន៍ដល់នីវរណៈក៏មាន ។ វិញ្ញាណក្ខន្ធ មានប្រការ ៣ គឺ វិញ្ញាណក្ខន្ធមានអារម្មណ៍ខាងក្នុងក៏មាន មានអារម្មណ៍ខាងក្រៅក៏មាន មានអារម្មណ៍ទាំងខាងក្នុងទាំងខាងក្រៅក៏មាន ។ បេ ។ វិញ្ញាណក្ខន្ធ មានប្រការ ១០ យ៉ាងនេះឯង ។

ចប់ ឧភតោវឌ្ឍកៈ ។

( ៨០ ) វិញ្ញាណក្ខន្ធ មានប្រការ ៧ គឺ វិញ្ញាណក្ខន្ធ ជាកុសលក៏មាន ជាអកុសលក៏មាន ជាអព្យាក្រឹតក៏មាន ជាកាមាវចរក៏មាន

អត្ថិ រូបាវចរោ អត្ថិ អរូបាវចរោ អត្ថិ អបរិយាបន្នោ ឯវំ សត្តវិធេន វិញ្ញាណក្ខន្ធោ ។ អបរោបិ សត្តវិធេន វិញ្ញាណក្ខន្ធោ អត្ថិ សុខាយ វេទនាយ សម្បយុត្តោ អត្ថិ ទុក្ខាយ វេទនាយ សម្បយុត្តោ អត្ថិ អទុក្ខមសុខាយ វេទនាយ សម្បយុត្តោ ។បេ។ អត្ថិ អជ្ឈត្តារម្មណោ អត្ថិ ពហិទ្ធារម្មណោ អត្ថិ អជ្ឈត្តពហិទ្ធារម្មណោ អត្ថិ កាមាវចរោ អត្ថិ រូបាវចរោ អត្ថិ អរូបាវចរោ អត្ថិ អបរិយាបន្នោ ឯវំ សត្តវិធេន វិញ្ញាណក្ខន្ធោ ។

(៨១) ចតុវីសតិវិធេន វិញ្ញាណក្ខន្ធោ ចក្ខុសម្ផស្សប្បច្ចយា វិញ្ញាណក្ខន្ធោ អត្ថិ កុសលោ អត្ថិ អកុសលោ អត្ថិ អព្យាកតោ សោតសម្ផស្សប្បច្ចយា ។បេ។ ឃានសម្ផស្សប្បច្ចយា ។បេ។ ជិវ្ហាសម្ផស្សប្បច្ចយា ។បេ។ កាយសម្ផស្សប្បច្ចយា ។បេ។ មនោសម្ផស្សប្បច្ចយា វិញ្ញាណក្ខន្ធោ អត្ថិ កុសលោ អត្ថិ អកុសលោ អត្ថិ អព្យាកតោ ចក្ខុវិញ្ញាណំ ។បេ។ មនោវិញ្ញាណំ ឯវំ ចតុវីសតិវិធេន វិញ្ញាណក្ខន្ធោ ។ អបរោបិ ចតុវីសតិវិធេន វិញ្ញាណក្ខន្ធោ ចក្ខុសម្ផស្សប្បច្ចយា វិញ្ញាណក្ខន្ធោ



ជារូបាវចរក៏មាន ជាអរូបាវចរក៏មាន ជាអបរិយាបន្នៈក៏មាន វិញ្ញាណក្ខន្ធ មានប្រការ ៧ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធមានប្រការ ៧ ដទៃទៀត គឺ វិញ្ញាណក្ខន្ធប្រកបដោយសុខវេទនាក៏មាន ប្រកបដោយទុក្ខវេទនាក៏មាន ប្រកបដោយអទុក្ខមសុខវេទនាក៏មាន ។បេ។ មានអារម្មណ៍ខាងក្នុងក៏មាន មានអារម្មណ៍ខាងក្រៅក៏មាន មានអារម្មណ៍ទាំងខាងក្នុងទាំងខាងក្រៅក៏មាន ជាកាមាវចរក៏មាន ជារូបាវចរក៏មាន ជាអរូបាវចរក៏មាន ជាអបរិយាបន្នៈក៏មាន វិញ្ញាណក្ខន្ធ មានប្រការ ៧ យ៉ាងនេះឯង ។

(៨១) វិញ្ញាណក្ខន្ធ មានប្រការ ២៤ គឺ វិញ្ញាណក្ខន្ធ ព្រោះចក្ខុសម្ផស្សជាបច្ច័យ ជាកុសលក៏មាន ជាអកុសលក៏មាន ជាអព្យាក្រឹតក៏មាន វិញ្ញាណក្ខន្ធ ព្រោះសោតសម្ផស្សជាបច្ច័យ ។បេ។ ព្រោះឃានសម្ផស្សជាបច្ច័យ ។បេ។ ព្រោះជិវ្ហាសម្ផស្សជាបច្ច័យ ។បេ។ ព្រោះកាយសម្ផស្សជាបច្ច័យ ។បេ។ ព្រោះមនោសម្ផស្សជាបច្ច័យ ជាកុសលក៏មាន ជាអកុសលក៏មាន ជាអព្យាក្រឹតក៏មាន ចក្ខុវិញ្ញាណ ។បេ។ មនោវិញ្ញាណ វិញ្ញាណក្ខន្ធមានប្រការ ២៤ យ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានប្រការ ២៤ ដទៃទៀត គឺ វិញ្ញាណក្ខន្ធ ព្រោះចក្ខុសម្ផស្សជាបច្ច័យ

អត្ថិ សុខាយ វេទនាយ សម្បយុត្តោ អត្ថិ ទុក្ខាយ វេទនាយ សម្បយុត្តោ អត្ថិ អទុក្ខមសុខាយ វេទនាយ សម្បយុត្តោ ។បេ។ អត្ថិ អជ្ឈត្តារម្មណោ អត្ថិ ពហិទ្ធារម្មណោ អត្ថិ អជ្ឈត្តពហិទ្ធារម្មណោ សោតសម្ផស្សប្បច្ចយា ។បេ។ ឃានសម្ផស្សប្បច្ចយា ។បេ។ ជិវ្ហាសម្ផស្សប្បច្ចយា ។បេ។ កាយសម្ផស្សប្បច្ចយា ។បេ។ មនោសម្ផស្សប្បច្ចយា វិញ្ញាណក្ខន្ធោ អត្ថិ អជ្ឈត្តារម្មណោ អត្ថិ ពហិទ្ធារម្មណោ អត្ថិ អជ្ឈត្តពហិទ្ធារម្មណោ ចក្ខុវិញ្ញាណំ ។បេ។ មនោវិញ្ញាណំ ឯវំ ចតុវីសតិវិធេន វិញ្ញាណក្ខន្ធោ ។

(៨២) តិំសវិធេន វិញ្ញាណក្ខន្ធោ ចក្ខុសម្ផស្សប្បច្ចយា វិញ្ញាណក្ខន្ធោ អត្ថិ កាមាវចរោ អត្ថិ រូបាវចរោ អត្ថិ អរូបាវចរោ អត្ថិ អបរិយាបន្នោ សោតសម្ផស្សប្បច្ចយា ។បេ។ ឃានសម្ផស្សប្បច្ចយា ។បេ។ ជិវ្ហាសម្ផស្សប្បច្ចយា ។បេ។ កាយសម្ផស្សប្បច្ចយា ។បេ។ មនោសម្ផស្សប្បច្ចយា វិញ្ញាណក្ខន្ធោ អត្ថិ កាមាវចរោ អត្ថិ រូបាវចរោ អត្ថិ អរូបាវចរោ



ប្រកបដោយសុខវេទនាក៏មាន ប្រកបដោយទុក្ខវេទនាក៏មាន ប្រកបដោយអទុក្ខមសុខវេទនាក៏មាន ។បេ។ មានអារម្មណ៍ខាងក្នុងក៏មាន មានអារម្មណ៍ខាងក្រៅក៏មាន មានអារម្មណ៍ទាំងក្នុងទាំងខាងក្រៅក៏មាន វិញ្ញាណក្ខន្ធ ព្រោះសោតសម្ផស្សជាបច្ច័យ ។បេ។ ព្រោះឃានសម្ផស្សជាបច្ច័យ ។បេ។ ព្រោះជិវ្ហាសម្ផស្សជាបច្ច័យ ។បេ។ ព្រោះកាយសម្ផស្សជាបច្ច័យ ។បេ។ ព្រោះមនោសម្ផស្សជាបច្ច័យ មានអារម្មណ៍ខាងក្នុងក៏មាន មានអារម្មណ៍ខាងក្រៅក៏មាន មានអារម្មណ៍ទាំងខាងក្នុងទាំងខាងក្រៅក៏មាន ចក្ខុវិញ្ញាណ ។បេ។ មនោវិញ្ញាណ វិញ្ញាណក្ខន្ធ មានប្រការ ២៤ យ៉ាងនេះឯង ។

(៨២) វិញ្ញាណក្ខន្ធ មានប្រការ ៣០ គឺ វិញ្ញាណក្ខន្ធ ព្រោះចក្ខុសម្ផស្សជាបច្ច័យ ជាកាមាវចរក៏មាន ជារូបាវចរក៏មាន ជាអរូបាវចរក៏មាន ជាអបរិយាបន្នៈក៏មាន វិញ្ញាណក្ខន្ធ ព្រោះសោតសម្ផស្សជាបច្ច័យ ។បេ។ ព្រោះឃានសម្ផស្សជាបច្ច័យ ។បេ។ ព្រោះជិវ្ហាសម្ផស្សជាបច្ច័យ ។បេ។ ព្រោះកាយសម្ផស្សជាបច្ច័យ ។បេ។ ព្រោះមនោសម្ផស្សជាបច្ច័យ ជាកាមាវចរក៏មាន ជារូបាវចរក៏មាន ជាអរូបាវចរក៏មាន

អត្ថិ អបរិយាបន្នា ចក្ខុវិញ្ញាណំ ។បេ។ មនោវិញ្ញាណំ ឯវំ តិំសវិធេន វិញ្ញាណក្ខន្ធោ ។

(៨៣) ពហុវិធេន វិញ្ញាណក្ខន្ធោ ចក្ខុសម្ផស្សប្បច្ចយា វិញ្ញាណក្ខន្ធោ អត្ថិ កុសលោ អត្ថិ អកុសលោ អត្ថិ អព្យាកតោ អត្ថិ កាមាវចរោ អត្ថិ រូបាវចរោ អត្ថិ អរូបាវចរោ អត្ថិ អបរិយាបន្នោ សោតសម្ផស្សប្បច្ចយា ។បេ។ ឃានសម្ផស្សប្បច្ចយា ។បេ។ ជិវ្ហាសម្ផស្សប្បច្ចយា ។បេ។ កាយសម្ផស្សប្បច្ចយា ។បេ។ មនោសម្ផស្សប្បច្ចយា វិញ្ញាណក្ខន្ធោ អត្ថិ កុសលោ អត្ថិ អកុសលោ អត្ថិ អព្យាកតោ អត្ថិ កាមាវចរោ អត្ថិ រូបាវចរោ អត្ថិ អរូបាវចរោ អត្ថិ អបរិយាបន្នោ ចក្ខុវិញ្ញាណំ ។បេ។ មនោវិញ្ញាណំ ឯវំ ពហុវិធេន វិញ្ញាណក្ខន្ធោ ។ អបរោបិ ពហុវិធេន វិញ្ញាណក្ខន្ធោ ចក្ខុសម្ផស្សប្បច្ចយា វិញ្ញាណក្ខន្ធោ អត្ថិ សុខាយ វេទនាយ សម្បយុត្តោ អត្ថិ ទុក្ខាយ វេទនាយ សម្បយុត្តោ អត្ថិ អទុក្ខមសុខាយ វេទនាយ សម្បយុត្តោ ។បេ។ អត្ថិ អជ្ឈត្តារម្មណោ អត្ថិ ពហិទ្ធារម្មណោ អត្ថិ អជ្ឈត្តពហិទ្ធារម្មណោ អត្ថិ កាមាវចរោ អត្ថិ រូបាវចរោ



ជាអបរិយាបន្នៈក៏មាន ចក្ខុវិញ្ញាណ ។បេ។ មនោវិញ្ញាណ វិញ្ញាណក្ខន្ធ មានប្រការ ៣០ យ៉ាងនេះឯង ។

(៨៣) វិញ្ញាណក្ខន្ធ មានច្រើនប្រការ គឺ វិញ្ញាណក្ខន្ធ ព្រោះចក្ខុសម្ផស្សជាបច្ច័យ ជាកុសលក៏មាន ជាអកុសលក៏មាន ជាអព្យាក្រឹតក៏មាន ជាកាមាវចរក៏មាន ជារូបាវចរក៏មាន ជាអរូបាវចរក៏មាន ជាអបរិយាបន្នៈក៏មាន វិញ្ញាណក្ខន្ធ ព្រោះសោតសម្ផស្សជាបច្ច័យ ។បេ។ ព្រោះឃានសម្ផស្សជាបច្ច័យ ។បេ។ ព្រោះជិវ្ហាសម្ផស្សជាបច្ច័យ ។បេ។ ព្រោះកាយសម្ផស្ស ជាបច្ច័យ ។បេ។ ព្រោះមនោសម្ផស្ស ជាបច្ច័យ ជាកុសលក៏មាន ជាអកុសលក៏មាន ជាអព្យាក្រឹតក៏មាន ជាកាមាវចរក៏មាន ជារូបាវចរក៏មាន ជាអរូបាវចរក៏មាន ជាអបរិយាបន្នៈក៏មាន ចក្ខុវិញ្ញាណ ។បេ។ មនោវិញ្ញាណ វិញ្ញាណក្ខន្ធ មានច្រើនប្រការយ៉ាងនេះឯង ។ វិញ្ញាណក្ខន្ធ មានច្រើនប្រការដទៃទៀត គឺ វិញ្ញាណក្ខន្ធ ព្រោះចក្ខុសម្ផស្សជាបច្ច័យ ប្រកបដោយសុខវេទនាក៏មាន ប្រកបដោយទុក្ខវេទនាក៏មាន ប្រកបដោយអទុក្ខមសុខវេទនាក៏មាន ។បេ។ មានអារម្មណ៍ខាងក្នុងក៏មាន មានអារម្មណ៍ខាងក្រៅក៏មាន មានអារម្មណ៍ទាំងខាងក្នុងទាំងខាងក្រៅក៏មាន ជាកាមាវចរក៏មាន ជារូបាវចរក៏មាន

អត្ថិ អរូបាវចរោ អត្ថិ អបរិយាបន្នោ សោតសម្ផស្សប្បច្ចយោ ។ បេ ។ ឃានសម្ផស្សប្បច្ចយោ ។ បេ ។ ជិវ្ហាសម្ផស្សប្បច្ចយា ។ បេ ។ កាយសម្ផស្សប្បច្ចយា ។ បេ ។ មនោសម្ផស្សប្បច្ចយា វិញ្ញាណក្ខន្ធោ អត្ថិ អជ្ឈត្តារម្មណោ អត្ថិ ពហិទ្ធារម្មណោ អត្ថិ អជ្ឈត្តពហិទ្ធារម្មណោ អត្ថិ កាមាវចរោ អត្ថិ រូបាវចរោ អត្ថិ អរូបាវចរោ អត្ថិ អបរិយាបន្នោ ចក្ខុវិញ្ញាណំ ។ បេ ។ មនោវិញ្ញាណំ ឯវំ ពហុវិធេន វិញ្ញាណក្ខន្ធោ ។

អយំ វុច្ចតិ វិញ្ញាណក្ខន្ធោ ។

អភិធម្មភាជនីយំ ។

(៨៦) បញ្ចក្ខន្ធា រូបក្ខន្ធោ វេទនាក្ខន្ធោ សញ្ញាក្ខន្ធោ សង្ខារក្ខន្ធោ វិញ្ញាណក្ខន្ធោ ។ បញ្ចន្នំ ខន្ធានំ កតិ កុសលា កតិ អកុសលា កតិ អព្យាកតា ។ បេ ។ កតិ សរណា កតិ អរណា ។

(៨៧) រូបក្ខន្ធោ អព្យាកតោ ចត្តារោ ខន្ធា សិយា កុសលា សិយា អកុសលា សិយា អព្យាកតា ។ ទ្វេ ខន្ធា ន វត្តព្វា សុខាយ វេទនាយ សម្បយុត្តាតិបិ ទុក្ខាយ វេទនាយ សម្បយុត្តាតិបិ



ជាអរូបាវចរក៏មាន ជាអបរិយាបន្នៈក៏មាន វិញ្ញាណក្ខន្ធ ព្រោះសោតសម្ផស្សជាបច្ច័យ ។ បេ ។ ព្រោះឃានសម្ផស្សជាបច្ច័យ ។ បេ ។ ព្រោះជិវ្ហាសម្ផស្សជាបច្ច័យ ។ បេ ។ ព្រោះកាយសម្ផស្សជាបច្ច័យ ។ បេ ។ ព្រោះមនោសម្ផស្សជាបច្ច័យ មានអារម្មណ៍ខាងក្នុងក៏មាន មានអារម្មណ៍ខាងក្រៅក៏មាន មានអារម្មណ៍ទាំងខាងក្នុងទាំងខាងក្រៅក៏មាន ជាកាមាវចរក៏មាន ជារូបាវចរក៏មាន ជាអរូបាវចរក៏មាន ជាអបរិយាបន្នៈក៏មាន ចក្ខុវិញ្ញាណ ។ បេ ។ មនោវិញ្ញាណ វិញ្ញាណក្ខន្ធ មានច្រើនប្រការ យ៉ាងនេះឯង ។

នេះហៅថា វិញ្ញាណក្ខន្ធ ។

ចប់ អភិធម្មភាជនីយ ។

(៨៦) ខន្ធ ៥ គឺរូបក្ខន្ធ វេទនាខន្ធ សញ្ញាខន្ធ សង្ខារក្ខន្ធ វិញ្ញាណក្ខន្ធ ។ បណ្តាខន្ធ ៥ ខន្ធជាកុសលប៉ុន្មាន ជាអកុសលប៉ុន្មាន ជាអព្យាក្រឹតប៉ុន្មាន ។ បេ ។ ប្រកបដោយសត្រូវប៉ុន្មាន មិនមានសត្រូវប៉ុន្មាន ។

(៨៧) រូបក្ខន្ធ ជាអព្យាក្រឹត ឯខន្ធ ៤ ជាកុសលក៏មាន ជាអកុសលក៏មាន ជាអព្យាក្រឹតក៏មាន ។ ខន្ធ ២ មិនគប្បីពោល ថា ប្រកបដោយសុខវេទនាផង ថា ប្រកបដោយទុក្ខវេទនាផង ថា

អទុក្ខមសុខាយ វេទនាយ សម្បយុត្តាតិបិ តយោ ខន្ធា សិយា សុខាយ វេទនាយ សម្បយុត្តា សិយា ទុក្ខាយ វេទនាយ សម្បយុត្តា សិយា អទុក្ខមសុខាយ វេទនាយ សម្បយុត្តា ។ រូបក្ខន្ធោ នេវ វិបាកនវិបាកធម្មធម្មោ ចត្តារោ ខន្ធា សិយា វិបាកា សិយា វិបាកធម្មធម្មា សិយា នេវ វិបាកនវិបាកធម្មធម្មា ។ រូបក្ខន្ធោ សិយា ឧបាទិន្នុបាទានិយោ សិយា អនុបាទិន្នុបាទានិយោ ចត្តារោ ខន្ធា សិយា ឧបាទិន្នុបាទានិយា សិយា អនុបាទិន្នុបាទានិយា សិយា អនុបាទិន្នានុបាទានិយា ។ រូបក្ខន្ធោ អសង្កិលិដ្ឋសង្កិលេសិកោ ចត្តារោ ខន្ធា សិយា សង្កិលិដ្ឋសង្កិលេសិកា សិយា អសង្កិលិដ្ឋសង្កិលេសិកា សិយា អសង្កិលិដ្ឋាសង្កិលេសិកា ។ រូបក្ខន្ធោ អវិតក្កាវិចារោ តយោ ខន្ធា សិយា សវិតក្កសវិចារា សិយា អវិតក្កវិចារមត្តា សិយា អវិតក្កាវិចារា សង្ខារក្ខន្ធោ



ប្រកបដោយអទុក្ខមសុខវេទនាផងឡើយ ខន្ធ ៣ ប្រកបដោយសុខវេទនាក៏មាន ប្រកបដោយទុក្ខវេទនាក៏មាន ប្រកបដោយអទុក្ខមសុខវេទនាក៏មាន ។ រូបក្ខន្ធ មិនមែនជាវិបាក មិនមែនជាធម៌មានវិបាកជាប្រក្រតី ខន្ធ ៤ ជាវិបាកក៏មាន ជាធម៌មានវិបាកជាប្រក្រតីក៏មាន មិនមែនជាវិបាកផង មិនមែនជាធម៌មានវិបាកជាប្រក្រតីក៏មាន ។ រូបក្ខន្ធ មានកម្មប្រកបដោយកិលេស មានតណ្ហាជាដើមកាន់យកហើយ ផងជាប្រយោជន៍ដល់ឧបាទានក៏មាន មិនមានកម្មប្រកបដោយកិលេស មានតណ្ហាជាដើមកាន់យកហើយ តែជាប្រយោជន៍ដល់ឧបាទានក៏មាន ខន្ធ ៤ មានកម្មប្រកបដោយកិលេស មានតណ្ហាជាដើមកាន់យកហើយ ផងជាប្រយោជន៍ដល់ឧបាទានក៏មាន មិនមានកម្មប្រកបដោយកិលេស មានតណ្ហាជាដើមកាន់យកហើយ តែជាប្រយោជន៍ដល់ឧបាទានក៏មាន មិនមានកម្មប្រកបដោយកិលេស មានតណ្ហាជាដើមកាន់យកហើយ ផងមិនជាប្រយោជន៍ដល់ឧបាទានក៏មាន ។ រូបក្ខន្ធមិនសៅហ្មងហើយ តែគួរដល់សេចក្ដីសៅហ្មង ខន្ធ ៤ សៅហ្មងហើយ ផងគួរដល់សេចក្ដីសៅហ្មងក៏មាន មិនសៅហ្មងហើយ តែគួរដល់សេចក្ដីសៅហ្មងក៏មាន មិនសៅហ្មងហើយ ផងមិនគួរដល់សេចក្ដីសៅហ្មងក៏មាន ។ រូបក្ខន្ធ មិនមានវិតក្កៈមិនមានវិចារៈ ខន្ធ ៣ មានវិតក្កៈតែប្រព្រឹត្តទៅជាមួយនឹងវិចារៈក៏មាន មិនមានវិតក្កៈមានត្រឹមតែវិចារៈក៏មាន មិនមានវិតក្កៈផងមិនមានវិចារៈក៏មាន សង្ខារក្ខន្ធ

សិយា សវិតក្កសវិចារា សិយា អវិតក្កវិចារមត្តា សិយា អវិតក្កាវិចារា សិយា ន វត្តព្វា សវិតក្កសវិចារាតិបិ អវិតក្កវិចារមត្តាតិបិ អវិតក្កាវិចារាតិបិ ។ រូបក្ខន្ធោ ន វត្តព្វោ បីតិសហគតោតិបិ សុខសហគតោតិបិ ឧបេក្ខាសហគតោតិបិ វេទនាក្ខន្ធោ សិយា បីតិសហគតោ ន សុខសហគតោ ន ឧបេក្ខាសហគតោ សិយា ន វត្តព្វោ បីតិសហគតោតិ តយោ ខន្ធា សិយា បីតិសហគតា សិយា សុខសហគតា សិយា ឧបេក្ខាសហគតា សិយា ន វត្តព្វា បីតិសហគតាតិបិ សុខសហគតាតិបិ ឧបេក្ខាសហគតាតិបិ ។ រូបក្ខន្ធោ នេវ ទស្សនេន ន ភាវនាយ បហាតព្វោ ចត្តារោ ខន្ធា សិយា ទស្សនេន បហាតព្វា សិយា ភាវនាយ បហាតព្វា សិយា នេវ ទស្សនេន ន ភាវនាយ បហាតព្វា ។ រូបក្ខន្ធោ នេវ ទស្សនេន ន ភាវនាយ បហាតព្វហេតុកោ ចត្តារោ ខន្ធា សិយា ទស្សនេន បហាតព្វហេតុកា សិយា ភាវនាយ បហាតព្វហេតុកា សិយា នេវ ទស្សនេន ន ភាវនាយ បហាតព្វហេតុកា ។ រូបក្ខន្ធោ នេវាចយគាមី នាបចយគាមី





ប្រព្រឹត្តទៅជាមួយនឹងវិតក្កៈជាមួយនឹងវិចារៈក៏មាន មិនមានវិតក្កៈមានត្រឹមតែវិចារៈក៏មាន មិនមានវិតក្កៈទាំងមិនមានវិចារៈក៏មាន មិនគប្បីពោលថាប្រព្រឹត្តទៅជាមួយនឹងវិតក្កៈជាមួយនឹងវិចារៈផង ថាមិនមានវិតក្កៈមានត្រឹមតែវិចារៈផង ថាមិនមានវិតក្កៈទាំងមិនមានវិចារៈផងក៏មាន ។ រូបក្ខន្ធ មិនគប្បីពោលថាកើតព្រមដោយបីតិផង ថាកើតព្រមដោយសុខផង ថាកើតព្រមដោយឧបេក្ខាផងឡើយ វេទនាខន្ធ កើតព្រមដោយបីតិ មិនកើតព្រមដោយសុខ មិនកើតព្រមដោយឧបេក្ខាក៏មាន មិនគប្បីពោលថាកើតព្រមដោយបីតិក៏មាន ខន្ធ ៣ កើតព្រមដោយបីតិក៏មាន កើតព្រមដោយសុខៈក៏មាន កើតព្រមដោយឧបេក្ខាក៏មាន មិនគប្បីពោលថា កើតព្រមដោយបីតិផង ថាកើតព្រមដោយសុខៈផង ថាកើតព្រមដោយឧបេក្ខាផងក៏មាន ។ រូបក្ខន្ធ មិនគួរលះដោយទស្សនៈ មិនគួរលះដោយភាវនាទេ ខន្ធ ៤ គួរលះដោយទស្សនៈក៏មាន គួរលះដោយភាវនាក៏មាន មិនគួរលះដោយទស្សនៈទាំងមិនគួរលះដោយភាវនាក៏មាន ។ រូបក្ខន្ធ មានហេតុមិនគួរលះដោយទស្សនៈ ទាំងមិនគួរលះដោយភាវនា ខន្ធ ៤ មានហេតុគួរលះដោយទស្សនៈក៏មាន មានហេតុគួរលះដោយភាវនាក៏មាន មានហេតុមិនគួរលះដោយទស្សនៈទាំងមិនគួរលះដោយភាវនាក៏មាន ។ រូបក្ខន្ធ មិនដល់នូវការសន្សំកព្ចូនឡើង ទាំងមិនដល់នូវការមិនសន្សំកព្ចូនឡើង

សាសវញ្ចេវ នោ ច អាសវោតិ ។ ទសាយតនា ន វត្តព្វា អាសវា ចេវ អាសវសម្បយុត្តា ចាតិបិ អាសវសម្បយុត្តា ចេវ នោ ច អាសវាតិបិ ។ មនាយតនំ ន វត្តព្វំ អាសវោ ចេវ អាសវសម្បយុត្តញ្ចាតិ សិយា អាសវសម្បយុត្តញ្ចេវ នោ ច អាសវោ សិយា ន វត្តព្វំ អាសវសម្បយុត្តញ្ចេវ នោ ច អាសវោតិ ។ ធម្មាយតនំ សិយា អាសវោ ចេវ អាសវសម្បយុត្តញ្ច សិយា អាសវសម្បយុត្តញ្ចេវ នោ ច អាសវោ សិយា ន វត្តព្វំ អាសវោ ចេវ អាសវសម្បយុត្តញ្ចាតិបិ អាសវសម្បយុត្តញ្ចេវ នោ ច អាសវោតិបិ ។ ទសាយតនា អាសវវិប្បយុត្តសាសវា ទ្វាយតនា សិយា អាសវវិប្បយុត្តសាសវា សិយា អាសវវិប្បយុត្តអនាសវា សិយា ន វត្តព្វា អាសវវិប្បយុត្តសាសវាតិបិ អាសវវិប្បយុត្តអនាសវាតិបិ ។

(១០៦) ឯកាទសាយតនា នោ សញ្ញោជនា ធម្មាយតនំ សិយា សញ្ញោជនំ សិយា នោ សញ្ញោជនំ ។ ទសាយតនា សញ្ញោជនិយា ទ្វាយតនា សិយា សញ្ញោជនិយា សិយា អសញ្ញោជនិយា ។ ទសាយតនា



ជា ប្រព្រឹត្តទៅជាមួយនឹងអាសវៈតែមិនមែនអាសវៈផងក៏មាន ។ អាយតនៈ ១០ មិនគប្បីពោលថា ជាអាសវៈព្រមទាំងប្រកបដោយអាសវៈផង ជា ប្រកបដោយអាសវៈ តែមិនមែនអាសវៈផងឡើយ មនាយតនៈ មិនគប្បីពោលថា ជាអាសវៈ ព្រមទាំងប្រកបដោយអាសវៈទេ ប្រកបដោយអាសវៈ តែមិនមែនអាសវៈក៏មាន មិនគប្បីពោលថា ប្រកបដោយអាសវៈ តែមិនមែនអាសវៈក៏មាន ធម្មាយតនៈ ជាអាសវៈព្រមទាំងប្រកបដោយអាសវៈ ក៏មាន ប្រកបដោយអាសវៈ តែមិនមែនអាសវៈក៏មាន មិនគប្បីពោលថា ជាអាសវៈ ព្រមទាំងប្រកបដោយអាសវៈផង ជា ប្រកបដោយអាសវៈ តែមិនមែនអាសវៈផងក៏មាន ។ អាយតនៈ ១០ ប្រាសចាកអាសវៈ តែប្រព្រឹត្តទៅជាមួយនឹងអាសវៈ អាយតនៈ ២ ប្រាសចាកអាសវៈ តែប្រព្រឹត្តទៅជាមួយនឹងអាសវៈក៏មាន ប្រាសចាកអាសវៈ ព្រមទាំងមិនមានអាសវៈក៏មាន មិនគប្បីពោលថា ប្រាសចាកអាសវៈ តែប្រព្រឹត្តទៅជាមួយនឹងអាសវៈផង ជា ប្រាសចាកអាសវៈ ព្រមទាំងមិនមានអាសវៈផងឡើយ ។

(១០៦) អាយតនៈ ១១ មិនមែនសញ្ញោជនៈ ធម្មាយតនៈ ជាសញ្ញោជនៈក៏មាន មិនមែនសញ្ញោជនៈក៏មាន ។ អាយតនៈ ១០ ជាប្រយោជន៍ដល់សញ្ញោជនៈ អាយតនៈ ២ ជាប្រយោជន៍ដល់សញ្ញោជនៈក៏មាន មិនមែនជាប្រយោជន៍ដល់សញ្ញោជនៈក៏មាន ។ អាយតនៈ ១០

សញ្ញោជនវិប្បយុត្តា ទ្វាយតនា សិយា សញ្ញោជនសម្បយុត្តា សិយា សញ្ញោជនវិប្បយុត្តា ។ ទសាយតនា ន វត្តព្វា សញ្ញោជនា ចេវ សញ្ញោជនិយា ចាតិ សញ្ញោជនិយា ចេវ នោ ច សញ្ញោជនា មនាយតនំ ន វត្តព្វំ សញ្ញោជនញ្ចេវ សញ្ញោជនិយញ្ចាតិ សិយា សញ្ញោជនិយញ្ចេវ នោ ច សញ្ញោជនន្តិ ធម្មាយតនំ សិយា សញ្ញោជនញ្ចេវ សញ្ញោជនិយញ្ច សិយា សញ្ញោជនិយញ្ចេវ នោ ច សញ្ញោជនំ សិយា ន វត្តព្វំ សញ្ញោជនញ្ចេវ សញ្ញោជនិយញ្ចាតិបិ សញ្ញោជនិយញ្ចេវ នោ ច សញ្ញោជនន្តិបិ ។ ទសាយតនា ន វត្តព្វា សញ្ញោជនា ចេវ សញ្ញោជនសម្បយុត្តា ចាតិបិ សញ្ញោជនសម្បយុត្តា ចេវ នោ ច សញ្ញោជនាតិបិ មនាយតនំ ន វត្តព្វំ សញ្ញោជនញ្ចេវ សញ្ញោជនសម្បយុត្តញ្ចាតិ សិយា សញ្ញោជនសម្បយុត្តញ្ចេវ នោ ច សញ្ញោជនំ សិយា ន វត្តព្វំ សញ្ញោជនសម្បយុត្តញ្ចេវ នោ ច សញ្ញោជនន្តិ ធម្មាយតនំ សិយា សញ្ញោជនញ្ចេវ សញ្ញោជនសម្បយុត្តញ្ច សិយា សញ្ញោជនសម្បយុត្តញ្ចេវ នោ ច សញ្ញោជនំ សិយា



ប្រាសចាកសញ្ញោជនៈ អាយតនៈ ២ ប្រកបដោយសញ្ញោជនៈក៏មាន ប្រាសចាកសញ្ញោជនៈក៏មាន ។ អាយតនៈ ១០ មិនគប្បីពោលថា ជាសញ្ញោជនៈ តាំងជាប្រយោជន៍ដល់សញ្ញោជនៈឡើយ ជាប្រយោជន៍ដល់សញ្ញោជនៈ តែមិនមែនសញ្ញោជនៈ មនាយតនៈ មិនគប្បីពោលថា ជាសញ្ញោជនៈ តាំងជាប្រយោជន៍ដល់សញ្ញោជនៈទេ ជាប្រយោជន៍ដល់សញ្ញោជនៈ តែមិនមែនសញ្ញោជនៈ ក៏មាន ធម្មាយតនៈ ជាសញ្ញោជនៈ តាំងជាប្រយោជន៍ដល់សញ្ញោជនៈក៏មាន ជាប្រយោជន៍ដល់សញ្ញោជនៈ តែមិនមែនសញ្ញោជនៈក៏មាន មិនគប្បីពោលថា ជាសញ្ញោជនៈ តាំងជាប្រយោជន៍ដល់សញ្ញោជនៈផង ថា ជាប្រយោជន៍ដល់សញ្ញោជនៈ តែមិនមែនសញ្ញោជនៈផងក៏មាន ។ អាយតនៈ ១០ មិនគប្បីពោលថា ជាសញ្ញោជនៈ តាំងប្រកបដោយសញ្ញោជនៈផង ថា ប្រកបដោយសញ្ញោជនៈ តែមិនមែនសញ្ញោជនៈផងឡើយ មនាយតនៈ មិនគប្បីពោលថា ជាសញ្ញោជនៈ តាំងប្រកបដោយសញ្ញោជនៈទេ ប្រកបដោយសញ្ញោជនៈ តែមិនមែនសញ្ញោជនៈ ក៏មាន មិនគប្បីពោលថា ប្រកបដោយសញ្ញោជនៈ តែមិនមែនសញ្ញោជនៈ ក៏មាន ធម្មាយតនៈ ជាសញ្ញោជនៈ តាំងប្រកបដោយសញ្ញោជនៈ ក៏មាន ប្រកបដោយសញ្ញោជនៈ តែមិនមែនសញ្ញោជនៈ ក៏មាន

ន វត្តព្វំ សញ្ញោជនញ្ចេវ សញ្ញោជនសម្បយុត្តញ្ចាតិបិ សញ្ញោជនសម្បយុត្តញ្ចេវ នោ ច សញ្ញោជនន្តិបិ ។ ទសាយតនា សញ្ញោជនវិប្បយុត្តសញ្ញោជនិយា ទ្វាយតនា សិយា សញ្ញោជនវិប្បយុត្តសញ្ញោជនិយា សិយា សញ្ញោជនវិប្បយុត្តអសញ្ញោជនិយា សិយា ន វត្តព្វា សញ្ញោជនវិប្បយុត្តសញ្ញោជនិយាតិបិ សញ្ញោជនវិប្បយុត្តអសញ្ញោជនិយាតិបិ ។

(១០៧) ឯកាទសាយតនា នោ គន្ថា ធម្មាយតនំ សិយា គន្ថោ សិយា នោ គន្ថោ ។ ទសាយតនា គន្ថនិយា ទ្វាយតនា សិយា គន្ថនិយា សិយា អគន្ថនិយា ។ ទសាយតនា គន្ថវិប្បយុត្តា ទ្វាយតនា សិយា គន្ថសម្បយុត្តា សិយា គន្ថវិប្បយុត្តា ។ ទសាយតនា ន វត្តព្វា គន្ថា ចេវ គន្ថនិយា ចាតិ គន្ថនិយា ចេវ នោ ច គន្ថា មនាយតនំ ន វត្តព្វំ គន្ថោ ចេវ គន្ថនិយញ្ចាតិ សិយា គន្ថនិយញ្ចេវ នោ ច គន្ថោ សិយា ន វត្តព្វំ គន្ថនិយញ្ចេវ នោ ច គន្ថោតិ ធម្មាយតនំ សិយា គន្ថោ ចេវ គន្ថនិយញ្ច សិយា គន្ថនិយញ្ចេវ នោ ច គន្ថោ សិយា ន វត្តព្វំ



មិនគប្បីពោលថា ជាសញ្ញោជនៈ ទាំងប្រកបដោយសញ្ញោជនៈផង ថាប្រកបដោយសញ្ញោជនៈ តែមិនមែនជាសញ្ញោជនៈផងក៏មាន ។ អាយតនៈ ១០ ប្រាសចាកសញ្ញោជនៈ តែជាប្រយោជន៍ដល់សញ្ញោជនៈ អាយតនៈ ២ ប្រាសចាកសញ្ញោជនៈ តែជាប្រយោជន៍ដល់សញ្ញោជនៈក៏មាន ប្រាសចាកសញ្ញោជនៈ ទាំងមិនជាប្រយោជន៍ដល់សញ្ញោជនៈក៏មាន មិនគប្បីពោលថា ប្រាសចាកសញ្ញោជនៈ តែជាប្រយោជន៍ដល់សញ្ញោជនៈផង ថា ប្រាសចាកសញ្ញោជនៈ តែមិនមែនជាប្រយោជន៍ដល់សញ្ញោជនៈផងក៏មាន ។

(១០៧) អាយតនៈ ១១ មិនមែនគន្ថៈ ធម្មាយតនៈ ជាគន្ថៈក៏មាន មិនមែនគន្ថៈក៏មាន ។ អាយតនៈ ១០ គន្ថៈគប្បីដោតក្រង អាយតនៈ ២ គន្ថៈគប្បីដោតក្រងក៏មាន មិនគប្បីដោតក្រងក៏មាន ។ អាយតនៈ ១០ ប្រាសចាកគន្ថៈ អាយតនៈ ២ ប្រកបដោយគន្ថៈក៏មាន ប្រាសចាកគន្ថៈក៏មាន ។ អាយតនៈ ១០ មិនគប្បីពោលថា ជាគន្ថៈទាំងគន្ថៈគប្បីដោតក្រងឡើយ គន្ថៈគប្បីដោតក្រង តែមិនមែនគន្ថៈ មនាយតនៈ មិនគប្បីពោលថា ជាគន្ថៈ ទាំងគន្ថៈគប្បីដោតក្រងទេ គន្ថៈគប្បីដោតក្រង តែមិនមែនគន្ថៈក៏មាន មិនគប្បីពោលថា គន្ថៈគប្បីដោតក្រង តែមិនមែនគន្ថៈក៏មាន ធម្មាយតនៈ ជាគន្ថៈ ទាំងគន្ថៈគប្បីដោតក្រងក៏មាន គន្ថៈគប្បីដោតក្រង តែមិនមែនគន្ថៈក៏មាន មិនគប្បីពោលថា

គន្ថោ ចេវ គន្ថនិយញ្ចាតិបិ គន្ថនិយញ្ចេវ នោ ច គ-ន្ថោតិបិ ។ ទសាយតនា ន វត្តព្វា គន្ថា ចេវ គន្ថស-ម្បយុត្តា ចាតិបិ គន្ថសម្បយុត្តា ចេវ នោ ច គន្ថាតិបិ មនាយតនំ ន វត្តព្វំ គន្ថោ ចេវ គន្ថសម្បយុត្តញ្ចាតិ សិយា គន្ថសម្បយុត្តញ្ចេវ នោ ច គន្ថោ សិយា ន វត្តព្វំ គន្ថសម្បយុត្តញ្ចេវ នោ ច គន្ថោតិ ធម្មាយតនំ សិយា គន្ថោ ចេវ គន្ថសម្បយុត្តញ្ច សិយា គន្ថស-ម្បយុត្តញ្ចេវ នោ ច គន្ថោ សិយា ន វត្តព្វំ គន្ថោ ចេវ គន្ថសម្បយុត្តញ្ចាតិបិ គន្ថសម្បយុត្តញ្ចេវ នោ ច គន្ថោតិបិ ។ ទសាយតនា គន្ថវិប្បយុត្តគន្ថនិយា ទ្វាយតនា សិយា គន្ថវិប្បយុត្តគន្ថនិយា សិយា គន្ថ-វិប្បយុត្តអគន្ថនិយា សិយា ន វត្តព្វា គន្ថវិប្បយុត្តគ-ន្ថនិយាតិបិ គន្ថវិប្បយុត្តអគន្ថនិយាតិបិ ។

[១០៨] ឯកាទសាយតនា នោ ឱឃា ។បេ។ នោ យោគា ។បេ។ នោ នីវរណា ធម្មាយតនំ សិយា នីវរណំ សិយា នោ នីវរណំ ។ ទសាយតនា នីវ-រណិយា ទ្វាយតនា សិយា នីវរណិយា សិយា អនីវ-រណិយា ។ ទសាយតនា នីវរណវិប្បយុត្តា ទ្វាយតនា



ជាគន្ថៈ ទាំងគន្ថៈគប្បីដោយគ្រន្ថផង ថា គន្ថៈគប្បីដោយគ្រន្ថ តែមិនមែនគន្ថៈផងក៏មាន ។ អាយតនៈ ១០ មិនគប្បីពោលថា ជាគន្ថៈ ទាំងប្រកបដោយគន្ថៈផង ថា ប្រកបដោយគន្ថៈ តែមិនមែនគន្ថៈផងឡើយ មនា-យតនៈ មិនគប្បីពោលថា ជាគន្ថៈ ទាំងប្រកបដោយគន្ថៈទេ ។ ប្រកបដោយគន្ថៈ តែមិនមែនគន្ថៈក៏មាន មិនគប្បីពោលថា ប្រកបដោយគន្ថៈ តែមិនមែនគន្ថៈក៏មាន ធម្មាយតនៈ ជាគន្ថៈ ទាំងប្រកបដោយគន្ថៈក៏មាន ប្រកបដោយគន្ថៈ តែមិនមែនគន្ថៈក៏មាន មិនគប្បីពោលថា ជាគន្ថៈ ទាំងប្រកបដោយគន្ថៈផង ថា ប្រកបដោយគន្ថៈ តែមិនមែនគន្ថៈផង ក៏មាន ។ អាយតនៈ ១០ ប្រាសចាកគន្ថៈ តែគន្ថៈគប្បីដោយគ្រន្ថ អាយតនៈ ២ ប្រាសចាកគន្ថៈ តែគន្ថៈគប្បីដោយគ្រន្ថក៏មាន ប្រាសចាកគន្ថៈ ទាំងគន្ថៈមិនគប្បីដោយគ្រន្ថក៏មាន មិនគប្បីពោលថា ប្រាសចាកគន្ថៈ តែគន្ថៈគប្បីដោយគ្រន្ថផង ថា ប្រាសចាកគន្ថៈ ទាំងគន្ថៈមិនគប្បីដោយគ្រន្ថផងឡើយ ។

[១០៨] អាយតនៈ ១១ មិនមែនឱឃៈ ។បេ។ មិនមែនយោគៈ ។បេ។ មិនមែននីវរណៈ ធម្មាយតនៈ ជានីវរណៈក៏មាន មិនមែននីវរណៈក៏មាន ។ អាយតនៈ ១០ ជាប្រយោជន៍ដល់នីវរណៈ អាយតនៈ ២ ជាប្រយោជន៍ដល់នីវរណៈក៏មាន មិនជាប្រយោជន៍ដល់នីវរណៈក៏មាន ។ អាយតនៈ ១០ ប្រាសចាកនីវរណៈ អាយតនៈ ២

សិយា នីវរណសម្បយុត្តា សិយា នីវរណវិប្បយុត្តា ។ ឆសាយតនា ន វត្តព្វា នីវរណា ចេវ នីវរណិយា ចាតិ នីវរណិយា ចេវ នោ ច នីវរណា មនាយតនំ ន វត្តព្វំ នីវរណញ្ចេវ នីវរណិយញ្ចាតិ សិយា នីវរណិយញ្ចេវ នោ ច នីវរណំ សិយា ន វត្តព្វំ នីវរណិយញ្ចេវ នោ ច នីវរណន្តិ ធម្មាយតនំ សិយា នីវរណញ្ចេវ នីវរណិយញ្ច សិយា នីវរណិយញ្ចេវ នោ ច នីវរណំ សិយា ន វត្តព្វំ នីវរណញ្ចេវ នីវរណិយញ្ចាតិបិ នីវរណិយញ្ចេវ នោ ច នីវរណន្តិបិ ។ ឆសាយតនា ន វត្តព្វា នីវរណា ចេវ នីវរណសម្បយុត្តា ចាតិបិ នីវរណសម្បយុត្តា ចេវ នោ ច នីវរណាតិបិ មនាយតនំ ន វត្តព្វំ នីវរណញ្ចេវ នីវរណសម្បយុត្តញ្ចាតិ សិយា នីវរណសម្បយុត្តញ្ចេវ នោ ច នីវរណំ សិយា ន វត្តព្វំ នីវរណសម្បយុត្តញ្ចេវ នោ ច នីវរណន្តិ ធម្មាយតនំ សិយា នីវរណញ្ចេវ នីវរណសម្បយុត្តញ្ច សិយា នីវរណសម្បយុត្តញ្ចេវ នោ ច នីវរណំ សិយា ន វត្តព្វំ



ប្រកបដោយនីវរណៈក៏មាន ប្រាសចាកនីវរណៈក៏មាន ។ អាយតនៈ ១០ មិនគប្បីពោលថា ជានីវរណៈ ផងជាប្រយោជន៍ដល់នីវរណៈទេ ជាប្រយោជន៍ដល់នីវរណៈ តែមិនមែននីវរណៈ មនាយតនៈ មិនគប្បីពោលថា ជានីវរណៈ ផងជាប្រយោជន៍ដល់នីវរណៈឡើយ ជាប្រយោជន៍ដល់នីវរណៈ តែមិនមែននីវរណៈក៏មាន មិនគប្បីពោលថា ជាប្រយោជន៍ដល់នីវរណៈ តែមិនមែននីវរណៈក៏មាន ធម្មាយតនៈ ជានីវរណៈ ផងជាប្រយោជន៍ដល់នីវរណៈក៏មាន ជាប្រយោជន៍ដល់នីវរណៈ តែមិនមែននីវរណៈក៏មាន មិនគប្បីពោលថា ជានីវរណៈ ផងជាប្រយោជន៍ដល់នីវរណៈផង ថា ជាប្រយោជន៍ដល់នីវរណៈ តែមិនមែនជានីវរណៈផងក៏មាន ។ អាយតនៈ ១០ មិនគប្បីពោលថា ជានីវរណៈ ផងប្រកបដោយនីវរណៈផង ថា ប្រកបដោយនីវរណៈ តែមិនមែននីវរណៈផងឡើយ មនាយតនៈ មិនគប្បីពោលថា ជានីវរណៈ ផងប្រកបដោយនីវរណៈទេ ប្រកបដោយនីវរណៈ តែមិនមែននីវរណៈក៏មាន មិនគប្បីពោលថា ប្រកបដោយនីវរណៈ តែមិនមែននីវរណៈក៏មាន ធម្មាយតនៈ ជានីវរណៈ ផងប្រកបដោយនីវរណៈក៏មាន ប្រកបដោយនីវរណៈ តែមិនមែននីវរណៈក៏មាន មិនគប្បីពោលថា

នីវរណញ្ចេវ នីវរណសម្បយុត្តញ្ចាតិបិ នីវរណសម្បយុត្តញ្ចេវ នោ ច នីវរណន្តិបិ ។ ទសាយតនា នីវរណវិប្បយុត្តនីវរណិយា ទ្វាយតនា សិយា នីវរណវិប្បយុត្តនីវរណិយា សិយា នីវរណវិប្បយុត្តអនីវរណិយា សិយា ន វត្តព្វា នីវរណវិប្បយុត្តនីវរណិយាតិបិ នីវរណវិប្បយុត្តអនីវរណិយាតិបិ ។

(១០៩) ឯកាទសាយតនា នោ បរាមាសា ធម្មាយតនំ សិយា បរាមាសោ សិយា នោ បរាមាសោ ។ ទសាយតនា បរាមដ្ឋា ទ្វាយតនា សិយា បរាមដ្ឋា សិយា អបរាមដ្ឋា ។ ទសាយតនា បរាមាសវិប្បយុត្តា មនាយតនំ សិយា បរាមាសសម្បយុត្តំ សិយា បរាមាសវិប្បយុត្តំ ធម្មាយតនំ សិយា បរាមាសសម្បយុត្តំ សិយា បរាមាសវិប្បយុត្តំ សិយា ន វត្តព្វំ បរាមាសសម្បយុត្តន្តិបិ បរាមាសវិប្បយុត្តន្តិបិ ។ ទសាយតនា ន វត្តព្វា បរាមាសា ចេវ បរាមដ្ឋា ចាតិ បរាមដ្ឋា ចេវ នោ ច បរាមាសា មនាយតនំ ន វត្តព្វំ បរាមាសោ ចេវ បរាមដ្ឋញ្ចាតិ សិយា បរាមដ្ឋញ្ចេវ នោ ច បរាមាសោ សិយា ន វត្តព្វំ



ជានីវរណៈ ទាំងប្រកបដោយនីវរណៈផង ថា ប្រកបដោយនីវរណៈ តែមិនមែនជានីវរណៈផងក៏មាន ។ អាយតនៈ ១០ ប្រាសចាកនីវរណៈ តែជាប្រយោជន៍ដល់នីវរណៈ អាយតនៈ ២ ប្រាសចាកនីវរណៈ តែជាប្រយោជន៍ដល់នីវរណៈក៏មាន ប្រាសចាកនីវរណៈ ទាំងមិនជាប្រយោជន៍ដល់នីវរណៈក៏មាន មិនគប្បីពោលថា ប្រាសចាកនីវរណៈ តែជាប្រយោជន៍ដល់នីវរណៈផង ថា ប្រាសចាកនីវរណៈ ទាំងមិនជាប្រយោជន៍ដល់នីវរណៈផងក៏មាន ។

(១០៩) អាយតនៈ ១១ មិនមែនបរាមាសៈទេ ធម្មាយតនៈ ជាបរាមាសៈក៏មាន មិនមែនបរាមាសៈក៏មាន ។ អាយតនៈ ១០ បរាមាសៈស្ទាបអង្អែល អាយតនៈ ២ បរាមាសៈស្ទាបអង្អែលក៏មាន បរាមាសៈមិនស្ទាបអង្អែលក៏មាន ។ អាយតនៈ ១០ ប្រាសចាកបរាមាសៈ មនាយតនៈ ប្រកបដោយបរាមាសៈក៏មាន ប្រាសចាកបរាមាសៈក៏មាន ធម្មាយតនៈ ប្រកបដោយបរាមាសៈក៏មាន ប្រាសចាកបរាមាសៈក៏មាន មិនគប្បីពោលថា ប្រកបដោយបរាមាសៈផង ថា ប្រាសចាកបរាមាសៈផងក៏មាន ។ អាយតនៈ ១០ មិនគប្បីពោលថា ជាបរាមាសៈ ទាំងបរាមាសៈស្ទាបអង្អែលឡើយ បរាមាសៈស្ទាបអង្អែល តែមិនមែនបរាមាសៈ មនាយតនៈ មិនគប្បីពោលថា ជាបរាមាសៈ ទាំងបរាមាសៈស្ទាបអង្អែលទេ បរាមាសៈស្ទាបអង្អែល តែមិនមែនបរាមាសៈក៏មាន មិនគប្បីពោលថា

បរាមដ្ឋញ្ចេវ នោ ច បរាមាសោតិ ធម្មាយតនំ សិយា បរាមាសោ ចេវ បរាមដ្ឋញ្ច សិយា បរាមដ្ឋញ្ចេវ នោ ច បរាមាសោ សិយា ន វត្តព្វំ បរាមាសោ ចេវ បរាមដ្ឋញ្ចាតិបិ បរាមដ្ឋញ្ចេវ នោ ច បរាមាសោតិបិ ។ ទសាយតនា បរាមាសវិប្បយុត្តបរាមដ្ឋា ធម្មាយតនា សិយា បរាមាសវិប្បយុត្តបរាមដ្ឋា សិយា បរាមាសវិប្បយុត្តអបរាមដ្ឋា សិយា ន វត្តព្វា បរាមាសវិប្បយុត្តបរាមដ្ឋាតិបិ បរាមាសវិប្បយុត្តអបរាមដ្ឋាតិបិ ។

(១១០) ទសាយតនា អនារម្មណា មនាយតនំ សារម្មណំ ធម្មាយតនំ សិយា សារម្មណំ សិយា អនារម្មណំ ។ មនាយតនំ ចិត្តំ ឯកាទសាយតនា នោ ចិត្តា ។ ឯកាទសាយតនា អចេតសិកា ធម្មាយតនំ សិយា ចេតសិកំ សិយា អចេតសិកំ ។ ទសាយតនា ចិត្តវិប្បយុត្តា ធម្មាយតនំ សិយា ចិត្តសម្បយុត្តំ សិយា ចិត្តវិប្បយុត្តំ មនាយតនំ ន វត្តព្វំ ចិត្តេន សម្បយុត្តន្តិបិ ចិត្តេន វិប្បយុត្តន្តិបិ ។ ទសាយតនា ចិត្តវិសំសដ្ឋា ធម្មាយតនំ សិយា ចិត្តសំសដ្ឋំ សិយា ចិត្តវិសំសដ្ឋំ មនាយតនំ ន វត្តព្វំ ចិត្តេន សំសដ្ឋន្តិបិ



*បរាមាសៈស្ទាបអង្អែល តែមិនមែនបរាមាសៈក៏មាន ធម្មាយតនៈ ជាបរាមាសៈ ទាំងបរាមាសៈស្ទាបអង្អែលក៏មាន បរាមាសៈស្ទាបអង្អែល តែមិនមែនបរាមាសៈក៏មាន មិនគប្បីពោលថា ជាបរាមាសៈ ទាំងបរាមាសៈស្ទាបអង្អែលផង ថា បរាមាសៈស្ទាបអង្អែល តែមិនមែនបរាមាសៈផងក៏មាន ។ អាយតនៈ ១០ ប្រាសចាកបរាមាសៈ តែបរាមាសៈស្ទាបអង្អែល អាយតនៈ ២ ប្រាសចាកបរាមាសៈ តែបរាមាសៈស្ទាបអង្អែលក៏មាន ប្រាសចាកបរាមាសៈ ទាំងបរាមាសៈមិនស្ទាបអង្អែលក៏មាន មិនគប្បីពោលថា ប្រាសចាកបរាមាសៈ តែបរាមាសៈស្ទាបអង្អែលផង ថា ប្រាសចាកបរាមាសៈ ទាំងបរាមាសៈមិនស្ទាបអង្អែលផងក៏មាន ។*

*(១១០) អាយតនៈ ១០ មិនមានអារម្មណ៍ មនាយតនៈ ប្រព្រឹត្តទៅជាមួយនឹងអារម្មណ៍ ធម្មាយតនៈ ប្រព្រឹត្តទៅជាមួយនឹងអារម្មណ៍ក៏មាន មិនមានអារម្មណ៍ក៏មាន ។ មនាយតនៈ ជាចិត្ត អាយតនៈ ១១ មិនមែនចិត្ត ។ អាយតនៈ ១១ មិនមែនចេតសិក ធម្មាយតនៈ ជាចេតសិកក៏មាន មិនមែនចេតសិកក៏មាន ។ អាយតនៈ ១០ ប្រាសចាកចិត្ត ធម្មាយតនៈ ប្រកបដោយចិត្តក៏មាន ប្រាសចាកចិត្តក៏មាន មនាយតនៈ មិនគប្បីពោលថា ប្រកបដោយចិត្តផង ថា ប្រាសចាកចិត្តផងឡើយ ។ អាយតនៈ ១០ មិនច្រឡំដោយចិត្ត ធម្មាយតនៈ ច្រឡំដោយចិត្តក៏មាន មិនច្រឡំដោយចិត្តក៏មាន មនាយតនៈ មិនគប្បីពោលថា ច្រឡំដោយចិត្តផង*

ចិត្តេន វិសំសដ្ឋន្តិបិ ។ ឆាយតនា នោ ចិត្តសមុដ្ឋានា ឆាយតនា សិយា ចិត្តសមុដ្ឋានា សិយា នោ ចិត្តសមុដ្ឋានា ។ ឯកាទសាយតនា នោ ចិត្តសហភុនោ ធម្មាយតនំ សិយា ចិត្តសហភូ សិយា នោ ចិត្តសហភូ ។ ឯកាទសាយតនា នោ ចិត្តានុបរិវត្តិនោ ធម្មាយតនំ សិយា ចិត្តានុបរិវត្តិ សិយា នោ ចិត្តានុបរិវត្តិ ។ ឯកាទសាយតនា នោ ចិត្តសំសដ្ឋសមុដ្ឋានា ធម្មាយតនំ សិយា ចិត្តសំសដ្ឋសមុដ្ឋានំ សិយា នោ ចិត្តសំសដ្ឋសមុដ្ឋានំ ។ ឯកាទសាយតនា នោ ចិត្តសំសដ្ឋសមុដ្ឋានសហភុនោ ធម្មាយតនំ សិយា ចិត្តសំសដ្ឋសមុដ្ឋានសហភូ សិយា នោ ចិត្តសំសដ្ឋសមុដ្ឋានសហភូ ។ ឯកាទសាយតនា នោ ចិត្តសំសដ្ឋសមុដ្ឋានានុបរិវត្តិនោ ធម្មាយតនំ សិយា ចិត្តសំសដ្ឋសមុដ្ឋានានុបរិវត្តិ សិយា នោ ចិត្តសំសដ្ឋសមុដ្ឋានានុបរិវត្តិ ។ ឆាយតនា អជ្ឈត្តិកា ឆាយតនា ពាហិរា ។ នវាយតនា ឧបាទា ទ្វាយតនា នុបាទា ធម្មាយតនំ សិយា ឧបាទា សិយា នុបាទា ។ បញ្ចាយតនា ឧបាទិន្នា សទ្ទាយតនំ អនុបាទិន្នំ ឆាយតនា សិយា ឧបាទិន្នា សិយា អនុបាទិន្នា ។



ជា មិនច្រឡំដោយចិត្តផងឡើយ ។ អាយតនៈ ៦ មិនមែនតាំងឡើងដោយចិត្ត អាយតនៈ ៦ តាំងឡើងដោយចិត្តក៏មាន មិនមែនតាំងឡើងដោយចិត្តក៏មាន ។ អាយតនៈ ១១ មិនមែនកើតជាមួយនឹងចិត្ត ធម្មាយតនៈ កើតជាមួយនឹងចិត្តក៏មាន មិនមែនកើតជាមួយនឹងចិត្តក៏មាន ។ អាយតនៈ ១១ មិនមែនប្រព្រឹត្តទៅតាមចិត្ត ធម្មាយតនៈ ប្រព្រឹត្តទៅតាមចិត្តក៏មាន មិនមែនប្រព្រឹត្តទៅតាមចិត្តក៏មាន ។ អាយតនៈ ១១ មិនច្រឡំ មិនតាំងឡើងដោយចិត្ត ធម្មាយតនៈ ច្រឡំទាំងតាំងឡើងដោយចិត្តក៏មាន មិនច្រឡំមិនតាំងឡើងដោយចិត្តក៏មាន ។ អាយតនៈ ១១ មិនច្រឡំ មិនតាំងឡើង មិនកើតជាមួយនឹងចិត្ត ធម្មាយតនៈ ច្រឡំទាំងតាំងឡើង ទាំងកើតជាមួយនឹងចិត្តក៏មាន មិនច្រឡំ មិនតាំងឡើង មិនកើតជាមួយនឹងចិត្តក៏មាន ។ អាយតនៈ ១១ មិនច្រឡំ មិនតាំងឡើង មិនប្រព្រឹត្តទៅតាមចិត្ត ធម្មាយតនៈ ច្រឡំទាំងតាំងឡើង ទាំងប្រព្រឹត្តទៅតាមចិត្តក៏មាន មិនច្រឡំ មិនតាំងឡើង មិនប្រព្រឹត្តទៅតាមចិត្តក៏មាន ។ អាយតនៈ ៦ ជាខាងក្នុង អាយតនៈ ៦ ជាខាងក្រៅ ។ អាយតនៈ ៩ ជាឧបាទា អាយតនៈ ២ មិនមែនជាឧបាទា ធម្មាយតនៈ ជាឧបាទាក៏មាន មិនមែនជាឧបាទាក៏មាន ។ អាយតនៈ ៥ ជាឧបាទិន្ន សទ្ទាយតនៈ ជាអនុបាទិន្ន អាយតនៈ ៦ ជាឧបាទិន្នក៏មាន ជាអនុបាទិន្នក៏មាន ។

(១១១) ឯកាទសាយតនា នុបាទានា ធម្មា-
យតនំ សិយា ឧបាទានំ សិយា នុបាទានំ ។ ទសា-
យតនា ឧបាទានិយា ទ្វាយតនា សិយា ឧបាទានិ-
យា សិយា អនុបាទានិយា ។ ទសាយតនា ឧបា-
ទានវិប្បយុត្តា ទ្វាយតនា សិយា ឧបាទានសម្បយុត្តា
សិយា ឧបាទានវិប្បយុត្តា ។ ទសាយតនា ន វត្តព្វា
ឧបាទានា ចេវ ឧបាទានិយា ចាតិ ឧបាទានិយា
ចេវ នោ ច ឧបាទានា មនាយតនំ ន វត្តព្វំ ឧបាទាន-
ញ្ចេវ ឧបាទានិយញ្ចាតិ សិយា ឧបាទានិយញ្ចេវ នោ
ច ឧបាទានំ សិយា ន វត្តព្វំ ឧបាទានិយញ្ចេវ នោ ច
ឧបាទានន្តិ ធម្មាយតនំ សិយា ឧបាទានញ្ចេវ ឧបា-
ទានិយញ្ច សិយា ឧបាទានិយញ្ចេវ នោ ច ឧបាទានំ
សិយា ន វត្តព្វំ ឧបាទានញ្ចេវ ឧបាទានិយញ្ចាតិបិ
ឧបាទានិយញ្ចេវ នោ ច ឧបាទានន្តិបិ ។ ទសាយ-
តនា ន វត្តព្វា ឧបាទានា ចេវ ឧបាទានសម្បយុត្តា
ចាតិបិ ឧបាទានសម្បយុត្តា ចេវ នោ ច ឧបាទានា-
តិបិ មនាយតនំ ន វត្តព្វំ ឧបាទានញ្ចេវ ឧបាទា-
នសម្បយុត្តញ្ចាតិ សិយា ឧបាទានសម្បយុត្តញ្ចេវ



(១១១) អាយតនៈ ១១ មិនមែនឧបាទាន ធម្មាយតនៈ ជាឧបា-
ទានក៏មាន មិនមែនឧបាទានក៏មាន ។ អាយតនៈ ១០ ជាប្រយោជន៍
ដល់ឧបាទាន អាយតនៈ ២ ជាប្រយោជន៍ដល់ឧបាទានក៏មាន មិនមែន
ជាប្រយោជន៍ដល់ឧបាទានក៏មាន ។ អាយតនៈ ១០ ប្រាសចាកឧបាទាន
អាយតនៈ ២ ប្រកបដោយឧបាទានក៏មាន ប្រាសចាកឧបាទានក៏មាន ។
អាយតនៈ ១០ មិនគប្បីពោលថា ជាឧបាទាន ផងជាប្រយោជន៍ដល់
ឧបាទានឡើយ ជាប្រយោជន៍ដល់ឧបាទាន តែមិនមែនឧបាទាន មនា-
យតនៈ មិនគប្បីពោលថា ជាឧបាទាន ផងជាប្រយោជន៍ដល់ឧបា-
ទានទេ ជាប្រយោជន៍ដល់ឧបាទាន តែមិនមែនឧបាទានក៏មាន មិនគប្បី
ពោលថា ជាប្រយោជន៍ដល់ឧបាទាន តែមិនមែនជាឧបាទាន ក៏មាន
ធម្មាយតនៈ ជាឧបាទាន ផងជាប្រយោជន៍ដល់ឧបាទានក៏មាន ជាប្រ-
យោជន៍ដល់ឧបាទាន តែមិនមែនឧបាទានក៏មាន មិនគប្បីពោលថា ជា
ឧបាទាន ផងជាប្រយោជន៍ដល់ឧបាទានផង ថា ជាប្រយោជន៍ដល់
ឧបាទាន តែមិនមែនជាឧបាទានផងក៏មាន ។ អាយតនៈ ១០ មិនគប្បី
ពោលថា ជាឧបាទាន ផងប្រកបដោយឧបាទានផង ថា ប្រកបដោយ
ឧបាទាន តែមិនមែនឧបាទានផងឡើយ មនាយតនៈ មិនគប្បីពោល
ថា ជាឧបាទាន ផងប្រកបដោយឧបាទានទេ ប្រកបដោយឧបាទាន

នោ ច ឧបាទានំ សិយា ន វត្តព្វំ ឧបាទានសម្បយុ-
ត្តញ្ចេវ នោ ច ឧបាទានន្តិ ធម្មាយតនំ សិយា ឧបា-
ទានញ្ចេវ ឧបាទានសម្បយុត្តញ្ច សិយា ឧបាទានស-
ម្បយុត្តញ្ចេវ នោ ច ឧបាទានំ សិយា ន វត្តព្វំ ឧបា-
ទានញ្ចេវ ឧបាទានសម្បយុត្តញ្ចាតិបិ ឧបាទានសម្ប-
យុត្តញ្ចេវ នោ ច ឧបាទានន្តិបិ ។ ទសាយតនា ឧបា-
ទានវិប្បយុត្តឧបាទានិយា ទ្វាយតនា សិយា ឧបាទា-
នវិប្បយុត្តឧបាទានិយា សិយា ឧបាទានវិប្បយុត្តអនុ-
បាទានិយា សិយា ន វត្តព្វា ឧបាទានវិប្បយុត្តឧបា-
ទានិយាតិបិ ឧបាទានវិប្បយុត្តអនុបាទានិយាតិបិ ។

(១១៦) ឯកាទសាយតនា នោ កិលេសា
ធម្មាយតនំ សិយា កិលេសោ សិយា នោ កិលេ-
សោ ។ ទសាយតនា សង្កិលេសិកា ទ្វាយតនា
សិយា សង្កិលេសិកា សិយា អសង្កិលេសិកា ។
ទសាយតនា អសង្កិលិដ្ឋា ទ្វាយតនា សិយា សង្កិ-
លិដ្ឋា សិយា អសង្កិលិដ្ឋា ។ ទសាយតនា កិលេ-
សវិប្បយុត្តា ទ្វាយតនា សិយា កិលេសសម្បយុត្តា
សិយា កិលេសវិប្បយុត្តា ។ ទសាយតនា ន វត្តព្វា



តែមិនមែនឧបាទានក៏មាន មិនគប្បីពោលថា ប្រកបដោយឧបាទាន
តែមិនមែនឧបាទានក៏មាន ធម្មាយតនៈ ជាឧបាទាន ផងប្រកបដោយ
ឧបាទានក៏មាន ប្រកបដោយឧបាទាន តែមិនមែនឧបាទានក៏មាន មិន
គប្បីពោលថា ជាឧបាទាន ផងប្រកបដោយឧបាទានផង ថា ប្រកប
ដោយឧបាទាន តែមិនមែនឧបាទានផង ក៏មាន ។ អាយតនៈ ១០
ប្រាសចាកឧបាទាន តែជាប្រយោជន៍ដល់ឧបាទាន អាយតនៈ ២ ប្រាស
ចាកឧបាទាន តែជាប្រយោជន៍ដល់ឧបាទានក៏មាន ប្រាសចាកឧបាទាន
ផងមិនជាប្រយោជន៍ដល់ឧបាទានក៏មាន មិនគប្បីពោលថា ប្រាសចាក
ឧបាទាន តែជាប្រយោជន៍ដល់ឧបាទានផង ថា ប្រាសចាកឧបាទាន
ផងមិនជាប្រយោជន៍ដល់ឧបាទានផងក៏មាន ។

(១១៦) អាយតនៈ ១១ មិនមែនកិលេស ធម្មាយតនៈ ជា
កិលេស ក៏មាន មិនមែនកិលេស ក៏មាន ។ អាយតនៈ ១០ គួរដល់
សេចក្តីសៅហ្មង អាយតនៈ ២ គួរដល់សេចក្តីសៅហ្មង ក៏មាន មិនគួរ
ដល់សេចក្តីសៅហ្មង ក៏មាន ។ អាយតនៈ ១០ មិនសៅហ្មង អាយ-
តនៈ ២ សៅហ្មង ក៏មាន មិនសៅហ្មង ក៏មាន ។ អាយតនៈ
១០ ប្រាសចាកកិលេស អាយតនៈ ២ ប្រកបដោយកិលេស ក៏មាន
ប្រាសចាកកិលេស ក៏មាន ។ អាយតនៈ ១០ មិនគប្បីពោលថា

កិលេសា ចេវ សង្កិលេសិកា ចាតិ សង្កិលេសិកា ចេវ នោ ច កិលេសា មនាយតនំ ន វត្តព្វំ កិលេសោ ចេវ សង្កិលេសិកញ្ចាតិ សិយា សង្កិលេសិកញ្ចេវ នោ ច កិលេសោ សិយា ន វត្តព្វំ សង្កិលេសិកញ្ចេវ នោ ច កិលេសោតិ ធម្មាយតនំ សិយា កិលេសោ ចេវ សង្កិលេសិកញ្ច សិយា សង្កិលេសិកញ្ចេវ នោ ច កិលេសោ សិយា ន វត្តព្វំ កិលេសោ ចេវ សង្កិលេសិកញ្ចាតិបិ សង្កិលេសិកញ្ចេវ នោ ច កិលេសោតិបិ ។ ទសាយតនា ន វត្តព្វា កិលេសា ចេវ សង្កិលិដ្ឋា ចាតិបិ សង្កិលិដ្ឋា ចេវ នោ ច កិលេសាតិបិ មនាយតនំ ន វត្តព្វំ កិលេសោ ចេវ សង្កិលិដ្ឋញ្ចាតិ សិយា សង្កិលិដ្ឋញ្ចេវ នោ ច កិលេសោ សិយា ន វត្តព្វំ សង្កិលិដ្ឋញ្ចេវ នោ ច កិលេសោតិ ធម្មាយតនំ សិយា កិលេសោ ចេវ សង្កិលិដ្ឋញ្ច សិយា សង្កិលិដ្ឋញ្ចេវ នោ ច កិលេសោ សិយា ន វត្តព្វំ កិលេសោ ចេវ សង្កិលិដ្ឋញ្ចាតិបិ សង្កិលិដ្ឋញ្ចេវ នោ ច កិលេសោតិបិ ។ ទសាយតនា ន វត្តព្វា





ជាសេចក្តីសៅហ្មង ទាំងគួរដល់សេចក្តីសៅហ្មងឡើយ គួរដល់សេចក្តីសៅហ្មង តែមិនមែនជាសេចក្តីសៅហ្មង មនាយតនៈ មិនគប្បីពោលថា ជាសេចក្តីសៅហ្មង ទាំងគួរដល់សេចក្តីសៅហ្មងទេ គួរដល់សេចក្តីសៅហ្មង តែមិនមែនជាសេចក្តីសៅហ្មងក៏មាន មិនគប្បីពោលថា គួរដល់សេចក្តីសៅហ្មង តែមិនមែនជាសេចក្តីសៅហ្មង ក៏មាន ធម្មាយតនៈ ជាសេចក្តីសៅហ្មង ទាំងគួរដល់សេចក្តីសៅហ្មងក៏មាន គួរដល់សេចក្តីសៅហ្មង តែមិនមែនជាសេចក្តីសៅហ្មងក៏មាន មិនគប្បីពោលថា ជាសេចក្តីសៅហ្មង ទាំងគួរដល់សេចក្តីសៅហ្មងផង ថា គួរដល់សេចក្តីសៅហ្មង តែមិនមែនជាសេចក្តីសៅហ្មងផង ក៏មាន ។ អាយតនៈ ១០ មិនគប្បីពោលថា ជាសេចក្តីសៅហ្មង ទាំងសៅហ្មងហើយផង ថា សៅហ្មងហើយ តែមិនមែនជាសេចក្តីសៅហ្មងផងទេ មនាយតនៈ មិនគប្បីពោលថា ជាសេចក្តីសៅហ្មង ទាំងសៅហ្មងហើយឡើយ សៅហ្មងហើយ តែមិនមែនជាសេចក្តីសៅហ្មងក៏មាន មិនគប្បីពោលថា សៅហ្មងហើយ តែមិនមែនជាសេចក្តីសៅហ្មងក៏មាន ធម្មាយតនៈ ជាសេចក្តីសៅហ្មង ទាំងសៅហ្មងហើយក៏មាន សៅហ្មងហើយ តែមិនមែនជាសេចក្តីសៅហ្មងក៏មាន មិនគប្បីពោលថា ជាសេចក្តីសៅហ្មង ទាំងសៅហ្មងហើយផង ថា សៅហ្មងហើយតែមិនមែនជាសេចក្តីសៅហ្មងផងក៏មាន ។ អាយតនៈ ១០ មិនគប្បីពោលថា

កិលេសា ចេវ កិលេសសម្បយុត្តា ចាតិបិ កិលេសសម្បយុត្តា ចេវ នោ ច កិលេសាតិបិ មនាយតនំ ន វត្តព្វំ កិលេសោ ចេវ កិលេសសម្បយុត្តញ្ចាតិ សិយា កិលេសសម្បយុត្តញ្ចេវ នោ ច កិលេសោ សិយា ន វត្តព្វំ កិលេសសម្បយុត្តញ្ចេវ នោ ច កិលេសោតិ ធម្មាយតនំ សិយា កិលេសោ ចេវ កិលេសសម្បយុត្តញ្ច សិយា កិលេសសម្បយុត្តញ្ចេវ នោ ច កិលេសោ សិយា ន វត្តព្វំ កិលេសោ ចេវ កិលេសសម្បយុត្តញ្ចាតិបិ កិលេសសម្បយុត្តញ្ចេវ នោ ច កិលេសោតិបិ ។ ទសាយតនា កិលេសវិប្បយុត្តសង្កិលេសិកា ទ្វាយតនា សិយា កិលេសវិប្បយុត្តសង្កិលេសិកា សិយា កិលេសវិប្បយុត្តអសង្កិលេសិកា សិយា ន វត្តព្វា កិលេសវិប្បយុត្តសង្កិលេសិកាតិបិ កិលេសវិប្បយុត្តអសង្កិលេសិកាតិបិ ។



ជាសេចក្ដីសៅហ្មង ទាំងប្រកបដោយសេចក្ដីសៅហ្មងផង ជា ប្រកបដោយសេចក្ដីសៅហ្មង តែមិនមែនសេចក្ដីសៅហ្មងផងទេ មនាយតនៈ មិនគប្បីពោលថា ជាសេចក្ដីសៅហ្មង ទាំងប្រកបដោយសេចក្ដីសៅហ្មងឡើយ ប្រកបដោយសេចក្ដីសៅហ្មង តែមិនមែនជាសេចក្ដីសៅហ្មងក៏មាន មិនគប្បីពោលថា ប្រកបដោយសេចក្ដីសៅហ្មង តែមិនមែនជាសេចក្ដីសៅហ្មងក៏មាន ធម្មាយតនៈ ជាសេចក្ដីសៅហ្មង ទាំងប្រកបដោយសេចក្ដីសៅហ្មងក៏មាន ប្រកបដោយសេចក្ដីសៅហ្មង តែមិនមែនជាសេចក្ដីសៅហ្មងក៏មាន មិនគប្បីពោលថា ជាសេចក្ដីសៅហ្មង ទាំងប្រកបដោយសេចក្ដីសៅហ្មងផង ជា ប្រកបដោយសេចក្ដីសៅហ្មង តែមិនមែនជាសេចក្ដីសៅហ្មងផង ក៏មាន ។ អាយតនៈ ១០ ប្រាសចាកសេចក្ដីសៅហ្មង តែគួរដល់សេចក្ដីសៅហ្មង អាយតនៈ ២ ប្រាសចាកសេចក្ដីសៅហ្មង តែគួរដល់សេចក្ដីសៅហ្មងក៏មាន ប្រាសចាកសេចក្ដីសៅហ្មង ទាំងមិនគួរដល់សេចក្ដីសៅហ្មង ក៏មាន មិនគប្បីពោលថា ប្រាសចាកសេចក្ដីសៅហ្មង តែគួរដល់សេចក្ដីសៅហ្មងផង ជា ប្រាសចាកសេចក្ដីសៅហ្មង ទាំងមិនគួរដល់សេចក្ដីសៅហ្មងផងក៏មាន ។

(១១៣) ទសាយតនា ន ទស្សនេន បហាតព្វា ទ្វាយតនា សិយា ទស្សនេន បហាតព្វា សិយា ន ទស្សនេន បហាតព្វា ។ ទសាយតនា ន ភាវនាយ បហាតព្វា ទ្វាយតនា សិយា ភាវនាយ បហាតព្វា សិយា ន ភាវនាយ បហាតព្វា ។ ទសាយតនា ន ទស្សនេន បហាតព្វហេតុកា ទ្វាយតនា សិយា ទស្សនេន បហាតព្វហេតុកា សិយា ន ទស្សនេន បហាតព្វហេតុកា ។ ទសាយតនា ន ភាវនាយ បហាតព្វហេតុកា ទ្វាយតនា សិយា ភាវនាយ បហាតព្វហេតុកា សិយា ន ភាវនាយ បហាតព្វហេតុកា ។ ទសាយតនា អវិតក្កា ទ្វាយតនា សិយា សវិតក្កា សិយា អវិតក្កា ។ ទសាយតនា អវិចារា ទ្វាយតនា សិយា សវិចារា សិយា អវិចារា ។ ទសាយតនា អប្បីតិកា ទ្វាយតនា សិយា សប្បីតិកា សិយា អប្បីតិកា ។ ទសាយតនា ន បីតិសហគតា ទ្វាយតនា សិយា បីតិសហគតា សិយា ន បីតិសហគតា ។ ទសាយតនា ន សុខសហគតា ទ្វាយតនា សិយា សុខសហគតា សិយា ន សុខសហគតា ។



(១១៣) អាយតនៈ ១០ មិនគួរលះដោយទស្សនៈ អាយតនៈ ២ គួរលះដោយទស្សនៈក៏មាន មិនគួរលះដោយទស្សនៈក៏មាន ។ អាយតនៈ ១០ មិនគួរលះដោយភាវនា អាយតនៈ ២ គួរលះដោយភាវនាក៏មាន មិនគួរលះដោយភាវនា ក៏មាន ។ អាយតនៈ ១០ មានហេតុមិនគួរលះដោយទស្សនៈ អាយតនៈ ២ មានហេតុគួរលះដោយទស្សនៈក៏មាន មានហេតុមិនគួរលះដោយទស្សនៈ ក៏មាន ។ អាយតនៈ ១០ មានហេតុមិនគួរលះដោយភាវនា អាយតនៈ ២ មានហេតុគួរលះដោយភាវនាក៏មាន មានហេតុមិនគួរលះដោយភាវនាក៏មាន ។ អាយតនៈ ១០ មិនមានវិតក្កៈ អាយតនៈ ២ ប្រព្រឹត្តទៅជាមួយនឹងវិតក្កៈក៏មាន មិនមានវិតក្កៈក៏មាន ។ អាយតនៈ ១០ មិនមានវិចារៈ អាយតនៈ ២ ប្រព្រឹត្តទៅជាមួយនឹងវិចារៈក៏មាន មិនមានវិចារៈក៏មាន ។ អាយតនៈ ១០ មិនមានបីតិ អាយតនៈ ២ ប្រព្រឹត្តទៅជាមួយនឹងបីតិក៏មាន មិនមានបីតិក៏មាន ។ អាយតនៈ ១០ មិនកើតព្រមដោយបីតិ អាយតនៈ ២ កើតព្រមដោយបីតិក៏មាន មិនកើតព្រមដោយបីតិក៏មាន ។ អាយតនៈ ១០ មិនកើតព្រមដោយសុខៈ អាយតនៈ ២ កើតព្រមដោយសុខៈក៏មាន មិនកើតព្រមដោយសុខៈក៏មាន ។

ទសាយតនា ន ហេតុសម្បយុត្តា ទ្វាយតនា សិយា ហេតុសម្បយុត្តា សិយា ន ហេតុសម្បយុត្តា ។ ទសាយតនា កាមាវចរា ទ្វាយតនា សិយា កាមាវចរា សិយា ន កាមាវចរា ។ ទសាយតនា ន រូបាវចរា ទ្វាយតនា សិយា រូបាវចរា សិយា ន រូបាវចរា ។ ទសាយតនា ន អរូបាវចរា ទ្វាយតនា សិយា អរូបាវចរា សិយា ន អរូបាវចរា ។ ទសាយតនា បរិយាបន្នា ទ្វាយតនា សិយា បរិយាបន្នា សិយា អបរិយាបន្នា ។ ទសាយតនា អនិយ្យានិកា ទ្វាយតនា សិយា និយ្យានិកា សិយា អនិយ្យានិកា ។ ទសាយតនា អនិយតា ទ្វាយតនា សិយា និយតា សិយា អនិយតា ។ ទសាយតនា សឧត្តរា ទ្វាយតនា សិយា សឧត្តរា សិយា អនុត្តរា ។ ទសាយតនា អរណា ទ្វាយតនា សិយា សរណា សិយា អរណាតិ ។

បញ្ហាបុច្ឆកំ ។

អាយតនយមកំ សមត្តំ ។





អាយតនៈ ១០ មិនកើតព្រមដោយហេតុ អាយតនៈ ២ កើតព្រមដោយហេតុក៏មាន មិនកើតព្រមដោយហេតុក៏មាន ។ អាយតនៈ ១០ ជាកាមាវចរ អាយតនៈ ២ ជាកាមាវចរក៏មាន មិនមែនកាមាវចរក៏មាន ។ អាយតនៈ ១០ មិនមែនរូបាវចរ អាយតនៈ ២ ជារូបាវចរក៏មាន មិនមែនរូបាវចរក៏មាន ។ អាយតនៈ ១០ មិនមែនអរូបាវចរ អាយតនៈ ២ ជាអរូបាវចរក៏មាន មិនមែនអរូបាវចរក៏មាន ។ អាយតនៈ ១០ ជាបរិយាបន្នៈ អាយតនៈ ២ ជាបរិយាបន្នៈក៏មាន ជាអបរិយាបន្នៈក៏មាន ។ អាយតនៈ ១០ មិនមែននិយ្យានិកៈ អាយតនៈ ២ ជានិយ្យានិកៈក៏មាន មិនមែននិយ្យានិកៈក៏មាន ។ អាយតនៈ ១០ មិនទៀង អាយតនៈ ២ ទៀងក៏មាន មិនទៀងក៏មាន ។ អាយតនៈ ១០ ប្រព្រឹត្តទៅជាមួយនឹងឧត្តរៈ អាយតនៈ ២ ប្រព្រឹត្តទៅជាមួយនឹងឧត្តរៈក៏មាន មិនមានឧត្តរៈក៏មាន ។ អាយតនៈ ១០ មិនមានសត្រូវ អាយតនៈ ២ ប្រព្រឹត្តទៅជាមួយនឹងសត្រូវក៏មាន មិនមានសត្រូវក៏មាន ។

ចប់ បញ្ហាបុច្ឆកៈ ។

ចប់ អាយតនយមកៈ ។

## ធាតុវិភង្គោ

(១៧២) ឆ ធាតុយោ បថវីធាតុ អាបោធាតុ តេជោធាតុ វាយោធាតុ អាកាសធាតុ វិញ្ញាណធាតុ ។

(១៧៣) តត្ថ កតមា បថវីធាតុ ។ បថវីធាតុទ្វយំ អត្ថិ អជ្ឈត្តិកា អត្ថិ ពាហិរា ។ តត្ថ កតមា អជ្ឈត្តិកា បថវីធាតុ ។ យំ អជ្ឈត្តំ បច្ចត្តំ កក្ខឡំ ខរិគតំ[1] កក្ខឡត្តំ កក្ខឡភាវោ អជ្ឈត្តំ ឧបាទិន្នំ សេយ្យថីទំ កេសា លោមា នខា ទន្តា តចោ មំសំ ន្ហារុ អដ្ឋិ អដ្ឋិមិញ្ជំ វក្កំ ហទយំ យកនំ កិលោមកំ បិហកំ បប្ផាសំ អន្តំ អន្តគុណំ ឧទរិយំ ករីសំ យំ វា បនញ្ញម្បិ អត្ថិ អជ្ឈត្តំ បច្ចត្តំ កក្ខឡំ ខរិគតំ កក្ខឡត្តំ កក្ខឡភាវោ អជ្ឈត្តំ ឧបាទិន្នំ អយំ វុច្ចតិ អជ្ឈត្តិកា បថវីធាតុ ។ តត្ថ កតមា ពាហិរា បថវីធាតុ ។ យំ ពាហិរំ កក្ខឡំ ខរិគតំ កក្ខឡត្តំ កក្ខឡភាវោ ពហិទ្ធា អនុបាទិន្នំ សេយ្យថីទំ អយោ លោហំ តិបុ សីសំ សជ្ឈំ មុត្តា មណិ វេឡុរិយោ សង្ខោ សិលា បវាឡំ រជតំ ជាតរូបំ លោហិតង្កោ[2]

១ ម. ខរគតំ ។ ២ ម. លោហិតង្គោ ។



## ធាតុវិភង្គ

(១៧២) ធាតុ ៦ គឺ បឋវីធាតុ អាបោធាតុ តេជោធាតុ វាយោធាតុ អាកាសធាតុ វិញ្ញាណធាតុ ។

(១៧៣) បណ្តាធាតុ ៦ នោះ បឋវីធាតុ តើដូចម្តេច ។ បឋវីធាតុ មាន ២ គឺ បឋវីធាតុ ខាងក្នុងក៏មាន ខាងក្រៅក៏មាន ។ បណ្តាធាតុ ២ នោះ បឋវីធាតុខាងក្នុង តើដូចម្តេច ។ ធម្មជាតណា ជាខាងក្នុង អាស្រ័យនូវខ្លួន រឹង ខះ មានអាការរឹង មានសភាពរឹង ជាខាងក្នុង ដែលវិញ្ញាណចូលទៅកាន់យកបាន គឺ សក់ រោម ក្រចក ធ្មេញ ស្បែក សាច់ សរសៃ ឆ្អឹង ខួរក្នុងឆ្អឹង តម្រងបស្សាវៈ បេះដូង ថ្លើម វាវ ក្រពះ សួត ពោះវៀនធំ ពោះវៀនតូច អាហារថ្មី អាហារចាស់ ឬក៏ធម្មជាតដទៃណា ជាខាងក្នុង អាស្រ័យនូវខ្លួន រឹង ខះ មានអាការរឹង មានសភាពរឹង ជាខាងក្នុង ដែលវិញ្ញាណចូលទៅកាន់យកបាន នេះហៅថា បឋវីធាតុខាងក្នុង ។ បណ្តាធាតុ ២ នោះ បឋវីធាតុខាងក្រៅ តើដូចម្តេច ។ ធម្មជាតណា ជាខាងក្រៅ រឹង ខះ មានអាការរឹង មានសភាពរឹង ជាខាងក្រៅ ដែលវិញ្ញាណមិនចូលទៅកាន់យកបានទេ គឺ ដែក លោហៈ សំណប៉ាហាំង សំណក់ ប្រាក់ កែវមុក្តា កែវមណី កែវពិទូរ្យ ស័ង្ខ ថ្ម កែវប្រពាឡ ប្រាក់ មាស កែវក្រហម

មសារគល្លំ តិណំ កដ្ឋំ សក្ខរា កឋលា ភូមិ បាសាណោ បព្វតោ យំ វា បនញ្ញម្បិ អត្ថិ ពាហិរំ កក្ខឡំ ខរិគតំ កក្ខឡត្តំ កក្ខឡភាវោ ពហិទ្ធា អនុបាទិន្នំ អយំ វុច្ចតិ ពាហិរា បឋវីធាតុ ។ យា ច អជ្ឈត្តិកា បឋវីធាតុ យា ច ពាហិរា បឋវីធាតុ តទេកជ្ឈំ អភិសញ្ញូហិត្វា អភិសង្ខិបិត្វា អយំ វុច្ចតិ បឋវីធាតុ ។

[១១៦] តត្ថ កតមា អាបោធាតុ ។ អាបោធាតុទ្វយំ អត្ថិ អជ្ឈត្តិកា អត្ថិ ពាហិរា ។ តត្ថ កតមា អជ្ឈត្តិកា អាបោធាតុ ។ យំ អជ្ឈត្តំ បច្ចត្តំ អាបោ អាបោគតំ ស្នេហោ ស្នេហគតំ ពន្ធនត្តំ រូបស្ស អជ្ឈត្តំ ឧបាទិន្នំ សេយ្យថីទំ បិត្តំ សេម្ហំ បុព្វោ លោហិតំ សេទោ មេទោ អស្សុ វសា ខេ-ឡោ សិង្ឃាណិកា លសិកា មុត្តំ យំ វា បនញ្ញម្បិ អត្ថិ អជ្ឈត្តំ បច្ចត្តំ អាបោ អាបោគតំ ស្នេហោ ស្នេហគតំ ពន្ធនត្តំ រូបស្ស អជ្ឈត្តំ ឧបាទិន្នំ អយំ វុច្ចតិ អជ្ឈត្តិកា អាបោធាតុ ។ តត្ថ កតមា ពា-ហិរា អាបោធាតុ ។ យំ ពាហិរំ អាបោ អាបោគតំ



កែវពព្រុស ស្មៅ ឈើ ក្រួស អំបែង ផែនដី ថ្ម ភ្នំ ឬក៏ ធម្មជាតដទៃណា ជាខាងក្រៅ រឹង ខះ មានអាការរឹង មានសភាពរឹង ជាខាងក្រៅ ដែលវិញ្ញាណមិនចូលទៅកាន់យកបានទេ នេះហៅថា បឋវីធាតុខាងក្រៅ ។ បឋវីធាតុណា ជាខាងក្នុងក្តី បឋវីធាតុណា ជាខាងក្រៅក្តី នេះហៅថា បឋវីធាតុ ព្រោះប្រមូលបំប្រួញធាតុនោះ ក្នុងទីជាមួយគ្នា ។

[១១៦] បណ្តាធាតុ ៦ នោះ អាបោធាតុ តើដូចម្តេច ។ អាបោធាតុ មាន ២ គឺ អាបោធាតុ ខាងក្នុងក៏មាន ខាងក្រៅក៏មាន ។ បណ្តាធាតុ ២ នោះ អាបោធាតុខាងក្នុង តើដូចម្តេច ។ ធម្មជាតណា ជាខាងក្នុង អាស្រ័យនូវខ្លួន ជាទឹក ដល់នូវភាពជាទឹក មានសភាពស្អិត ដល់នូវភាពស្អិត មានសភាពជាទីជាប់នៃរូប ជាខាងក្នុង ដែលវិញ្ញាណចូលទៅកាន់យកបាន គឺ ប្រមាត់ ស្លេស្ម ខ្ទុះ ឈាម ញើស ខ្លាញ់ខាប់ ទឹកភ្នែក ខ្លាញ់រាវ ទឹកមាត់ ទឹកសំបោរ ទឹករំអិល ទឹកមូត្រ ឬក៏ ធម្មជាតដទៃណា ជាខាងក្នុង អាស្រ័យនូវខ្លួន ជាទឹក ដល់នូវភាពជាទឹក មានសភាពស្អិត ដល់នូវភាពស្អិត មានសភាពជាទីជាប់នៃរូប ជាខាងក្នុង ដែលវិញ្ញាណចូលទៅកាន់យកបាន នេះហៅថា អាបោធាតុខាងក្នុង ។ បណ្តាធាតុ ២ នោះ អាបោធាតុខាងក្រៅ តើដូចម្តេច ។ ធម្មជាតណា ជាខាងក្រៅ ជាទឹក ដល់នូវភាពជាទឹក

ស្នេហោ ស្នេហគតំ ពន្ធនត្តំ រូបស្ស ពាហិរំ អនុបាទិន្នំ សេយ្យថីទំ មូលរសោ ខន្ធរសោ តចរសោ បត្តរសោ បុប្ផរសោ ផលរសោ ខីរំ ទធិ សប្បិ នវនីតំ តេលំ មធុ ផាណិតំ ភុម្មានិ វា ឧទកានិ អន្តលិក្ខានិ វា យំ វា បនញ្ញម្បិ អត្ថិ ពាហិរំ អាបោ អាបោគតំ ស្នេហោ ស្នេហគតំ ពន្ធនត្តំ រូបស្ស ពាហិរំ អនុបាទិន្នំ អយំ វុច្ចតិ ពាហិរា អាបោធាតុ ។ យា ច អជ្ឈត្តិកា អាបោធាតុ យា ច ពាហិរា អាបោធាតុ តទេកជ្ឈំ អភិសញ្ញូហិត្វា អភិសង្ខិបិត្វា អយំ វុច្ចតិ អាបោធាតុ ។

(១១៧) តត្ថ កតមា តេជោធាតុ ។ តេជោធាតុទ្វយំ អត្ថិ អជ្ឈត្តិកា អត្ថិ ពាហិរា ។ តត្ថ កតមា អជ្ឈត្តិកា តេជោធាតុ ។ យំ អជ្ឈត្តំ បច្ចត្តំ តេជោ តេជោគតំ ឧស្មា ឧស្មាគតំ ឧសុមំ ឧសុមគតំ



មានសភាពស្អិត ដល់នូវភាពស្អិត មានសភាពជាទីជាប់នៃរូប ជាខាងក្រៅ ដែលវិញ្ញាណមិនចូលទៅកាន់យកបានទេ គឺ រសគល់ រសដើម រសសំបក រសស្លឹក រសផ្កា រសផ្លែ ទឹកដោះស្រស់ ទឹកដោះជូរ ទឹកដោះថ្លា ទឹកដោះខាប់ ប្រេង ទឹកឃ្មុំ ទឹកអំពៅ ទឹកដែលបិតនៅលើផែនដីក្តី ទឹកដែលបិតនៅក្នុងអាកាសក្តី ឬគឺ ធម្មជាតដទៃណា ជាខាងក្រៅ ជាទឹក ដល់នូវភាពជាទឹក មានសភាពស្អិត ដល់នូវភាពស្អិត មានសភាពជាទីជាប់នៃរូប ជាខាងក្រៅ ដែលវិញ្ញាណមិនចូលទៅកាន់យកបានទេ នេះហៅថា អាបោធាតុខាងក្រៅ ។ អាបោធាតុណា ជាខាងក្នុងក្តី អាបោធាតុណា ជាខាងក្រៅក្តី នេះហៅថា អាបោធាតុ ព្រោះប្រមូលបំប្រួញធាតុនោះ ក្នុងទីជាមួយគ្នា ។

(១១៧) បណ្តាធាតុ ៦ នោះ តេជោធាតុ តើដូចម្តេច ។ តេជោធាតុ មាន ២ គឺ តេជោធាតុ ខាងក្នុងក៏មាន ខាងក្រៅក៏មាន ។ បណ្តាធាតុ ២ នោះ តេជោធាតុខាងក្នុង តើដូចម្តេច ។ ធម្មជាតណា ជាខាងក្នុង អាស្រ័យនូវខ្លួន ជាសភាពក្តៅ ដល់នូវសភាពក្តៅ ជាកំហាយ ដល់នូវភាពកំហាយ ជាធម្មជាតអប់កំដៅ ដល់នូវភាពអប់កំដៅ

អជ្ឈត្តំ ឧបាទិន្នំ សេយ្យថីទំ យេន ច សន្តប្បតិ យេន ច ជីរតិ យេន ច បរិឌយ្ហតិ យេន ច អសិតបីតខាយិតសាយិតំ សម្មា បរិណាមំ គច្ឆតិ យំ វា បនញ្ញម្បិ អត្ថិ អជ្ឈត្តំ បច្ចត្តំ តេជោ តេជោគតំ ឧស្មា ឧស្មាគតំ ឧសុមំ ឧសុមគតំ អជ្ឈត្តំ ឧបាទិន្នំ អយំ វុច្ចតិ អជ្ឈត្តិកា តេជោធាតុ ។ តត្ថ កតមា ពាហិរា តេជោធាតុ ។ យំ ពាហិរំ តេជោ តេជោគតំ ឧស្មា ឧស្មាគតំ ឧសុមំ ឧសុមគតំ ពហិទ្ធា អនុបាទិន្នំ សេយ្យថីទំ កដ្ឋគ្គិ សកលិកគ្គិ តិណគ្គិ គោមយគ្គិ ថុសគ្គិ សង្ការគ្គិ ឥន្ទគ្គិ អគ្គិសន្តាបោ សុរិយសន្តាបោ កដ្ឋសន្និចយសន្តាបោ តិណសន្និចយសន្តាបោ ធញ្ញសន្និចយសន្តាបោ ភណ្ឌសន្និចយសន្តាបោ(១) យំ វា បនញ្ញម្បិ អត្ថិ ពាហិរំ តេជោ តេជោគតំ ឧស្មា ឧស្មាគតំ ឧសុមំ ឧសុមគតំ ពហិទ្ធា អនុបាទិន្នំ អយំ វុច្ចតិ ពាហិរា តេជោធាតុ ។ យា ច អជ្ឈត្តិកា តេជោធាតុ យា ច ពាហិរា តេជោធាតុ តទេកជ្ឈំ អភិសញ្ញូហិត្វា អភិសង្ខិបិត្វា អយំ វុច្ចតិ តេជោធាតុ ។

១ ម. ភណ្ឌសន្និចយសន្តាបោ ។





ជាខាងក្នុង ដែលវិញ្ញាណចូលទៅកាន់យកបាន គឺ ភ្លើងដែលឲ្យកាយក្តៅសព្វ ១ ដែលឲ្យកាយគ្រាំគ្រា ១ ដែលឲ្យកាយក្តៅក្រហាយ ១ ដែលឲ្យ គេស៊ី ផឹក ទំពាលិទ្ធភក្សហើយ ដល់នូវការ[illegible]ល្អអស់ ១ ឬក៏ធម្មជាតដទៃណា ជាខាងក្នុង អាស្រ័យនូវខ្លួន ជាសភាពក្តៅ ដល់នូវភាពក្តៅ ជាចំហាយ ដល់នូវភាពចំហាយ ជាធម្មជាតអប់កំដៅ ដល់នូវភាពអប់កំដៅ ជាខាងក្នុង ដែលវិញ្ញាណចូលទៅកាន់យកបាន នេះហៅថា តេជោធាតុខាងក្នុង ។ បណ្តាធាតុ ២ នោះ តេជោធាតុខាងក្រៅ តើដូចម្តេច ។ ធម្មជាតណា ជាខាងក្រៅ ជាភាពក្តៅ ដល់នូវភាពក្តៅ ជាចំហាយ ដល់នូវភាពចំហាយ ជាធម្មជាតិអប់កំដៅ ដល់នូវភាពអប់កំដៅ ជាខាងក្រៅ ដែលវិញ្ញាណមិនចូលទៅកាន់យកបានទេ គឺ ភ្លើងឧស ភ្លើងកំទេច ភ្លើងស្មៅ ភ្លើងអាចម៍គោ ភ្លើងអង្កាម ភ្លើងសម្រាម ភ្លើងរន្ទះ កំដៅភ្លើង កំដៅព្រះអាទិត្យ កំដៅគំនរឧស កំដៅគំនរស្មៅ កំដៅគំនរស្រូវ កំដៅគំនរផែះ ឬក៏ធម្មជាតដទៃណា ជាខាងក្រៅ ជាសភាពក្តៅ ដល់នូវសភាពក្តៅ ជាចំហាយ ដល់នូវភាពចំហាយ ជាធម្មជាតអប់កំដៅ ដល់នូវភាពអប់កំដៅ ជាខាងក្រៅ ដែលវិញ្ញាណមិនចូលទៅកាន់យកបានទេ នេះហៅថា តេជោធាតុខាងក្រៅ ។ តេជោធាតុណា ជាខាងក្នុងក្តី តេជោធាតុណា ជាខាងក្រៅក្តី នេះហៅថា តេជោធាតុ ព្រោះប្រមូលបំប្រួញធាតុនោះ ក្នុងទីជាមួយគ្នា ។

(១១៨) តត្ថ កតមា វាយោធាតុ ។ វាយោធាតុទ្វយំ អត្ថិ អជ្ឈត្តិកា អត្ថិ ពាហិរា ។ តត្ថ កតមា អជ្ឈត្តិកា វាយោធាតុ ។ យំ អជ្ឈត្តំ បច្ចត្តំ វាយោ វាយោគតំ ថម្ភិតត្តំ រូបស្ស ឧបាទិន្នំ សេយ្យថីទំ ឧទ្ធង្គមា វាតា អធោគមា វាតា កុច្ឆិសយា វាតា កោដ្ឋសយា វាតា អង្គមង្គានុសារិនោ វាតា សត្ថកវាតា ខុរកវាតា ឧប្បលកវាតា អស្សាសោ បស្សាសោ ឥតិ វា យំ វា បនញ្ញម្បិ អត្ថិ អជ្ឈត្តំ បច្ចត្តំ វាយោ វាយោគតំ ថម្ភិតត្តំ រូបស្ស ឧបាទិន្នំ អយំ វុច្ចតិ អជ្ឈត្តិកា វាយោធាតុ ។ តត្ថ កតមា ពាហិរា វាយោធាតុ ។ យំ ពាហិរំ វាយោ វាយោគតំ ថម្ភិតត្តំ រូបស្ស អនុបាទិន្នំ សេយ្យថីទំ បុរត្ថិមា វាតា បច្ឆិមា វាតា ឧត្តរា វាតា



(១១៨) បណ្តាធាតុ ៦ នោះ វាយោធាតុ តើដូចម្តេច ។ វាយោធាតុ មាន ២ គឺ វាយោធាតុ ខាងក្នុងក៏មាន ខាងក្រៅក៏មាន ។ បណ្តាធាតុ ២ នោះ វាយោធាតុខាងក្នុង តើដូចម្តេច ។ ធម្មជាតណា ជាខាងក្នុង អាស្រ័យនូវខ្លួន ជាសភាពបក់ផាត់ ដល់នូវភាពបក់ផាត់ មានភាពធ្វើរូបឲ្យរឹងប៉ឹង ជាខាងក្នុង ដែលវិញ្ញាណចូលទៅកាន់យកបាន គឺ ខ្យល់បក់ពីក្រោមឡើងលើ ខ្យល់បក់ពីលើទៅក្រោម ខ្យល់ដេកនៅខាងក្នុងផ្ទៃ ( ខ្យល់ខាងក្រៅពោះវៀន ) ខ្យល់ដេកនៅក្នុងក្រពះ ( ខ្យល់ខាងក្នុងពោះវៀន ) ខ្យល់បក់ផ្សព្វផ្សាយសព្វអវយវៈតូចធំ ខ្យល់ដូចជាសស្ត្រា [១] ខ្យល់ដូចជាកាំបិតកោរ [២] ខ្យល់អាចពន្លះនូវហឫទ័យ ខ្យល់ដកដង្ហើមចូល ខ្យល់ដកដង្ហើមចេញ ឬក៏ ធម្មជាតដទៃណា ជាខាងក្នុង អាស្រ័យនូវខ្លួន ជាសភាពបក់ផាត់ ដល់នូវភាពបក់ផាត់ មានភាពធ្វើរូបឲ្យរឹងប៉ឹង ជាខាងក្នុង ដែលវិញ្ញាណចូលទៅកាន់យកបាន នេះហៅថា វាយោធាតុខាងក្នុង ។ បណ្តាធាតុ ២ នោះ វាយោធាតុខាងក្រៅ តើដូចម្តេច ។ ធម្មជាតណា ជាខាងក្រៅ ជាសភាពបក់ផាត់ ដល់នូវភាពបក់ផាត់ មានភាពធ្វើរូបឲ្យរឹងប៉ឹង ជាខាងក្រៅ ដែលវិញ្ញាណមិនចូលទៅកាន់យកបានទេ គឺ ខ្យល់បក់មកអំពីទិសខាងកើត ខ្យល់បក់មកអំពីទិសខាងលិច ខ្យល់បក់មកអំពីទិសខាងជើង

---

១ ខ្យល់អាចប្រព្រឹត្តទៅ ដូចជាគេកាត់ទីតដោយកាំបិត ។ ២ ខ្យល់អាចពន្លះនូវហឫទ័យ ដូចជាគេពន្លះដោយកាំបិតកោរ ។

ទក្ខិណា វាតា សរជា វាតា អរជា វាតា សីតា វាតា ឧណ្ហា វាតា បរិត្តា វាតា អធិមត្តា វាតា កាឡា វាតា វេរម្ភវាតា បក្ខវាតា សុបណ្ណវាតា តាលវណ្ដវាតា វិធូបនវាតា យំ វា បនញ្ញម្បិ អត្ថិ ពាហិរំ វាយោ វាយោគតំ ថម្ភិតត្តំ រូបស្ស ពាហិរំ អនុបាទិន្នំ អយំ វុច្ចតិ ពាហិរា វាយោធាតុ ។ យា ច អជ្ឈត្តិកា វាយោធាតុ យា ច ពាហិរា វាយោធាតុ តទេកជ្ឈំ អភិសញ្ញូហិត្វា អភិសង្ខិបិត្វា អយំ វុច្ចតិ វាយោធាតុ ។

(១១៩) តត្ថ កតមា អាកាសធាតុ ។ អាកាសធាតុទ្វយំ អត្ថិ អជ្ឈត្តិកា អត្ថិ ពាហិរា ។ តត្ថ កតមា អជ្ឈត្តិកា អាកាសធាតុ ។ យំ អជ្ឈត្តំ បច្ចត្តំ អាកាសោ អាកាសគតំ អឃំ អឃគតំ វិវរោ វិវរគតំ អសម្ផុដ្ឋំ មំសលោហិតេហិ អជ្ឈត្តំ



ខ្យល់បក់មកអំពីទិសខាងត្បូង ខ្យល់ប្រកបដោយធូលី ខ្យល់មិនមានធូលី ខ្យល់ត្រជាក់ ខ្យល់ក្តៅ ខ្យល់តិច ខ្យល់ខ្លាំង ខ្យល់ខ្មៅ(១) ខ្យល់កំបុតត្បូង ខ្យល់ដែលតាំងអំពីស្លាបសត្វ ខ្យល់ដែលតាំងឡើងអំពីគ្រុឌ ខ្យល់ដែលតាំងឡើងអំពីស្លឹកត្នោតជាដើម ខ្យល់ដែលតាំងឡើងអំពីផ្លិត ឬក៏ធម្មជាតដទៃណា ជាខាងក្រៅ ជាសភាពបក់ផាត់ ដល់នូវភាពបក់ផាត់. មានការធ្វើរូបឲ្យរឹងប៉ឹង ជាខាងក្រៅ ដែលវិញ្ញាណមិនចូលទៅកាន់យកបានទេ នេះហៅថា វាយោធាតុខាងក្រៅ ។ វាយោធាតុណា ជាខាងក្នុងក្តី វាយោធាតុណា ជាខាងក្រៅក្តី នេះហៅថា វាយោធាតុ ព្រោះប្រមូលបំប្រួញធាតុនោះ ក្នុងទីជាមួយគ្នា ។

[១១៩] បណ្តាធាតុ ៦ នោះ អាកាសធាតុ តើដូចម្តេច ។ អាកាសធាតុ មាន ២ គឺ អាកាសធាតុខាងក្នុងក៏មាន ខាងក្រៅក៏មាន ។ បណ្តាធាតុ ២ នោះ អាកាសធាតុខាងក្នុង តើដូចម្តេច ។ ធម្មជាតណា ជាខាងក្នុង ប្រស្រ័យនូវខ្លួន ជាសភាពទទេ ដល់នូវភាពទទេ ជាធម្មជាតទំនេរ ដល់នូវភាពទំនេរ ជាសភាពប្រហោង ដល់នូវភាពប្រហោង ជាធម្មជាតមិនប៉ះពាល់ ដោយសាច់និងឈាម ជាខាងក្នុង

១ ខ្យល់ដែលតាំងឡើងក្នុងចន្លោះ ១ រដូវក្តៅ ។

ឧបាទិន្នំ សេយ្យថីទំ កណ្ណច្ឆិទ្ទំ នាសច្ឆិទ្ទំ មុខទ្វារំ យេន ច អសិតបីតខាយិតសាយិតំ អជ្ឈោហរតិ យត្ថ ច អសិតបីតខាយិតសាយិតំ សន្តិដ្ឋតិ យេន ច អសិតបីតខាយិតសាយិតំ អធោភាគំ និក្ខមតិ យំ វា បនញ្ញម្បិ អត្ថិ អជ្ឈត្តំ បច្ចត្តំ អាកាសោ អាកាសគតំ អឃំ អឃគតំ វិវរោ វិវរគតំ អសម្ផុដ្ឋំ មំសលោហិតេហិ អជ្ឈត្តំ ឧបាទិន្នំ អយំ វុច្ចតិ អជ្ឈត្តិកា អាកាសធាតុ ។ តត្ថ កតមា ពាហិរា អាកាសធាតុ ។ យំ ពាហិរំ អាកាសោ អាកាសគតំ អឃំ អឃគតំ វិវរោ វិវរគតំ អសម្ផុដ្ឋំ ចតូហិ មហាភូតេហិ ពហិទ្ធា អនុបាទិន្នំ អយំ វុច្ចតិ ពាហិរា អាកាសធាតុ ។ យា ច អជ្ឈត្តិកា អាកាសធាតុ យា ច ពាហិរា អាកាសធាតុ តទេកជ្ឈំ អភិសញ្ញូហិត្វា អភិសង្ខិបិត្វា អយំ វុច្ចតិ អាកាសធាតុ ។



ដែលវិញ្ញាណចូលទៅកាន់យកបាន គឺ រន្ធត្រចៀក រន្ធច្រមុះ ទ្វារមាត់ អាកាសដែលឲ្យលេបចូល នូវវត្ថុដែលគេស៊ី ផឹក ទំពា លិទ្ធភក្សហើយក្តី អាកាសដែលឲ្យនៅ ដែលគេស៊ី ផឹក ទំពា លិទ្ធភក្សហើយក្តី អាកាសដែលឲ្យនៅ ដែលគេស៊ី ផឹក ទំពា លិទ្ធភក្សហើយ ចេញមកតាមចំណែកខាងក្រោមក្តី ឬគឺ ធម្មជាតដទៃណា ជាខាងក្នុង អាស្រ័យនូវខ្លួន ជាសភាពទទេ ដល់នូវភាពទទេ ជាធម្មជាតចំហ ដល់នូវភាពចំហ ជាសភាពចន្លោះ ដល់នូវភាពចន្លោះ មិនប៉ះពាល់ដោយសាច់និងឈាម ជាខាងក្នុង ដែលវិញ្ញាណចូលទៅកាន់យកបាន នេះហៅថា អាកាសធាតុខាងក្នុង ។ បណ្តាធាតុ ២ នោះ អាកាសធាតុខាងក្រៅ តើដូចម្តេច ។ ធម្មជាតណា ជាខាងក្រៅ ជាសភាពទទេ ដល់នូវភាពទទេ ជាធម្មជាតចំហ ដល់នូវភាពចំហ ជាសភាពចន្លោះ ដល់នូវភាពចន្លោះ មិនប៉ះពាល់ដោយមហាភូតរូប ៤ ជាខាងក្រៅ ដែលវិញ្ញាណមិនចូលទៅកាន់យកបាន នេះហៅថា អាកាសធាតុខាងក្រៅ ។ អាកាសធាតុណា ខាងក្នុងក្តី អាកាសធាតុណា ជាខាងក្រៅក្តី នេះហៅថា អាកាសធាតុ ព្រោះប្រមូលបំប្រួញធាតុនោះ ក្នុងទីជាមួយគ្នា ។

(១៦០) តត្ថ កតមា វិញ្ញាណធាតុ ។ ចក្ខុវិញ្ញាណធាតុ សោតវិញ្ញាណធាតុ ឃានវិញ្ញាណធាតុ ជិវ្ហាវិញ្ញាណធាតុ កាយវិញ្ញាណធាតុ មនោវិញ្ញាណធាតុ អយំ វុច្ចតិ វិញ្ញាណធាតុ ។

ឥមា ឆ ធាតុយោ ។

(១៦១) អបរាបិ ឆ ធាតុយោ សុខធាតុ ទុក្ខធាតុ សោមនស្សធាតុ ទោមនស្សធាតុ ឧបេក្ខាធាតុ អវិជ្ជាធាតុ ។ តត្ថ កតមា សុខធាតុ ។ យំ កាយិកំ សាតំ កាយិកំ សុខំ កាយសម្ផស្សជំ សាតំ សុខំ វេទយិតំ កាយសម្ផស្សជា សាតា សុខា វេទនា អយំ វុច្ចតិ សុខធាតុ ។ តត្ថ កតមា ទុក្ខធាតុ ។ យំ កាយិកំ អសាតំ កាយិកំ ទុក្ខំ កាយសម្ផស្សជំ អសាតំ ទុក្ខំ វេទយិតំ កាយសម្ផស្សជា អសាតា ទុក្ខា វេទនា អយំ វុច្ចតិ ទុក្ខធាតុ ។ តត្ថ កតមា សោមនស្សធាតុ ។ យំ ចេតសិកំ សាតំ



(១៦០) បណ្ដាធាតុ ៦ នោះ វិញ្ញាណធាតុ តើដូចម្ដេច ។ ធាតុគឺការដឹងច្បាស់ ដោយចក្ខុ ធាតុគឺការដឹងច្បាស់ ដោយត្រចៀក ធាតុគឺការដឹងច្បាស់ ដោយច្រមុះ ធាតុគឺការដឹងច្បាស់ ដោយអណ្ដាត ធាតុគឺការដឹងច្បាស់ ដោយកាយ ធាតុគឺការដឹងច្បាស់ ដោយចិត្ត នេះហៅថាវិញ្ញាណធាតុ ។

នេះធាតុ ៦ ។

(១៦១) ធាតុ ៦ ដទៃទៀត គឺ សុខធាតុ ទុក្ខធាតុ សោមនស្សធាតុ ទោមនស្សធាតុ ឧបេក្ខាធាតុ អវិជ្ជាធាតុ ។ បណ្ដាធាតុ ៦ នោះ សុខធាតុ តើដូចម្ដេច ។ សេចក្ដីឆ្ងាញ់ពិសា ប្រព្រឹត្តទៅក្នុងកាយ សេចក្ដីសុខ ប្រព្រឹត្តទៅក្នុងកាយ ការទទួលអារម្មណ៍ជាសុខ ជាទីគាប់ចិត្ត ដែលកើតអំពីកាយសម្ផ័ស្ស សុខវេទនា ជាទីគាប់ចិត្ត ដែលកើតអំពីកាយសម្ផ័ស្ស ណា នេះហៅថា សុខធាតុ ។ បណ្ដាធាតុ ៦ នោះ ទុក្ខធាតុ តើដូចម្ដេច ។ សេចក្ដីមិនឆ្ងាញ់ពិសា ប្រព្រឹត្តទៅក្នុងកាយ សេចក្ដីទុក្ខ ប្រព្រឹត្តទៅក្នុងកាយ ការទទួលអារម្មណ៍ជាទុក្ខ មិនជាទីគាប់ចិត្ត ដែលកើតអំពីកាយសម្ផ័ស្ស ទុក្ខវេទនា មិនជាទីគាប់ចិត្ត ដែលកើតអំពីកាយសម្ផ័ស្ស ណា នេះហៅថា ទុក្ខធាតុ ។ បណ្ដាធាតុ ៦ នោះ សោមនស្សធាតុ តើដូចម្ដេច ។ សេចក្ដីឆ្ងាញ់ពិសា ប្រព្រឹត្តទៅក្នុងចិត្ត

ចេតសិកំ សុខំ ចេតោសម្ផស្សជំ សាតំ សុខំ វេទយិតំ ចេតោសម្ផស្សជា សាតា សុខា វេទនា អយំ វុច្ចតិ សោមនស្សធាតុ ។ តត្ថ កតមា ទោមនស្សធាតុ ។ យំ ចេតសិកំ អសាតំ ចេតសិកំ ទុក្ខំ ចេតោសម្ផស្សជំ អសាតំ ទុក្ខំ វេទយិតំ ចេតោសម្ផស្សជា អសាតា ទុក្ខា វេទនា អយំ វុច្ចតិ ទោមនស្សធាតុ ។ តត្ថ កតមា ឧបេក្ខាធាតុ ។ យំ ចេតសិកំ នេវសាតំ នាសាតំ ចេតោសម្ផស្សជំ អទុក្ខមសុខំ វេទយិតំ ចេតោសម្ផស្សជា អទុក្ខមសុខា វេទនា អយំ វុច្ចតិ ឧបេក្ខាធាតុ ។ តត្ថ កតមា អវិជ្ជាធាតុ ។ យំ អញ្ញាណំ អទស្សនំ ។បេ។ អវិជ្ជាលង្គី មោហោ អកុសលមូលំ អយំ វុច្ចតិ អវិជ្ជាធាតុ ។

ឥមា ឆ ធាតុយោ ។



សេចក្តីសុខ ប្រព្រឹត្តទៅក្នុងចិត្ត គឺការទទួលអារម្មណ៍ជាសុខ ជាទីគាប់ចិត្ត ដែលកើតអំពីចេតោសម្ផស្ស សុខវេទនា ជាទីគាប់ចិត្ត ដែលកើតអំពីចេតោសម្ផស្ស ណា នេះហៅថា សោមនស្សធាតុ ។ បណ្តាធាតុ ៦ នោះ ទោមនស្សធាតុ តើដូចម្តេច ។ សេចក្តីមិនឆ្ងាញ់ពិសា ប្រព្រឹត្តទៅក្នុងចិត្ត សេចក្តីទុក្ខ ប្រព្រឹត្តទៅក្នុងចិត្ត គឺការទទួលអារម្មណ៍ជាទុក្ខ មិនជាទីគាប់ចិត្ត ដែលកើតអំពីចេតោសម្ផស្ស ទុក្ខវេទនា មិនជាទីគាប់ចិត្ត ដែលកើតអំពីចេតោសម្ផស្ស ណា នេះហៅថា ទោមនស្សធាតុ ។ បណ្តាធាតុ ៦ នោះ ឧបេក្ខាធាតុ តើដូចម្តេច ។ សេចក្តីមិនឆ្ងាញ់ពិសា មិនមែនជាមិនឆ្ងាញ់ពិសា ប្រព្រឹត្តទៅក្នុងចិត្ត គឺការទទួលអារម្មណ៍ មិនមែនទុក្ខមិនមែនសុខ ដែលកើតអំពីចេតោសម្ផស្ស វេទនាមិនមែនទុក្ខមិនមែនសុខ ដែលកើតអំពីចេតោសម្ផស្ស ណា នេះហៅថា ឧបេក្ខាធាតុ ។ បណ្តាធាតុ ៦ នោះ អវិជ្ជាធាតុ តើដូចម្តេច ។ ការមិនដឹង ការមិនឃើញ ។បេ។ អវិជ្ជាដូចគន្លឹះ គឺមោហៈ ជាឫសនៃអកុសល ណា នេះហៅថា អវិជ្ជាធាតុ ។

នេះធាតុ ៦ ។

(១៦៦) អបរេបិ ឆ ធាតុយោ កាមធាតុ ព្យាបាទធាតុ វិហឹសាធាតុ នេក្ខម្មធាតុ អព្យាបាទធាតុ អវិហឹសាធាតុ ។ តត្ថ កតមា កាមធាតុ ។ កាមបដិសំយុត្តោ តក្កោ វិតក្កោ សង្កប្បោ អប្បនា ព្យប្បនា ចេតសោ អភិនិរោបនា មិច្ឆាសង្កប្បោ អយំ វុច្ចតិ កាមធាតុ ។ ហេដ្ឋតោ អវីចិនិរយំ បរិយន្តំ ករិត្វា ឧបរិតោ បរនិម្មិតវសវត្តី ទេវេ អន្តោ ករិត្វា យំ ឯតស្មឹ អន្តរេ ឯត្ថាវចរា ឯត្ថ បរិយាបន្នា ខន្ធធាតុអាយតនា រូបំ វេទនា សញ្ញា សង្ខារា វិញ្ញាណំ អយំ វុច្ចតិ កាមធាតុ ។ តត្ថ កតមា ព្យាបាទធាតុ ។ ព្យាបាទបដិសំយុត្តោ តក្កោ វិតក្កោ ។ បេ ។ មិច្ឆាសង្កប្បោ អយំ វុច្ចតិ ព្យាបាទធាតុ ។ ទសសុ វា អាឃាតវត្ថូសុ ចិត្តស្ស អាឃាតោ បដិឃាតោ បដិឃំ បដិវិរោធោ កោបោ បកោបោ សម្បកោបោ ទោសោ បទោសោ សម្បទោសោ ចិត្តស្ស ព្យាបត្តិ



(១៦៦) ធាតុ ៦ ដទៃទៀត គឺ កាមធាតុ ព្យាបាទធាតុ វិហឹសាធាតុ នេក្ខម្មធាតុ អព្យាបាទធាតុ អវិហឹសាធាតុ ។ បណ្តាធាតុ ៦ នោះ កាមធាតុ តើដូចម្តេច ។ សេចក្តីត្រិះរិះ ការត្រិះរិះផ្សេងៗ តម្រិះ ការរំពឹង ការផ្ចង់ ការលើកឡើងនូវចិត្ត ដែលប្រកបដោយកាម គឺមិច្ឆាសង្កប្បៈ នេះហៅថា កាមធាតុ ។ ខាងក្រោម តាំងអំពីអវិចិនរកជាទីបំផុត ខាងលើ តាំងអំពីបរនិម្មិតវសវត្តីទេវតាជាទីបំផុត ខន្ធ ធាតុ អាយតនៈ រូប វេទនា សញ្ញា សង្ខារ និងវិញ្ញាណ ណា មានក្នុងចន្លោះនេះ ត្រាច់ចុះក្នុងចន្លោះនេះ រាប់បញ្ចូលក្នុងចន្លោះនេះ នេះហៅថា កាមធាតុ ។ បណ្តាធាតុ ៦ នោះ ព្យាបាទធាតុ តើដូចម្តេច ។ សេចក្តីត្រិះរិះ ការត្រិះរិះផ្សេងៗ ។ បេ ។ ដែលប្រកបដោយព្យាបាទ គឺមិច្ឆាសង្កប្បៈ នេះហៅថា ព្យាបាទធាតុ ។ មួយទៀត សេចក្តីគុំគួន ការចៀតចង្អល់ ការគាំងគឹង ការតាំងប៉ាក់ ការខឹង ការខឹងខ្លាំង ការខឹងក្រៃលែង ការប្រទូស្ត ការប្រទូស្តខ្លាំង ការប្រទូស្តក្រៃលែងនៃចិត្ត ការព្យាបាទនៃចិត្ត

មនោបទោសោ កោធោ កុជ្ឈនា កុជ្ឈិតត្តំ ទោសោ ទុស្សនា ទុស្សិតត្តំ ព្យាបត្តិ ព្យាបជ្ជនា ព្យាបជ្ជិតត្តំ វិរោធោ បដិវិរោធោ ចណ្ឌិក្កំ អសុរោបោ អនត្តមនតា ចិត្តស្ស អយំ វុច្ចតិ ព្យាបាទធាតុ ។ តត្ថ កតមា វិហឹសាធាតុ ។ វិហឹសាបដិសំយុត្តោ តក្កោ វិតក្កោ ។បេ។ មិច្ឆាសង្កប្បោ អយំ វុច្ចតិ វិហឹសាធាតុ ។ ឥធេកច្ចោ បាណិនា វា លេឌ្ឌុនា វា ទណ្ឌេន វា សត្ថេន វា រជ្ជុយា វា អញ្ញតរញ្ញតរេន សត្តេ វិហេឋេតិ យា ឯវរូបា ហេឋនា វិហេឋនា ហឹសនា វិហឹសនា រោសនា វិរោសនា បរូបឃាតោ អយំ វុច្ចតិ វិហឹសាធាតុ ។ តត្ថ កតមា នេក្ខម្មធាតុ ។ នេក្ខម្មប្បដិសំយុត្តោ តក្កោ វិតក្កោ ។បេ។ សម្មាសង្កប្បោ អយំ វុច្ចតិ នេក្ខម្មធាតុ ។ សព្វេបិ កុសលា ធម្មា នេក្ខម្មធាតុ ។ តត្ថ កតមា អព្យាបាទធាតុ ។ អព្យាបាទប្បដិសំយុត្តោ តក្កោ វិតក្កោ ។បេ។ សម្មាសង្កប្បោ អយំ វុច្ចតិ អព្យាបាទធាតុ ។



ការប្រទូស្តចិត្ត ការក្រោធ អាការក្រោធ ភាពនៃការក្រោធ ការប្រទូស្ត អាការប្រទូស្ត ភាពនៃការប្រទូស្ត ការព្យាបាទ អាការព្យាបាទ ភាពនៃការព្យាបាទ ការពិរោធ ការពិរោធខ្លាំង កំណាច ការមិនពោលពាក្យល្អ ភាពនៃចិត្តមិនត្រេកអរ គឺអាឃាតវត្ថុ ១០ នេះហៅថា ព្យាបាទធាតុ ។ បណ្ដាធាតុ ៦ នោះ វិហឹសាធាតុ តើដូចម្តេច ។ សេចក្តីត្រិះរិះ ការត្រិះរិះរឿយៗ ។បេ។ ដែលប្រកបដោយវិហឹសា គឺមិច្ឆាសង្កប្បៈ នេះហៅថា វិហឹសាធាតុ ។ បុគ្គលពួកខ្លះ ក្នុងលោកនេះ បៀតបៀនពួកសត្វ ដោយដៃក្តី ដោយដុំដីក្តី ដោយដំបងក្តី ដោយសស្ត្រាក្តី ដោយខ្សែក្តី ឬដោយវត្ថុណាមួយក្តី ការធ្វើឲ្យលំបាក ការធ្វើឲ្យលំបាកខ្លាំង ការបៀតបៀន ការបៀតបៀនខ្លាំង ការខឹង ការខឹងខ្លាំង ការបៀតបៀនសត្វដទៃ នេះហៅថា វិហឹសាធាតុ ។ បណ្ដាធាតុ ៦ នោះ នេក្ខម្មធាតុ តើដូចម្តេច ។ សេចក្តីត្រិះរិះ ការត្រិះរិះរឿយៗ ។បេ។ គម្រិះត្រូវ ដែលប្រកបដោយនេក្ខម្មៈ គឺសម្មាសង្កប្បៈ នេះហៅថា នេក្ខម្មធាតុ ។ មួយទៀត កុសលធម៌ទាំងអស់ ក៏ឈ្មោះថា នេក្ខម្មធាតុដែរ ។ បណ្ដាធាតុ ៦ នោះ អព្យាបាទធាតុ តើដូចម្តេច ។ សេចក្តីត្រិះរិះ ការត្រិះរិះរឿយៗ ។បេ។ ដែលប្រកបដោយអព្យាបាទ គឺសម្មាសង្កប្បៈ នេះហៅថា អព្យាបាទធាតុ ។ ការ

យា សត្តេសុ មេត្តិ មេត្តាយនា មេត្តាយិតត្តំ មេត្តាចេតោវិមុត្តិ អយំ វុច្ចតិ អព្យាបាទធាតុ ។ តត្ថ កតមា អវិហឹសាធាតុ ។ អវិហឹសាបដិសំយុត្តោ តក្កោ វិតក្កោ សង្កប្បោ អប្បនា ព្យប្បនា ចេតសោ អភិនិរោបនា សម្មាសង្កប្បោ អយំ វុច្ចតិ អវិហឹសាធាតុ ។ យា សត្តេសុ ករុណា ករុណាយនា ករុណាយិតត្តំ ករុណាចេតោវិមុត្តិ អយំ វុច្ចតិ អវិហឹសាធាតុ ។

ឥមា ឆ ធាតុយោ ។

(១៦៣) ឥតិ ឥមានិ តីណិ ឆក្កានិ តទេកជ្ឈំ អភិសញ្ញូហិត្វា អភិសង្ខិបិត្វា អដ្ឋារសធាតុយោ ហោន្តិ ។

សុត្តន្តភាជនីយំ ។

(១៦៤) អដ្ឋារស ធាតុយោ ចក្ខុធាតុ រូបធាតុ ចក្ខុវិញ្ញាណធាតុ សោតធាតុ សទ្ទធាតុ សោតវិញ្ញាណធាតុ ឃានធាតុ គន្ធធាតុ ឃានវិញ្ញាណធាតុ ជិវ្ហាធាតុ រសធាតុ ជិវ្ហាវិញ្ញាណធាតុ កាយធាតុ ផោដ្ឋព្វធាតុ កាយវិញ្ញាណធាតុ មនោធាតុ ធម្មធាតុ មនោវិញ្ញាណធាតុ ។



ស្រឡាញ់ អាការប្រព្រឹត្តស្រឡាញ់ ភាពនៃអាការប្រព្រឹត្តស្រឡាញ់ គឺមេត្តាចេតោវិមុត្តិ ណា ក្នុងពួកសត្វ នេះហៅថា អព្យាបាទធាតុ ។ បណ្ដាធាតុ ៦ នោះ អវិហឹសាធាតុ តើដូចម្ដេច ។ សេចក្ដីត្រិះរិះ ការត្រិះរិះផ្សេង ១ តម្រិះ ការតើង ការដញ្ឈឹង ការលើកឡើងនូវចិត្ត ដែលប្រកបដោយអវិហឹសា គឺសម្មាសង្កប្បៈ នេះហៅថា អវិហឹសាធាតុ ។ ការអាណិត អាការប្រព្រឹត្តអាណិត ភាពនៃអាការប្រព្រឹត្តអាណិត គឺករុណាចេតោវិមុត្តិ ណា ក្នុងសត្វទាំងឡាយ នេះហៅថា អវិហឹសាធាតុ ។

នេះធាតុ ៦ ។

(១៦៣) ពួកធាតុ ៦ បីជាន់នេះ រួមជាធាតុ ១៨ ព្រោះប្រមូលបំប្រួញធាតុទាំងនោះ ក្នុងទីជាមួយគ្នា ដោយប្រការដូច្នេះ ។

ចប់ សុត្តន្តភាជនីយ ។

(១៦៤) ធាតុ ១៨ គឺ ចក្ខុធាតុ រូបធាតុ ចក្ខុវិញ្ញាណធាតុ សោតធាតុ សទ្ទធាតុ សោតវិញ្ញាណធាតុ ឃានធាតុ គន្ធធាតុ ឃានវិញ្ញាណធាតុ ជិវ្ហាធាតុ រសធាតុ ជិវ្ហាវិញ្ញាណធាតុ កាយធាតុ ផោដ្ឋព្វធាតុ កាយវិញ្ញាណធាតុ មនោធាតុ ធម្មធាតុ មនោវិញ្ញាណធាតុ ។

(១៦៥) តត្ថ កតមា ចក្ខុធាតុ ។ យំ ចក្ខុំ ចតុន្នំ មហាភូតានំ ឧបាទាយ បសាទោ ។បេ។ សុញ្ញោ គាមោបេសោ អយំ វុច្ចតិ ចក្ខុធាតុ ។ តត្ថ កតមា រូបធាតុ ។ យំ រូបំ ចតុន្នំ មហាភូតានំ ឧបាទាយ វណ្ណនិភា ។បេ។ រូបធាតុបេសា អយំ វុច្ចតិ រូបធាតុ ។ តត្ថ កតមា ចក្ខុវិញ្ញាណធាតុ ។ ចក្ខុញ្ច បដិច្ច រូបេ ច ឧប្បជ្ជតិ ចិត្តំ មនោ មានសំ ហទយំ បណ្ឌរំ មនោ មនាយតនំ មនិន្ទ្រិយំ វិញ្ញាណំ វិញ្ញាណក្ខន្ធោ តជ្ជា ចក្ខុវិញ្ញាណធាតុ អយំ វុច្ចតិ ចក្ខុវិញ្ញាណធាតុ ។

(១៦៦) តត្ថ កតមា សោតធាតុ ។ យំ សោតំ ចតុន្នំ មហាភូតានំ ឧបាទាយ បសាទោ ។បេ។ សុញ្ញោ គាមោបេសោ អយំ វុច្ចតិ សោតធាតុ ។ តត្ថ កតមា សទ្ទធាតុ ។ យោ សទ្ទោ ចតុន្នំ មហាភូតានំ ឧបាទាយ អនិទស្សនោ សប្បដិឃោ ។បេ។ សទ្ទធាតុបេសា អយំ វុច្ចតិ សទ្ទធាតុ ។





(១៦៥) បណ្ដាធាតុ ១៨ នោះ ចក្ខុធាតុ តើដូចម្ដេច ។ ចក្ខុណា គឺប្រសាទ អាស្រ័យមហាភូត ៤ ។បេ។ ហៅថាស្រុកទទេក៏បាន នេះហៅថា ចក្ខុធាតុ ។ បណ្ដាធាតុ ១៨ នោះ រូបធាតុ តើដូចម្ដេច ។ រូបណា គឺ សម្បុរនិងពន្លឺ អាស្រ័យមហាភូត ៤ ។បេ។ ហៅថារូបធាតុក៏បាន នេះហៅថា រូបធាតុ ។ បណ្ដាធាតុ ១៨ នោះ ចក្ខុវិញ្ញាណធាតុ តើដូចម្ដេច ។ សេចក្ដីគិត សេចក្ដីដឹងអារម្មណ៍ សេចក្ដីប្រាជ្ញា ហឫទ័យ ធម្មជាតដ៏ផូរស្អាត គឺ មនោ មនាយតនៈ មនិន្ទ្រិយ វិញ្ញាណ វិញ្ញាណក្ខន្ធ ចក្ខុវិញ្ញាណធាតុ ដែលកើតអំពីខន្ធនោះ កើតព្រោះអាស្រ័យនូវចក្ខុផង នូវរូបទាំងឡាយផង នេះហៅថា ចក្ខុវិញ្ញាណធាតុ ។

(១៦៦) បណ្ដាធាតុ ១៨ នោះ សោតធាតុ តើដូចម្ដេច ។ ត្រចៀកណា គឺប្រសាទ អាស្រ័យមហាភូត ៤ ។បេ។ ហៅថាស្រុកទទេក៏បាន នេះហៅថា សោតធាតុ ។ បណ្ដាធាតុ ១៨ នោះ សទ្ទធាតុ តើដូចម្ដេច ។ សំឡេងណា មិនប្រកបដោយការឃើញ តែប្រកបដោយការប៉ះពាល់ អាស្រ័យមហាភូត ៤ ។បេ។ ហៅថាសទ្ទធាតុក៏បាន នេះហៅថា សទ្ទធាតុ ។

តត្ថ កតមា សោតវិញ្ញាណធាតុ ។ សោតញ្ច បដិច្ច សទ្ទេ ច ឧប្បជ្ជតិ ចិត្តំ មនោ មានសំ ហទយំ បណ្ឌរំ មនោ មនាយតនំ មនិន្ទ្រិយំ វិញ្ញាណំ វិញ្ញាណក្ខន្ធោ តជ្ជា សោតវិញ្ញាណធាតុ អយំ វុច្ចតិ សោតវិញ្ញាណធាតុ ។

(១៦៧) តត្ថ កតមា ឃានធាតុ ។ យំ ឃានំ ចតុន្នំ មហាភូតានំ ឧបាទាយ បសាទោ ។បេ។ សុញ្ញោ គាមោបេសោ អយំ វុច្ចតិ ឃានធាតុ ។ តត្ថ កតមា គន្ធធាតុ ។ យោ គន្ធោ ចតុន្នំ មហាភូតានំ ឧបាទាយ អនិទស្សនោ សប្បដិឃោ ។បេ។ គន្ធធាតុបេសា អយំ វុច្ចតិ គន្ធធាតុ ។ តត្ថ កតមា ឃានវិញ្ញាណធាតុ ។ ឃានញ្ច បដិច្ច គន្ធេ ច ឧប្បជ្ជតិ ចិត្តំ មនោ មានសំ ហទយំ បណ្ឌរំ មនោ មនាយតនំ មនិន្ទ្រិយំ វិញ្ញាណំ វិញ្ញាណក្ខន្ធោ តជ្ជា ឃានវិញ្ញាណធាតុ អយំ វុច្ចតិ ឃានវិញ្ញាណធាតុ ។

(១៦៨) តត្ថ កតមា ជិវ្ហាធាតុ ។ យា ជិវ្ហា ចតុន្នំ មហាភូតានំ ឧបាទាយ បសាទោ ។បេ។





បណ្ដាធាតុ ១៨ នោះ សោតវិញ្ញាណធាតុ តើដូចម្ដេច ។ សេចក្ដីគិត សេចក្ដីដឹងអារម្មណ៍ សេចក្ដីប្រាជ្ញា ហឫទ័យ ធម្មជាតដ៏ថ្លាស្អាត គឺ មនោ មនាយតនៈ មនិន្ទ្រិយ វិញ្ញាណ វិញ្ញាណក្ខន្ធ សោតវិញ្ញាណធាតុ ដែលកើតអំពីខន្ធនោះ កើតព្រោះអាស្រ័យនូវត្រចៀកផង នូវសំឡេងទាំងឡាយផង នេះហៅថា សោតវិញ្ញាណធាតុ ។

(១៦៧) បណ្ដាធាតុ ១៨ នោះ ឃានធាតុ តើដូចម្ដេច ។ ច្រមុះណា គឺប្រសាទ អាស្រ័យមហាភូត ៤ ។បេ។ ហៅថាស្រុកទទេរក៏បាន នេះហៅថា ឃានធាតុ ។ បណ្ដាធាតុ ១៨ នោះ គន្ធធាតុ តើដូចម្ដេច ។ ក្លិនណា មិនប្រកបដោយការឃើញ តែប្រកបដោយការប៉ះពាល់ អាស្រ័យមហាភូត ៤ ។បេ។ ហៅថាគន្ធធាតុក៏បាន នេះហៅថា គន្ធធាតុ ។ បណ្ដាធាតុ ១៨ នោះ ឃានវិញ្ញាណធាតុ តើដូចម្ដេច ។ សេចក្ដីគិត សេចក្ដីដឹងអារម្មណ៍ សេចក្ដីប្រាជ្ញា ហឫទ័យ ធម្មជាតដ៏ថ្លាស្អាត គឺ មនោ មនាយតនៈ មនិន្ទ្រិយ វិញ្ញាណ វិញ្ញាណក្ខន្ធ ឃានវិញ្ញាណធាតុ ដែលកើតអំពីខន្ធនោះ កើតព្រោះអាស្រ័យនូវច្រមុះផង នូវក្លិនទាំងឡាយផង នេះហៅថា ឃានវិញ្ញាណធាតុ ។

(១៦៨) បណ្ដាធាតុ ១៨ នោះ ជិវ្ហាធាតុ តើដូចម្ដេច ។ អណ្ដាតណា គឺប្រសាទ អាស្រ័យមហាភូត ៤ ។បេ។ ហៅថា

សុញ្ញោ គាមោបេសោ អយំ វុច្ចតិ ជិវ្ហាធាតុ ។ តត្ថ កតមា រសធាតុ ។ យោ រសោ ចតុន្នំ មហាភូតានំ ឧបាទាយ អនិទស្សនោ សប្បដិឃោ ។បេ។ រសធាតុបេសា អយំ វុច្ចតិ រសធាតុ ។ តត្ថ កតមា ជិវ្ហាវិញ្ញាណធាតុ ។ ជិវ្ហញ្ច បដិច្ច រសេ ច ឧប្បជ្ជតិ ចិត្តំ មនោ មានសំ ហទយំ បណ្ឌរំ មនោ មនាយតនំ មនិន្ទ្រិយំ វិញ្ញាណំ វិញ្ញាណក្ខន្ធោ តជ្ជា ជិវ្ហាវិញ្ញាណធាតុ អយំ វុច្ចតិ ជិវ្ហាវិញ្ញាណធាតុ ។

(១៦៩) តត្ថ កតមា កាយធាតុ ។ យោ កាយោ ចតុន្នំ មហាភូតានំ ឧបាទាយ បសាទោ ។បេ។ សុញ្ញោ គាមោបេសោ អយំ វុច្ចតិ កាយធាតុ ។ តត្ថ កតមា ផោដ្ឋព្វធាតុ ។ បឋវីធាតុ ។បេ។ ផោដ្ឋព្វធាតុបេសា អយំ វុច្ចតិ ផោដ្ឋព្វធាតុ ។ តត្ថ កតមា កាយវិញ្ញាណធាតុ ។ កាយញ្ច បដិច្ច ផោដ្ឋព្វេ ច ឧប្បជ្ជតិ ចិត្តំ មនោ មានសំ ហទយំ បណ្ឌរំ មនោ មនាយតនំ មនិន្ទ្រិយំ វិញ្ញាណំ វិញ្ញាណក្ខន្ធោ តជ្ជា កាយវិញ្ញាណធាតុ អយំ វុច្ចតិ កាយវិញ្ញាណធាតុ ។



ស្រុកទំនេរក៏បាន នេះហៅថា ជិវ្ហាធាតុ ។ បណ្ដាធាតុ ១៨ នោះ រសធាតុ តើដូចម្ដេច ។ រសណា មិនប្រកបដោយការឃើញ តែប្រកបដោយការប៉ះពាល់ អាស្រ័យមហាភូត ៤ ។បេ។ ហៅថារសធាតុក៏បាន នេះហៅថា រសធាតុ ។ បណ្ដាធាតុ ១៨ នោះ ជិវ្ហាវិញ្ញាណធាតុ តើដូចម្ដេច ។ សេចក្ដីគិត សេចក្ដីដឹងអារម្មណ៍ សេចក្ដីប្រាថ្នា ហឫទ័យ ធម្មជាតដ៏ថ្លាស្អាត គឺ មនោ មនាយតនៈ មនិន្ទ្រិយ វិញ្ញាណ វិញ្ញាណក្ខន្ធ ជិវ្ហាវិញ្ញាណធាតុ ដ៏កើតអំពីខន្ធនោះ កើតព្រោះអាស្រ័យនូវអណ្ដាតផង នូវរសទាំងឡាយផង នេះហៅថា ជិវ្ហាវិញ្ញាណធាតុ ។

(១៦៩) បណ្ដាធាតុ ១៨ នោះ កាយធាតុ តើដូចម្ដេច ។ កាយណា គឺប្រសាទ អាស្រ័យមហាភូត ៤ ។បេ។ ហៅថាស្រុកទំនេរក៏បាន នេះហៅថា កាយធាតុ ។ បណ្ដាធាតុ ១៨ នោះ ផោដ្ឋព្វធាតុ តើដូចម្ដេច ។ បឋវីធាតុ ។បេ។ ហៅថាផោដ្ឋព្វធាតុក៏បាន នេះហៅថា ផោដ្ឋព្វធាតុ ។ បណ្ដាធាតុ ១៨ នោះ កាយវិញ្ញាណធាតុ តើដូចម្ដេច ។ សេចក្ដីគិត សេចក្ដីដឹងអារម្មណ៍ សេចក្ដីប្រាថ្នា ហឫទ័យ ធម្មជាតដ៏ថ្លាស្អាត គឺ មនោ មនាយតនៈ មនិន្ទ្រិយ វិញ្ញាណ វិញ្ញាណក្ខន្ធ កាយវិញ្ញាណធាតុ ដែលកើតអំពីខន្ធនោះ កើតព្រោះអាស្រ័យនូវកាយផង នូវផស្សៈទាំងឡាយផង នេះហៅថា កាយវិញ្ញាណធាតុ ។

[១៣០] តត្ថ កតមា មនោធាតុ ។ ចក្ខុវិញ្ញាណធាតុយា ឧប្បជ្ជិត្វា និរុទ្ធសមនន្តរា ឧប្បជ្ជតិ ចិត្តំ មនោ មានសំ ហទយំ បណ្ឌរំ មនោ មនាយតនំ មនិន្ទ្រិយំ វិញ្ញាណំ វិញ្ញាណក្ខន្ធោ តជ្ជា មនោធាតុ សោតវិញ្ញាណធាតុយា ។ បេ ។ ឃានវិញ្ញាណធាតុយា ។ បេ ។ ជិវ្ហាវិញ្ញាណធាតុយា ។ បេ ។ កាយវិញ្ញាណធាតុយា ឧប្បជ្ជិត្វា និរុទ្ធសមនន្តរា ឧប្បជ្ជតិ ចិត្តំ មនោ មានសំ ហទយំ បណ្ឌរំ មនោ មនាយតនំ មនិន្ទ្រិយំ វិញ្ញាណំ វិញ្ញាណក្ខន្ធោ តជ្ជា មនោធាតុ សព្វធម្មេសុ វា បន បឋមសមន្នាហារោ អយំ វុច្ចតិ មនោធាតុ ។ តត្ថ កតមា ធម្មធាតុ ។ វេទនាក្ខន្ធោ សញ្ញាក្ខន្ធោ សង្ខារក្ខន្ធោ យញ្ច រូបំ អនិទស្សនំ អប្បដិឃំ ធម្មាយតនបរិយាបន្នំ អសង្ខតា ច ធាតុ ។ តត្ថ កតមោ វេទនាក្ខន្ធោ ។ ឯកវិធេន វេទនាក្ខន្ធោ ផស្សសម្បយុត្តោ ។ ទុវិធេន វេទនាក្ខន្ធោ អត្ថិ សហេតុកោ អត្ថិ អហេតុកោ ។ តិវិធេន វេទនាក្ខន្ធោ អត្ថិ កុសលោ



[១៣០] បណ្ដាធាតុ ១៨ នោះ មនោធាតុ តើដូចម្ដេច ។ សេចក្ដីគិត សេចក្ដីដឹងអារម្មណ៍ សេចក្ដីប្រាជ្ញា ហឫទ័យ ធម្មជាតដ៏ថ្លាស្អាត គឺមនោ មនាយតនៈ មនិន្ទ្រិយ វិញ្ញាណ វិញ្ញាណក្ខន្ធ មនោធាតុ ដែលកើតអំពីខន្ធនោះ កើតឡើងក្នុងលំដាប់នៃចក្ខុវិញ្ញាណធាតុ ដែលកើតហើយរលត់ទៅវិញ សេចក្ដីគិត សេចក្ដីដឹងអារម្មណ៍ សេចក្ដីប្រាជ្ញា ហឫទ័យ ធម្មជាតដ៏ថ្លាស្អាត គឺ មនោ មនាយតនៈ មនិន្ទ្រិយ វិញ្ញាណ វិញ្ញាណក្ខន្ធ មនោធាតុ ដែលកើតអំពីខន្ធនោះ កើតឡើងក្នុងលំដាប់ នៃសោតវិញ្ញាណធាតុ ។ បេ ។ នៃឃានវិញ្ញាណធាតុ ។ បេ ។ នៃជិវ្ហាវិញ្ញាណធាតុ ។ បេ ។ នៃកាយវិញ្ញាណធាតុ ដែលកើតហើយរលត់ទៅវិញ មួយទៀត ការពិចារណាជាដំបូង ក្នុងធម៌ទាំងពួង នេះហៅថា មនោធាតុ ។ បណ្ដាធាតុ ១៨ នោះ ធម្មធាតុ តើដូចម្ដេច ។ វេទនាខន្ធ សញ្ញាខន្ធ សង្ខារខន្ធ និងរូប ណា មិនប្រកបដោយការឃើញ មិនប្រកបដោយការប៉ះពាល់ រាប់បញ្ចូលក្នុងធម្មាយតនៈ ទាំងអសង្ខតធាតុ (នេះហៅថា ធម្មធាតុ) ។ បណ្ដាខន្ធ ៤ នោះ វេទនាខន្ធ តើដូចម្ដេច ។ វេទនាខន្ធ មានប្រការមួយ គឺ វេទនាខន្ធប្រកបដោយផស្សៈ ។ វេទនាខន្ធ មានប្រការ ២ គឺ វេទនាខន្ធ ប្រព្រឹត្តទៅជាមួយនឹងហេតុក៏មាន មិនមានហេតុក៏មាន ។ វេទនាខន្ធ មានប្រការ ៣ គឺ វេទនាខន្ធជាកុសលក៏មាន

(១៩៥) តត្ថ កតមោ បិយេហិ វិប្បយោគោ ទុក្ខោ ។ ឥធ យស្ស តេ ហោន្តិ ឥដ្ឋា កន្តា មនាបា រូបា សទ្ទា គន្ធា រសា ផោដ្ឋព្វា យេ វា បនស្ស តេ ហោន្តិ អត្ថកាមា ហិតកាមា ផាសុកាមា យោគក្ខេមកាមា មាតា វា បិតា វា ភាតា វា ភគិនី វា មិត្តា វា អមច្ចា វា ញាតិសាលោហិតា វា យា តេហិ អសង្គតិ អសមាគមោ អសមោធានំ អមិស្សីភាវោ អយំ វុច្ចតិ បិយេហិ វិប្បយោគោ ទុក្ខោ ។

(១៩៦) តត្ថ កតមំ យម្បិច្ឆំ ន លភតិ តម្បិ ទុក្ខំ ។ ជាតិធម្មានំ សត្តានំ ឯវំ ឥច្ឆា ឧប្បជ្ជតិ អហោ វត មយំ ន ជាតិធម្មា អស្សាម ន ច វត នោ ជាតិ អាគច្ឆេយ្យាតិ ន ខោ បនេតំ ឥច្ឆាយ បត្តព្វំ ឥទម្បិ យម្បិច្ឆំ ន លភតិ តម្បិ ទុក្ខំ ។ ជរាធម្មានំ សត្តានំ ។ បេ ។ ព្យាធិធម្មានំ សត្តានំ ។ បេ ។ មរណធម្មានំ សត្តានំ ។ បេ ។



(១៩៥) បណ្ដាទុក្ខទាំងនោះ ការព្រាត់ប្រាសចាកសត្វនិងសង្ខារជាទីស្រឡាញ់ ជាទុក្ខ តើដូចម្ដេច ។ រូបារម្មណ៍ សទ្ទារម្មណ៍ គន្ធារម្មណ៍ រសារម្មណ៍ ផោដ្ឋព្វារម្មណ៍ទាំងឡាយ ណា ជាទីប្រាថ្នា ជាទីត្រេកអរ ជាទីគាប់ចិត្ត នៃបុគ្គលណាក្នុងលោកនេះ ពុំនោះសោត ជនទាំងឡាយ ណា គឺ មាតាក្ដី បិតាក្ដី បងប្អូនប្រុសក្ដី បងប្អូនស្រីក្ដី មិត្រក្ដី អាមាត្យក្ដី ញាតិសាលោហិតក្ដី ប្រាថ្នាសេចក្ដីចម្រើន ប្រាថ្នាប្រយោជន៍ ប្រាថ្នាសេចក្ដីសប្បាយ ប្រាថ្នាសេចក្ដីក្សេមចាកយោគៈ ចំពោះបុគ្គលនោះ ការមិនបានជួបគ្នា ការមិនជួបប្រសព្វគ្នា ការមិនបានជួបជុំគ្នា ការមិនបានមូលមិត្រគ្នា ដោយអារម្មណ៍ទាំងឡាយនោះៗ ដោយជនទាំងឡាយនោះៗ នេះហៅថា ការព្រាត់ប្រាសចាកសត្វនិងសង្ខារជាទីស្រឡាញ់ ជាទុក្ខ ។

(១៩៦) បណ្ដាទុក្ខទាំងនោះ បុគ្គលកាលចង់បានរបស់ណា មិនបានរបស់នោះ ការមិនបាននោះ ជាទុក្ខ តើដូចម្ដេច ។ ពួកសត្វមានជាតិជាធម្មតា តែងមានសេចក្ដីប្រាថ្នាកើតឡើង យ៉ាងនេះថា ធ្វើដូចម្ដេចហ្ន៎ ពួកយើងកុំបីមានជាតិជាធម្មតា ពុំនោះសោត ជាតិ កុំបីមកកាន់យើងទាំងឡាយឡើយ សេចក្ដីនេះ ពួកសត្វតែងមិនបានសម្រេចតាមប្រាថ្នាឡើយ នេះឯងហៅថា បុគ្គលកាលចង់បានរបស់ណា មិនបានរបស់នោះ ការមិនបាននោះ ជាទុក្ខ ពួកសត្វមានជរាជាធម្មតា ។ បេ ។ ពួកសត្វមានព្យាធិជាធម្មតា ។ បេ ។ ពួកសត្វមានមរណៈជាធម្មតា ។ បេ ។

សោកបរិទេវទុក្ខទោមនស្សុបាយាសធម្មានំ សត្តានំ ឯវំ ឥច្ឆា ឧប្បជ្ជតិ អហោ វត មយំ ន សោកបរិទេវទុក្ខទោមនស្សុបាយាសធម្មា អស្សាម ន ច វត នោ សោកបរិទេវទុក្ខទោមនស្សុបាយាសា អាគច្ឆេយ្យុន្តិ ន ខោ បនេតំ ឥច្ឆាយ បត្តព្វំ ឥទម្បិ យម្បិច្ឆំ ន លភតិ តម្បិ ទុក្ខំ ។

(១៨៧) តត្ថ កតមេ សង្ខិត្តេន បញ្ចុបាទានក្ខន្ធា ទុក្ខា ។ សេយ្យថីទំ រូបុបាទានក្ខន្ធោ វេទនុបាទានក្ខន្ធោ សញ្ញុបាទានក្ខន្ធោ សង្ខារុបាទានក្ខន្ធោ វិញ្ញាណុបាទានក្ខន្ធោ ឥមេ វុច្ចន្តិ សង្ខិត្តេន បញ្ចុបាទានក្ខន្ធា ទុក្ខា ។

ឥទំ វុច្ចតិ ទុក្ខំ អរិយសច្ចំ ។

(១៨៨) តត្ថ កតមំ ទុក្ខសមុទយោ អរិយសច្ចំ ។ យាយំ តណ្ហា បោនោព្ភវិកា នន្ទិរាគសហគតា តត្រតត្រាភិនន្ទិនី សេយ្យថីទំ កាមតណ្ហា ភវតណ្ហា វិភវតណ្ហា ។



ពួកសត្វមានសោកៈ បរិទេវៈ ទុក្ខៈ ទោមនស្សៈ និងឧបាយាសៈ ជាធម្មតា តែងមានសេចក្តីប្រាថ្នាកើតឡើង យ៉ាងនេះថា ធ្វើដូចម្តេចហ្ន៎ ពួកយើងកុំបីមានសោកៈ បរិទេវៈ ទុក្ខៈ ទោមនស្សៈ និងឧបាយាសៈ ជាធម្មតា កុំនោះសោត សោកៈ បរិទេវៈ ទុក្ខៈ ទោមនស្សៈ និងឧបាយាសៈ កុំបីមកកាន់យើងទាំងឡាយឡើយ សេចក្តីនេះ ពួកសត្វតែងមិនបានសម្រេចតាមប្រាថ្នាឡើយ នេះឯងហៅថា បុគ្គលកាលចង់បានរបស់ណា មិនបានរបស់នោះ ការមិនបាននោះ ជាទុក្ខ ។

(១៨៧) បណ្តាទុក្ខទាំងនោះ ដោយបំប្រួញ ឧបាទានក្ខន្ធទាំង ៥ ក៏ជាទុក្ខ តើដូចម្តេច ។ ឧបាទានក្ខន្ធទាំង ៥ គឺ រូបូបាទានក្ខន្ធ វេទនូបាទានក្ខន្ធ សញ្ញូបាទានក្ខន្ធ សង្ខារូបាទានក្ខន្ធ វិញ្ញាណូបាទានក្ខន្ធ នេះហៅថា ដោយបំប្រួញ ឧបាទានក្ខន្ធទាំង ៥ ក៏ ជាទុក្ខ ។

នេះហៅថា ទុក្ខអរិយសច្ច ។

(១៨៨) បណ្តាអរិយសច្ចទាំង ៤ នោះ ទុក្ខសមុទយអរិយសច្ច តើដូចម្តេច ។ តណ្ហាណា ដែលនាំសត្វឲ្យកើតក្នុងភពថ្មីទៀត ប្រកបដោយតម្រេកកើតកយ ជាធម្មជាតិនាំសត្វឲ្យត្រេកត្រអាល ក្នុងអារម្មណ៍នោះ ៗ ក្នុងភពនោះ គឺ កាមតណ្ហា ភវតណ្ហា វិភវតណ្ហា ។

[១៨៩] សា ខោ បនេសា តណ្ហា កត្ថ ឧប្បជ្ជមានា ឧប្បជ្ជតិ កត្ថ និវិសមានា និវិសតិ ។ យំ លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា ឧប្បជ្ជមានា ឧប្បជ្ជតិ ឯត្ថ និវិសមានា និវិសតិ ។ កិញ្ច លោកេ បិយរូបំ សាតរូបំ ។ ចក្ខុំ លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា ឧប្បជ្ជមានា ឧប្បជ្ជតិ ឯត្ថ និវិសមានា និវិសតិ សោតំ ។បេ។ ឃានំ ជិវ្ហា កាយោ មនោ លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា ឧប្បជ្ជមានា ឧប្បជ្ជតិ ឯត្ថ និវិសមានា និវិសតិ ។ រូបា លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា ឧប្បជ្ជមានា ឧប្បជ្ជតិ ឯត្ថ និវិសមានា និវិសតិ សទ្ទា ។បេ។ គន្ធា រសា ផោដ្ឋព្វា ធម្មា លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា ឧប្បជ្ជមានា ឧប្បជ្ជតិ ឯត្ថ និវិសមានា និវិសតិ ។ ចក្ខុវិញ្ញាណំ លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា ឧប្បជ្ជមានា ឧប្បជ្ជតិ ឯត្ថ និវិសមានា និវិសតិ



[១៨៩] តណ្ហានុ៎ះ កាលកើតឡើង រមែងកើតក្នុងទីណា កាលតាំងនៅ រមែងតាំងនៅក្នុងទីណា ។ អារម្មណ៍ណា មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលកើតឡើង រមែងកើតក្នុងអារម្មណ៍នុ៎ះ កាលតាំងនៅ រមែងតាំងនៅក្នុងអារម្មណ៍នុ៎ះ ។ អារម្មណ៍អ្វីហ្ន៎ មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក ។ ចក្ខុ មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលកើតឡើង រមែងកើតក្នុងចក្ខុនុ៎ះ កាលតាំងនៅ រមែងតាំងនៅក្នុងចក្ខុនុ៎ះ សោតៈ ។បេ។ ឃានៈ ជិវ្ហា កាយ មនោ មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលកើតឡើង រមែងកើត ក្នុងមនោនុ៎ះ កាលតាំងនៅ រមែងតាំងនៅក្នុងមនោនុ៎ះ ។ រូបទាំងឡាយ មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលកើតឡើង រមែងកើតក្នុងរូបនុ៎ះ កាលតាំងនៅ រមែងតាំងនៅ ក្នុងរូបនុ៎ះ សំឡេង ។បេ។ ក្លិន រស ផ្សព្វ ធម៌ទាំងឡាយ មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលកើតឡើង រមែងកើតក្នុងធម៌នុ៎ះ កាលតាំងនៅ រមែងតាំងនៅក្នុងធម៌នុ៎ះ ។ ចក្ខុវិញ្ញាណ មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលកើតឡើង រមែងកើតក្នុងចក្ខុវិញ្ញាណនុ៎ះ កាលតាំងនៅ រមែងតាំងនៅក្នុងចក្ខុវិញ្ញាណនុ៎ះ

សោតវិញ្ញាណំ ។បេ។ ឃានវិញ្ញាណំ ជិវ្ហាវិញ្ញាណំ
កាយវិញ្ញាណំ មនោវិញ្ញាណំ លោកេ បិយរូបំ
សាតរូបំ ឯត្ថេសា តណ្ហា ឧប្បជ្ជមានា ឧប្បជ្ជតិ
ឯត្ថ និវិសមានា និវិសតិ ។ ចក្ខុសម្ផស្សោ
លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា
ឧប្បជ្ជមានា ឧប្បជ្ជតិ ឯត្ថ និវិសមានា និវិសតិ
សោតសម្ផស្សោ ។បេ។ ឃានសម្ផស្សោ ជិវ្ហាសម្ផ-
ស្សោ កាយសម្ផស្សោ មនោសម្ផស្សោ លោកេ
បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា ឧប្បជ្ជមានា
ឧប្បជ្ជតិ ឯត្ថ និវិសមានា និវិសតិ ។ ចក្ខុស-
ម្ផស្សជា វេទនា លោកេ បិយរូបំ សាតរូបំ ឯត្ថេសា
តណ្ហា ឧប្បជ្ជមានា ឧប្បជ្ជតិ ឯត្ថ និវិសមានា
និវិសតិ សោតសម្ផស្សជា វេទនា ។បេ។ ឃាន-
សម្ផស្សជា វេទនា ជិវ្ហាសម្ផស្សជា វេទនា កាយស-
ម្ផស្សជា វេទនា មនោសម្ផស្សជា វេទនា លោកេ
បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា ឧប្បជ្ជមានា
ឧប្បជ្ជតិ ឯត្ថ និវិសមានា និវិសតិ ។ រូបសញ្ញា



សោតវិញ្ញាណ ។បេ។ ឃានវិញ្ញាណ ជិវ្ហាវិញ្ញាណ កាយវិញ្ញាណ មនោ-
វិញ្ញាណ មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក
តណ្ហានុ៎ះ កាលកើតឡើង រមែងកើតក្នុងមនោវិញ្ញាណនុ៎ះ កាលតាំងនៅ
រមែងតាំងនៅ ក្នុងមនោវិញ្ញាណនុ៎ះ ។ ចក្ខុសម្ផស្ស មានសភាពគួរ
ស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលកើតឡើង
រមែងកើតក្នុងចក្ខុសម្ផស្សនុ៎ះ កាលតាំងនៅ រមែងតាំងនៅ ក្នុងចក្ខុសម្ផស្ស
នុ៎ះ សោតសម្ផស្ស ។បេ។ ឃានសម្ផស្ស ជិវ្ហាសម្ផស្ស កាយសម្ផស្ស
មនោសម្ផស្ស មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក
តណ្ហានុ៎ះ កាលកើតឡើង រមែងកើតក្នុងមនោសម្ផស្សនុ៎ះ កាលតាំងនៅ
រមែងតាំងនៅ ក្នុងមនោសម្ផស្សនុ៎ះ ។ វេទនាកើតអំពីចក្ខុសម្ផស្ស មាន
សភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាល
កើតឡើង រមែងកើតក្នុងវេទនាដែលកើតអំពីចក្ខុសម្ផស្សនុ៎ះ កាលតាំងនៅ
រមែងតាំងនៅ ក្នុងវេទនាដែលកើតអំពីចក្ខុសម្ផស្សនុ៎ះ វេទនាកើតអំពី
សោតសម្ផស្ស ។បេ។ វេទនាកើតអំពីឃានសម្ផស្ស វេទនាកើតអំពីជិវ្ហា-
សម្ផស្ស វេទនាកើតអំពីកាយសម្ផស្ស វេទនាកើតអំពីមនោសម្ផស្ស មាន
សភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាល
កើតឡើង រមែងកើត ក្នុងវេទនាដែលកើតអំពីមនោសម្ផស្សនុ៎ះ កាលតាំង
នៅ រមែងតាំងនៅ ក្នុងវេទនាដែលកើតអំពីមនោសម្ផស្សនុ៎ះ ។ រូបសញ្ញា

លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា ឧប្បជ្ជមានា ឧប្បជ្ជតិ ឯត្ថ និវិសមានា និវិសតិ សទ្ទសញ្ញា ។បេ។ គន្ធសញ្ញា រសសញ្ញា ផោដ្ឋព្វសញ្ញា ធម្មសញ្ញា លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា ឧប្បជ្ជមានា ឧប្បជ្ជតិ ឯត្ថ និវិសមានា និវិសតិ ។ រូបសញ្ចេតនា លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា ឧប្បជ្ជមានា ឧប្បជ្ជតិ ឯត្ថ និវិសមានា និវិសតិ សទ្ទសញ្ចេតនា ។បេ។ គន្ធសញ្ចេតនា រសសញ្ចេតនា ផោដ្ឋព្វសញ្ចេតនា ធម្មសញ្ចេតនា លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា ឧប្បជ្ជមានា ឧប្បជ្ជតិ ឯត្ថ និវិសមានា និវិសតិ ។ រូបតណ្ហា លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា ឧប្បជ្ជមានា ឧប្បជ្ជតិ ឯត្ថ និវិសមានា និវិសតិ សទ្ទតណ្ហា ។បេ។ គន្ធតណ្ហា រសតណ្ហា ផោដ្ឋព្វតណ្ហា ធម្មតណ្ហា លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា ឧប្បជ្ជមានា ឧប្បជ្ជតិ ឯត្ថ និវិសមានា និវិសតិ ។



មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលកើតឡើង រមែងកើតក្នុងរូបសញ្ញានុ៎ះ កាលតាំងនៅ រមែងតាំងនៅក្នុងរូបសញ្ញានុ៎ះ សទ្ទសញ្ញា ។បេ។ គន្ធសញ្ញា រសសញ្ញា ផោដ្ឋព្វសញ្ញា ធម្មសញ្ញា មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលកើតឡើង រមែងកើតក្នុងធម្មសញ្ញានុ៎ះ កាលតាំងនៅ រមែងតាំងនៅក្នុងធម្មសញ្ញានុ៎ះ ។ រូបសញ្ចេតនា មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលកើតឡើង រមែងកើតក្នុងរូបសញ្ចេតនានុ៎ះ កាលតាំងនៅ រមែងតាំងនៅក្នុងរូបសញ្ចេតនានុ៎ះ សទ្ទសញ្ចេតនា ។បេ។ គន្ធសញ្ចេតនា រសសញ្ចេតនា ផោដ្ឋព្វសញ្ចេតនា ធម្មសញ្ចេតនា មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលកើតឡើង រមែងកើតក្នុងធម្មសញ្ចេតនានុ៎ះ កាលតាំងនៅ រមែងតាំងនៅក្នុងធម្មសញ្ចេតនានុ៎ះ ។ រូបតណ្ហា មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលកើតឡើង រមែងកើត ក្នុងរូបតណ្ហានុ៎ះ កាលតាំងនៅ រមែងតាំងនៅ ក្នុងរូបតណ្ហានុ៎ះ សទ្ទតណ្ហា ។បេ។ គន្ធតណ្ហា រសតណ្ហា ផោដ្ឋព្វតណ្ហា ធម្មតណ្ហា មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលកើតឡើង រមែងកើត ក្នុងធម្មតណ្ហានុ៎ះ កាលតាំងនៅ រមែងតាំងនៅ ក្នុងធម្មតណ្ហានុ៎ះ ។

រូបវិតក្កា លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា ឧប្បជ្ជមានា ឧប្បជ្ជតិ ឯត្ថ និវិសមានា និវិសតិ សទ្ទវិតក្កា ។បេ។ គន្ធវិតក្កា រសវិតក្កា ផោដ្ឋព្វវិតក្កា ធម្មវិតក្កា លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា ឧប្បជ្ជមានា ឧប្បជ្ជតិ ឯត្ថ និវិសមានា និវិសតិ ។ រូបវិចារោ លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា ឧប្បជ្ជមានា ឧប្បជ្ជតិ ឯត្ថ និវិសមានា និវិសតិ សទ្ទវិចារោ ។បេ។ គន្ធវិចារោ រសវិចារោ ផោដ្ឋព្វវិចារោ ធម្មវិចារោ លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា ឧប្បជ្ជមានា ឧប្បជ្ជតិ ឯត្ថ និវិសមានា និវិសតិ ។

ឥទំ វុច្ចតិ ទុក្ខសមុទយោ អរិយសច្ចំ ។

(១៦០) តត្ថ កតមំ ទុក្ខនិរោធោ អរិយសច្ចំ ។ យោ តស្សាយេវ តណ្ហាយ អសេសវិរាគនិរោធោ ចាគោ បដិនិស្សគ្គោ មុត្តិ អនាលយោ ។



សេចក្តីត្រិះរិះរូប មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលកើតឡើង រមែងកើតក្នុងសេចក្តីត្រិះរិះរូបនុ៎ះ កាលតាំងនៅ រមែងតាំងនៅក្នុងសេចក្តីត្រិះរិះរូបនុ៎ះ សេចក្តីត្រិះរិះសំឡេង ។បេ។ សេចក្តីត្រិះរិះក្លិន សេចក្តីត្រិះរិះរស សេចក្តីត្រិះរិះផោដ្ឋព្វៈ សេចក្តីត្រិះរិះធម៌ មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលកើតឡើង រមែងកើត ក្នុងសេចក្តីត្រិះរិះធម៌នុ៎ះ កាលតាំងនៅ រមែងតាំងនៅក្នុងសេចក្តីត្រិះរិះធម៌នុ៎ះ ។ ការពិចារណារូប មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលកើតឡើង រមែងកើតក្នុងការពិចារណារូបនុ៎ះ កាលតាំងនៅ រមែងតាំងនៅក្នុងការពិចារណារូបនុ៎ះ ការពិចារណាសំឡេង ។បេ។ ការពិចារណាក្លិន ការពិចារណារស ការពិចារណាផ្សព្វ ការពិចារណាធម៌ មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលកើតឡើង រមែងកើតក្នុងការពិចារណាធម៌នុ៎ះ កាលតាំងនៅ រមែងតាំងនៅ ក្នុងការពិចារណាធម៌នុ៎ះ ។

នេះហៅថា ទុក្ខសមុទយអរិយសច្ច ។

(១៦០) បណ្តាអរិយសច្ចទាំង ៤ នោះ ទុក្ខនិរោធអរិយសច្ច តើដូចម្តេច ។ ការវិនាសនិងការរលត់ ដោយឥតសេសសល់ សភាពៈលះបង់ ការខ្ជាក់ចោល ការជម្រុះចោល ការមិនមានអាល័យ ចំពោះតណ្ហានោះឯង (នេះហៅថា ទុក្ខនិរោធអរិយសច្ច) ។

(១៦១) សា ខោ បនេសា តណ្ហា កត្ថ បហីយមានា បហីយតិ កត្ថ និរុជ្ឈមានា និរុជ្ឈតិ ។ យំ លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា បហីយមានា បហីយតិ ឯត្ថ និរុជ្ឈមានា និរុជ្ឈតិ ។ កិញ្ច លោកេ បិយរូបំ សាតរូបំ ។ ចក្ខុំ លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា បហីយមានា បហីយតិ ឯត្ថ និរុជ្ឈមានា និរុជ្ឈតិ សោតំ ។បេ។ ឃានំ ជិវ្ហា កាយោ មនោ លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា បហីយមានា បហីយតិ ឯត្ថ និរុជ្ឈមានា និរុជ្ឈតិ ។ រូបា លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា បហីយមានា បហីយតិ ឯត្ថ និរុជ្ឈមានា និរុជ្ឈតិ សទ្ទា ។បេ។ គន្ធា រសា ផោដ្ឋព្វា ធម្មា លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា បហីយមានា បហីយតិ ឯត្ថ និរុជ្ឈមានា និរុជ្ឈតិ ។ ចក្ខុវិញ្ញាណំ លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា



(១៦១) តណ្ហានុ៎ះ កាលបុគ្គលលះបង់ រមែងលះបង់ ក្នុងទីណា កាលរលត់ រមែងរលត់ក្នុងទីណា ។ អារម្មណ៍ណា មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលបុគ្គលលះបង់ រមែងលះបង់ក្នុងអារម្មណ៍នុ៎ះ កាលរលត់ រមែងរលត់ក្នុងអារម្មណ៍នុ៎ះ ។ អារម្មណ៍អ្វីហ្ន៎ ដែលមានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក ។ ចក្ខុ មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលបុគ្គលលះបង់ រមែងលះបង់ក្នុងចក្ខុនុ៎ះ កាលរលត់ រមែងរលត់ក្នុងចក្ខុនុ៎ះ សោតៈ ។បេ។ ឃានៈ ជិវ្ហា កាយ មនោ មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលបុគ្គលលះបង់ រមែងលះបង់ក្នុងមនោនុ៎ះ កាលរលត់ រមែងរលត់ ក្នុងមនោនុ៎ះ ។ រូបទាំងឡាយ មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលបុគ្គលលះបង់ រមែងលះបង់ក្នុងរូបនុ៎ះ កាលរលត់ រមែងរលត់ក្នុងរូបនុ៎ះ សំឡេង ។បេ។ ក្លិន រស ផ្សព្វ ធម៌ទាំងឡាយ មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលបុគ្គលលះបង់ រមែងលះបង់ក្នុងធម៌នុ៎ះ កាលរលត់ រមែងរលត់ ក្នុងធម៌នុ៎ះ ។ ចក្ខុវិញ្ញាណ មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ

បហីយមានា បហីយតិ ឯត្ថ និរុជ្ឈមានា និរុជ្ឈតិ សោតវិញ្ញាណំ ។បេ។ ឃានវិញ្ញាណំ ជិវ្ហាវិញ្ញាណំ កាយវិញ្ញាណំ មនោវិញ្ញាណំ លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា បហីយមានា បហីយតិ ឯត្ថ និរុជ្ឈមានា និរុជ្ឈតិ ។ ចក្ខុសម្ផស្សោ លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា បហីយមានា បហីយតិ ឯត្ថ និរុជ្ឈមានា និរុជ្ឈតិ សោតសម្ផស្សោ ។បេ។ ឃានសម្ផស្សោ ជិវ្ហាសម្ផស្សោ កាយសម្ផស្សោ មនោសម្ផស្សោ លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា បហីយមានា បហីយតិ ឯត្ថ និរុជ្ឈមានា និរុជ្ឈតិ ។ ចក្ខុសម្ផស្សជា វេទនា លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា បហីយមានា បហីយតិ ឯត្ថ និរុជ្ឈមានា និរុជ្ឈតិ សោតសម្ផស្សជា វេទនា ។បេ។ ឃានសម្ផស្សជា វេទនា ជិវ្ហាសម្ផស្សជា វេទនា កាយសម្ផស្សជា វេទនា



កាលបុគ្គលលះបង់ រមែងលះបង់ក្នុងចក្ខុវិញ្ញាណនុ៎ះ កាលរលត់ រមែងរលត់ក្នុងចក្ខុវិញ្ញាណនុ៎ះ សោតវិញ្ញាណ ។បេ។ ឃានវិញ្ញាណ ជិវ្ហាវិញ្ញាណ កាយវិញ្ញាណ មនោវិញ្ញាណ មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលបុគ្គលលះបង់ រមែងលះបង់ក្នុងមនោវិញ្ញាណនុ៎ះ កាលរលត់ រមែងរលត់ក្នុងមនោវិញ្ញាណនុ៎ះ ។ ចក្ខុសម្ផ័ស្ស មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលបុគ្គលលះបង់ រមែងលះបង់ក្នុងចក្ខុសម្ផ័ស្សនុ៎ះ កាលរលត់ រមែងរលត់ ក្នុងចក្ខុសម្ផ័ស្សនុ៎ះ សោតសម្ផ័ស្ស ។បេ។ ឃានសម្ផ័ស្ស ជិវ្ហាសម្ផ័ស្ស កាយសម្ផ័ស្ស មនោសម្ផ័ស្ស មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលបុគ្គលលះបង់ រមែងលះបង់ក្នុងមនោសម្ផ័ស្សនុ៎ះ កាលរលត់ រមែងរលត់ក្នុងមនោសម្ផ័ស្សនុ៎ះ ។ វេទនាកើតអំពីចក្ខុសម្ផ័ស្ស មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលបុគ្គលលះបង់ រមែងលះបង់ក្នុងវេទនាដែលកើតអំពីចក្ខុសម្ផ័ស្សនុ៎ះ កាលរលត់ រមែងរលត់ក្នុងវេទនាដែលកើតអំពីចក្ខុសម្ផ័ស្សនុ៎ះ វេទនាកើតអំពីសោតសម្ផ័ស្ស ។បេ។ វេទនាកើតអំពីឃានសម្ផ័ស្ស វេទនាកើតអំពីជិវ្ហាសម្ផ័ស្ស វេទនាកើតអំពីកាយសម្ផ័ស្ស

មនោសម្ផស្សជា វេទនា លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា បហីយមានា បហីយតិ ឯត្ថ និរុជ្ឈមានា និរុជ្ឈតិ ។ រូបសញ្ញា លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា បហីយមានា បហីយតិ ឯត្ថ និរុជ្ឈមានា និរុជ្ឈតិ សទ្ទសញ្ញា ។ បេ ។ គន្ធសញ្ញា រសសញ្ញា ផោដ្ឋព្វសញ្ញា ធម្មសញ្ញា លោកេ បិយ-រូបំ សាតរូបំ ឯត្ថេសា តណ្ហា បហីយមានា បហី-យតិ ឯត្ថ និរុជ្ឈមានា និរុជ្ឈតិ ។ រូបសញ្ចេតនា លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា បហីយ-មានា បហីយតិ ឯត្ថ និរុជ្ឈមានា និរុជ្ឈតិ សទ្ទស-ញ្ចេតនា ។ បេ ។ គន្ធសញ្ចេតនា រសសញ្ចេតនា ផោដ្ឋព្វសញ្ចេតនា ធម្មសញ្ចេតនា លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា បហីយមានា បហីយតិ ឯត្ថ និរុជ្ឈមានា និរុជ្ឈតិ ។ រូបតណ្ហា លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា បហីយមានា បហីយតិ ឯត្ថ និរុជ្ឈមានា និរុជ្ឈតិ សទ្ទតណ្ហា



វេទនាកើតអំពីមនោសម្ផស្ស មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរក្នុងលោក តណ្ហានុ៎ះ កាលបុគ្គលលះបង់ រមែងលះបង់ក្នុងវេទនាដែលកើតអំពីមនោសម្ផស្សនុ៎ះ កាលរលត់ រមែងរលត់ ក្នុងវេទនាដែលកើតអំពីមនោសម្ផស្សនុ៎ះ ។ រូបសញ្ញា មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលបុគ្គលលះបង់ រមែងលះបង់ក្នុងរូបសញ្ញានុ៎ះ កាលរលត់ រមែងរលត់ក្នុងរូបសញ្ញានុ៎ះ សទ្ទសញ្ញា ។ បេ ។ គន្ធសញ្ញា រសសញ្ញា ផោដ្ឋព្វសញ្ញា ធម្មសញ្ញា មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលបុគ្គលលះបង់ រមែងលះបង់ក្នុងធម្មសញ្ញានុ៎ះ កាលរលត់ រមែងរលត់ក្នុងធម្មសញ្ញានុ៎ះ ។ រូបសញ្ចេតនា មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលបុគ្គលលះបង់ រមែងលះបង់ក្នុងរូបសញ្ចេត-នានុ៎ះ កាលរលត់ រមែងរលត់ ក្នុងរូបសញ្ចេតនានុ៎ះ សទ្ទសញ្ចេតនា ។ បេ ។ គន្ធសញ្ចេតនា រសសញ្ចេតនា ផោដ្ឋព្វសញ្ចេតនា ធម្មសញ្ចេត-នា មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលបុគ្គលលះបង់ រមែងលះបង់ក្នុងធម្មសញ្ចេតនានុ៎ះ កាលរលត់ រមែងរលត់ក្នុងធម្មសញ្ចេតនានុ៎ះ ។ រូបតណ្ហា មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលបុគ្គលលះបង់ រមែងលះបង់ក្នុងរូបតណ្ហានុ៎ះ កាលរលត់ រមែងរលត់ក្នុងរូបតណ្ហានុ៎ះ សទ្ទតណ្ហា

។បេ។ គន្ធតណ្ហា រសតណ្ហា ផោដ្ឋព្វតណ្ហា ធម្មតណ្ហា លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា បហីយមានា បហីយតិ ឯត្ថ និរុជ្ឈមានា និរុជ្ឈតិ ។ រូបវិតក្កោ លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា បហីយមានា បហីយតិ ឯត្ថ និរុជ្ឈមានា និរុជ្ឈតិ សទ្ទវិតក្កោ ។បេ។ គន្ធវិតក្កោ រសវិតក្កោ ផោដ្ឋព្វវិតក្កោ ធម្មវិតក្កោ លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា បហីយមានា បហីយតិ ឯត្ថ និរុជ្ឈមានា និរុជ្ឈតិ ។ រូបវិចារោ លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា បហីយមានា បហីយតិ ឯត្ថ និរុជ្ឈមានា និរុជ្ឈតិ សទ្ទវិចារោ ។បេ។ គន្ធវិចារោ រសវិចារោ ផោដ្ឋព្វវិចារោ ធម្មវិចារោ លោកេ បិយរូបំ សាតរូបំ ឯត្ថេសា តណ្ហា បហីយមានា បហីយតិ ឯត្ថ និរុជ្ឈមានា និរុជ្ឈតិ ។

ឥទំ វុច្ចតិ ទុក្ខនិរោធោ អរិយសច្ចំ ។



។បេ។ គន្ធតណ្ហា រសតណ្ហា ផោដ្ឋព្វតណ្ហា ធម្មតណ្ហា មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលបុគ្គលលះបង់ រមែងលះបង់ក្នុងធម្មតណ្ហានុ៎ះ កាលរលត់ រមែងរលត់ក្នុងធម្មតណ្ហានុ៎ះ ។ រូបវិតក្កៈ មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលបុគ្គលលះបង់ រមែងលះបង់ក្នុងរូបវិតក្កៈនុ៎ះ កាលរលត់ រមែងរលត់ក្នុងរូបវិតក្កៈនុ៎ះ សទ្ទវិតក្កៈ ។បេ។ គន្ធវិតក្កៈ រសវិតក្កៈ ផោដ្ឋព្វវិតក្កៈ ធម្មវិតក្កៈ មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលបុគ្គលលះបង់ រមែងលះបង់ ក្នុងធម្មវិតក្កៈនុ៎ះ កាលរលត់ រមែងរលត់ក្នុងធម្មវិតក្កៈនុ៎ះ ។ រូបវិចារៈ មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលបុគ្គលលះបង់ រមែងលះបង់ក្នុងរូបវិចារៈនុ៎ះ កាលរលត់ រមែងរលត់ ក្នុងរូបវិចារៈនុ៎ះ សទ្ទវិចារៈ ។បេ។ គន្ធវិចារៈ រសវិចារៈ ផោដ្ឋព្វវិចារៈ ធម្មវិចារៈ មានសភាពគួរស្រឡាញ់ មានសភាពគួរត្រេកអរ ក្នុងលោក តណ្ហានុ៎ះ កាលបុគ្គលលះបង់ រមែងលះបង់ក្នុងធម្មវិចារៈនុ៎ះ កាលរលត់ រមែងរលត់ក្នុងធម្មវិចារៈនុ៎ះ ។

នេះហៅថា ទុក្ខនិរោធអរិយសច្ច ។

(១៦២) តត្ថ កតមំ ទុក្ខនិរោធគាមិនី បដិបទា អរិយសច្ចំ ។ អយមេវ អរិយោ អដ្ឋង្គិកោ មគ្គោ ។ សេយ្យថីទំ ។ សម្មាទិដ្ឋិ សម្មាសង្កប្បោ សម្មាវាចា សម្មាកម្មន្តោ សម្មាអាជីវោ សម្មាវាយាមោ សម្មាសតិ សម្មាសមាធិ ។

(១៦៣) តត្ថ កតមា សម្មាទិដ្ឋិ ។ ទុក្ខេ ញាណំ ទុក្ខសមុទយេ ញាណំ ទុក្ខនិរោធេ ញាណំ ទុក្ខនិរោធគាមិនិយា បដិបទាយ ញាណំ អយំ វុច្ចតិ សម្មាទិដ្ឋិ ។

(១៦៤) តត្ថ កតមោ សម្មាសង្កប្បោ ។ នេក្ខម្មសង្កប្បោ អព្យាបាទសង្កប្បោ អវិហឹសាសង្កប្បោ អយំ វុច្ចតិ សម្មាសង្កប្បោ ។

(១៦៥) តត្ថ កតមា សម្មាវាចា ។ មុសាវាទា វេរមណី បិសុណាយ វាចាយ វេរមណី ផរុសាយ វាចាយ វេរមណី សម្ផប្បលាបា វេរមណី អយំ វុច្ចតិ សម្មាវាចា ។



(១៦២) បណ្ដាអរិយសច្ចទាំង ៤ នោះ ទុក្ខនិរោធគាមិនីបដិបទាអរិយសច្ច តើដូចម្ដេច ។ មគ្គដ៏ប្រសើរមានអង្គ ៨ ប្រការនេះឯង ។ មគ្គដ៏ប្រសើរ មានអង្គ ៨ ប្រការ តើដូចម្ដេច ។ សម្មាទិដ្ឋិ សម្មាសង្កប្បៈ សម្មាវាចា សម្មាកម្មន្តៈ សម្មាអាជីវៈ សម្មាវាយាមៈ សម្មាសតិ សម្មាសមាធិ ។

(១៦៣) បណ្ដាមគ្គមានអង្គ ៨ នោះ សម្មាទិដ្ឋិ តើដូចម្ដេច ។ ប្រាជ្ញាដឹងច្បាស់ក្នុងទុក្ខ ប្រាជ្ញាដឹងច្បាស់ក្នុងតណ្ហា ជាហេតុនៃទុក្ខ ប្រាជ្ញាដឹងច្បាស់ក្នុងព្រះនិព្វានជាគ្រឿងរលត់នៃទុក្ខ ប្រាជ្ញាដឹងច្បាស់ក្នុងផ្លូវប្រតិបត្តិ ជាដំណើរទៅកាន់ព្រះនិព្វានជាគ្រឿងរលត់នៃទុក្ខ នេះហៅថា សម្មាទិដ្ឋិ ។

(១៦៤) បណ្ដាមគ្គមានអង្គ ៨ នោះ សម្មាសង្កប្បៈ តើដូចម្ដេច ។ សេចក្ដីត្រិះរិះក្នុងការចេញចាកកាម សេចក្ដីត្រិះរិះក្នុងការមិនព្យាបាទ សេចក្ដីត្រិះរិះក្នុងការមិនបៀតបៀន នេះហៅថា សម្មាសង្កប្បៈ ។

(១៦៥) បណ្ដាមគ្គមានអង្គ ៨ នោះ សម្មាវាចា តើដូចម្ដេច ។ ការវៀរចាកពាក្យកុហក ការវៀរចាកពាក្យញុះញង់គេឲ្យបែកគ្នា ការវៀរចាកពាក្យទ្រគោះអាក្រក់ ការវៀរចាកពាក្យរោយរាយឥតប្រយោជន៍ នេះហៅថា សម្មាវាចា ។

(១៦៦) តត្ថ កតមោ សម្មាកម្មន្តោ ។ បាណាតិបាតា វេរមណី អទិន្នាទានា វេរមណី កាមេសុ មិច្ឆាចារា វេរមណី អយំ វុច្ចតិ សម្មាកម្មន្តោ ។

(១៦៧) តត្ថ កតមោ សម្មាអាជីវោ ។ ឥធ អរិយសាវកោ មិច្ឆាអាជីវំ បហាយ សម្មាអាជីវេន ជីវិតំ កប្បេតិ អយំ វុច្ចតិ សម្មាអាជីវោ ។

(១៦៨) តត្ថ កតមោ សម្មាវាយាមោ ។ ឥធ ភិក្ខុ អនុប្បន្នានំ បាបកានំ អកុសលានំ ធម្មានំ អនុប្បាទាយ ឆន្ទំ ជនេតិ វាយមតិ វីរិយំ អារភតិ ចិត្តំ បគ្គណ្ហាតិ បទហតិ ឧប្បន្នានំ បាបកានំ អកុសលានំ ធម្មានំ បហានាយ ។បេ។ អនុប្បន្នានំ កុសលានំ ធម្មានំ ឧប្បាទាយ ។បេ។ ឧប្បន្នានំ កុសលានំ ធម្មានំ ឋិតិយា អសម្មោសាយ ភិយ្យោភាវាយ វេបុល្លាយ ភាវនាយ បារិបូរិយា ឆន្ទំ ជនេតិ វាយមតិ វីរិយំ អារភតិ ចិត្តំ បគ្គណ្ហាតិ បទហតិ អយំ វុច្ចតិ សម្មាវាយាមោ ។



(១៦៦) បណ្ដាមគ្គមានអង្គ ៨ នោះ សម្មាកម្មន្តៈ តើដូចម្ដេច ។ ការវៀរចាកបាណាតិបាត ការវៀរចាកអទិន្នាទាន ការវៀរចាកការប្រព្រឹត្តិខុស ក្នុងកាមទាំងឡាយ នេះហៅថា សម្មាកម្មន្តៈ ។

(១៦៧) បណ្ដាមគ្គមានអង្គ ៨ នោះ សម្មាអាជីវៈ តើដូចម្ដេច ។ អរិយសាវ័ក ក្នុងសាសនានេះ លះបង់ការចិញ្ចឹមជីវិតខុស ហើយសម្រេចជីវិត ដោយការចិញ្ចឹមជីវិតត្រូវ នេះហៅថា សម្មាអាជីវៈ ។

(១៦៨) បណ្ដាមគ្គ មានអង្គ ៨ នោះ សម្មាវាយាមៈ តើដូចម្ដេច ។ ភិក្ខុ ក្នុងសាសនានេះ ញុំាងឆន្ទៈឲ្យកើត ប្រឹងប្រែង ប្រារព្ធសេចក្ដីព្យាយាម ផ្គងចិត្ត តំកល់ចិត្ត ដើម្បីញុំាងពួកអកុសលធម៌ដ៏លាមក ដែលមិនទាន់កើត មិនឲ្យកើតឡើង ញុំាងឆន្ទៈឲ្យកើត ប្រឹងប្រែង ប្រារព្ធសេចក្ដីព្យាយាម ផ្គងចិត្ត តំកល់ចិត្ត ដើម្បីលះបង់អកុសលធម៌ ដ៏លាមកដែលកើតហើយ ។ បេ ។ ដើម្បីញុំាងពួកកុសលធម៌ ដែលមិនទាន់កើត ឲ្យកើតឡើង ។ បេ ។ ដើម្បីញុំាងពួកកុសលធម៌ ដែលកើតហើយ ឲ្យឋិតនៅ មិនឲ្យវិនាស ឲ្យរឹតតែចម្រើនឡើង ឲ្យធំទូលាយឡើង ឲ្យចំរើនពោរពេញឡើង នេះហៅថា សម្មាវាយាមៈ ។

[១៦៩] តត្ថ កតមា សម្មាសតិ ។ ឥធ ភិក្ខុ កាយេ កាយានុបស្សី វិហរតិ អាតាបី សម្បជានោ សតិមា វិនេយ្យ លោកេ អភិជ្ឈាទោមនស្សំ វេទនាសុ ។បេ។ ចិត្តេ ។បេ។ ធម្មេសុ ធម្មានុបស្សី វិហរតិ អាតាបី សម្បជានោ សតិមា វិនេយ្យ លោកេ អភិជ្ឈាទោមនស្សំ អយំ វុច្ចតិ សម្មាសតិ ។

[១៧០] តត្ថ កតមោ សម្មាសមាធិ ។ ឥធ ភិក្ខុ វិវិច្ចេវ កាមេហិ វិវិច្ច អកុសលេហិ ធម្មេហិ សវិតក្កំ សវិចារំ វិវេកជំ បីតិសុខំ បឋមំ ឈានំ ឧបសម្បជ្ជ វិហរតិ វិតក្កវិចារានំ វូបសមា អជ្ឈត្តំ សម្បសាទនំ ចេតសោ ឯកោទិភាវំ អវិតក្កំ អវិចារំ សមាធិជំ បីតិសុខំ ទុតិយំ ឈានំ ឧបសម្បជ្ជ



[១៦៩] បណ្ដាមគ្គមានអង្គ ៨ នោះ សម្មាសតិ តើដូចម្ដេច ។ ភិក្ខុក្នុងសាសនានេះ ពិចារណាឃើញច្បាស់ នូវកាយក្នុងកាយ មានព្យាយាមញ៉ាំងកិលេសឲ្យក្ដៅ ជាអ្នកដឹងខ្លួនដោយល្អ មានស្មារតីមិនប្រមាទ កំចាត់បង់អភិជ្ឈានិងទោមនស្សក្នុងលោក ពិចារណាឃើញច្បាស់ នូវវេទនា ក្នុងវេទនាទាំងឡាយ ។បេ។ នូវចិត្ត ក្នុងចិត្ត ។បេ។ ពិចារណាឃើញច្បាស់នូវធម៌ ក្នុងធម៌ទាំងឡាយ មានព្យាយាមញ៉ាំងកិលេសឲ្យក្ដៅ ជាអ្នកដឹងខ្លួនដោយល្អ មានស្មារតីមិនប្រមាទ កំចាត់បង់អភិជ្ឈានិងទោមនស្សក្នុងលោក នេះហៅថា សម្មាសតិ ។

[១៧០] បណ្ដាមគ្គមានអង្គ ៨ នោះ សម្មាសមាធិ តើដូចម្ដេច ។ ភិក្ខុ ក្នុងសាសនានេះ ស្ងប់ស្ងាត់ចាកកាមទាំងឡាយ ស្ងប់ស្ងាត់ចាកអកុសលធម៌ទាំងឡាយ ហើយបានដល់ឈានទី ១ ប្រកបដោយវិតក្កៈ ប្រកបដោយវិចារៈ មានបីតិនិងសុខៈកើតអំពីសេចក្ដីស្ងប់ស្ងាត់ ភិក្ខុ បានរម្ងាប់វិតក្កៈនិងវិចារៈរលស់ហើយ បានដល់ឈានទី ២ ជាធម្មជាតកើតមានក្នុងសន្ដានខ្លួន មានសេចក្ដីជ្រះថ្លាដ៏ឧត្ដម គឺសទ្ធា មានសភាពជាចិត្តខ្ពស់ឯក មិនមានវិតក្កៈមិនមានវិចារៈ មានតែបីតិនិងសុខៈកើតអំពីសមាធិ

វិហរតិ បីតិយា ច វិរាគា ឧបេក្ខកោ ច វិហរតិ សតោ ច សម្បជានោ សុខញ្ច កាយេន បដិសំវេទេតិ យន្តំ អរិយា អាចិក្ខន្តិ ឧបេក្ខកោ សតិមា សុខវិហារីតិ តតិយំ ឈានំ ឧបសម្បជ្ជ វិហរតិ សុខស្ស ច បហានា ទុក្ខស្ស ច បហានា បុព្វេវ សោមនស្សទោមនស្សានំ អត្ថង្គមា អទុក្ខមសុខំ ឧបេក្ខាសតិបារិសុទ្ធឹ ចតុត្ថំ ឈានំ ឧបសម្បជ្ជ វិហរតិ អយំ វុច្ចតិ សម្មាសមាធិ ។

ឥទំ វុច្ចតិ ទុក្ខនិរោធគាមិនី បដិបទា អរិយសច្ចំ ។

សុត្តន្តភាជនីយំ ។

(១៧១) ចត្តារិ សច្ចានិ ទុក្ខំ ទុក្ខសមុទយោ ទុក្ខនិរោធោ ទុក្ខនិរោធគាមិនី បដិបទា ។

(១៧២) តត្ថ កតមោ ទុក្ខសមុទយោ ។ តណ្ហា អយំ វុច្ចតិ ទុក្ខសមុទយោ ។



ភិក្ខុ មានចិត្តនឿយណាយចាកបីតិហើយ ប្រកបដោយឧបេក្ខា មានស្មារតីល្អ ជាអ្នកដឹងខ្លួនដោយប្រពៃ បានទទួលនូវសុខដោយនាមកាយ ព្រះអរិយៈទាំងឡាយ តែងសរសើរបុគ្គលដែលបានឈានទី ៣ នោះ ថា បុគ្គលដែលបានឈានទី ៣ រមែងប្រកបដោយឧបេក្ខា មានស្មារតីល្អ មានធម៌ជាគ្រឿងនៅជាសុខ ដូច្នេះ ព្រោះហេតុនៃឈានទី ៣ ណា ក៏បានដល់នូវឈានទី ៣ នោះ ភិក្ខុបានលះបង់សុខនិងទុក្ខអស់ហើយ មានសោមនស្សនិងទោមនស្សអស់ហើយ ក្នុងកាលមុន ក៏បានដល់នូវឈានទី ៤ មានវេទនាមិនមែនទុក្ខមិនមែនសុខ គឺឧបេក្ខា មានសតិដ៏បរិសុទ្ធ ដោយឧបេក្ខា ហើយសម្រេចសម្រាន្តនៅ នេះហៅថា សម្មាសមាធិ ។

នេះហៅថា ទុក្ខនិរោធគាមិនីបដិបទាអរិយសច្ច ។

ចប់ សុត្តន្តភាជនីយ ។

(១៧១) សច្ចៈ ៤ គឺ ទុក្ខ ១ ទុក្ខសមុទ័យ ១ ទុក្ខនិរោធ ១ ទុក្ខនិរោធគាមិនីបដិបទា ១ ។

(១៧២) បណ្តាសច្ចៈទាំង ៤ នោះ ទុក្ខសមុទ័យ តើដូចម្តេច ។ តណ្ហា នេះហៅថា ទុក្ខសមុទ័យ ។

[១៧៣] តត្ថ កតមំ ទុក្ខំ ។ អវសេសា ច កិលេសា អវសេសា ច អកុសលា ធម្មា តីណិ ច កុសលមូលានិ សាសវានិ អវសេសា ច សាសវា កុសលា ធម្មា សាសវា ច កុសលាកុសលានំ ធម្មានំ វិបាកា យេ ច ធម្មា កិរិយា នេវ កុសលា នាកុសលា ន ច កម្មវិបាកា សព្ពញ្ច រូបំ ឥទំ វុច្ចតិ ទុក្ខំ ។

[១៧៤] តត្ថ កតមោ ទុក្ខនិរោធោ ។ តណ្ហាយ បហានំ អយំ វុច្ចតិ ទុក្ខនិរោធោ ។

[១៧៥] តត្ថ កតមា ទុក្ខនិរោធគាមិនី បដិបទា ។ ឥធ ភិក្ខុ យស្មឹ សមយេ លោកុត្តរំ ឈានំ ភាវេតិ និយ្យានិកំ អបចយគាមឹ ទិដ្ឋិគតានំ បហានាយ បឋមាយ ភូមិយា បត្តិយា វិវិច្ចេវ កាមេហិ ។បេ។ បឋមំ ឈានំ ឧបសម្បជ្ជ វិហរតិ ទុក្ខាបដិបទំ ទន្ធាភិញ្ញំ តស្មឹ សមយេ អដ្ឋង្គិកោ មគ្គោ ហោតិ សម្មាទិដ្ឋិ ។បេ។ សម្មាសមាធិ ។



[១៧៣] បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខ តើដូចម្ដេច ។ ពួកកិលេសដ៏សេសក្ដី ពួកអកុសលធម៌ដ៏សេសក្ដី ពួកកុសលមូលទាំង ៣ ប្រព្រឹត្តទៅជាមួយនឹងអាសវៈក្ដី ពួកកុសលធម៌ ប្រព្រឹត្តទៅជាមួយនឹងអាសវៈដ៏សេសក្ដី ពួកវិបាកនៃកុសលធម៌ និងអកុសលធម៌ទាំងឡាយ ប្រព្រឹត្តទៅជាមួយនឹងអាសវៈក្ដី ទាំងពួកធម៌ណា ដែលជាកិរិយា មិនមែនកុសល មិនមែនអកុសល មិនមែនកម្មវិបាកក្ដី រូបទាំងអស់ក្ដី នេះហៅថា ទុក្ខ ។

[១៧៤] បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខនិរោធ តើដូចម្ដេច ។ ការលះបង់តណ្ហា នេះហៅថា ទុក្ខនិរោធ ។

[១៧៥] បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខនិរោធគាមិនីបដិបទា តើដូចម្ដេច ។ សម័យណា ភិក្ខុក្នុងសាសនានេះ ចម្រើនលោកុត្តរជ្ឈាន ជាទីស្រោចស្រង់ ដល់នូវការមិនសន្សំកក្កូនឡើង ដើម្បីលះបង់ទិដ្ឋិទាំងឡាយ ដើម្បីដល់នូវបឋមភូមិ ស្ងប់ស្ងាត់ចាកកាមទាំងឡាយ ។បេ។ ក៏បានដល់នូវបឋមជ្ឈាន ជាទុក្ខាបដិបទា ទន្ធាភិញ្ញា សម័យនោះ មគ្គមានអង្គ ៨ គឺ សម្មាទិដ្ឋិ ។បេ។ សម្មាសមាធិ ក៏កើតមាន ។

(១៧៦) តត្ថ កតមា សម្មាទិដ្ឋិ ។ យា បញ្ញា បជានានា ។បេ។ អមោហោ ធម្មវិចយោ សម្មាទិដ្ឋិ ធម្មវិចយសម្ពោជ្ឈង្គោ មគ្គង្គំ មគ្គបរិយាបន្នំ អយំ វុច្ចតិ សម្មាទិដ្ឋិ ។

(១៧៧) តត្ថ កតមោ សម្មាសង្កប្បោ ។ យោ តក្កោ វិតក្កោ ។បេ។ សម្មាសង្កប្បោ មគ្គង្គំ មគ្គបរិយាបន្នំ អយំ វុច្ចតិ សម្មាសង្កប្បោ ។

(១៧៨) តត្ថ កតមា សម្មាវាចា ។ យា ចតូហិ វចីទុច្ចរិតេហិ អារតិ វិរតិ បដិវិរតិ វេរមណី អកិរិយា អករណំ អនជ្ឈាបត្តិ វេលាអនតិក្កមោ សេតុឃាតោ សម្មាវាចា មគ្គង្គំ មគ្គបរិយាបន្នំ អយំ វុច្ចតិ សម្មាវាចា ។

(១៧៩) តត្ថ កតមោ សម្មាកម្មន្តោ ។ យា តីហិ កាយទុច្ចរិតេហិ អារតិ វិរតិ បដិវិរតិ វេរមណី អកិរិយា អករណំ អនជ្ឈាបត្តិ វេលាអនតិក្កមោ សេតុឃាតោ សម្មាកម្មន្តោ មគ្គង្គំ មគ្គបរិយាបន្នំ អយំ វុច្ចតិ សម្មាកម្មន្តោ ។



(១៧៦) បណ្ដាមគ្គ មានអង្គ ៨ នោះ សម្មាទិដ្ឋិ តើដូចម្ដេច ។ បញ្ញា ការដឹងច្បាស់ ។បេ។ ការមិនវង្វេង ការពិចារណាធម៌ ការយល់ត្រូវ ធម្មវិចយសម្ពោជ្ឈង្គ ជាអង្គនៃមគ្គ រាប់បញ្ចូលក្នុងមគ្គ ណា នេះហៅថា សម្មាទិដ្ឋិ ។

(១៧៧) បណ្ដាមគ្គមានអង្គ ៨ នោះ សម្មាសង្កប្បៈ តើដូចម្ដេច ។ សេចក្ដីត្រិះរិះ សេចក្ដីត្រិះរិះផ្សេង ៗ ។បេ។ សេចក្ដីត្រិះរិះត្រូវ ជាអង្គនៃមគ្គ រាប់បញ្ចូលក្នុងមគ្គ ណា នេះហៅថា សម្មាសង្កប្បៈ ។

(១៧៨) បណ្ដាមគ្គមានអង្គ ៨ នោះ សម្មាវាចា តើដូចម្ដេច ។ ការវេន ការគេចចេញ ការចៀស ការវៀរ ចាកវចីទុច្ចរិតទាំង ៤ គឺ កិរិយាមិនធ្វើ កិរិយាមិនសាង កិរិយាមិនល្មើស ការមិនប្រព្រឹត្តកន្លងវេលា ការសម្លាប់ហេតុ ការពោលត្រូវ ជាអង្គនៃមគ្គ រាប់បញ្ចូលក្នុងមគ្គ ណា នេះហៅថា សម្មាវាចា ។

(១៧៩) បណ្ដាមគ្គមានអង្គ ៨ នោះ សម្មាកម្មន្តៈ តើដូចម្ដេច ។ ការវេន ការគេចចេញ ការចៀស ការវៀរ ចាកកាយទុច្ចរិតទាំង ៣ គឺ កិរិយាមិនធ្វើ កិរិយាមិនសាង កិរិយាមិនល្មើស ការមិនប្រព្រឹត្តកន្លងវេលា ការសម្លាប់ហេតុ ការធ្វើត្រូវ ជាអង្គនៃមគ្គ រាប់បញ្ចូលក្នុងមគ្គ ណា នេះហៅថា សម្មាកម្មន្តៈ ។

(១៨០) តត្ថ កតមោ សម្មាអាជីវោ ។ យា មិច្ឆាអាជីវា អារតិ វិរតិ បដិវិរតិ វេរមណី អកិរិយា អករណំ អនជ្ឈាបត្តិ វេលាអនតិក្កមោ សេតុឃាតោ សម្មាអាជីវោ មគ្គង្គំ មគ្គបរិយាបន្នំ អយំ វុច្ចតិ សម្មាអាជីវោ ។

(១៨១) តត្ថ កតមោ សម្មាវាយាមោ ។ យោ ចេតសិកោ វីរិយារម្ភោ ។ បេ ។ សម្មាវាយាមោ វីរិយសម្ពោជ្ឈង្គោ មគ្គង្គំ មគ្គបរិយាបន្នំ អយំ វុច្ចតិ សម្មាវាយាមោ ។

(១៨២) តត្ថ កតមា សម្មាសតិ ។ យា សតិ អនុស្សតិ ។ បេ ។ សម្មាសតិ សតិសម្ពោជ្ឈង្គោ មគ្គង្គំ មគ្គបរិយាបន្នំ អយំ វុច្ចតិ សម្មាសតិ ។

(១៨៣) តត្ថ កតមោ សម្មាសមាធិ ។ យា ចិត្តស្ស ឋិតិ ។ បេ ។ សម្មាសមាធិ សមាធិសម្ពោជ្ឈង្គោ មគ្គង្គំ មគ្គបរិយាបន្នំ អយំ វុច្ចតិ សម្មាសមាធិ ។

អយំ វុច្ចតិ ទុក្ខនិរោធគាមិនី បដិបទា អវសេសា ធម្មា ទុក្ខនិរោធគាមិនិយា បដិបទាយ សម្បយុត្តា ។



(១៨០) បណ្ដាមគ្គមានអង្គ ៨ នោះ សម្មាអាជីវៈ តើដូចម្ដេច ។ ការវេន ការវេតចេញ ការចៀស ការវៀរ ចាកការចិញ្ចឹមជីវិតខុស គឺកិរិយាមិនធ្វើ កិរិយាមិនសាង កិរិយាមិនល្មើស ការមិនប្រព្រឹត្តកន្លងវេលា ការសម្លាប់ហេតុ ការចិញ្ចឹមជីវិតត្រូវ ជាអង្គនៃមគ្គ រាប់បញ្ចូលក្នុងមគ្គ ណា នេះហៅថា សម្មាអាជីវៈ ។

(១៨១) បណ្ដាមគ្គ មានអង្គ ៨ នោះ សម្មាវាយាមៈ តើដូចម្ដេច ។ ការប្រារព្ធព្យាយាម ប្រព្រឹត្តទៅក្នុងចិត្ត ។ បេ ។ សេចក្ដីព្យាយាមត្រូវ វីរិយសម្ពោជ្ឈង្គ ជាអង្គនៃមគ្គ រាប់បញ្ចូលក្នុងមគ្គ ណា នេះហៅថា សម្មាវាយាមៈ ។

(១៨២) បណ្ដាមគ្គមានអង្គ ៨ នោះ សម្មាសតិ តើដូចម្ដេច ។ ការរលឹក ការនឹកឃើញ ។ បេ ។ សតិត្រឹមត្រូវ សតិសម្ពោជ្ឈង្គ ជាអង្គនៃមគ្គ រាប់បញ្ចូលក្នុងមគ្គ ណា នេះហៅថា សម្មាសតិ ។

(១៨៣) បណ្ដាមគ្គមានអង្គ ៨ នោះ សម្មាសមាធិ តើដូចម្ដេច ។ ការតំកល់ចិត្ត ។ បេ ។ សមាធិត្រូវ សមាធិសម្ពោជ្ឈង្គ ជាអង្គនៃមគ្គ រាប់បញ្ចូលក្នុងមគ្គ ណា នេះហៅថា សម្មាសមាធិ ។

នេះហៅថា ទុក្ខនិរោធគាមិនីបដិបទា ពួកធម៌ដ៏សេស ដែលសម្បយុត្តដោយទុក្ខនិរោធគាមិនីបដិបទា (ក៏ហៅថា ទុក្ខនិរោធគាមិនីបដិបទាដែរ) ។

(១៨៤) តត្ថ កតមោ ទុក្ខសមុទយោ ។ តណ្ហា ច អវសេសា កិលេសា អយំ វុច្ចតិ ទុក្ខសមុទយោ ។

(១៨៥) តត្ថ កតមំ ទុក្ខំ ។ អវសេសា ច អកុសលា ធម្មា តីណិ ច កុសលមូលានិ សាសវានិ អវសេសា ច សាសវា កុសលា ធម្មា សាសវា ច កុសលាកុសលានំ ធម្មានំ វិបាកា យេ ច ធម្មា កិរិយា នេវ កុសលា នាកុសលា ន ច កម្មវិបាកា សព្វញ្ច រូបំ ឥទំ វុច្ចតិ ទុក្ខំ ។

(១៨៦) តត្ថ កតមោ ទុក្ខនិរោធោ ។ តណ្ហាយ ច អវសេសានញ្ច កិលេសានំ បហានំ អយំ វុច្ចតិ ទុក្ខនិរោធោ ។

(១៨៧) តត្ថ កតមា ទុក្ខនិរោធគាមិនី បដិបទា ។ ឥធ ភិក្ខុ យស្មឹ សមយេ លោកុត្តរំ ឈានំ ភាវេតិ និយ្យានិកំ អបចយគាមឹ ទិដ្ឋិគតានំ បហានាយ បឋមាយ ភូមិយា បត្តិយា វិវិច្ចេវ កាមេហិ ។បេ។ បឋមំ ឈានំ ឧបសម្បជ្ជ វិហរតិ ទុក្ខាបដិបទំ ទន្ធាភិញ្ញំ តស្មឹ សមយេ អដ្ឋង្គិកោ មគ្គោ ហោតិ



(១៨៤) បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខសមុទ័យ តើដូចម្ដេច ។ តណ្ហានិងពួកកិលេសដ៏សេស នេះហៅថា ទុក្ខសមុទ័យ ។

(១៨៥) បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខ តើដូចម្ដេច ។ ពួកអកុសលធម៌ដ៏សេសក្ដី ពួកកុសលមូលទាំង ៣ ប្រព្រឹត្តទៅជាមួយនឹងអាសវៈដ៏សេសក្ដី ពួកកុសលធម៌ ប្រព្រឹត្តទៅជាមួយនឹងអាសវៈក្ដី ពួកវិបាកនៃកុសលធម៌ និងអកុសលធម៌ទាំងឡាយ ប្រព្រឹត្តទៅជាមួយនឹងអាសវៈក្ដី ទាំងពួកធម៌ណា ដែលជាកិរិយា មិនមែនកុសល មិនមែនអកុសល មិនមែនកម្មវិបាកក្ដី រូបទាំងអស់ក្ដី នេះហៅថា ទុក្ខ ។

(១៨៦) បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខនិរោធ តើដូចម្ដេច ។ កិរិយាលះនូវតណ្ហាផង នូវកិលេសទាំងឡាយដ៏សេសផង នេះហៅថា ទុក្ខនិរោធ ។

(១៨៧) បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខនិរោធគាមិនីបដិបទា តើដូចម្ដេច ។ សម័យណា ភិក្ខុក្នុងសាសនានេះ ចម្រើនលោកុត្តរជ្ឈាន ជាទីស្រោចស្រង់ ដល់នូវការមិនសន្សំកព្ធនឡើង ដើម្បីលះទិដ្ឋិទាំងឡាយ ដើម្បីដល់នូវបឋមភូមិ ស្ងប់ស្ងាត់ចាកកាមទាំងឡាយ ។បេ។ ក៏បានដល់នូវបឋមជ្ឈាន ជាទុក្ខាបដិបទាទន្ធាភិញ្ញា សម័យនោះ មគ្គមានអង្គ ៨ គឺ

សម្មាទិដ្ឋិ ។ បេ ។ សម្មាសមាធិ អយំ វុច្ចតិ ទុក្ខនិរោធគាមិនី បដិបទា អវសេសា ធម្មា ទុក្ខនិរោធគាមិនិយា បដិបទាយ សម្បយុត្តា ។

(១៨៨) តត្ថ កតមោ ទុក្ខសមុទយោ ។ តណ្ហា ច អវសេសា ច កិលេសា អវសេសា ច អកុសលា ធម្មា អយំ វុច្ចតិ ទុក្ខសមុទយោ ។

(១៨៩) តត្ថ កតមំ ទុក្ខំ ។ តីណិ ច កុសលមូលានិ សាសវានិ អវសេសា ច សាសវា កុសលា ធម្មា សាសវា ច កុសលាកុសលានំ ធម្មានំ វិបាកា យេ ច ធម្មា កិរិយា នេវ កុសលា នាកុសលា ន ច កម្មវិបាកា សព្វញ្ច រូបំ ឥទំ វុច្ចតិ ទុក្ខំ ។

(១៩០) តត្ថ កតមោ ទុក្ខនិរោធោ ។ តណ្ហាយ ច អវសេសានញ្ច កិលេសានំ អវសេសានញ្ច អកុសលានំ ធម្មានំ បហានំ អយំ វុច្ចតិ ទុក្ខនិរោធោ ។

(១៩១) តត្ថ កតមា ទុក្ខនិរោធគាមិនី បដិបទា ។ ឥធ ភិក្ខុ យស្មឹ សមយេ លោកុត្តរំ ឈានំ ភាវេតិ និយ្យានិកំ អបចយគាមឹ ទិដ្ឋិគតានំ បហានាយ បឋមាយ ភូមិយា បត្តិយា វិវិច្ច កាមេហិ ។ បេ ។



សម្មាទិដ្ឋិ ។ បេ ។ សម្មាសមាធិ ក៏កើតមាន នេះហៅថា ទុក្ខនិរោធគាមិនីបដិបទា ពួកធម៌ដ៏សេស ដែលសម្បយុត្តដោយទុក្ខនិរោធគាមិនីបដិបទា (ក៏ហៅថា ទុក្ខនិរោធគាមិនីបដិបទាដែរ) ។

(១៨៨) បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខសមុទ័យ តើដូចម្ដេច ។ តណ្ហាក្ដី ពួកកិលេសដ៏សេសក្ដី ពួកអកុសលធម៌ដ៏សេសក្ដី នេះហៅថា ទុក្ខសមុទ័យ ។

(១៨៩) បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខ តើដូចម្ដេច ។ ពួកកុសលមូលទាំង ៣ ប្រព្រឹត្តទៅជាមួយនឹងអាសវៈក្ដី ពួកកុសលធម៌ប្រព្រឹត្តទៅជាមួយនឹងអាសវៈដ៏សេសក្ដី ពួកវិបាកនៃកុសលធម៌និងអកុសលធម៌ទាំងឡាយ ប្រព្រឹត្តទៅជាមួយនឹងអាសវៈក្ដី ទាំងពួកធម៌ណា ដែលជាកិរិយា មិនមែនកុសល មិនមែនអកុសល មិនមែនកម្មវិបាកក្ដី រូបទាំងអស់ក្ដី នេះហៅថា ទុក្ខ ។

(១៩០) បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខនិរោធ តើដូចម្ដេច ។ ការលះ នូវតណ្ហាក្ដី នូវពួកកិលេសដ៏សេសក្ដី នូវពួកអកុសលធម៌ដ៏សេសក្ដី នេះហៅថា ទុក្ខនិរោធ ។

(១៩១) បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខនិរោធគាមិនីបដិបទា តើដូចម្ដេច ។ សម័យណា ភិក្ខុក្នុងសាសនានេះ ចំរើនលោកុត្តរជ្ឈាន ជានិយ្យានិកៈ ដល់នូវការមិនសន្សំកព្វូនឡើង ដើម្បីលះទិដ្ឋិទាំងឡាយ ដើម្បីដល់នូវបឋមភូមិ ស្ងប់ស្ងាត់ចាកកាមទាំងឡាយ ។ បេ ។

បឋមំ ឈានំ ឧបសម្បជ្ជ វិហរតិ ទុក្ខាបដិបទំ ទន្ធាភិញ្ញំ តស្មឹ សមយេ អដ្ឋង្គិកោ មគ្គោ ហោតិ សម្មាទិដ្ឋិ ។បេ។ សម្មាសមាធិ អយំ វុច្ចតិ ទុក្ខនិរោធគាមិនី បដិបទា អវសេសា ធម្មា ទុក្ខនិរោធគាមិនិយា បដិបទាយ សម្បយុត្តា ។

(១៩២) តត្ថ កតមោ ទុក្ខសមុទយោ ។ តណ្ហា ច អវសេសា ច កិលេសា អវសេសា ច អកុសលា ធម្មា តីណិ ច កុសលមូលានិ សាសវានិ អយំ វុច្ចតិ ទុក្ខសមុទយោ ។

(១៩៣) តត្ថ កតមំ ទុក្ខំ ។ អវសេសា ច សាសវា កុសលា ធម្មា សាសវា ច កុសលាកុសលានំ ធម្មានំ វិបាកា យេ ច ធម្មា កិរិយា នេវ កុសលា នាកុសលា ន ច កម្មវិបាកា សព្វញ្ច រូបំ ឥទំ វុច្ចតិ ទុក្ខំ ។

(១៩៤) តត្ថ កតមោ ទុក្ខនិរោធោ ។ តណ្ហាយ ច អវសេសានញ្ច កិលេសានំ អវសេសានញ្ច អកុសលានំ ធម្មានំ តិណ្ណញ្ច កុសលមូលានំ សាសវានំ បហានំ អយំ វុច្ចតិ ទុក្ខនិរោធោ ។



ក៏បាននូវបឋមជ្ឈាន ជាទុក្ខាបដិបទា ទន្ធាភិញ្ញា សម័យនោះ មគ្គមានអង្គ ៨ គឺ សម្មាទិដ្ឋិ ។បេ។ សម្មាសមាធិ ក៏កើតមាន នេះហៅថា ទុក្ខនិរោធគាមិនីបដិបទា ពួកធម៌ដ៏សេស ដែលសម្បយុត្តដោយទុក្ខនិរោធគាមិនីបដិបទា (ក៏ហៅថា ទុក្ខនិរោធគាមិនីបដិបទាដែរ) ។

(១៩២) បណ្តាសច្ចៈទាំង ៤ នោះ ទុក្ខសមុទ័យ តើដូចម្តេច ។ តណ្ហាក្តី ពួកកិលេសដ៏សេសក្តី ពួកអកុសលធម៌ដ៏សេសក្តី កុសលមូលទាំង ៣ ប្រព្រឹត្តទៅជាមួយនឹងអាសវៈក្តី នេះហៅថា ទុក្ខសមុទ័យ ។

(១៩៣) បណ្តាសច្ចៈទាំង ៤ នោះ ទុក្ខ តើដូចម្តេច ។ ពួកកុសលធម៌ ប្រព្រឹត្តទៅជាមួយនឹងអាសវៈដ៏សេសក្តី ពួកវិបាក នៃកុសលធម៌ និងអកុសលធម៌ទាំងឡាយ ប្រព្រឹត្តទៅជាមួយនឹងអាសវៈក្តី ទាំងពួកធម៌ណា ដែលជាកិរិយា មិនមែនកុសល មិនមែនអកុសល មិនមែនកម្មវិបាកក្តី រូបទាំងអស់ក្តី នេះហៅថា ទុក្ខ ។

(១៩៤) បណ្តាសច្ចៈទាំង ៤ នោះ ទុក្ខនិរោធ តើដូចម្តេច ។ កិរិយាលះ នូវតណ្ហាក្តី នូវពួកកិលេសដ៏សេសក្តី នូវពួកអកុសលធម៌ដ៏សេសក្តី នូវពួកកុសលមូលទាំង ៣ ប្រព្រឹត្តទៅជាមួយនឹងអាសវៈក្តី នេះហៅថា ទុក្ខនិរោធ ។

(១៩៥) តត្ថ កតមា ទុក្ខនិរោធគាមិនី បដិបទា ។ ឥធ ភិក្ខុ យស្មឹ សមយេ លោកុត្តរំ ឈានំ ភាវេតិ និយ្យានិកំ អបចយគាមឹ ទិដ្ឋិគតានំ បហានាយ បឋមាយ ភូមិយា បត្តិយា វិវិច្ចេវ កាមេហិ ។បេ។ បឋមំ ឈានំ ឧបសម្បជ្ជ វិហរតិ ទុក្ខាបដិបទំ ទន្ធាភិញ្ញំ តស្មឹ សមយេ អដ្ឋង្គិកោ មគ្គោ ហោតិ សម្មាទិដ្ឋិ ។បេ។ សម្មាសមាធិ អយំ វុច្ចតិ ទុក្ខនិរោធគាមិនី បដិបទា អវសេសា ធម្មា ទុក្ខនិរោធគាមិនិយា បដិបទាយ សម្បយុត្តា ។

(១៩៦) តត្ថ កតមោ ទុក្ខសមុទយោ ។ តណ្ហា ច អវសេសា ច កិលេសា អវសេសា ច អកុសលា ធម្មា តីណិ ច អកុសលមូលានិ សាសវានិ អវសេសា ច សាសវា កុសលា ធម្មា អយំ វុច្ចតិ ទុក្ខសមុទយោ ។

(១៩៧) តត្ថ កតមំ ទុក្ខំ ។ សាសវា កុសលាកុសលានំ ធម្មានំ វិបាកា យេ ច ធម្មា កិរិយា នេវ កុសលា នាកុសលា ន ច កម្មវិបាកា សព្វញ្ច រូបំ ឥទំ វុច្ចតិ ទុក្ខំ ។



(១៩៥) បណ្តាសច្ចៈទាំង ៤ នោះ ទុក្ខនិរោធគាមិនីបដិបទា តើដូចម្តេច ។ សម័យណា ភិក្ខុ ក្នុងសាសនានេះ ចម្រើនលោកុត្តរជ្ឈាន ជានិយ្យានិកៈ ដល់នូវការមិនសន្សំកពូនឡើង ដើម្បីលះទិដ្ឋិទាំងឡាយ ដើម្បីដល់នូវបឋមភូមិ ស្ងប់ស្ងាត់ចាកកាមទាំងឡាយ ។បេ។ ក៏បាន ដល់បឋមជ្ឈាន ជាទុក្ខាបដិបទាទន្ធាភិញ្ញា សម័យនោះ មគ្គមានអង្គ ៨ គឺ សម្មាទិដ្ឋិ ។បេ។ សម្មាសមាធិ ក៏កើតមាន នេះហៅថា ទុក្ខនិរោធគាមិនីបដិបទា ពួកធម៌ដ៏សេស ដែលសម្បយុត្ត ដោយទុក្ខនិរោធគាមិនីបដិបទា (ក៏ហៅថា ទុក្ខនិរោធគាមិនីបដិបទាដែរ) ។

(១៩៦) បណ្តាសច្ចៈទាំង ៤ នោះ ទុក្ខសមុទ័យ តើដូចម្តេច ។ តណ្ហាផង ពួកកិលេសដ៏សេសផង ពួកអកុសលធម៌ដ៏សេសផង ពួកកុសលមូលទាំង ៣ ប្រព្រឹត្តទៅជាមួយនឹងអាសវៈផង ពួកកុសលធម៌ប្រព្រឹត្តទៅជាមួយនឹងអាសវៈដ៏សេសផង នេះហៅថា ទុក្ខសមុទ័យ ។

(១៩៧) បណ្តាសច្ចៈទាំង ៤ នោះ ទុក្ខ តើដូចម្តេច ។ ពួកវិបាកនៃកុសលធម៌ និងអកុសលធម៌ទាំងឡាយ ប្រព្រឹត្តទៅជាមួយនឹងអាសវៈផង ទាំងពួកធម៌ណា ដែលជាកិរិយា មិនមែនកុសល មិនមែនអកុសល មិនមែនកម្មវិបាកផង រូបទាំងអស់ផង នេះហៅថា ទុក្ខ ។

( ១៩៨ ) តត្ថ កតមោ ទុក្ខនិរោធោ ។ តណ្ហាយ ច អវសេសានញ្ច កិលេសានំ អវសេសានញ្ច អកុសលានំ ធម្មានំ តិណ្ណញ្ច កុសលមូលានំ សាសវានំ អវសេសានញ្ច សាសវានំ កុសលានំ ធម្មានំ បហានំ អយំ វុច្ចតិ ទុក្ខនិរោធោ ។

( ១៩៩ ) តត្ថ កតមា ទុក្ខនិរោធគាមិនី បដិបទា ។ ឥធ ភិក្ខុ យស្មឹ សមយេ លោកុត្តរំ ឈានំ ភាវេតិ និយ្យានិកំ អបចយគាមឹ ទិដ្ឋិគតានំ បហានាយ បឋមាយ ភូមិយា បត្តិយា វិវិច្ចេវ កាមេហិ ។បេ។ បឋមំ ឈានំ ឧបសម្បជ្ជ វិហរតិ ទុក្ខាបដិបទំ ទន្ធាភិញ្ញំ តស្មឹ សមយេ អដ្ឋង្គិកោ មគ្គោ ហោតិ សម្មាទិដ្ឋិ ។បេ។ សម្មាសមាធិ អយំ វុច្ចតិ ទុក្ខនិរោធគាមិនី បដិបទា អវសេសា ធម្មា ទុក្ខនិរោធគាមិនិយា បដិបទាយ សម្បយុត្តា ។

( ២០០ ) ចត្តារិ សច្ចានិ ទុក្ខំ ទុក្ខសមុទយោ ទុក្ខនិរោធោ ទុក្ខនិរោធគាមិនី បដិបទា ។

( ២០១ ) តត្ថ កតមោ ទុក្ខសមុទយោ ។ តណ្ហា អយំ វុច្ចតិ ទុក្ខសមុទយោ ។



( ១៩៨ ) បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខនិរោធ តើដូចម្ដេច ។ កិរិយាលះ នូវតណ្ហាក្ដី នូវពួកកិលេសដ៏សេសក្ដី នូវពួកអកុសលធម៌ដ៏សេសក្ដី នូវពួកកុសលមូលទាំង ៣ ប្រព្រឹត្តទៅជាមួយនឹងអាសវៈក្ដី នូវពួកកុសលធម៌ ប្រព្រឹត្តទៅជាមួយនឹងអាសវៈដ៏សេសក្ដី នេះហៅថា ទុក្ខនិរោធ ។

( ១៩៩ ) បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខនិរោធគាមិនីបដិបទា តើដូចម្ដេច ។ សម័យណា ភិក្ខុក្នុងសាសនានេះ ចម្រើនលោកុត្តរជ្ឈាន ជានិយ្យានិកៈ ដល់នូវការមិនសន្សំកពូនឡើង ដើម្បីលះបង់ទិដ្ឋិទាំងឡាយ ដើម្បីដល់នូវបឋមភូមិ ស្ងប់ស្ងាត់ចាកកាមទាំងឡាយ ។បេ។ ក៏បានដល់បឋមជ្ឈាន ជាទុក្ខាបដិបទាទន្ធាភិញ្ញា សម័យនោះ មគ្គមានអង្គ ៨ ប្រការ គឺ សម្មាទិដ្ឋិ ។បេ។ សម្មាសមាធិ ក៏កើតមាន នេះហៅថា ទុក្ខនិរោធគាមិនីបដិបទា ពួកធម៌ដ៏សេស ដែលសម្បយុត្តដោយទុក្ខនិរោធគាមិនីបដិបទា ( ក៏ហៅថា ទុក្ខនិរោធគាមិនីបដិបទាដែរ ) ។

( ២០០ ) សច្ចៈ ៤ គឺ ទុក្ខ ១ ទុក្ខសមុទ័យ ១ ទុក្ខនិរោធ ១ ទុក្ខនិរោធគាមិនីបដិបទា ១ ។

( ២០១ ) បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខសមុទ័យ តើដូចម្ដេច ។ តណ្ហា នេះហៅថា ទុក្ខសមុទ័យ ។

(២០២) តត្ថ កតមំ ទុក្ខំ ។ អវសេសា ច កិលេសា អវសេសា ច អកុសលា ធម្មា តីណិ ច កុសលមូលានិ សាសវានិ អវសេសា ច សាសវា កុសលា ធម្មា សាសវា ច កុសលាកុសលានំ ធម្មានំ វិបាកា យេ ច ធម្មា កិរិយា នេវ កុសលា នាកុសលា ន ច កម្មវិបាកា សព្វញ្ច រូបំ ឥទំ វុច្ចតិ ទុក្ខំ ។

(២០៣) តត្ថ កតមោ ទុក្ខនិរោធោ ។ តណ្ហាយ បហានំ អយំ វុច្ចតិ ទុក្ខនិរោធោ ។

(២០៤) តត្ថ កតមា ទុក្ខនិរោធគាមិនី បដិបទា ។ ឥធ ភិក្ខុ យស្មឹ សមយេ លោកុត្តរំ ឈានំ ភាវេតិ និយ្យានិកំ អបចយគាមឹ ទិដ្ឋិគតានំ បហានាយ បឋមាយ ភូមិយា បត្តិយា វិវិច្ចេវ កាមេហិ ។បេ។ បឋមំ ឈានំ ឧបសម្បជ្ជ វិហរតិ ទុក្ខាបដិបទំ ទន្ធាភិញ្ញំ តស្មឹ សមយេ បញ្ចង្គិកោ មគ្គោ ហោតិ សម្មាទិដ្ឋិ សម្មាសង្កប្បោ សម្មាវាយាមោ សម្មាសតិ សម្មាសមាធិ ។

(២០២) បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខ តើដូចម្ដេច ។ ពួកកិលេសដ៏សេសក្ដី ពួកអកុសលធម៌ដ៏សេសក្ដី ពួកកុសលមូលទាំង ៣ ប្រព្រឹត្តទៅជាមួយនឹងអាសវៈក្ដី ពួកកុសលធម៌ ប្រព្រឹត្តទៅជាមួយនឹងអាសវៈដ៏សេសក្ដី ពួកវិបាកនៃកុសលធម៌និងអកុសលធម៌ ប្រព្រឹត្តទៅជាមួយនឹងអាសវៈក្ដី ទាំងពួកធម៌ណា ដែលជាកិរិយា មិនមែនកុសល មិនមែនអកុសល មិនមែនកម្មវិបាកក្ដី រូបទាំងអស់ក្ដី នេះហៅថា ទុក្ខ ។

(២០៣) បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខនិរោធ តើដូចម្ដេច ។ កិរិយាលះបង់នូវតណ្ហា នេះហៅថា ទុក្ខនិរោធ ។

(២០៤) បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខនិរោធគាមិនីបដិបទា តើដូចម្ដេច ។ សម័យណា ភិក្ខុក្នុងសាសនានេះ ចម្រើនលោកុត្តរជ្ឈាន ជានិយ្យានិកៈ ដល់នូវការមិនសន្សំភពទៀត ដើម្បីលះទិដ្ឋិទាំងឡាយ ដើម្បីដល់នូវបឋមភូមិ ស្ងប់ស្ងាត់ចាកកាមទាំងឡាយ ។បេ។ ក៏បានដល់នូវបឋមជ្ឈាន ជាទុក្ខាបដិបទាទន្ធាភិញ្ញា សម័យនោះ មគ្គមានអង្គ ៥ គឺ សម្មាទិដ្ឋិ សម្មាសង្កប្បៈ សម្មាវាយាមៈ សម្មាសតិ សម្មាសមាធិ ក៏កើតមាន ។

( ២០៥ ) តត្ថ កតមា សម្មាទិដ្ឋិ ។ យា បញ្ញា បជានានា ។បេ។ អមោហោ ធម្មវិចយោ សម្មាទិដ្ឋិ ធម្មវិចយសម្ពោជ្ឈង្គោ មគ្គង្គំ មគ្គបរិយាបន្នំ អយំ វុច្ចតិ សម្មាទិដ្ឋិ ។

( ២០៦ ) តត្ថ កតមោ សម្មាសង្កប្បោ ។ យោ តក្កោ វិតក្កោ សម្មាសង្កប្បោ ។បេ។ មគ្គង្គំ មគ្គបរិយាបន្នំ អយំ វុច្ចតិ សម្មាសង្កប្បោ ។

( ២០៧ ) តត្ថ កតមោ សម្មាវាយាមោ ។ យោ ចេតសិកោ វីរិយារម្ភោ ។បេ។ សម្មាវាយាមោ វីរិយសម្ពោជ្ឈង្គោ មគ្គង្គំ មគ្គបរិយាបន្នំ អយំ វុច្ចតិ សម្មាវាយាមោ ។

( ២០៨ ) តត្ថ កតមា សម្មាសតិ ។ យា សតិ អនុស្សតិ ។បេ។ សម្មាសតិ សតិសម្ពោជ្ឈង្គោ មគ្គង្គំ មគ្គបរិយាបន្នំ អយំ វុច្ចតិ សម្មាសតិ ។

( ២០៩ ) តត្ថ កតមោ សម្មាសមាធិ ។ យា ចិត្តស្ស ឋិតិ ។បេ។ សម្មាសមាធិ សមាធិសម្ពោជ្ឈង្គោ មគ្គង្គំ មគ្គបរិយាបន្នំ អយំ វុច្ចតិ សម្មាសមាធិ ។



( ២០៥ ) បណ្ដាមគ្គមានអង្គ ៥ នោះ សម្មាទិដ្ឋិ តើដូចម្ដេច ។ បញ្ញា ការដឹងច្បាស់ ។បេ។ ការមិនវង្វេង ការពិចារណាធម៌ ការយល់ត្រូវ ធម្មវិចយសម្ពោជ្ឈង្គ ជាអង្គនៃមគ្គ រាប់បញ្ចូលក្នុងមគ្គ ណា នេះហៅថា សម្មាទិដ្ឋិ ។

( ២០៦ ) បណ្ដាមគ្គមានអង្គ ៥ នោះ សម្មាសង្កប្បៈ តើដូចម្ដេច ។ សេចក្ដីជញ្ជឹង សេចក្ដីត្រិះរិះ សេចក្ដីត្រិះរិះត្រូវ ។បេ។ ជាអង្គនៃមគ្គ រាប់បញ្ចូលក្នុងមគ្គ ណា នេះហៅថា សម្មាសង្កប្បៈ ។

( ២០៧ ) បណ្ដាមគ្គមានអង្គ ៥ នោះ សម្មាវាយាមៈ តើដូចម្ដេច ។ ការប្រារព្ធព្យាយាម ប្រព្រឹត្តទៅក្នុងចិត្ត ។បេ។ សេចក្ដីព្យាយាមត្រូវ វីរិយសម្ពោជ្ឈង្គ ជាអង្គនៃមគ្គ រាប់បញ្ចូលក្នុងមគ្គ ណា នេះហៅថា សម្មាវាយាមៈ ។

( ២០៨ ) បណ្ដាមគ្គមានអង្គ ៥ នោះ សម្មាសតិ តើដូចម្ដេច ។ ការរលឹក ការនឹកឃើញ ។បេ។ ការរលឹកត្រូវ សតិសម្ពោជ្ឈង្គ ជាអង្គនៃមគ្គ រាប់បញ្ចូលក្នុងមគ្គ ណា នេះហៅថា សម្មាសតិ ។

( ២០៩ ) បណ្ដាមគ្គមានអង្គ ៥ នោះ សម្មាសមាធិ តើដូចម្ដេច ។ ការតំកល់ចិត្ត ។បេ។ សមាធិត្រូវ សមាធិសម្ពោជ្ឈង្គ ជាអង្គនៃមគ្គ រាប់បញ្ចូលក្នុងមគ្គ ណា នេះហៅថា សម្មាសមាធិ ។

អយំ វុច្ចតិ ទុក្ខនិរោធគាមិនី បដិបទា អវ-សេសា ធម្មា ទុក្ខនិរោធគាមិនិយា បដិបទាយ សម្បយុត្តា ។ បេ ។

[៦១០] តត្ថ កតមោ ទុក្ខសមុទយោ ។ តណ្ហា ច អវសេសា ច កិលេសា អវសេសា ច អកុ-សលា ធម្មា តីណិ ច កុសលមូលានិ សាសវានិ អវសេសា ច សាសវា កុសលា ធម្មា អយំ វុច្ចតិ ទុក្ខសមុទយោ ។

[៦១១] តត្ថ កតមំ ទុក្ខំ ។ សាសវា កុ-សលាកុសលានំ ធម្មានំ វិបាកា យេ ច ធម្មា កិរិ-យា នេវ កុសលា នាកុសលា ន ច កម្មវិបាកា សព្វញ្ច រូបំ ឥទំ វុច្ចតិ ទុក្ខំ ។

[៦១២] តត្ថ កតមោ ទុក្ខនិរោធោ ។ តណ្ហា-យ ច អវសេសានញ្ច កិលេសានំ អវសេសានញ្ច អកុសលានំ ធម្មានំ តិណ្ណញ្ច កុសលមូលានំ សាសវានំ អវសេសានញ្ច សាសវានំ កុសលានំ ធម្មានំ បហានំ អយំ វុច្ចតិ ទុក្ខនិរោធោ ។



នេះហៅថា ទុក្ខនិរោធគាមិនីបដិបទា ពួកធម៌ដ៏សេសដែលសម្បយុត្ត ដោយទុក្ខនិរោធគាមិនីបដិបទា (ក៏ហៅថា ទុក្ខនិរោធគាមិនីបដិបទាដែរ) ។ បេ ។

[៦១០] បណ្តាសច្ចៈទាំង ៤ នោះ ទុក្ខសមុទ័យ តើដូចម្តេច ។ តណ្ហាក្តី ពួកកិលេសដ៏សេសក្តី ពួកអកុសលធម៌ដ៏សេសក្តី ពួកកុសល-មូលទាំង ៣ ប្រព្រឹត្តទៅជាមួយនឹងអាសវៈក្តី ពួកកុសលធម៌ ប្រព្រឹត្តទៅជាមួយនឹងអាសវៈដ៏សេសក្តី នេះហៅថា ទុក្ខសមុទ័យ ។

[៦១១] បណ្តាសច្ចៈទាំង៤ នោះ ទុក្ខ តើដូចម្តេច ។ ពួកវិបាក នៃកុសលធម៌និងអកុសលធម៌ទាំងឡាយ ប្រព្រឹត្តទៅជាមួយនឹងអាសវៈក្តី ទាំងពួកធម៌ណា ដែលជាកិរិយា មិនមែនកុសល មិនមែនអកុសល មិនមែនកម្មវិបាកក្តី រូបទាំងអស់ក្តី នេះហៅថា ទុក្ខ ។

[៦១២] បណ្តាសច្ចៈទាំង ៤ នោះ ទុក្ខនិរោធ តើដូចម្តេច ។ ការលះបង់នូវតណ្ហាក្តី នូវពួកកិលេសដ៏សេសក្តី នូវពួកអកុសលធម៌ដ៏សេសក្តី នូវពួកកុសលមូលទាំង ៣ ប្រព្រឹត្តទៅជាមួយនឹងអាសវៈក្តី នូវពួកកុសលធម៌ ប្រព្រឹត្តទៅមួយនឹងអាសវៈដ៏សេសក្តី នេះហៅថា ទុក្ខនិរោធ ។

(២១៣) តត្ថ កតមា ទុក្ខនិរោធគាមិនី បដិបទា ។ ឥធ ភិក្ខុ យស្មឹ សមយេ លោកុត្តរំ ឈានំ ភាវេតិ និយ្យានិកំ អបចយគាមឹ ទិដ្ឋិគតានំ បហានាយ បឋមាយ ភូមិយា បត្តិយា វិវិច្ចេវ កាមេហិ ។បេ។ បឋមំ ឈានំ ឧបសម្បជ្ជ វិហរតិ ទុក្ខាបដិបទំ ទន្ធាភិញ្ញំ តស្មឹ សមយេ បញ្ចង្គិកោ មគ្គោ ហោតិ សម្មាទិដ្ឋិ សម្មាសង្កប្បោ សម្មាវាយាមោ សម្មាសតិ សម្មាសមាធិ អយំ វុច្ចតិ ទុក្ខនិរោធគាមិនី បដិបទា អវសេសា ធម្មា ទុក្ខនិរោធគាមិនិយា បដិបទាយ សម្បយុត្តា ។

(២១៤) ចត្តារិ សច្ចានិ ទុក្ខំ ទុក្ខសមុទយោ ទុក្ខនិរោធោ ទុក្ខនិរោធគាមិនី បដិបទា ។

(២១៥) តត្ថ កតមោ ទុក្ខសមុទយោ ។ តណ្ហា អយំ វុច្ចតិ ទុក្ខសមុទយោ ។



(២១៣) បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខនិរោធគាមិនីបដិបទា តើដូចម្ដេច ។ សម័យណា ភិក្ខុក្នុងសាសនានេះ ចម្រើនលោកុត្តរជ្ឈាន ជានិយ្យានិកៈ ដល់នូវការមិនសន្សំភពទៀតឡើង ដើម្បីលះទិដ្ឋិទាំងឡាយ ដើម្បីដល់នូវបឋមភូមិ ស្ងប់ស្ងាត់ចាកកាមទាំងឡាយ ។បេ។ ក៏បានដល់បឋមជ្ឈាន ជាទុក្ខាបដិបទាទន្ធាភិញ្ញា សម័យនោះ មគ្គមានអង្គ ៥ គឺ សម្មាទិដ្ឋិ សម្មាសង្កប្បៈ សម្មាវាយាមៈ សម្មាសតិ សម្មាសមាធិ ក៏កើតមាន នេះហៅថា ទុក្ខនិរោធគាមិនីបដិបទា ពួកធម៌សេស ដែលសម្បយុត្តដោយទុក្ខនិរោធគាមិនីបដិបទា (ក៏ហៅថា ទុក្ខនិរោធគាមិនីបដិបទាដែរ) ។

(២១៤) សច្ចៈ ៤ គឺ ទុក្ខ ១ ទុក្ខសមុទ័យ ១ ទុក្ខនិរោធ ១ ទុក្ខនិរោធគាមិនីបដិបទា ១ ។

(២១៥) បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខសមុទ័យ តើដូចម្ដេច ។ តណ្ហា នេះហៅថា ទុក្ខសមុទ័យ ។

(៦១៦) តត្ថ កតមំ ទុក្ខំ ។ អវសេសា ច កិលេសា អវសេសា ច អកុសលា ធម្មា តីណិ ច កុសលមូលានិ សាសវានិ អវសេសា ច សាសវា កុសលា ធម្មា សាសវា ច កុសលាកុសលានំ ធម្មានំ វិបាកា យេ ច ធម្មា កិរិយា នេវ កុសលា នាកុសលា ន ច កម្មវិបាកា សព្វញ្ច រូបំ ឥទំ វុច្ចតិ ទុក្ខំ ។

(៦១៧) តត្ថ កតមោ ទុក្ខនិរោធោ ។ តណ្ហាយ បហានំ អយំ វុច្ចតិ ទុក្ខនិរោធោ ។

(៦១៨) តត្ថ កតមា ទុក្ខនិរោធគាមិនី បដិបទា ។ ឥធ ភិក្ខុ យស្មឹ សមយេ លោកុត្តរំ ឈានំ ភាវេតិ និយ្យានិកំ អបចយគាមឹ ទិដ្ឋិគតានំ បហានាយ បឋមាយ ភូមិយា បត្តិយា វិវិច្ចេវ កាមេហិ ។បេ។ បឋមំ ឈានំ ឧបសម្បជ្ជ វិហរតិ ទុក្ខាបដិបទំ ទន្ធាភិញ្ញំ តស្មឹ សមយេ ផស្សោ ហោតិ ។បេ។ អវិក្ខេបោ ហោតិ អយំ វុច្ចតិ ទុក្ខនិរោធគាមិនី បដិបទា ។បេ។





(៦១៦) បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខ តើដូចម្ដេច ។ ពួកកិលេសដ៏សេសក្ដី ពួកអកុសលធម៌ដ៏សេសក្ដី ពួកកុសលមូលទាំង ៣ ប្រព្រឹត្តទៅជាមួយនឹងអាសវៈក្ដី ពួកកុសលធម៌ ប្រព្រឹត្តទៅជាមួយនឹងអាសវៈដ៏សេសក្ដី ពួកវិបាកនៃកុសលធម៌ និងអកុសលធម៌ទាំងឡាយ ប្រព្រឹត្តទៅជាមួយនឹងអាសវៈក្ដី ទាំងពួកធម៌ណា ដែលជាកិរិយា មិនមែនកុសល មិនមែនអកុសល មិនមែនកម្មវិបាកក្ដី រូបទាំងអស់ក្ដី នេះហៅថា ទុក្ខ ។

(៦១៧) បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខនិរោធ តើដូចម្ដេច ។ កិរិយាលះបង់នូវតណ្ហា នេះហៅថា ទុក្ខនិរោធ ។

(៦១៨) បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខនិរោធគាមិនីបដិបទា តើដូចម្ដេច ។ សម័យណា ភិក្ខុក្នុងសាសនានេះ ចម្រើនលោកុត្តរជ្ឈាន ជានិយ្យានិកៈ ដល់នូវការមិនសន្សំកពូនឡើង ដើម្បីលះបង់ទិដ្ឋិទាំងឡាយ ដើម្បីដល់នូវបឋមភូមិ ស្ងប់ស្ងាត់ចាកកាមទាំងឡាយ ។បេ។ ក៏បានដល់នូវបឋមជ្ឈាន ជាទុក្ខាបដិបទាទន្ធាភិញ្ញា សម័យនោះ ផស្សៈក៏កើតមាន ។បេ។ សេចក្ដីមិនរាយមាយ ក៏កើតមាន នេះហៅថា ទុក្ខនិរោធគាមិនីបដិបទា ។បេ។

(៦៥៩) តត្ថ កតមោ ទុក្ខសមុទយោ ។ តណ្ហា ច អវសេសា ច កិលេសា អវសេសា ច អកុសលា ធម្មា តីណិ ច កុសលមូលានិ សាសវានិ អវសេសា ច សាសវា កុសលា ធម្មា អយំ វុច្ចតិ ទុក្ខសមុទយោ ។

(៦៦០) តត្ថ កតមំ ទុក្ខំ ។ សាសវា កុសលាកុសលានំ ធម្មានំ វិបាកា យេ ច ធម្មា កិរិយា នេវ កុសលា នាកុសលា ន ច កម្មវិបាកា សព្វញ្ច រូបំ ឥទំ វុច្ចតិ ទុក្ខំ ។

(៦៦១) តត្ថ កតមោ ទុក្ខនិរោធោ ។ តណ្ហាយ ច អវសេសានញ្ច កិលេសានំ អវសេសានញ្ច អកុសលានំ ធម្មានំ តិណ្ណញ្ច កុសលមូលានំ សាសវានំ អវសេសានញ្ច សាសវានំ កុសលានំ ធម្មានំ បហានំ អយំ វុច្ចតិ ទុក្ខនិរោធោ ។

(៦៦២) តត្ថ កតមា ទុក្ខនិរោធគាមិនី បដិបទា ។ ឥធ ភិក្ខុ យស្មឹ សមយេ លោកុត្តរំ ឈានំ ភាវេតិ និយ្យានិកំ អបចយគាមឹ ទិដ្ឋិគតានំ បហានាយ បឋមាយ ភូមិយា បត្តិយា វិវិច្ចេវ កាមេហិ ។បេ។



(៦៥៩) បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខសមុទ័យ តើដូចម្ដេច ។ តណ្ហាក្ដី ពួកកិលេសដ៏សេសក្ដី ពួកអកុសលធម៌ដ៏សេសក្ដី ពួកកុសលមូលទាំង ៣ ប្រព្រឹត្តទៅជាមួយនឹងអាសវៈក្ដី ពួកកុសលធម៌ ប្រព្រឹត្តទៅជាមួយនឹងអាសវៈដ៏សេសក្ដី នេះហៅថា ទុក្ខសមុទ័យ ។

(៦៦០) បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខ តើដូចម្ដេច ។ ពួកវិបាកនៃធម៌ទាំងឡាយ ជាកុសលនិងអកុសល ប្រព្រឹត្តទៅជាមួយនឹងអាសវៈក្ដី ទាំងពួកធម៌ណា ដែលជាកិរិយា មិនមែនកុសល មិនមែនអកុសល មិនមែនកម្មវិបាកក្ដី រូបទាំងអស់ក្ដី នេះហៅថា ទុក្ខ ។

(៦៦១) បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខនិរោធ តើដូចម្ដេច ។ កិរិយាលះ នូវតណ្ហាក្ដី នូវពួកកិលេសដ៏សេសក្ដី នូវពួកអកុសលធម៌ដ៏សេសក្ដី នូវពួកកុសលមូលទាំង ៣ ប្រព្រឹត្តទៅជាមួយនឹងអាសវៈក្ដី នូវពួកកុសលធម៌ ប្រព្រឹត្តទៅជាមួយនឹងអាសវៈដ៏សេសក្ដី នេះហៅថា ទុក្ខនិរោធ ។

(៦៦២) បណ្ដាសច្ចៈទាំង ៤ នោះ ទុក្ខនិរោធគាមិនីបដិបទា តើដូចម្ដេច ។ សម័យណា ភិក្ខុក្នុងសាសនានេះ ចម្រើនលោកុត្តរជ្ឈាន ជានិយ្យានិកៈ ដល់នូវការមិនសន្សំក្ខន្ធឡើង ដើម្បីលះបង់ទិដ្ឋិទាំងឡាយ ដើម្បីដល់នូវបឋមភូមិ ស្ងប់ស្ងាត់ចាកកាមទាំងឡាយ ។បេ។

បឋមំ ឈានំ ឧបសម្បជ្ជ វិហរតិ ទុក្ខាបដិបទំ ទន្ធាភិញ្ញំ តស្មឹ សមយេ ផស្សោ ហោតិ ។បេ។ អវិក្ខេបោ ហោតិ អយំ វុច្ចតិ ទុក្ខនិរោធគាមិនី បដិបទា ។

អភិធម្មភាជនីយំ ។

(២២៣) ចត្តារិ អរិយសច្ចានិ ទុក្ខំ អរិយសច្ចំ ទុក្ខសមុទយោ អរិយសច្ចំ ទុក្ខនិរោធោ អរិយសច្ចំ ទុក្ខនិរោធគាមិនី បដិបទា អរិយសច្ចំ ។ ចតុន្នំ អរិយសច្ចានំ កតិ កុសលា កតិ អកុសលា កតិ អព្យាកតា ។បេ។ កតិ សរណា កតិ អរណា ។

(២២៤) សមុទយសច្ចំ អកុសលំ មគ្គសច្ចំ កុសលំ និរោធសច្ចំ អព្យាកតំ ទុក្ខសច្ចំ សិយា កុសលំ សិយា អកុសលំ សិយា អព្យាកតំ ។ ទ្វេ សច្ចា សិយា សុខាយ វេទនាយ សម្បយុត្តា សិយា អទុក្ខមសុខាយ វេទនាយ សម្បយុត្តា និរោធសច្ចំ ន វត្តព្វំ សុខាយ វេទនាយ សម្បយុត្តន្តិបិ ទុក្ខាយ វេទនាយ សម្បយុត្តន្តិបិ អទុក្ខមសុខាយ វេទនាយ សម្បយុត្តន្តិបិ ទុក្ខសច្ចំ សិយា សុខាយ វេទនាយ សម្បយុត្តំ សិយា ទុក្ខាយ វេទនាយ សម្បយុត្តំ សិយា អទុក្ខមសុខាយ វេទនាយ សម្បយុត្តំ



ក៏បានដល់នូវបឋមជ្ឈាន ជាទុក្ខាបដិបទាទន្ធាភិញ្ញា សម័យនោះ ផស្សៈក៏កើតមាន ។បេ។ សេចក្តីមិនរាយមាយ ក៏កើតមាន នេះហៅថា ទុក្ខនិរោធគាមិនីបដិបទា ។

ចប់ អភិធម្មភាជនីយ ។

(២២៣) អរិយសច្ច ៤ គឺ ទុក្ខអរិយសច្ច ១ ទុក្ខសមុទយអរិយសច្ច ១ ទុក្ខនិរោធអរិយសច្ច ១ ទុក្ខនិរោធគាមិនីបដិបទាអរិយសច្ច ១ ។ បណ្តាអរិយសច្ចទាំង ៤ អរិយសច្ច ជាកុសលប៉ុន្មាន ជាអកុសលប៉ុន្មាន ជាអព្យាក្រឹតប៉ុន្មាន ។បេ។ ប្រកបដោយសង្គ្រាមប៉ុន្មាន មិនមានសង្គ្រាមប៉ុន្មាន ។

(២២៤) សមុទយសច្ច ជាអកុសល មគ្គសច្ច ជាកុសល និរោធសច្ច ជាអព្យាក្រឹត ទុក្ខសច្ច ជាកុសលក៏មាន ជាអកុសលក៏មាន ជាអព្យាក្រឹតក៏មាន ។ សច្ចៈ ២ ប្រកបដោយសុខវេទនាក៏មាន ប្រកបដោយអទុក្ខមសុខវេទនាក៏មាន និរោធសច្ច មិនគួរពោលថា ប្រកបដោយសុខវេទនាផង ថា ប្រកបដោយទុក្ខវេទនាផង ថា ប្រកបដោយអទុក្ខមសុខវេទនាផងឡើយ ទុក្ខសច្ចៈ ប្រកបដោយសុខវេទនាក៏មាន ប្រកបដោយទុក្ខវេទនាក៏មាន ប្រកបដោយអទុក្ខមសុខវេទនាក៏មាន

សិយា ន វត្តព្វំ សុខាយ វេទនាយ សម្បយុត្តន្តិបិ ទុក្ខាយ វេទនាយ សម្បយុត្តន្តិបិ អទុក្ខមសុខាយ វេទនាយ សម្បយុត្តន្តិបិ ។ ទ្វេ សច្ចា វិបាកធម្មធម្មា និរោធសច្ចំ នេវ វិបាកនវិបាកធម្មធម្មំ ទុក្ខសច្ចំ សិយា វិបាកំ សិយា វិបាកធម្មធម្មំ សិយា នេវ វិបាកនវិបាកធម្មធម្មំ ។ សមុទយសច្ចំ អនុបាទិន្នុបាទានិយំ ទ្វេ សច្ចា អនុបាទិន្នានុបាទានិយា ទុក្ខសច្ចំ សិយា ឧបាទិន្នុបាទានិយំ សិយា អនុបាទិន្នុបាទានិយំ ។ សមុទយសច្ចំ សង្កិលិដ្ឋសង្កិលេសិកំ ទ្វេ សច្ចា អសង្កិលិដ្ឋាសង្កិលេសិកា ទុក្ខសច្ចំ សិយា សង្កិលិដ្ឋសង្កិលេសិកំ សិយា អសង្កិលិដ្ឋសង្កិលេសិកំ ។ សមុទយសច្ចំ សវិតក្កសវិចារំ និរោធសច្ចំ អវិតក្កអវិចារំ មគ្គសច្ចំ



មិនគួរពោលថា ប្រកបដោយសុខវេទនាផង ថា ប្រកបដោយទុក្ខវេទនាផង ថា ប្រកបដោយអទុក្ខមសុខវេទនាផងក៏មាន ។ សច្ចៈ ២ មានវិបាកធម៌ជាប្រក្រតី និរោធសច្ច មិនមែនជាវិបាក ទាំងមិនមែនមានវិបាកធម៌ជាប្រក្រតី ទុក្ខសច្ច ជាវិបាកក៏មាន មានវិបាកធម៌ជាប្រក្រតីក៏មាន មិនមែនជាវិបាក ទាំងមិនមែនមានវិបាកធម៌ជាប្រក្រតីក៏មាន ។ សមុទយសច្ច ជាធម៌ដែលកម្មប្រកបដោយកិលេស មានតណ្ហាជាដើមមិនបានកាន់យកហើយ តែជាប្រយោជន៍ដល់ឧបាទាន សច្ចៈ ២ ជាធម៌ដែលកម្មប្រកបដោយកិលេស មានតណ្ហាជាដើមមិនបានកាន់យកហើយ ទាំងមិនជាប្រយោជន៍ដល់ឧបាទាន ទុក្ខសច្ច ជាធម៌ដែលកម្មប្រកបដោយកិលេស មានតណ្ហាជាដើមកាន់យកហើយ ទាំងជាប្រយោជន៍ដល់ឧបាទានក៏មាន ជាធម៌ដែលកម្មប្រកបដោយកិលេស មានតណ្ហាជាដើមមិនបានកាន់យកហើយ តែជាប្រយោជន៍ដល់ឧបាទានក៏មាន ។ សមុទយសច្ច ជាធម៌សៅហ្មង ទាំងគួរដល់សេចក្តីសៅហ្មង សច្ចៈ ២ ជាធម៌មិនសៅហ្មង ទាំងមិនគួរដល់សេចក្តីសៅហ្មង ទុក្ខសច្ច ជាធម៌សៅហ្មង ទាំងគួរដល់សេចក្តីសៅហ្មងក៏មាន ជាធម៌មិនសៅហ្មង តែគួរដល់សេចក្តីសៅហ្មងក៏មាន ។ សមុទយសច្ច ជាធម៌ប្រព្រឹត្តទៅជាមួយនឹងវិតក្កៈ ទាំងជាមួយនឹងវិចារៈ និរោធសច្ច ជាធម៌មិនមានវិតក្កៈ ទាំងមិនមានវិចារៈ មគ្គសច្ច

